៣៨៧. បំពេរព្រះបាទនរបតី សូរសត្វឥន្ទ្រីយ
ស្នៀងនូវសត្វម្រឹគា ។

៣៨៨. ភាងសីហាគជសីហសិង្ហខ្លា គោតោ[1] មហិង្សា
ដើរត្រេចរង្គាត់ថ្លួចង្រិក ។

៣៨៩. បក្សីសូរសត្វពៅមក ទិញ្ញ អាអូតអក[2]
ខ្លែងស្រាកនូវខ្លែងខ្លោច[3]មាន ។

៣៩០. ទាំងពោចសំពោចស្វាស្វាន ក្អែកក្រៃក្រុសសាំន
អនេកនូវសត្វនានា ។

៣៩១. ខ្យងហៀនចក្កចន់ជលកា[4] មច្ឆកររូមភា
ភោរៃររូសូរសោតសម ។

៣៩២. តូរ្យតន្ត្រីយត្រៃបីប្រគំ ព្រះបាទជ័នុត្តម
សម្ដេចនាគាយនិទ្រា ។

៣៩៣. រូបឯកអង្គអគ្គជាយា ដូចសុរ្យោភា
ទន្ទឹមមណ្ឌលព្រះចន្ទ្រ ។

៣៩៤. រីព្រះលក្សទ្រង់នូវកៅទណ្ឌ ទុក្ខភាងកុខ័ន
ករកាន់លំពែងចាំនៅ ។

៣៩៥. នាគូររភាស្រមឯក្រៅ គយឃ្លាំឃ្លាឃ្លៅ
ប្រយ័ត្នអម្រឹតយាំឃ្លង ។

៣៩៦. កូខិនខ្សឹកខ្សួលសូរសង ទូលក្លាងយំផង
ព្រះលក្ស្មអនុជចក្រី ។

៣៩៧. ទុនាងកង្ហីងព្រះធរណី សោតសាងបារមី
តបះអនេកក្រាស់ក្រៃ ។

៣៩៨. ទើបបានជាព្រះភមទេពីថ្លៃ មកទ្រទ្រង់ផ្ទៃ -
ក្រោមភាងធានីនេះណា ។

៣៩៩. នេះម្ដងម្ដេចព្រះភមា ស្ដេចពុំបានជា
តស្នូរជ័ផ្ទៃក្រោមវិញ ។

៤០០. សមនាងព្រះធរណីមិញ ពុំបានបំពេញ
សំណាងសំណូមប្រាថ្នា ។

៤០១. ហេតុអំពើពៀរវេរា ទុក្ខវិតកម្មា
នៃនាងកង្ហីងព្រះធរណី ។

៤០២. ឯងឲ្យព្រះបាទនរបតី ចរចាកចេញពី
បុរីនគរស្រីអយុធ្យា ។

(1) MBN : got go
(2) RIB : ā-ūt ūḷa
(3) RIB : khlaeṅ khloc
(4) RIB : jalikā

៦០៣. ព្រះលក្ស ព្រះរុក្ខភង្គា   ចាំយាមសាលា
ក៏ពុំនិទ្រានៅនិត្យ ។

៦០៤. ព្រះលក្សមានមោហានមិទ្ធ[1]   មួយចូលចុះស្និត
សង្កត់នៃព្រះមនិទ្រីយ៍[2] ។

៦០៥. ឈ្មោះនាងនិទ្រាទេវី   គ្របចក្ខុន្ទ្រីយ
ស្រូបបុបព្រះនេត្រក្សត្រថ្លៃ ។

៦០៦. ស្ដេចបីនៅចង់ផ្ទៃក្រែ   មោះព្រះហឫទ័យ
ពិជ័យមានៈមោហា ។

៦០៧. ស្ដេចហៅនៃនាងនិទ្រា   ទេពីឧប្បា-
តិកដើរចេញមកកាន់អញ ។

៦០៨. ក្សណនោះនាងនិទ្រាមិញ   ផ្លោះផ្លាកចាកចេញ
មកស្ថិតចំពោះព្រះភក្ត្រ ។

៦០៩. ទូលថាបតិត្រនរបលក្ស[3]   ខ្ញុំប្រែលីអ្នក
នូវនឿយពុំបាននិទ្រា ។

៦១០. ប្រាវម្ភៃក្រែងអ្នកយាត្រា   និងព្រះជេស្ឋា
ក៏កើតអង្សុកពុំក្សាន្ត ។

៦១១. ហេតុនោះខ្ញុំចូលមកក្កាន   ឲ្យព្រះអង្គបាន
សំរានព្រះកាយពលណា ។

៦១២. ព្រះលក្សស្ដេចប្ដេជ្ញាថា   ហៃនាងនិទ្រា
តាំថ្ងៃនេះទៅនាងចាំ ។

៦១៣. អដ្ឋងបានជួនជល្លាប់ឆ្នាំ   អញប្ដេជ្ញាចាំ
កុំមានចំណាប់និទ្រា ។

៦១៤. ទោះទាំងអាហារភោគ្គា   អញពុំប្រាថ្នា
ចិត្តចេតនាសន្និដ្ឋាន ។

៦១៥. ឲ្យប្រាសនិភាសវិលវប្លាន   អង្គអញក្សេមក្សាន្ត
ចំរើននូវកាយពលស្កល់ ។

៦១៦. ឲ្យអង្គអញទ្រង់ឫទ្ធិពល   និរភោគនិមិល
សកលមនោសយនា ។

៦១៧. ដឹងនោះនាងនាថនិទ្រា   ទេពីកល្យាណ៍
ក៏ព្រមព្រះហឫទ័យថ្វាយ ។

៦១៨. ចំរើនព្រះពរពន្ទ្រាយ[4]   ព្រះលក្សប្រាជ្ញប្រាយ
ប្រាកដជាប់ដូចព្រះចិន្តា ។

(1) MBN et RIB : mohinamiddh
(2) RIB : braḥ nidrī
(3) RIB : narapat(i) laks(ṇ)
(4) RIB : baṇṇarāy (pas.)

៦១៩. ស្តេចនិរាហារភោក្តា　　និរនេសនិទ្រា
ក៏ក្រេបព្រះអង្គអភិរម្យ ។

៦២០. ឯស្តេចឯងដូចទេពសាងសម[1]　　នៅសុទ្ធាវាសព្រហ្ម
ប្រុះប្រិមប្រតិភិក្ខា ។

៦២១. លុះព្រឹកស្រាងស្រេចទិវា　　ព្រះសូរ្យយាត្រា
ឧទ័យពីបូព៌ទិសឡើង ។

៦២២. ទើបព្រះនារាយរាមឫទ្ធិថ្កើង　　ស្តែងស្តេចតើនឡើង
ដំរះព្រះអង្គសោភា ។

៦២៣. ស្ងួតសារស្តុតីវន្ទា　　ដោយយ៉ៃសយសាស្ត្រា
មហាឫសីសិទ្ធិក្រម[2] ។

៦២៤. ស្រេចស្តេចចេញចាកដ៏អាស្រម　　ថ្វាត់ថ្វាយបង្គំ
ក្រាបលាព្រះមហាឫសី ។

៦២៥. ចរចុះលុះដល់ឆ្នេរនទី　　អស់ឫសីមុនី
លន្លង់ស្រណោះមហាក្សត្រ ។

៦២៦. សឹងសោយសោកពិលាបក្តាត់　　ហឫទ័យក្តួចកាត់
ស្រឡាញ់ពុំចង់ឃ្លាតឃ្លា ។

៦២៧. ចុះទៅដល់ឆ្នេរគង្គា　　ដោរជលនេត្រា[3]
ទីទៃអាល័យដ៏ព្រះអង្គ ។

៦២៨. រីព្រះរាមសូរិយោពង្ស　　ពន្លរត្នដ៏ឧត្តុង្គ
ស្តេចចង់ត្រៃអាលយាត្រា ។

៦២៩. ដាំហៅក្បួនចូរមា　　ផ្ទាត់នាំនាវា
ចំលងទៅនេះដ៏ឥឡូវ ។

៦៣០. ក្បួនទូលពាល់ព្រះភូ-　　ដរជាខ្ញុំនូវ
សូមពានអញ្ជើញព្រះអង្គ ។

៦៣១. ទាំងបីមហាក្សត្រវរវង្ស　　វិសេសស្តេចគង់
សំពាននៅស្ពានអញខ្ញុំ ។

៦៣២. ខ្ញុំបំរើប្រតិបត្តិបង្គំ　　ព្រះបាទដ៏ឧត្តម
ទាំងបីព្រះអង្គក្សត្រថ្លៃ ។

៦៣៣. ខ្ញុំពុំឲ្យព្រួយព្រះហឫទ័យ　　ពេលឯស្តេចគង់ញូ
ខ្សានពិមានត្រីក្សា ។

៦៣៤. ពោះមានសត្រូវពាធា　　ងារខ្ញុំងាងា
នូវខ្លាញសត្រូវនោះបង់ ។

(1) MBN : debv sansaṃ
(2) RIB : riddhi kram
(3) MBN : jūt jalanetrā
RIB : jūn jalanetrā

៤៣៥. មួយសោតពោះស្ដេចចង់ថ្ងៃ ស្បែកជើងខ្ញុំខ្ពង់
ពីដូចសំពីស្លុកចេក ។

៤៣៦. យកថែនដីសិលាសំរេច ជាទីមនោហរស្រេច
ក្រណាទិព្វទេពបីបន្ទំ ។

៤៣៧. មានតាំងស្វេតឆត្រអភិរម្យ ខ្ពើយខ្ពស់ពៃព្រាព្រំ
រាំងននពិតាននូវកំរាល[1] ។

៤៣៨. មានតាំងទុដារសអាហារ ច្រើនពណ៌ប្រការ
ត្រកាលអនេកនានា ។

៤៣៩. មានឃ្មុំត្រីសាច់សាក្លា រុក្ខមូលបុផ្ផា
អធិការដែលដង ។

៤៤០. ពោះតាំងទេពតាស្ពឹកផង ពុំអាចដំកន្លង
ប្រដូចនូវនន្ទុឧទ្យាន ។

៤៤១. តាំងទឹកស្រះស្រង់ក្បេរមកុដ្ឋ ស្រះផ្កាមើលមាន
បទុមក្រមុទឧប្បល ។

៤៤២. សូមពានអញ្ជើញស្ដេចដល់ ស្ពឹកពានជ័យមណ្ឌល
តំបន់អញខ្ញុំមួយថ្ងៃ ។

៤៤៣. ព្រះស្ដាប់សួរសព្ទសម័យ[2] កុមារស្ដេចថៃ្ង
អញ្ជើញព្រះអង្គពនេចរ ។

៤៤៤. ជាវៃយាកុមារអញអរ បាស្នោះស្មានស[3]
គួរយោងអញឈប់ដោយបា ។

៤៤៥. គឺនោះនាយើងយាត្រា ដោយចិត្តចិន្ដា
នូវចង់ចំរើនឫទ្ធីពារ ។

៤៤៦. ចតុទសរស្សពីរឯចរ ធូលផ្កានព្រះនគរ
បុរីរត្នភពអយុធ្យា ។

៤៤៧. បើបរិបូណ៌យើងយាត្រា វិឃមកយល់បា
ជ័ដាមយាមិត្រយោង ។

៤៤៨. កុមារស្ដាប់ព្រះបន្ទូលផង ស្រេចហើយចម្លង
តាំងពីព្រះអង្គលុះដល់ត្រើយ ។

៤៤៩. ព្រះអង្គចុះស្រង់ស្រេចហើយ តាំងស្ទួរស្មុងម្ដើយ
វិះរូសក្រសាលយាត្រា ។

៤៥០. ព្រះដំណើរវៃយាកុមារបា ជិតដើមមាគ៌ា
បញ្ញាញនូវដើរដោយបទ ។

(1) MBN : nūv bitān braḥ krāl
(2) RIB : sramai
(3) RIB : sar

៤៥១. យើងនូវទៅជិតត្រកួនបតិត សាងសីលពារព្រត
ព្រហ្មា[1] វរនគោចរ ។

៤៥២. ក្ងីនក្រួញក្រាបកាយករ បង្គំព្រះភូធរ
ក៏ទូលដោយដានមាគ៌ា ។

៤៥៣. បពិត្រជម្ចាយផ្លូវណា ស្ដេចនឹងយាត្រា
អំពីនេះទៅទុរគម ។

៤៥៤. សឹងមានមុនីនាជ័យអាស្រម ស្រះស្រង់ធារធំ
អំពល់នូវជលគង្គា ។

៤៥៥. ខ្ញុំដឹងរឿងរដើមមាគ៌ា សុះសព្វព្រំក្បួ
សិលានូវជ្រុំង ជ្រោយជ្រែក ។

៤៥៦. ខ្ញុំដឹងរឿងរបើរសព្វលង្វែក ផ្លូវបត់ផ្លូវបែក
ដំរែកគិរីគោបា ។

៤៥៧. បោញបោងដកឈ្លូងគង្គា បឹងបួរបញ្ចា
ជន្លោះជ្រលងដងធារ ។

៤៥៨. ច្រាំងច្រាក់[2] ថ្មថ្នាក់ថ្មល់ថ្នារ សឹងសិលាជា
រអាដររអិលជ្រោះភ្នំ ។

៤៥៩. សូមទានស្ដេចកុំប្រារព្ធ ផ្លូវនោះងារខ្ញុំ
នូវនាំព្រះអង្គយាត្រា ។

៤៦០. ខ្ញុំដឹងផ្លូវកាចផ្លូវជា ផ្លូវមានម្រឹគា
សហ័សសាហាវយង់ឃ្នង ។

៤៦១. ខ្ញុំនូវតាមរួមរក្សាគ្រង ផ្លាញអស់ម្រឹគផង
មកបៀតប្រមាថជ័យព្រះអង្គ ។

៤៦២. ខ្ញុំនូវយកខ្លួនខ្ញុំប៉ុប៉ង់ ជានាការគ្រង
អម្រឹគណាមកពាធា ។

៤៦៣. ពោះបីមានសត្វហឹង្សា ខ្ញុំយកនូវអាត្មា
ចេញផ្ចាញសត្រូវនោះបង់ ។

៤៦៤. ខ្ញុំពុំឲ្យជិតដល់ព្រះអង្គ ពោះពាល់ពិសយង់
ទាំងក្អែបនូវខ្មួយសត្វកាច ។

៤៦៥. ទុយភោមរព្យាមនូវរបាច ស៊ុចសោតនូវមមាច
មមង់នូវមូសស្រួយដងៃ ។

៤៦៦. ខ្ញុំពុំឲ្យជិតដល់មានបោង ខ្ញុំនៅរក្សាគ្រង
ទាំងបីព្រះអង្គវរលក្ខណ៍ ។

(1) MBN : prahā
RIB : brahā
(2) RIB : prāk'

៤៦៧. ពោះនូវខ្ញុំពោះនូវដើរពោះនូវដាក់ ពោះនូវធ្វើព្រះដំណាក់
ដំណែងដំណើរមាគ៌ា ។

៤៦៨. ខ្ញុំនាំពលពាលយោធា តាមពែងរក្សា
លុះដល់សំនៅស្តេចស្តោះ ។

៤៦៩. ស្តេចស្តាប់កូខិនទូលស្តោះ ពាក្យពិតពិរោះ
នូវគុណសប្បុរសមហិមា ។

៤៧០. ទើបស្តេចបន្ទូលត្រាស់ថា ហៃកូខិនអា
មហាមានគុណពិតប្រមាណ ។

៤៧១. សមអាជាញាតិពីបុរាណ អញអធិស្ឋាន
អាឯងស្មើឯកឧទរ ។

៤៧២. នាំយើងចេញចាកព្រះនគរ ត្រេចត្រៃព្រៃពនចរ
មកជួបនឹងអានេះតិឡូវ ។

៤៧៣. សប្បុរសគុណអាតិតគូ គិតអ្នកឯណានូវ
មកធ្វើមគុណអាដ៏កន្លង ។

៤៧៤. រីអង្គអញឯងជាផ្សេង អណ្តាប់អាហោង
ព្រះលក្ខណាប្អូនពៅអា ។

៤៧៥. រីឯរត្នភាជសីតា នេះជាថ្លៃ(1) អា
មហាបុរាណវរមិត្រ ។

៤៧៦. ទាំងប្អូនស្មើខ្លួនស្មើចិត្ត ស្មើឯកជីវិត
កុំគិតជាអង្គទីទៃគ្នា ។

៤៧៧. ពោះបីអញនូវមានទុក្ខា ឈឺជរដល់អា
អាកើតនិមិត្ត(2) តុំសុខ ។

៤៧៨. ពោះបីអាឯងមានទុក្ខ អញតុំស្រែណុក
រំដួលក្តុងចិត្តចិន្តា ។

៤៧៩. គេដិះថ្កាំបេ្តជ្ញាថា ពាក្យពិតសត្យា
សច្ចាអធិស្ឋានដូរ្ជង ។

៤៨០. ពោះបីញាតិវង្សាអាឯង ស្មើញាតិអញហោង
នូវអស់ទាំងសាច់សន្តាន ។

៤៨១. រីវង្សាអញគោតសឹងមាន អញអធិស្ឋាន
ស្មើញាតិសន្តានអាហោង ។

៤៨២. ប្អូនអញទាំងពីរគោតត្រង ភ្ញៀពិភពផង
ទម្រន់ក្នុងក្រោមអយុធ្យា ។

៤៨៣. រីកូខិនឯងគោតអា ជាភាជព្រឹក្សា
រក្សាបរិវេណព្រះព្រៃ ។

(1) RIB : thlai
(2) RIB : nirmitr

៤៨៤. អស់ញាតិជាសោតសព្វថ្ងៃ ក្សេមក្សាន្តហឫទ័យ
អាស្រ័យតុំនាក់ជាហោង ។

៤៨៥. នេះតិប្បូរជានូវជង់ទៅជង់ អញតើនរណាគ្រង
អស់ញាតិភរិយាបុត្រា ។

៤៨៦. ជាជង់ចេញចាកឃ្លាតឃ្លា ក្រែងសត្រូវពាធា
នូវបៀនមណ្ឌលជាក្រង ។

៤៨៧. បងសូមលាជាទៅហោង ទោះម្រឹគយង់ឃ្លង
ពន្លឹកនូវយក្សហោរហៅ[1] ។

៤៨៨. បងនូវថ្លែងថ្លាញអស់សត្រូវ ដោយតេជឫទ្ធិ[illegible]
នូវឫទ្ធិសរសក្តិថ្លា ។

៤៨៩. កូខំនស្តាប់ព្រះករុណា ជិលនេត្រដាភា
សស្រាក់សញ្ជាប់សុបនៅ ។

(1) MBN : yaks cāṃ phlūv

# កណ្ឌ ទី៦

៤៩០- ឯងនោះស្ដេចលេណាទៅ ចេញចាកលំនៅ
មណ្ឌលនៃរុក្ខាជា ។

៤៩១- កាប់កាលគិម្ហន្តមាសា សៃវស្សុរយាត្រា
សម្រួមតម្គុតវិធី ។

៤៩២- វៃហាវឬតស្លួតប្រេះប្រដីពី ចែវចាំងរស្មី
ចំហាយហាហាវិដ៏រហា ។

៤៩៣- ផ្កាយផ្កាញស្រប្រស់ព្រៃព្រឹក្សា ហោយរុះផ្លែផ្កា
រស្ដោះសន្លឹកប្រួញព្រាយ ។

៤៩៤- ស្លឹកខ្លះខ្លោចខ្លះបីក្រហម ស្ប្បវស្មៅក្រៃងព្រាម
វិនាសឆ្កួរភ្លើងព្រៃជាល ។

៤៩៥- តេជះព្រះបាទភូវនាជ (1) ពង្សពោធិសម្ភារ
កំនាំទេពីលេណា ។

៤៩៦- មើលបាននៃព្រៃព្រឹក្សសាខា សងខាងមាគ៌ា
ស៊ីងប្រែត្រជាក់នឹសប្បាយ ។

៤៩៧- លូតលាស់មាលាបីបន្លាយ (2) ដុះដាលរៀបរាយ
រូបាននរបៀបអភិរម្យ ។

៤៩៨- ស្រោងស្រីងឈរឈឹងឧដ្ដំ ស្លឹកស្លោចបីត្រសុំ
ត្រសាយត្រសៀកវាតា ។

(1) RIB : bhāvanā
(2) RIB : mālā lec lāy

៥៩៩- បក់បុស្បក្លិនរសគន្ធា ឆោរឆ្អុំសោះសា
ល្អូយល្អប់ត្រឡប់ខ្ចាយខ្ចរ(1) ។

៦០០- ពោះព្រៃមធុរាមធុករ ភុមរាភុមរ
ហើរហឹងត្រេចត្រាច់ត្រឹបផ្កា ។

៦០១- សត្វដូចតន្ត្រីយសេពា ច្រៀងល្បួងដីអង្គា
ស្រដាក់(2) ព្រះព្រៃពនេចរ ។

៦០២- សូរ្យសែងឆាំងថៃងឯអម្ពរ ដូចព្រះចន្ទ្រចរ
ត្រចះក៏ពេញបូណ៌មី ។

៦០៣- ពុំអាចនឹងក្ដៅក្សត្រតាំងពី ហេតុព្រះបារមី
សម្ដេចនារាយណ៍វេលា ។

៦០៤- ស្ដេចត្រេចដោយដឹងមាគ៌ា ពៅយល់ដើមផ្កា
មានផ្កាតែមួយច្រាស់ច្រាល(3) ។

៦០៥- មានមែកនោងវល្លិវ៉ារ ផ្ការីកដ៏ត្រកាល
តែមួយ(4) នៅលើផ្កាផ្សា ។

៦០៦- ផ្កាស៊ុះជិតដើមជំព៉ា ជំព៉ាសោតផ្កា
តែមួយក៏រីកពីតំរួត(5) ។

៦០៧- លើផ្កានោងដាក់ដួត ជិតដាប់ប្រក្លូត
ក៏ដិតព្ធូនូវកេសរគន្ធ(6) ។

៦០៨- មានកន្លង់ពីរសោតសម្ពន្ធ ចុះធូលបាប់គន្ធ
ត្រឹបត្រងលំអងបុស្ប ។

៦០៩- ក្សិណនោះព្រះបាទនរបតី បញ្ញាញាណដេទី
ជាហៃបេមើលអស្ចារ្យ ។

៦១០- ឧបមាបុប្ផាពិពណ៌ ផ្កានេះគឺស្ការ(7)
ក៏ដេះកំលុងភ្លើងច្រាល ។

៦១១- រីផ្កានោងនៅកណ្ដាល ដូចស្មូពណ៌ការ
វណាយនូវមាសមានរស្មី(8) ។

(1) MBN : ap' is mārgā
l-ap' l-aṅ kesar
(2) MBN : trasāk'
(3) MBN : mān phkā tae muoy ṭa prākaṭ
--------------------------
mān maek sākhā ṭa caṃhut
sḷik slom parisuddh
prākaṭ nūv phkā crās' crāl
(4) MBN : tamruot
(5) MBN : trapak pupphā pī tamruot
(6) RIB : tamruot nūv kesar gandh
(7) RIB : chgār (pas.)
(8) MBN : raṃlāy nūv mās haem līoeṅ

៥១២. រីផ្កាចំប៉ាពិសី ប្រាណប្រួតលើភ្ញី
ននោងភាយរីកបុប្ផា(1) ។

៥១៣. នោះគឺនពគុណសុវណ្ណ ផ្ការផ្ការកែវមគ្គា
រណាយច្រុំរស្មី ។

៥១៤. រីអង្គកន្លង់បក្សី គឺព្រូងអប្រិយ
នីលាមន្ទិលពុំធ្កើង ។

៥១៥. រីត្របកផ្កាឈ្ងាប្រាលឡើង នោះគឺអណ្តាតភ្លើង
ក៏ដេះនៃផ្ការនោះណា ។

៥១៦. អង្គអញឯងដូចផ្កាឈ្ងា ជាផ្ការផានា
មាចអត់នូវកំដៅអគ្គី ។

៥១៧. ននោងនោះគឺសីតាទេពី ចំប៉ាដ៏ពិសី
គឺអង្គព្រះលក្ខអនុជា ។

៥១៨. នាយើងទាំងបីអង្គា ឯកចិត្តចិន្តា
ដូចផ្ការនូវមាលនោះហោង ។

៥១៩. រីកន្លង់នោះគឺព្រូងដង ជាមន្ទិលឃ្លាង
ដូចវាក្យនាងកៃកេសី ។

៥២០. ស្តេចចង់ប្រាថ្នាបុស្សី លោមភាជទេពី
ពន្លកជង្ហើមហាឫទ័យ ។

៥២១. យាងយាត្រាត្រេចត្រីក្សត្រ តន្ទេងតន្ទៃ
សុវណ្ណវនេគោចរ ។

៥២២. ដូចមហាមរកតដ៏បវរ ផ្លាស់(2)រស្មីស្ទះ
ដ៏ឡើងទាំងត្រៃត្រីក្បូរ ។

៥២៣. ស្តេចយល់បុស្សបុស្សនាគនា រកកេសរផ្កា
សុភោចសុគន្ធាធរ ។

៥២៤. កន្លង់ទាំងគូភ្មរ ត្រងត្រីបកេសរ
ជញ្ជៀបនទៀលតន្ទាយក ។

៥២៥. កន្លង់ញីនោះស្មៀតសឹក ជ្រៀតជ្រែកនៅត្របក
បុស្សនាគបុប្ផាភាយភរ ។

៥២៦. ស្និតល្អឯជប់ជង់ខ្វាយខ្វរ រំកែ្ទកភ្មរ
ក៏ផ្ទេចមមីមូយ៉ា ។

៥២៧. ពុំយល់ផ្លូវផ្លោះហើរទៅ ឆ្វាត់ឆ្វៀលទៀបន្ទូវ(3)
ទ្រហឹងវង្វេងវិលវល់ ។

(1) MBN : rī phkā cam̤pā ruṅ rīoeṅ
rasmī thaem līoeṅ
pruot loe anujapupphā
(2) MBN : kaem
(3) RIB : dam̤ nau

៤២៨. រីកន្លង់ឈ្មោលមិញដឹងកល់ កន្លង់ញីពុំយល់
ទើបហានឹងហើរទៅស្ថាន ។

៤២៩. ភ្លៀលភ្លាត់រង្គាត់ដេរដារ ស្មោះទំនៀបប្រាណ
ប្រពឹងបន្លឺសព្ទឮ ។

៤៣០. កន្លង់ញីឮហើយហើរដោយ ដល់ជិតតាមក្រោយ
ទៅលុះដូចចិត្តចិន្តា ។

៤៣១. ស្ដេចបង្ហាញអភិអគ្គជាយា មេមើលភូមភា
ក៏នាំនៃភូមរីហើរ ។

៤៣២. ដូចប្អូនមិត្រមានជ័យប្រសើរ អាចត្រេចចៅព្រៃដើរ
ក៏តាមអញបងនេះណា ។

៤៣៣. រូបអង្គរូបឯកមាតា រូបស្ថាននិទ្រា
ពុំគិតលំបាកពនេចរ ។

៤៣៤. បើស្ថិតនៅនាព្រះនគរ ដូចកណកេសរ
ក៏រុំភូមរបក្សី ។

៤៣៥. ហើយនូវកើតអង្គឯងអប្រិយ មានមន្ទិលស្រី
ដំណិះដំណៀលលោកផង ។

៤៣៦. មេអាចស្មះស្មៀងតាមបង ដើរដោយនូវគន្លង
ក៏នូវសារពេជ្ឈពោធិញាណ ។

៤៣៧. បងនូវនាំមេកន្លងវែងស្ថាន អរិដ្ឋាបីបង្វាន
បង្វែងវៃបង្វិលភពចក្រ ។

៤៣៨. បងនូវនាំមេមាសទៅដាក់ ដល់ស្ថានគតដំណាក់
គឺមហានិរោធនិព្វាន ។

៤៣៩. ស្ដេចលោមព្រះប្អូនកល្យាណ បណ្ដើរទៅបាន
ដល់ស្ថានមណ្ឌលស្រះស្រី ។

៤៤០. មានបុស្បាបោក្ខរណី ក្រពុំពេជ្រពី
គង្គាបប្រិបទងទ្រឹង(1) ។

៤៤១. សឹងកូនជ្រើសព្រៃលែងទ្រពឹង ហោលហិចទៅវឹង
កក្រោកកក្រៀវព្រមគ្នា ។

៤៤២. ខ្លះដកដើមបទុមា ទាំងក្រពុំផ្កា
បណ្ដាលបណ្ដែតតាមក ។

៤៤៣. តាប់កាលឡប់បក់នូវលក ជើងឈូកលាត់មក
ដីពាក់ទាំងទងទើរនៅ ។

៤៤៤. មានមេមយូរីហើរទៅ ឃោតសត្វជ័កន្ធោ(2)
ក៏យល់បទុមទងស្រស់ ។

(1) RIB : gaṅgā trīep trịm daṅ trịṅ
(2) MBN : phsār satv sau ṭau

៥៤៥. ត្រូវខ្យល់យល់បាក់ដូចរស់ គិតស្មានជាពស់
ក៏ចឹកចាប់ពាំនាំទៅ ។
៥៤៦. ទើរទុកសំបុកដ៏លំនៅ បក្សីស្រិនខ្លៅ(1)
ពុំដឹងដើមហេងល្បុកឡើយ ។
៥៤៧. មានកូនពីរពេញក្រាសហើយ កូននោះយំស្ដើយ
មកមេពារភស្ដុភោគ្គា ។
៥៤៨. ឯមេមយូរឆ្លើយថា ហៅកូនពុំងា
កុំយំអារម្មួញពារ ។
៥៤៩. ថ្ងៃនេះម៉ែបានអាហារ ត្រកល់ត្រកាល
ចំណីចំណាប់នេះចម្លែក ។
៥៥០. ក្បិណាមេមយូរចឹកចែក ចំពុះពាំបែក
ឱនទងបទុមបីភយ ។
៥៥១. ពុំបានបរិភោគសប្បាយ កូនខំងនិងម្ដាយ
បង្កើតជាទោសជួយលា ។
៥៥២. ជាឈឺងទុន្ទឹងអាហារ លុះល្បាចតតការ
ពុំបានអាហារភោគ្គា ។
៥៥៣. ស្ដេចស្ដាប់កូនក្អែកថា បង្កើតទោសា
ឱ្យមេមយូរបីកង្វល់ ។
៥៥៤. ស្ដេចបញ្ជាញទេពនិមិល ហៅមេមាសយល់
ឱ្យបក្សីមយូរបុត្រ ។
៥៥៥. មួយនោះដូចចៅភិរុត មួយទៀតក្រាកដ
ដូចចៅសុត្រុតម្លូនមញ ។
៥៥៦. សមនឹងរកប៉ាវឯងសំឡាញ់ បន្ទោសម្ដាយមិញ
គឺអង្គនាដៃកកេសី ។

(1) MBN : paksī sau ṭau

# កណ្ឌ ទី៧

៥៥៧. ព្រះលោមព្រះភគវតី អបិរអគ្គមហេសី
បណ្តើរដោយដងព្រៃភ្នំ ។

៥៥៨. ទៅទៀបមណ្ឌលអាស្រម ស្ថានរម្យដ៏ឧត្តម
នៃមហាឫសីស្និងស្ងាត់ ។

៥៥៩. ព្រះនាងគឺសីតារត្ន ក្តិត់ក្មេនព្រះបាទ
ជំរើនចតុពេទសាស្ត្រ ។

៥៦០. ទ្រង់ដងខាងមណ្ឌលអភិកាស ព្រះអង្គកាយពាតពាស(1)
នូវស្បែកអម្រឹតគឺដ៏ធ្វើ ។

៥៦១. ស្ពាយស្បៀងសឹងសំបកឈើ សិទ្ធិសក្តិនូវអំពើ
អំពល់ពិធីកណ្ឌការ ។

៥៦២. អស់អញ្ញលំគេញដោយនូវធម្ម ជំរើនភៀសពណ៌(2)
ជាមហាឫសីស្ងាត់ស្ងៀម ។

៥៦៣. មានពុកចង្កាគឺដ៏វែង មើលមុខគួរស្ញែង
មហាឫសីសាស្ត្រសុទ្ធ ។

៥៦៤. ទាំងព្រះព្រហ្មសឹងដ៏ជំជំហុត ពិធីពារព្រត
មហាមុនីនឹកផ្សាន ។

៥៦៥. ពោះនូវធ្វើសិល្បសាស្ត្របាន បរិបូណ៌មែនមាន
តេជះតបះបុណ្យក្រៃ ។

៥៦៦. យល់ព្រះពោធិសត្វថ្លៃ ត្រីត្រួចមាឫទ័យ
ក៏ត្រេកត្រអាលអាក្តាត់ ។

(1) MBN : kān' smiṅ bāk' bās
(2) RIB : camroen bes barṇā

៥៦៧. ដូចបុរសមួយមានតំកាត់ ទៀបហៀបនូវផ្កាត់
ជីវិតនឹងលុះមរណា ។

៥៦៨. យល់ព្រះដូចយល់ពេស្យា យកទុសជា
វិញទេពមកប្រស់ព្រោសប្រាណ[1] ។

៥៦៩. ជាពោះបាបអញមែនមាន តេជះអញបាន
ប្រសប់ពុទ្ធក្ស័យវៃឆ្លូ ។

៥៧០. អស់បាបទាំងនោះសឹងក្ស័យ អង្គអញឥតភ័យ
ទេវានុទេវទាំងសួង ។

៥៧១. ពោះបាបបុរាណចាំចង ច្រើនជាន់កន្លង
ពុំអាចនូវរងដ៏ទេភា ។

៥៧២. ស្រេចព្រះមុនីនាថចិន្តា ចុះដៃត្រដាយា
ឈើច្រត់នូវកណ្ដឹចរ ។

៥៧៣. ចេញចាកមណ្ឌលស្ថានប- រមសាលាសាទរ
ពោតដ៏នៅស្ថានដ៏ចង្ក្រម ។

៥៧៤. ទើបព្រះនារាយរាជដ៏ឧត្តម បេះបុស្បក្រពុំ
បទុមទាំងទងមាលា ។

៥៧៥. ចរចូលបីដ៏ទូលបុប្ផា ថ្វាត់ថ្វាយអភិវាទ៍
ដៃមហាឫសីដ៏មុនី ។

៥៧៦. ព្រះមុនីអរទិបចក្រី ត្រេកត្រេះមេត្រី
សំណោះសំណាលសួរជា ។

៥៧៧. ហៃហាក្សត្រទ្រង់ឫទ្ធិចេស្ដា ស្ដេចមកពីឯណា
ក៏នាំស្រីរត្នដ៏ប្រសើរ ។

៥៧៨. អញនូវចប់ជីងដើមដំណើរ ស្ដេចត្រេចថៃត្រូវដើរ
ត្រមោចព្រះរៀមអនុជា ។

៥៧៩. ហើយព្រះអង្គតំរពង្សក្សត្រា សឹងប្រែប្រាណជា
មហាឫសីមុនីនាថ ។

៥៨០. ទ្រង់សំបកឈើពាក់សម្ងារ ស្មុំសក់ជដាធារ
មោះហេតុប្រការកលម្ដេច[2] ។

៥៨១. ទើបព្រះមុនីនាថសារពេជ្ញ ប្រាប់ប្រការកិច្ច
មហាឫសីអស់អាជី ។

៥៨២. ទើបមហាឫសីសញ្ញា ជាបាបបុរាណកាល[3]
ទើបចៀសចាកពុំបាន ។

(1) MBN : sahās mak pras' pros prāṇ
(2) RIB : paṅ' bibhab bhār
mak mān prakār kal mtec
(3) RIB : purāṇakār

៥៨៣- វិស័យសត្វកើតក្នុងស្ថាន ភពចក្រប្រែប្រាណា
ប្រដូចទិវារាត្រី ។
៥៨៤- ក្បិណាភ្លឺសាយសព្វទិសទី ដោយតេជរស្មី
ពន្លឺនៃព្រះសុរិយា ។
៥៨៥- លុះព្រះសូរ្យសោតយាត្រា កំបាំងជ្រុងមហា-
សុមេរមណ្ឌលបរិស្រប់ ។
៥៨៦- ប្រែជាងងឹតឈឹងល្ងប់ អន្ធការសោតសព្វ
ទិសានុទិសពុំយល់ ។
៥៨៧- នេះគួរនាដូចកម្មផល កុសលអកុសល
អំពល់អំពើពីរមុខ(1) ។
៥៨៨- បង្កើតកាលកបនូវសុខ ហើយបង្កើតទុក្ខ
ពុំដែលនូវចៀសចាកឡើយ ។
៥៨៩- លុះបាននិព្វានជាបង្អើយ គតមានកំជឹងឡើយ
រដោះលែងជាតិជរា(2) ។
៥៩០- ពុំអន្ទោលទៅមកឡើយណា និរនេសទុក្ខា
មហាបរមសកល ។
៥៩១- និរាសប្រាសលែងកង្វល់ អង្គគតអំពល់
ក៏ក្សេមសប្បាយត្រេកអរ(3) ។
៥៩២- ព្រះមហាឫសីសាទរ នាំព្រះភូធរ
ទេពីនូវព្រះអនុជា ។
៥៩៣- ចូលទៅក្នុងបរមសាលា ថ្វាយព្រឹក្សផលា
ទាំងបីព្រះអង្គសោយសាន្ត ។
៥៩៤- ស្ដេចផ្ទុំនៅសាលាស្ថាន សុខស្កល់ក្សេមក្សាន្ត
បង់អស់មួយរាត្រីកាល ។
៥៩៥- លុះព្រឹកស្រាងស្រេចភូបាល ស្ដេចតើនបពិត្រអាល
ជំរះព្រះអង្គសោភា ។
៥៩៦- ស្ដេចនាំទេពីអនុជា បង្គំព្រះមហា-
ឥសីនូវណាថីរថរ ។
៥៩៧- ព្រះមហាមុនីសិទ្ធិករ ជំរើនព្រះពរ
សម្ដេចនារាយរាមា ។
៥៩៨- ព្រះឫសីជណ្ដឹងវិញថា នាអ្នកវេលា
មកនៅកំលុងព្រះព្រៃ ។

(1) RIB : bī mukh
(2) RIB : noḥ nai doep spoey
raṭoḥ laeṅ jāti jārā
(3) St. 590 et 591 : manquent dans RIB

៦៩៩. ធ្វើក្រឹត្យក្រមតបៈគុណាក្រៃ ព្រតសិល្បសាស្ត្រនៃលយ
ប្រពៃពិធីកុណ្ឌកម្ម[1] ។
៧០០. លុះអំលុងអំបាលខែឆ្នាំ ហើយស្ដេចក៏នឹងនាំ
ទេពីអនុជភូធរ ។
៧០១. វិលវិញត្រេចព្រៃពនចរ ចូលឋានព្រះនគរ
ពិភពបុរីរាជស្ថាន ។
៧០២. ទើបស្ដេចទូលស្នងវិញឋាន ថាខ្ញុំទៅបាន
លុះប្អូនដល់ភ្លាប់ឆ្នាំណា ។
៧០៣. ស្រេចហើយវិលវិញយាត្រា ឋានស្រីអយុធ្យា
ពិភពមណ្ឌលស្ថានស្ថិត ។
៧០៤. សូមលាព្រះបាទជ័យពិត្រ មុនីសាស្ត្រសុចរិត
ស្ដេចចៅនៃនាគស្ថាន ។
៧០៥. ពីនេះទៅតើចម្ងាយម៉ាន បើខ្ញុំក៏នូវបាន
ដល់ចិត្តកូជបពិត ។
៧០៦. ព្រះមុនីប្រាប់ដោយនូវកំណត់ ថាដប់យោជគត់
គណនាស្ដេចទៅពីអាយ ។
៧០៧. លុះកណ្ដាលវៃទ្ធិវាលខែវងឆ្ងាយ ធារធំទូលាយ
លលឹមលលៀកសោតសល់ ។
៧០៨. ទុរគមព្រៃក្រៃដើរដល់ ភ្នំវនោះជ័អំពល់-
នូវខ្សាច់ក្រួសក្រៀមក្ដៅក្ដាត់ ។
៧០៩. ប្រណាំទេពីស្រីរត្ន តិឡូវអញសូមឃាត់
ស្ដេចគង់នៅស្ថាននេះណា ។
៧១០. ពោះនូវធ្វើព្រតព្រឹទ្ធសាស្ត្រា[2] អញឯងជានា
កុំឲ្យព្រួយព្រះហឫទ័យ ។
៧១១. ស្ដេចស្ដាប់ព្រះមុនីថានៃម- ត្រឹមឃាត់ក្សត្រថ្លៃ
ក៏ស្ដេចបន្ទូលវិញស្នង ។
៧១២. បពិត្រគ្រូរខ្ញុំនៅហោង កុំគួរនូវកន្លង
ព្រះឱស្ឋពិសេសអាជ្ញា[3] ។
៧១៣. ម្ដោះខ្ញុំយល់ស្ថាននេះណា ទៀបនឹងអយុធ្យា
ជំនោរឮពតិមាន ។
៧១៤. ទៅពាល់ដេវពាណាជ័សណ្ដាន បងប្អូនខ្ញុំមាន
នូវមករកខ្ញុំឯងហោង ។

(1) RIB : prabai bidhī kāyakarm
(2) MBN : doḥ nūv dhvoe prathamasilpasāstrā
(3) MBN : braḥ osṭh braḥ aṅg ājñā
RIB : braḥ osṭh bises cintā

៦១៥. ស្រេចព្រះបន្ទូលសារសង ពុំឲ្យមានហ្មង
នឹងព្រះឥសីសីលា ។

៦១៦. ស្ដេចថ្វាយនមស្ការអភិវាទ ប្រែក្សិណាណា
មហាមុនីចរចេរ ។

៦១៧. ស្ដេចត្រេចត្រៃព្រលុះលេចដល់ឆ្នេរ កណ្ដាកម្ពីរ
ពន្លឹកជ័យមហានទី ។

៦១៨. ទីឈ្មោះស្ទឹងនោះនាមពី ព្រោងហៅកាលគី
នទីមូលាយជ្រាលជ្រៅ ។

៦១៩. ព្រះអង្គចុះស្រង់បន្ទោ មន្ទិលសោះស្ដៅ
បន្ទូលនឹងព្រះអនុជា[(1)] ។

៦២០. ថាវៃហាវរលក្ស្ម៍ស្នេហា អញបងបានជា
ជាប្អូនសព្វថ្ងៃស្មើចិត្ត[(2)] ។

៦២១. វៃហាលក្ស្ម៍ស្ទឹងនេះធំក្ដាត់ ប្រាំម្ភៃក្រែងសត្វ
វារីគោចរពាធា ។

៦២២. អាស្សូរសីតាបងជា សមនឹងកើតភយា
ម្រាងម្ស៊ើយនូវអាចឆ្លងបាន ។

៦២៣. ព្រះលក្ស្ម៍ស្ដាប់ព្រះបន្ទូលក្ខាន ហេតុព្រះអង្គមាន
ហឫទ័យបំរុងដេស្នា ។

៦២៤. ពុំឲ្យព្រួយព្រះចិន្ដា ស្រេចយកខ័នថ្លា
ទៅកាត់ក្រវៃលឈើចង ។

៦២៥. ជាក្បួនមានត្រៃទែនថ្កិង បេះបុស្សក្រាលក្រង
ទាំងទេងមាលាបីសណាប់ ។

៦២៦. ដាព្រះក្រាលទិព្វស្រេចស្រាប់ លើវែនទិព្វគាប់
នូវក្បួនបវរពិចិត្រ ។

៦២៧. ថ្វាត់ថ្វាយព្រះបាទដ៏បពិត្រ ពីរព្រះអង្គស្ថិត
ព្រះលក្ស្ម៍ក៏វៃហាលនាំឆ្លង ។

៦២៨. ទៅបានត្រើយត្រាណាដូចបំណង ក្បត្រក្បួនគតហ្មង
ទាំងបីព្រះអង្គយាត្រា ។

៦២៩. ត្រេចត្រង់ត្រៃព្រឹក្សបព្វតា លុះលេចអគ្គា
ស្ដេចកាត់ឆ្លងវាលវែងឆ្ងាយ ។

៦៣០. សឹងភ្លើងត្រៃតេះព្រោងព្រាយ ច្រាលច្រាស់ផ្សែងផ្សាយ
ចំហាយព្រះសូរ្យរស្មី ។

(1) RIB : braḥ anujaratn
(2) St.620 : manque dans RIB

៣៣១. ស្ដេចស្ដាប់សូត្រសាស្ត្រស្តុតី ដោយតេជពិធី
ព្រះពិស្វាមិត្រឧបទេស(1) ។

៣៣២. ទិព្វមន្តខ្លឹមគុណដ៏វិសេស ស្ពាននោះនិរទេស
ចំហាយព្រះសូរ្យយាត្រា ។

៣៣៣. ត្រដាក់ដូចចន្ទ្រឆាយា លូតលាស់ព្រឹក្សា
បុប្ផាផលផងបរិបូរ ។

៣៣៤. ដូចនន្ទោទ្យានស្ថានសួគ៌ សួគ៌គឺដ៏គួរ
បន្ទូងសម្ដេចឥន្ទ្រ ។

៣៣៥. អស់ផ្ញើរព្រៃស្នែងម្រឹគា លោតសឹងប្រែជា
មេត្តាអាសូរសត្វផង ។

៣៣៦. រីអស់មម្រឹគយាប់ឃ្លង សឹងជាសត្រូវផង
បំបាត់ជីវិតគ្នាមិញ ។

៣៣៧. សឹងប្រែចិត្តជាសំឡាញ់ ស្គាល់ស្នេហាស្និទ្ធវិញ
ដោយភាសាសត្វមេត្រី ។

៣៣៨. គជបុត្របៅមេរាជសីហ៍ គជរាជហត្ថី
បំបៅបុត្ររាជសីហ៍ភ្លា ។

៣៣៩. កូនប្រើសប្រែបៅមេខ្លា មេប្រើសប្រែជា
បំបៅបុត្រខ្លាស្នេហាស្និទ្ធ ។

៣៤០. អស់ម្រឹគបក្សីសុចរិត ក្បួរក្សាន្តមូលមិត្រ
រក្សាសុបាលស្នេហាស្នង ។

៣៤១. ទោះក្អែបខ្ញុយពស់ពិសផង សព្វសត្វយាប់ឃ្លង
នូវពិសដ៏ឃោរឥតប្រមាណ ។

៣៤២. ទោះខាំពោះកំសួលប្រួលប្រាណ អ្នកណាបើមាន
ទៅត្រូវនូវពិសពុំចំហុត ។

៣៤៣. ដូចអ្នកយកទិព្វដ៏ឱសថ មកព្រួសប្រាកដ
កំចាត់រូបរោគាពាធ ។

៣៤៤. សាន្តសះសព្វសារពើព្យាធ អង្គឯងស្នែងស្អាត
និមិត្តអប្រិយដ៏ពិសស្ដែង ។

៣៤៥. ទោះបីដើមផលរុក្ខវៃ ពិសពុលស្លាប់ស្រែង
ក្រៃវែងអាសិរពិសផង ។

៣៤៦. សឹងប្រែមានរសវិងយោង មធុរសដ៏កន្លង
ក្រអូបក្រអែបក្លិនក្លាយ ។

៣៤៧. ស្ដេចវេលាមាត្រានោះចម្ងាយ សឹងសូរភីភាយ
ព្រឡប់ត្រលោមតន្ទ្រា ។

(1) RIB : ṭoy tej bar bī
brah̤ bisvāmitr abhides

៣៤៨. តេជះព្រះបារមីតា ស្ដេចស្ដែងជាតិជា
ឥស្សរកំពូលពុទ្ធពង្ស ។

៣៤៩. លះលាភធរធាកចេញបង់ ព្រះនគរព្រះអង្គ
ប្រយោជន៍ធំទើរសាស្ត្រ ។

៣៥០. កាលនោះព្រះស្ដោះលេលា រសៀលសុរិយា
បៀបទៀបនូវអស្ដង្គត ។

៣៥១. ស្ដេចដល់ចិត្រកូដបពិត មហាគិរីដ៏ប្រាកដ
កំពូលកំពស់ពេយយា ។

៣៥២. អស់ទាំងពពួកទេវតា សោតសឹងនាំគ្នា
មកលេងលើខ្នងព្រះភ្នំ ។

៣៥៣. មានដើមដូងស្លាដ៏ល្បី បរិវេណធារធំ
ជង្គំនូវព្រឹក្សាការ ។

៣៥៤. អស់មហាឥសីពានត្តរ(1) យល់ព្រះភូធរ
នូវព្រះទេពីអនុជា ។

៣៥៥. ពនេចរចេញបរមសាលា ទទួលព្រះភរិយា
នូវព្រះអនុជទេពី ។

៣៥៦. ឥសីសិទ្ធិពរនរបតី នរបតិន្ទ្រភោជី
សិទ្ធីព្រះពរដ៏តិរេកា(2) ។

៣៥៧. ទុក្ខីពរទុក្ខីវរវណ្ណការ ទុក្ខីជន្មសុរម្យា
ទុក្ខីភរិយាជាភាគុល(3) ។

៣៥៨. ព្រះរៀមព្រះមហេសីស្ងល់ ព្រះអនុជនិម៌ល
បីខ្វល់រណ្ដាប់រចនា ។

៣៥៩. ប្រៀបប្រុងសង់បរមសាលា លើខ្នងបព្វតា
ដ៏ជាអាស្រមព្រះបពិត្រ ។

៣៦០. យកមយូរព្រុយព្រោយដ៏វិចិត្រ ប្រុះប្រក់ប្រួតជិត
ជាស្បូវនូវពិតានដាស ។

៣៦១. ហើយវៃដែនតំបារមាស បិតបាំងពេញពាស
លើព្រុយមយូរកែមការ(4) ។

៣៦២. ជញ្ជាំងជុំ(5)សឹងសុពណ្ណ ឆ្នុះស្ដៅដ៏ពព្រាល
ពព្រោងពព្រាយបីសស្ដៅ ។

៣៦៣. ស្ដេចនាំមហេសីស្ថិតនៅ គយគន់ទតទៅ
អាស្រមប្រសើរសោភា ។

(1) RIB : mahāmunī sīl sar
(2) RIB : nara:po ṭă tirekā
(3) RIB : ṭal'
(4) MBN : kaem kāl
(5) RIB : ciñcāc traṭāc

៣៣៤. ព្រះសរសើរថាហៃលក្ខណា ចេះជាងរចនា
សាលាត្រកាលជ័វិស័យ ។

៣៣៥. ធារងទម្ងន់បងត្រៃ បងមកនៅព្រៃ
អាស្រ័យភ្ញើទុក្ខធាហោង ។

៣៣៦. ព្រះអនុជនុនសិរទៀបរង ក្រាបក្រោមបាទបង
បង្គំប្រណម្យទូលថា ។

៣៣៧. បពិត្រសូមព្រះករុណា កុំមានព្រះចិន្តា
ប្រណីទម្ងន់នូវព្រួយ ។

៣៣៨. ខ្ញុំជាបុរសកម្មករ(1) មួយ ធ្វើម្លេះពុំព្រួយ
ពុំក្រាន់ចំណាប់ភក្តី ។

៣៣៩. ដូចកាលនាងកៃកេសី ឯស្តើមភាឡតី
ព្រះអង្គក៏ឲ្យព្រះភិរុត ។

៣៤០. ខ្ញុំប៉ងថ្លែងសរធ្វើគត់ យកភាព្យថ្វាយបទ
ព្រះអង្គពិសេសឃាត់ឯង ។

៣៤១. ហេតុព្រះទ័យទិញប្រាបឈ្មោង ប្រុះប្រាជ្ញាក្រែង
ទេវានុទេវរីងស្នង ។

៣៤២. ពីថ្ងៃនេះទៅតោតហោង ខ្ញុំនូវយករូបរាង
ព្រះជន្មព្រះបាទដើស្នា ។

៣៤៣. ទោះមានសត្រូវពាធា ដារខ្ញុំធាធា
នូវរងទម្ងន់ព្រះបពិត្រ ។

៣៤៤. ស្តេចស្តាប់ព្រះអនុជស្នេហាស្និទ្ធ ឈ្មោះសសុចរិត
សំលុតសំឡាញ់ភក្តី ។

៣៤៥. ក្សត្រាមបាមហោសី ពាំរព្រះអង្គបី
នូវព្រះអនុជមូលមិត្រ ។

៣៤៦. ស្តេចធំទើនពារពេទសាស្ត្រសិទ្ធ តបះការក្រមត្រឹត្យ
ប្រព្រឹត្តលើ(2) ខ្លួងបពិត ។

(1) RIB : kammakār
(2) RIB : loes

# កណ្ឌ ទី៨

៣៧៧. កាលព្រះបាទស្រីទសរថ ស្ដាយទិវង្គត
រលត់ព្រះជន្មអនិច្ចា ។

៣៧៨. ព្រះមុនីវរសិទ្ធិ[1] មហា- ឫសីចេះរចនា
ធ្វើបើកព្រះសពសំស្ការ ។

៣៧៩. ទេពីព្រះក្រុមបរិពារ អស់ស្រីស្រីង្គារ
សឹងសោកស្រណោះក្សត្រថ្លៃ[2] ។

៣៨០. ទាំងមុខមន្ត្រីដទៃ សឹងសោកអាល័យ
បង្កើតនូវទុក្ខសល់ខ្លាត[3] ។

៣៨១. ស្រេចរិះរកពូជពង្សក្សត្រ ត្រងរាជសម្បត្តិ
សំបូណ៌ប្រវេណីនាថ ។

៣៨២. វរសិទ្ធិមុនីតែងរាជសារ មករាជបុត្របា[4]
គឺព្រះភិរុតរាជហោង ។

៣៨៣. នឹងឲ្យសេពសោយរាជ្យរង ទម្ងន់ក្នុងក្រោមត្រង
ប្រជារាស្ត្ររដ្ឋជ័យបុរី ។

៣៨៤. ក្សិណនោះនាងកៃកេសី ក្រោងព្រះមុនី
កុហកនូវកលជ័យមាយា ។

៣៨៥. លបលួចផ្ដាំដោយសារថា រាជសារនៃមហា-
ឫសីសុមេធវរសិទ្ធិ ។

(1) RIB : visiṭṭh (pas.)
(2) RIB : siṅ soy sokaṇal' ktāt'
(3) St. 680 : manque dans RIB
(4) RIB : rājaputr pāl

៣៨៦. រីនូវនាងកៃកេសី ឲ្យសារសរិនីយ
មេត្រីមកព្រះរាជបុត្រ ។

៣៨៧. ត្រាស់ឲ្យអញ្ជើញព្រះភិរុត នូវព្រះសុត្រុត
នូវធ្វើមង្គលអភិរេក ។

៣៨៨. នូវប្រដាប់ប្រដាភិសេក ព្រះរាមជាឯក
ឲ្យគ្រងពិភពអយុធ្យា ។

៣៨៩. ស្នងព្រះទសរថរាជា ព្រះវរបិតា
ដំកល់ព្រះរាជរាមហើយ ។

៣៩០. កុំព្រះភិរុតយូរឡើយ សត្វសារដល់ហើយ
នូវព្រះសុត្រុតយាត្រា ។

៣៩១. ទៅស្ថានបុរីរាជអយុធ្យា អភិសេកព្រះជេដ្ឋា
រាមាធិរាជគ្រប់គ្រង ។

៣៩២. ដងនោះអស់រាជទូតផង នាំរាជសារស្នង
ព្រះឱស្ឋព្រះអង្គបីសម័យ[1] ។

៣៩៣. យាងយាត្រាត្រេចត្រាំក្នុងព្រៃ ទៅតាំងយប់ថ្ងៃ
ប្រាំពីររទិវាតានេចរ ។

៣៩៤. ស្រេចបានដល់ស្ថានព្រះនគរ សម្ដេចព្រះវរ-
បិតានៃកៃកេសី ។

៣៩៥. ថ្វាយសារសុចរិតមេត្រី ព្រះភិរុតនរបតី
នូវព្រះសុត្រុតក្សត្រក្សាន្ត ។

៣៩៦. ថាបវ[2] នាងកោកល្យាណា នាងកៃកេសីសាន្ត
ក៏សូមព្រះពរពិធី ។

៣៩៧. ឲ្យព្រះរាមទេពធិបតី[3] គ្រងរាជបុរី
បុរាណស្រីអយុធ្យា ។

៣៩៨. ព្រះវរបិតាមាតា គឺអង្គក្សត្រា[4]
ស្ដេចត្រាស់ប្រើយើងខ្ញុំមក ។

៣៩៩. នានាំព្រះបណ្ដាំរួសរាក អញ្ជើញព្រះពន្លក
ទាំងពីរ[5] ព្រះអង្គលេលា ។

៤០០. ឲ្យទាន់ការប្រជា- ភិសេកព្រះជេដ្ឋា-
ធិរាជនាភយរាមទេព ។

៤០១. វរសិទ្ធិព្រះមុនីសារសេព[6] ស្ដេចជាខ្ញឹមក្លួប

(1) RIB : braḥ osṭh braḥ aṅg bhisamăy
(2) RIB : thā bīr
(3) RIB : oy rāmadeb debī
(4) RIB : pī aṅg ksatrā
(5) MBN : dāṃṅ pī
(6) RIB : siddhī braḥ munī sā seb

ត្រកូលអំបូរពង្សក្សត្រ ។

៧០២. ក្សិណនោះព្រះភិរុតអរក្តាត់ ថ្មមព្រះសុពណ៌បាទ
ដំកល់មណ្ឌលសិរសា ។

៧០៣. ថ្ងៃឈ្មោះឆ្លោះព្រះភក្ត្រា ត្រង់នគរអយុធ្យា
លុតលើកព្រះករបីបង្គំ ។

៧០៤. តាំងព្រះសុត្រុតត្រេកអរនោរម្យ[1] សំងំថ្វាយបង្គំ
ចំពោះស្រុកស្រីអយុធ្យា ។

៧០៥. ក្រោមបើអស់អង្គសេនា មុខមន្ត្រីត្រា
យោធាអមាត្យមូលមក ។

៧០៦. ទូងទរស្គរភេរីរក ដុំតាលព្រឹទ្ធយក
គ្រឿងគ្រប់ប្រដាប់អង្គា ។

៧០៧. ព្រាហ្មណ៍ព្រឹទ្ធបុរោហិតហោរា រកពារដំពេលា[2]
ជាតិជាជំនើរមង្គល ។

៧០៨. យោគយាត្រាត្រៃចកបកល ត្រៀបរៀបហៃពល
ប្រកិតអាវុធឆ្វេងស្តាំ ។

៧០៩. ខ្មាន់ធ្នូករកាន់ធ្នូគាំ ខ្មាន់ស្នាបីធំណាំ[3]
រលៀបរលេនប្រួញព្រួស ។

៧១០. ខែលវ័នទួនទណ្ឌាបីប្រទេស ស្រុះស្រើបជ្រៀវជ្រើស
សន្ធឹកឆាភាធុំយជង ។

៧១១. ខ្មាន់គជជិះ[4]គជរៀបរង ខ្មាន់អស្សពាហាទ្វង
ប្រដាប់នៃតាជីជុំ ។

៧១២. សព្វសេះសៀងសូរសៃរឆង ក្លីងក្លស់អភិរម្យ
រំភាយរំភើយពាសពាត ។

៧១៣. ឯបមង់សែនក្វាន់ភាយភត់ ភាជរជិទិបខាត់
ពិជិត្រនូវរត្នសុវណ្ណ ។

៧១៤. ទង់ជ័យទ្បូងភាជរជា ទិព្វទង់ជ័យជា
ដរៃឆ្លូហ្លួណាស្រួចស្រាប់ ។

៧១៥. ស្រេចព្រះអាជ្ញាបីប្រញាប់ ផ្ទាប់បើប្រដាប់
សំភាប់អស់ភាជបរិពារ ។

៧១៦. ព្រះភិរុតភាជវិះវេលាកាល ព្រះសុត្រុតជត្រអាល[5]
ធូលថ្វាយបង្គំក្រាបលា ។

(1) RIB : trek ar ṭă bhiramy
(2) RIB : ṛksabār ṭă belā
(3) RIB : khmān' dhanū2 dhnịm kār kām̱
khmān' snā2 nām̱
(4) RIB : bandh
(5) RIB : trakāl

៣៨៦. រីនូវនាងកៃកេសី ឲ្យសារសវិនីយ
មេត្រីមក ព្រះរាជបុត្រ ។
៣៨៧. ត្រាស់ឲ្យអញ្ជើញព្រះភិរុត នូវព្រះសុត្រុត
នូវធ្វើមង្គលអតិរេក ។
៣៨៨. នូវប្រដាប់ប្រជុំអភិសេក ព្រះរាមជាឯក
ឲ្យគេងពិភពអយុធ្យា ។
៣៨៩. ស្នងព្រះទសរថរាជា ព្រះវរបិតា
ដំកល់ព្រះរាជរាមហើយ ។
៣៩០. កុំព្រះភិរុតយូរឡើយ សត្រូសារដល់ហើយ
នូវព្រះសុត្រុតយាត្រា ។
៣៩១. ទៅកាន់បុរីរាជអយុធ្យា អភិសេកព្រះជេដ្ឋា
ភាតាធិរាជគ្រប់គ្រង ។
៣៩២. ដងនោះអស់រាជទូតផង នាំរាជសារស្នង
ព្រះឱស្ឋព្រះអង្គបីសម័យ[1] ។
៣៩៣. យាងយាត្រាត្រេចត្រាំក្នុងព្រៃ ទៅទាំងយប់ថ្ងៃ
ប្រាំពីរទិវាតានេចរ ។
៣៩៤. ស្រេចបានដល់ស្ថានព្រះនគរ សម្ដេចព្រះវរ-
បិតានៃកៃកេសី ។
៣៩៥. ថ្វាយសារសុចរិតមេត្រី ព្រះភិរុតនរបតី
នូវព្រះសុត្រុតក្សត្រក្សាន្ត ។
៣៩៦. ថាបទ[2] នាងកោកល្យាណ នាងកៃកេសីសាន្ត
ក៏ស្ទួមព្រះតរពិធី ។
៣៩៧. ឲ្យព្រះរាមទេពធិបតី[3] គ្រងរាជបុរី
បុរាណស្រីអយុធ្យា ។
៣៩៨. ព្រះវរបិតាមាតា គីអង្គក្សត្រា[4]
ស្ដេចត្រាស់ប្រើយើងខ្ញុំមក ។
៣៩៩. នានាំព្រះបណ្ដាំរួសរក អញ្ជើញព្រះតន្លក
ទាំងពីរ[5] ព្រះអង្គលោណា ។
៤០០. ឲ្យទាន់ការប្រជុំ- ភិសេកព្រះជេដ្ឋា-
ធិរាជតារាយរាមទេព ។
៤០១. វរសិទ្ធិព្រះមុនីសារសេព[6] ស្ដេចជាខ្ញីមក្លែប

(1) RIB : braḥ osṭh braḥ aṅg bhisamăy
(2) RIB : thā bīr
(3) RIB : oy rāmadeb debī
(4) RIB : pī aṅg ksatrā
(5) MBN : dāṃṅ pī
(6) RIB : siddhī braḥ munī sā seb

ត្រកូលអំបូរពង្សក្សត្រ ។

៧០២. ក្បែរណានោះព្រះភិរុតអរក្កាត់ ថ្នមព្រះសុពណ៌បាទុ
ដំកល់មណ្ឌលសិរសា ។

៧០៣. បៃប្រែស្មោះស្ដោះព្រះភក្ត្រា ត្រង់នគរអយុធ្យា
លុតលើកព្រះករបីបង្គំ ។

៧០៤. តាំងព្រះសុត្រុតត្រេកមនោរម្យ(1) សំពះថ្វាយបង្គំ
ចំពោះស្រុកស្រីអយុធ្យា ។

៧០៥. ប្រាមប្រើអស់អង្គសេនា មុខមន្ត្រីត្រា
យោធាអមាត្យមូលមក ។

៧០៦. ឱ្យហែរស្គរភេរីរក ដំតាលត្រឹំយក
គ្រឿងគ្រប់ប្រដាប់អង្គា ។

៧០៧. ព្រាហ្មណ៍ត្រឹមបុរោហិតហោរា រកពារដំពេលា(2)
ជាតិជាដំណើរមង្គល ។

៧០៨. យោគយាត្រាត្រៀមកបកល ត្រៀបរៀបពៃហពល
ប្រកិតអាវុធផ្ទៀងស្ដាំ ។

៧០៩. ខ្មាន់ធ្នូករកាន់ធ្នូតាំ ខ្មាន់ស្នាបីធំណាំ(3)
រលៀបរលេនប្រួញព្រួស ។

៧១០. ខែលវ័នងួនទណ្ឌាបីប្រទើស ស្រុះស្រេបផ្ទៀងផ្ទើស
សន្ធឹកធារាភ្ញុយដង់ ។

៧១១. ខ្មាន់គជជិះ(4)គជរៀបរង់ ខ្មាន់អស្សពាហាធ្វង់
ប្រដាប់នៃតាជីជុំ ។

៧១២. សព្ទសេះសៀងសូរសែងសម ក្ដីវិក្លស់អភិរម្យ
រំភាយរំភើយពាសពាត់ ។

៧១៣. ទៃបមន់ចៃសនត្វាន់ភាយភាត់ ភជរថខិមខាត់
ពិចិត្រនូវរត្នសុវណ្ណា ។

៧១៤. ទង់ជ័យស្លឹងភជរថា ទិព្វទង់ជ័យជា
ដរិង្ហប្លណាស្រួចស្រាប់ ។

៧១៥. ស្រេចព្រះអាជ្ញាបីប្រញាប់ ប្រាប់ប្រើប្រដាប់
សំរាប់អស់រាជបរិពារ ។

៧១៦. ព្រះភិរុតរាជរិះវេលាកាល ព្រះសុត្រុតដំត្រអាល(5)
ទូលថ្វាយបង្គំក្រាបលា ។

(1) RIB : trek ar ṭă bhiramy
(2) RIB : ṛksabar ṭă belā
(3) RIB : khmān' dhanū2 dhnịm kār kāṃ
khmān' snā2 nāṃ
(4) RIB : bandh
(5) RIB : trakāl

៧១៧. ព្រះអយ្យកោធិរាជា នូវព្រះអយ្យិកា
ក្សត្រក្សត្រីទាំងពីរដ៏ព្រះអង្គ ។

៧១៨. ស្រេចឡើងគង់រថដ៏បញ្ជាប់ ទឹមអស្សពាហាពង្ស
សិន្ធពប្រទេសទិព្វយាន ។

៧១៩. ពីរព្រះអង្គអរក្សេមក្សត្ត ស្រួលស្រើបស្មោះស្មាន
ជាបានយល់ទៀមភរិយា ។

៧២០. លេងភ្លេងពលពេរីសគ្រប់គ្នា សាន្តសេពនូវសុភ(1)
ទៀងដោយមាគ៌ានូវចម្ងាយ ។

៧២១. តូរ្យតន្ត្រីយ៍ត្រែស័ង្ខសាយ សេពសមស្សរស្ងាយ
រំពាងព្រៃត្រៃអឹងអាប់(2) ។

៧២២. ភ្លេងខ្លុយពេរីសព្រមសំរាប់ ព្រៀតថ្ងេះតប់(3)
ចាប៉ីនូវប៉ីអងង ។

៧២៣. តាខេខ្សែដៀវដេញលេង អង្គួចគ្រប់ភ្លេង
ដ៏ល្វេងនូវសព្ទស្គរគង ។

៧២៤. ស្រាផ្អាត់ពួចពាងនូវពិន្ទុង(4) ស្រាប្រាលដិបផង
ដិបរងអារ៉ងរៀបរៀង ។

៧២៥. ស្រាឯកចែកអ្នកលេងល្បៀង(5) ពលពេរីសព្រមច្រៀង
ល្បៀង(6) ល្បែងសាទរ ។

៧២៦. លុះនៃថ្ងៃប្រាំពីរពាននេចរ ទៀបកៅព្រះនគរ
បុរីអយុធ្យាយល់ ។

៧២៧. ស្ងប់ស្ងាត់ស្ងួន្យសោះសាសល់ នរអ្នកនុកូទល់
អំពល់អំពើសោកសាយ ។

៧២៨. ព្រោះប្រាសនិរាសព្រះនារាយ ភមទេពទៅឆ្ងាយ
ពុំយល់ព្រះអង្គដ៏ឧត្តម ។

៧២៩. អស់ប្រុសស្រីស្រុកតូចធំ នរគាមដ៏និគម
ចំណតជនបទជួញឆ្ងាយ(7) ។

៧៣០. ថ្មើរថ្មីទិសទីទេសនាយ ទល់ពុកូសោកសាយ
សឹងសោកសង្វេគដេស្នា ។

៧៣១. វង្វិលទាំងព្រះចន្ទ្រសុរិយា និទុរភិក្ស
ស្រែទំទាំងមេឃដ៏មណ្ឌល ។

(1) RIB : staeṅ stec līlā
(2) MBN : rambaṅ braḥ brai īṅ āy
basadhār sdoer niṅ kralāp'
(3) RIB : daḥ dāp'
(4) RIB : srā chmāt' buoc boeṅ biṅ daṅ
(5) RIB : caek as' anak spīeṅ
(6) RIB : lpaṅ
(7) RIB : nagar gām nigam
campat janapad juoñ chṅāy

៧៣២. ថ្ងៃដើមឆ្នាំហើយពុំយល់ អ្នកស្រែខ្វាយខ្វល់
នង្គ័លរនាស់ភាស់ផ្ទួរ ។

៧៣៣. ក្រៀមក្រំាងភាំងរាំងបឹងបួរ ស្រូវស្រែមានម្លូរ
សឹងស្ងួតសឹងស្ងិតស្ងឹកស្ងោម ។

៧៣៤. ពោះទាំងនៃព្រៃព្រឹក្សព្រោម ខ្លះខ្លោចជង៍ស្ងោម(1)
ក្រយាមសន្ធឹករុះរោយ ។

៧៣៥. បុប្ផាផលាផងរោយ ដើមជាលបីរបោយ(2)
រលេះស្រពាប់ទុំខ្ចី ។

៧៣៦. ពេញស្ពានឧទ្យានស្រះស្រី ឥតបុរសនារី
នូវរីះរកទើសភោគ្គា ។

៧៣៧. អន្តរធានទាំងភ្ញីផ្កា រោយរុះព្រៀបព្រា
គិតអ្នកនូវក្រងជួតសៀត(3) ។

៧៣៨. ទីងផ្លាប់លាយលាបនូវរមៀត ណាយពោះដង់សៀត
ពុំធ្វើប្រដាប់ខ្លួនឡើយ(4) ។

៧៣៩. រំរងស្ពាងអង្គទ្រង់ជាត្រើយ មិញមិនយល់ឡើយ
ពុំទ្រង់នូវផ្ទិមអម្ពរ(5) ។

៧៤០. ពីប្រាសនិភាសព្រះភូធរ អស់អង្គអ្នកនគរ
សឹងសោកសង្រេងទល់ទុក្ខ ។

៧៤១. ឥតឯល្ហែល្ហើយសាន្តសុខ សឹងស្ងប់ស្ងួតមុខ
ប្រម្លូសប្រឡាក់ទឹកភ្នែក ។

៧៤២. ប្តាត់ទាំងចាំរៀងភាំរែក ឈេងសើចស្រួលស្រែក
ក៏ស្ងាត់ពាក្យពុំឮឡើយ ។

៧៤៣. ព្រោះប្រាសព្រះមាសត្រាណត្រើយ សោកសោះឥតល្ហើយ
គិតល្ហែនូវទុក្ខវេទនា ។

៧៤៤. សំពត់ស្បៃអាវអាត្មា ពុំផ្លាស់ឡើយណា
មន្ទិលមិនទើងបោកបង់ ។

៧៤៥. ស្ងួតស្ងៃតវរទេវទ្រាទ្រង់ ស្លុតសោតសឹងបង់
ពុំបានបូជាព្រះនគរ ។

៧៤៦. អ្នកជិះសារសេះបើកបរ លះលែងចេញចរ
ត្រឡប់វិលវល់ចាចាយ ។

៧៤៧. អ្នកប្រត់(6) ភាជរថរៀបរាយ បំបោលបរឆ្ងាយ
បង្អាក់បង្អួស់គោគ្នា ។

(1) RIB : khlaḥ khloc smuk smom
(2) RIB : pī poy
(3) MBN et RIB : cuot cīet
(4) RIB : buṃ praṭāp' dhnịm aṃbar(ṇ)
(5) St.739 : manque dans RIB
(6) RIB : anak par

៧៤៨. សឹងបាត់ស្ងាត់ទាំងអាគា នរអ្នកយាត្រា
រវាំងរវៀលពោមក ។

៧៤៩. គ្រប់ត្រើះស្ពានស្អិតរៃរងរក គន្លាធុមមក
ជុតដោយមណ្ឌលអុជអាប់ ។

៧៥០. រូបរុំផ្សែងផ្សុំផ្សាយផ្សែងៗ សឹងស្អូន្យបីរងាប់
រល្អោះរល្អើត្រើះស្ពាន ។

៧៥១. អ្នកធ្វើស្រែស្រូវដោយខាន ទុំទៀបទឹកមាន
ស្រះស្រង់អន្លង់ជលសា ។

៧៥២. ឥតអ្នកមួយមកដឹកជា ប្រល្បោះប្រឡាយគង្គា
បង្ហូរបង្ហូតទឹកទៅ ។

៧៥៣. ជិតដើមស្រែស្រុកជ្រាលជ្រៅ ក្រាំងក្រៀមក្តាត់ក្តៅ
ផ្លៀតផ្លិតល្វៀនលេចស្អុកស្អឹង ។

៧៥៤. ឥតនរនៃរំពៃរំពឹង បាចបើកប្លូរបឹង
បង្ហូតបង្ហូរដោកដាំ ។

៧៥៥. ក្របីគោចូលដាន់ដំណាំ ចាក់(1) បង់តុំចាំ
រលឹងរបើកខ្ចាត់ខ្ចាយ ។

៧៥៦. មើលសព្វសេដ្ឋីទាំងឡាយ រៃរងធ្វើទ្រង់ទ្រាយ
សំអាតសំអាងត្រើះស្ពាន ។

៧៥៧. ដៃដែនក្រាក់ប្រុះបុះបាន ភាយរត្នមាសមាន
សន្ទឹកបង្អួចជើយងាយ ។

៧៥៨. សំពត់សំពាយត្រៃត្រាយ ខោខៀនលេចលាយ
ណាណាតប្លាលបាលជីល្បើ ។

៧៥៩. ស្រស់ស៊ីជំពូ(2) ទេសរំ កាសាសូត្រសម
នូវយមណាពាក់ពាត់(3) ។

៧៦០. តាំប្រាសនិភសមហាក្សត្រ សោះស្អូន្យស្ងប់ស្ងាត់
នាក្នុងកំលុងព្រះនគរ ។

៧៦១. ព្រះភិក្ខុតព្រះសុត្រុតចិរចរ ស្តោះទីឧត្តរ
ក៏ចូលដោយឲ្យរបន្ទាយ ។

៧៦២. យល់បាត់ឆត្រទង់ត្រាត់ត្រាយ ចង្ក្រង់ភាត់ភាយ(4)
រំលោលរយានក្រាសាទ ។

៧៦៣. ស្ងាត់មុខមន្ត្រីអមាត្យ គង់គាល់ព្រះបាទ-
សិរីទេសរជភជា ។

(1) RIB : cāk
(2) MBN et RIB : srī jambū
(3) MBN et RIB : nūv yamanā bāk' bāt'
(4) RIB : rat(n) rāy

៣៦៤. ស្វាត់ព្រាហ្មណ៍ព្រឹទ្ធ សុំស្នូមយា- ចកចូលប្រាថ្នា
រឿង បានព្រះរាជទានទៅ(1) ។

៣៦៥. សេនាយោធាក្នុងក្រៅ ពលរេររឹងនៅ
សំរាប់ព្រះមហាក្សត្រា ។

៣៦៦. សឹងស្វាត់ស្ងួតស្ងប់ភក្ត្រា ទុរភិក្ខភាភា
ពាន់ពីរប្រការពោកពៃក្រ ។

៣៦៧. មួយបទុប្រោសព្រះដេស្សជ័យ សោយព្រះវិណាល័យ
មួយប្រោសព្រះរាមរាជបុត្រ ។

៣៦៨. ទាំងរាជសីតាទ្រង់ព្រត ព្រះលក្សលំអុត
ភក្តីព្រះរៀមរាមា ។

៣៦៩. ទាំងបីព្រះអង្គយាត្រា ចេញចាកអយុធ្យា
ក៏ដេងទាំងរាជបុរី(2) ។

៣៧០. ព្រះភិរុតរិះថាហេតុអ្វី យល់អប្តីក្តី
ពុំដូចរៀងមកពីបុរាណ ។

៣៧១. នេះសមបុរីរាជស្ថាន ថ្ងៃក្រោមក្រែងមាន
កោណាហាលហើយពុំវែង ។

៣៧២. ព្រះសុត្រុតបង្គំទូលថ្លែង សមនូវកើតទុក្ខស្តែង
ដីដាទម្ងន់ពុំស្រាល(3) ។

៣៧៣. ដោយខ្ញុំយល់ហេតុនូវប្រការ ថ្លែកថ្កែកបីរង្គាល
មហាទុរយសយើងហោង ។

៣៧៤. បទព្រះរាមទេពពុំត្រង ប្រទេសីរាជវង
ទម្ងន់ពិភពដ៏បុរី ។

៣៧៥. ស្តេចខ្វាល់ព្រោះព្រះជននី អ្នកសូមពារពី(4)
សម្តេចព្រះវរបិតា ។

៣៧៦. ផាឲ្យអង្គអញឯងជា ក្សត្រសោយរាជណា
ពិភពអយុធ្យាគ្រង ។

៣៧៧. យល់ពុំករុណាអ្នកហោង អ្នកសោតជាធ្ងង
រំលងម្តេចព្រះដេស្សា ។

៣៧៨. នេះតម្លូវសមព្រះរាមា ស្តេចត្រេចយាត្រា
ចេញចាកពីព្រះនគរហើយ ។

៣៧៩. រីព្រះជនកសោកតតស្បើយ ទល់ទុក្ខតតស្បើយ
សោកស្តាយសព្វរាស្ត្រវេលា ។

(1) RIB : raeṅ pān pradhān praḍān dīeṅ dau
(2) RIB : kamphaeṅ dāṃṅ rājapūrī
(3) RIB : thā näy neḥ eṅ
sam koet dukkh dhnan' buṃ srāl
(4) RIB : dūl sūm rājy bī

៨១៣. ប្អូនជាទីក្សត្រវរវង្ស ស្ដេចឡើយព្រះអង្គអន្តរធាន
ដូចព្រះធម្មធារឬស្ថាន រលាយកណ្ដាលសមុទ្របង់[1] ។
៨១៤. កាលក្សត្រ[2] វិសេសសុទ្ធ ស្ដេចស្ដែងដត់ពិធីទ្រង់
កម្មំតបះបូជាប - កើតជាបុត្របុរសប្អូន ។
៨១៥. ស្ដេចរួមរក្សាគ្រប់គ្រង គិតឯឃ្លាំងបិតាស្ងួន
ផ្ដើមថៃថ្លៃដើមខ្លួន ខ្វីមព្រះរាជបុត្រភ្ជា ។
៨១៦. យើងខ្ញុំបុត្រទាំងនេះនៃ ស្ដេចពុំអាល័យទ្រង់ករុណា
ទីអាសូរព្រះរាមា ស្ដេចស្ងួនពុំដែលឲ្យមានឃ្លាង ។
៨១៧. ក្រែងអស់យើងខ្ញុំទាំងប្អូនបាន ធ្វើខុសមែនមានទោសឆ្កាំឆ្គង
ដឹងរអើយស្ដេចដោះចង បាបឫទ័យក្រោធបោះបង់បុត្រ ។
៨១៨. ឱះឱខ្ញុំចាំព្រះជន្មជាក់ ព្រះជនកអ្នកដ៏គង់ជិត
គំរប់ប្រាំមួយឆ្នាំគត់[3] កំណត់ព្រះជន្មព្រះបិតា ។
៨១៩. បង្កើតយើងខ្ញុំបុត្រប្អូន បរិបូណ៌ស្ងួនសល់ស្នេហា
ទីតម្រូវលះវេលា បោះបង់បុត្រភ្ជាអសារសោះ ។
៨២០. កាលកើតកោលាហល ពោតុអសូរមួយមានឈ្មោះ
បរទុស្តអសូរនោះ មកដណ្ដើមយកពិភព ។
៨២១. ត្រៃត្រឹង្សព្រះឥន្ទ្រា អស់ទេវតាភិតភ័យស្ញែងស្លប់
សីងទុលមកគោរព អញ្ជើញព្រះអង្គស្ដេចទៅឆ្ពោះ ។
៨២២. បរទុស្តអសូរយល់ ស្ដេចស្ដែងដល់ត្រៃត្រឹង្សស្ពោះ
បរទុស្តអសូរនោះ ដោះទ័ពរត់ចាញ់ចេស្ដា ។
៨២៣. តម្រូវព្រះអង្គបាត់ ក្រែងមហាក្សត្រស្ដេចវេលា
ទៅជួយព្រះឥន្ទ្រា- ធិរាជឬយើងពុំយល់ ។
៨២៤. ទីព្រះទិស្ម ព្រះទិព្វការ វិះរាជសារទៀងទៅដល់
ស្រីណោះបន្ទូលសល់ សីងសោះសូន្យអសារ[4] ពេក ។
៨២៥. ប្រមូលអស់យើងខ្ញុំ ទុវធ្វើបរមាភិសេក
ព្រះរាមព្រះទៀមឯក គិតរេករាជពិភពគ្រង ។
៨២៦. ទុះទីព្រះជន្មស្គាល់- ស្លាប់បានយល់បុណ្យបុត្រធ្លង
បានបរិបូណ៌ដូចទុវបំណង បំណាច់ចំណាប់ព្រះឫទ័យ ។
៨២៧. ទីស្ដេចឡើយប្រាសឃ្លាតឃ្លា ព្រួយព្រះចិន្ដាដល់ក្សត្រក្ស័យ
ស្មោយស្មគ៌ព្រះវិណាល័យ និរាសរកពុំយល់ឡើយ ។

(1) MBN : ralāy soḥ sūny poḥ paṅ'
(2) RIB : braḥ osṭh
(3) MBN : oḥ o cām̥ braḥ aṅg s-āt
nā braḥ pād srīdasarath
prām̥ muoy hmịn chnām̥ gat'
(4) RIB : āsūr

៨២៨- ព្រះភិរុត ព្រះសុត្រុតតតត្រើយ[1] សោយសោកពុំស្បើយ
សង្រេងនឹងព្រះបិតា ។
៨២៩- នាងកៃកេសីសោកា ធ្ងូមភាជបុត្រា
ដាក់លើទិភជ័ប្រាកដ ។
៨៣០- នាងបន្ទូលថាវៃឃាបុត្រ នាបីកំណត់
សព្វសរិលអស់អង្គមនុស្សផង ។
៨៣១- ពុំដែលនានឹងកន្លង ធៀសចាកឲ្យរង
អំពើអំពល់ពុំដែលបាន ។
៨៣២- ជាតិជរាមរណាមាន ជាតីកើតបាន
ជារូបចំរើនអង្គា ។
៨៣៣- ពុំវៃលងល្បើយលុះជរា ចាស់ចាកមរណា
ដោយក្តីសភាពស្លាប់ហោង ។
៨៣៤- ដូចកលផលបុប្ផាផង ក្រពុំរីកតែទង
ស្រទាប់ត្របកបុស្សបទរ[2] ។
៨៣៥- សឹងទីករៃងភាយកេសរ ក្លិនក្លែបជីបទរ[3]
ក្បិណារៃប្រែស្បើយល្ហើយគន្ធា ។
៨៣៦- ក្តីបរិចលេចតែទងវា ខ្ទីចាស់ផលា
ស្រគាលហើយទុំទៀងហោង ។
៨៣៧- ក្បិណាធ្លាក់ចុះចាកវៃលទង ដូចកំណើតសត្វផង
អន្តោលអន្ទាក់ភពស្ថាន ។
៨៣៨- ក្មេងពាលកណ្តាលចាស់មរមាន ជាបរិយោសាន
សំរេចសំរាប់សព្វសរិល ។
៨៣៩- ក្នុងភូមិភពចក្របង្វិល សង្សារទីងទិល
លន្លិកក្នុងមហាសមុទ្រ[4] ។
៨៤០- ទោះបីព្រះបាទទសរថ មានព្រះជន្មកំណត់
មួយសែនកោដិកល្បស្កល់ស្កប់ ។
៨៤១- លុះអំណើសសែនកោដិកល្បគ្រប់ ពុំអាចទល់ទប់
សឹងលុះនូវក្តីមរណា ។
៨៤២- វៃឃាបុត្រពន្លកមាតា រីជាតិជរា
មរជាសំរាប់រូបហោង ។
៨៤៣- ព្រះភិរុតរំលត់ទុក្ខផង ហើយទើបទូលស្នង

(1) RIB : trāṇ troey
(2) RIB : sradāp' trapak pak pusp
(3) RIB : baṅ' beñ gandh
(4) RIB : rūp raṅ kamm caṅ pī kaṅval' ṭūc kal gambhīr ma- hāmahant ṭā samudr

ជល្តឹងនាងកៃកេសី ។

៨៥៤. បពិត្រព្រះវរជននី ព្រះបិតានរបតី
នោះមិញសុគតហើយហោង ។

៨៥៥. រីព្រះរាមទេពដ៏កន្លង ព្រះរាជបុត្រច្បង
ឥឡូវស្ដេចគង់ស្ថានណា ។

៨៥៦. នាងប្រាប់ថាហៃបុត្រា ម្ដាយណាក់អ្វីបា
បណ្ដូលបណ្ដាច់ថ្លើមថ្លៃ ។

៨៥៧. រីព្រះរាមរៀមក្រោធក្រៃ នាំទេពីថ្លៃ
នូវព្រះលក្ស្មណ៍យាត្រា ។

៨៥៨. បោះបង់ចេញចោលនគរា ត្រេចព្រៃព្រឹក្សា
ពុំដឹងដំណឹងស្ថានស្ថិត ។

៨៥៩. ព្រះភិរុតឬព្រះវរមិត្រ រៀមរាជដ៏បពិត្រ
ដ៏ត្រេចព្រះព្រៃយាត្រា ។

៨៦០. ដូចអ្នកយកអគ្គីសោះសា ដាលដុតទ្រា
នូវថ្លើមដង្ហើមពោរពុះ ។

៨៦១. ដូចនូវបែកធ្លាយខ្ទាយចុះ ដូចខ្លោចឈ្លោចឈ្លុះ
ឱភាររន្ធត់ក្រោធក្រៃ ។

៨៦២. ទើបខំទប់ទូលនាងកៃ - កេសីនូវសម័យ
ព្រះរាមព្រះរៀមរត់ទៅ ។

៨៦៣. នោះព្រះរាមរៀមទោសជ្រៅ ទោសទាស់ក្រៃក្រៅ
នូវច្បាប់បុរាណក្សត្រា ។

៨៦៤. ព្រះបាទទសរថរាជា ព្រះវរបិតា
ស្ដេចក្រោធបណ្ដេញបរបង់ ។

៨៦៥. ឬមួយតៀរត្រៀងព្រះអង្គ ព្រះរាមវិះចង់
ទៅនៅនាព្រៃនោះឯង ។

៨៦៦. ដោយកម្មវិបាកបង្វៀង ឬមួយសោតក្រែង
មហាឫសីសិទ្ធី ។

៨៦៧. ឲ្យអាក់ខ្វល់ខ្វាក់កលអ្វី ព្រះជន្មានរបតី
ស្ដេចខ្វល់[1] ពុំនៅព្រះនគរ ។

៨៦៨. ឬមួយទោសពីព្រះវរ - កោកល្បាបរ
បណ្ដេញព្រះរាមរត់ទៅ ។

៨៦៩. មួយសោតព្រះបាទចោមចៅ ទសរថរាជចៅ
ព្រះជន្មាមាននៅឡើយ ។

៨៧០. ឬស្ដេចស្ដែងសុគតហើយ ព្រះអង្គកតត្រើយ[2]

(1) RIB : stec khmās
(2) RIB : trāṇ troey

ក៏រត់ទៅនៅនាព្រៃ ។

៨៦១- នាងប្រាប់សព្វសព្វសម័យ សំណោះថាវៃហា
ភិរុតរូបរត្នស្ងួនភ្ងា ។

៨៦២- កាលព្រះរាមទេពបងថា នាំរាជសីតា
ព្រះលក្ស្មអនុជចេញទៅ ។

៨៦៣- នោះព្រះជនកបានៅ ស្ដេចសោកស្ដាត់ស្ដៅ
ហឫទ័យទល់ទុក្ខវេទនា ។

៨៦៤- ពេលទាំងនេះអង្គព្រះបិតា ខ្វាល់បរបងថា
លុះលះវៀងរាជបុរី ។

៨៦៥- មួយសោតអង្គពាក្យពី មុនីវរសិទ្ធិ
មហាឫសីស្គាំស្គង ។

៨៦៦- នាងកេកយ្យាសោតហោង គិតឯមានប្រាង
រកាំរកៀសហឫទ័យ ។

៨៦៧- នាព្រះរាមទេពក្រោធក្រៃ រត់ទៅនៅព្រៃ
នោះហេតុពាក្យពីប្ដេជ្ញា ។

៨៦៨- អញឯងសូមសត្យវាចា ពីព្រះជនកបា
នូវឲ្យបាងជជាក្សត្រ ។

៨៦៩- សេពសោយរាជ្យរម្យរាស្ត្ររដ្ឋ គ្រប់គ្រងសម្បត្តិ
សំបូណ៌បុរីអយុធ្យា ។

៨៧០- មួយសោតអញសូមប្ដេជ្ញា ឲ្យព្រះរាមា -
ជរាជចេញចាកព្រះនគរ ។

៨៧១- ទៅធ្វើតបះការករ ក្នុងព្រៃពនធរ
អំណុងលុះបួនដណ្ដាប់ឆ្នាំ ។

៨៧២- ឲ្យសាងសីលវិញ្ញការកម្ម ស្រេចហើយនៃនាំ
ទេពីនូវព្រះអនុជា ។

៨៧៣- វិលមកស្រីអយុធ្យា នោះព្រះជនកបា
ប្រសិទ្ធព្រះពរអញហោង ។

៨៧៤- ឈ្មោះឯងព្រះរាមបុត្រច្បង អាក់ខ្វាក់ខ្វាល់ផង
ជាភេទទុំនៅព្រះនគរ ។

៨៧៥- ដោះបង់សម្ដេចព្រះភូធរ ទសរថព្រះវរ -
បិតាកាលស្ដេចពុំទាន់សុគត ។

៨៧៦- លុះឮជាព្រះរាមរត់ ស្ដេចសោករាជបុត្រ
សម្រេចនោះសោយទិវាល័យ ។

៨៧៧- ព្រះភិរុតស្ដាប់សព្វសម័យ ពាក្យពីនាងកៃ -
កេសីប្រាយប្រាប់ទាំងពិលាប ។

៨៧៨- ដើមឡើយប្រណាម្យព្រួញក្រាប លុះឮជាក់ច្បាប
ជាព្រះរាមរត់បទនោះ ។

៤៧៩. ព្រះភិរុតរិះរឹងខ្លាល់សោះ - សាសល់ក្បួនណានោះ
ក៏ញ័រព្រះបាទ្យទ័យក្រោធ ។

៤៨០. យកព្រះបាស្ដុកព្រះស្រោត តាំងពីរពុំកោត
ពុំស្ដាប់បន្ទូលនាងឡើយ ។

៤៨១. នេត្រច្រាលដែងដាលតិតស្បើយ[1] ទះព្រះបាស្ដហើយ
បីដូចរន្ទះខ្ទារខ្ទរ ។

៤៨២. ក្រោធក្រោកដាលដោះឡើងឈរ ដូចធ្នូវិទ្ធកព្រះនគរ
តាំងព្រះសុមេរញ្ញាប់ញ័រ ។

៤៨៣. សាគរពុះពោរអស្ចារ្យ ព្រះភិរុតរាជខ្លាល់
កក្រើកអំពើកប្រឹថពី ។

៤៨៤. ដានូវកាប់នាងកៃកេសី កាចកាឫកិណី
សម្លាប់ព្រះបាទទសរថ ។

៤៨៥. ឲ្យព្រះអង្គលុះសុគត ពោសតាំងនេះបទ
តែស្រីចណ្ដាលរឹងមាត់ ។

៤៨៦. គិតគួរអញឯងកាប់កាត់ ដាតីរបីកំណាត់
តប្បូវឲ្យក្ស័យជន្មា ។

៤៨៧. គឺមោះបទដាមាតា ជិតញ្ញើមរក្សា
អញរស់បទក្បួរគាត់ហោង ។

៤៨៨. វិទោសគាត់ជូនដីកន្លង ក្រៃលែងស្រីផង
កំប្រេតប្រាកដលោកីយ ។

៤៨៩. នាថ្លាប់វិស័យជាស្រី នៅនឹងប្ដីសី
សប្បាយបងប្អូនកូនចៅ ។

៤៩០. ម្ដេចដល់បណ្ដាលពោលជ្រៅ ឲ្យរំដួលក្ដៅ
ក្រៃក្រៅវិស័យក្សត្រី ។

៤៩១. ចណ្ដាលកាចកាឫកិណី សល់សម្លាប់ប្ដី
ជាក្សត្រប្រសើរសុគត ។

៤៩២. បទបានពាក្យម្ដេចខ្ជាមត់ ទើបព្រះទសរថ
ស្ដេចពុំរិះរេពាក្យសត្យ ។

៤៩៣. ពុំអាចឲ្យរាជសម្បត្តិ ព្រះរាមរៀមរាត្ន
ដ៏ជាព្រះរាជបុត្រច្បង ។

៤៩៤. បទទើសពាល់ពាក្យពេចន៍ហោង ស្ដេចខ្លាសរាស្ត្រផង
ស៊ូរត់ទៅនៅនាព្រៃ ។

៤៩៥. ព្រះជនកសោកមហាទៀងព្រៃ លុះព្រះជន្មក្ស័យ
ពុំបង់ពាក្យសត្យមេត្រី ។

(1) MBN : netr crāl jrāp jruot it spoey
RIB : netr crāl ṭaeṅ ṭāl jā troey

៨៩៦- ថាបើនាងកៃកេសី នេះពុំស្រដី
នោះតើមានទោសអ្វីឡើយ ។
៨៩៧- បើយកនាងនេះជាត្រើយ ស្មើយកកេសកើយ
លើព្រះអម្រឹត្យូវហោង ។
៨៩៨- មួយបាបបុរាណអញផង នាអញមករង
ខ្លួនចាប់ប្រតិសន្ធិ ។
៨៩៩- ក្នុងផ្ទៃនាងកៃកេសី ម្នោះមាយាស្រី
កុហកមុសាវាទខ្លាត ។
៩០០- បើអញសោយរាជ្យជាក្សត្រ នេះហើយក៏នូវស្លាត់
ប្រយោជន៍កើតក្ដីអន្តរាយ ។
៩០១- វិសត្រូវទៀតសោតមើលងាយ ពុំកោតខ្សឹតខ្ពាយ
ចចើកបំបែកស្រុកទេស(1) ។
៩០២- អង្គអញសោតកុំប្រហែស រករៀនសិល្បវិសេស
អំពីលោកីយនេះហោង ។
៩០៣- ទើបនូវបាននាំរូបឆ្លាស់ឆ្លង លះវៃងរំលង
ចំណងចំណាំទេភា ។
៩០៤- គួរថ្វាយបង្គំក្រាបលា នាងកោកល្យា
ទេពីពិសុទ្ធសីលវៃសយ ។
៩០៥- បំបាត់បាបទេភាភ័យ កំណើតក្សិណក្ស័យ
ចង្វៃប្រើអង្គអញបីស្រលះ ។
៩០៦- ហើយនូវសាងសីលសុទ្ធតបះ- កម្ពុកបនូវជំរះ
មន្ទិលអសោចបាបបង់ ។
៩០៧- អញនូវតាមដោយខ្លួនព្រះអង្គ ព្រះរាមស្ដេចគង់
ស្ថានណាអញទៅស្ថាននោះ ។
៩០៨- សម្ដេចព្រះភិរុតគិតស្មោះ នូវព្រះសុត្រុតផ្ដោះ
ច្រាសារនាងកោកល្យា ។
៩០៩- លុតជង្ឃ្យុននអង្គសិរសា ក្រញ៉ាក្រាបដ៏ក្រលា
មហាមណ្ឌលប្រថពី ។
៩១០- ផ្ទាប់ផ្ទាល់ព្រះលលាដដល់ដី ដែលដាក់សិរសី
នោះព្រះចរណីព្រោមព្រុត ។
៩១១- ព្រះលលាដព្រះជង្ឃដ៏ច្រត់ ដែលព្រះភិរុត
ជាកេរតិគន្ធងស្នាមនៅ ។
៩១២- នាងកោកល្យាហាហោ ព្រះភិរុតឡើងទៅ
នូវព្រះសុត្រុតអនុជា ។

(1) RIB : pampaek nūv kul bhines

៤៧៩. ព្រះភិរុតរិះរឹងខ្ញាល់សោះ - សាសល់ក្បួរណានោះ
ក៏ញ័រព្រះហឫទ័យក្រោធ ។

៤៨០. យកព្រះហស្តចុកព្រះសោត ទាំងពីរពុំកោត
ពុំស្តាប់បន្ទូលនាងឡើយ ។

៤៨១. នេត្រច្រាលដែងដាលតិតស្បើយ[1] ទះព្រះហស្តហើយ
បីដូចរន្ទះខ្ទារខ្ទរ ។

៤៨២. ក្រោធក្រោកដាលដោះញើងឈរ ដូចនូវភ្លូកព្រះនគរ
ទាំងព្រះសុមេរញ្ញាប់ញ័រ ។

៤៨៣. សាគរកុះពោរអស្ចារ្យ ព្រះភិរុតរាជខ្ញាល់
កក្រើកអំពើកប្រថពី ។

៤៨៤. ជានូវកាប់នាងកៃកេសី កាចកាឡកិណី
សម្លាប់ព្រះបាទទសរថ ។

៤៨៥. ឲ្យព្រះអង្គលុះសុគត ពោលទាំងនេះបទ
តែស្រីចណ្ឌាលរឹងមាត់ ។

៤៨៦. គិតគួរអញឯងកាប់កាត់ ជាពីរបីកំណាត់
តិបប្បូវឲ្យក្ស័យជន្មា ។

៤៨៧. គឺម៉ោះបទជាមាតា ចិញ្ចឹមរក្សា
អញរស់បទក្បួរគាត់ហោង ។

៤៨៨. រំពោសគាត់ជូនដីកន្លង ក្រៃលែងស្រីឯង
កុំប្រែតប្រាកដលោកីយ ។

៤៨៩. នាធ្លាប់វិស័យជាស្រី នៅនឹងប្តីសី
សប្បាយបរិបូរណ៍កូនចៅ ។

៤៩០. ស្តេចដល់បណ្តាលពោលទ្រៀវ ឲ្យរំដួលក្តៅ
ក្រៃក្រៅវិស័យក្សត្រី ។

៤៩១. ចណ្ឌាលកាចកាឡកិណី សល់សម្លាប់ប្តី
ជាក្សត្រប្រសើរសុគត ។

៤៩២. បទបានពាក្យស្តេចស្ទាមត់ ទើបព្រះទសរថ
ស្តេចពុំរិះរេពាក្យសត្យ ។

៤៩៣. ពុំអាចឲ្យរាជសម្បត្តិ ព្រះរាមរៀមរត្ន
ដ៏ជាព្រះរាជបុត្រច្បង ។

៤៩៤. បទទើសតាល់ពាក្យពេចន៍ហោង ស្តេចខ្លាសរាស្ត្រផង
ស៊ូរត់ទៅនៅនាព្រៃ ។

៤៩៥. ព្រះជនកសោតមហាទៀងទ្រៃ លុះព្រះជន្មក្ស័យ
ពុំបំពាក្យសត្យមេត្រី ។

(1) MBN : netr crāl jrāp jruot it spoey
RIB : netr crāl ṭaeṅ ṭāl jā troey

៨៩៦- ថាបើនាងកៃកេសី នេះពុំស្របដី
នោះតើមានទោសអ្វីឡើយ ។

៨៩៧- បើយកនាងនេះជាត្រើយ ស្មើយកកេសកើយ
លើព្រះអគ្គីឡូវហោង ។

៨៩៨- ជួយបាបបុរាណអញផង នាអញមករង
ទម្ងន់ចាប់ប្រតិសន្ធិ ។

៨៩៩- ក្នុងដៃនុះនាងកៃកេសី ដោះមាយាស្រី
កុហកមុសាវាទក្លាត ។

៩០០- បើអញសោយរាជ្យជាក្សត្រ នេះហើយក៏នូវស្លាត់
ប្រយោជន៍កើតក្តីអន្តរាយ ។

៩០១- រីសត្រូវទៀតសោតមើលងាយ ពុំកោតខ្សិតខ្លាយ
ចចើកបំបែកស្រុកទេស[(1)] ។

៩០២- អង្គអញសោតកុំប្រហែស រករៀនសិល្បវិសេស
អំពីលោកីយនេះហោង ។

៩០៣- ទើបនូវបាននាំរូបផ្លាស់ផ្លង លះវៃងវំលង
ចំណាងចំណាំទេរា ។

៩០៤- ក្សួរថ្វាយបង្គំក្រាបលា នាងកោកល្យា
ទេពីពិសុទ្ធសីលវៃសយ ។

៩០៥- បំបាត់បាបវេរាភ័យ កំណើតក្សិណក្ស័យ
ចវៃប្រិអង្គអញបីស្រលះ ។

៩០៦- ហើយនូវសាងសីលសុទ្ធតបះ - កម្មកបនូវដំរះ
មន្ទិលអសោចបាបបង់ ។

៩០៧- អញនូវតាមដោយដូវព្រះអង្គ ព្រះរាមស្តេចគង់
ស្ថានណាអញទៅស្ថាននោះ ។

៩០៨- សម្តេចព្រះភិរុតគិតស្មោះ នូវព្រះសុត្រុតផ្តោះ
ប្រាសាទនាងកោកល្យា ។

៩០៩- លុតជង្ឃុនុនអង្គសិរសា ក្រូញក្រាបដ៏ក្រលា
មហាមណ្ឌលប្រថពី ។

៩១០- ផ្កាប់ផ្កាល់ព្រះលលាដដល់ដី ដែលដាក់សិរសី
នោះព្រះចរណីព្រោមព្រុត ។

៩១១- ព្រះលលាដព្រះជង្ឃដ៏ជ្រត់ ដែលព្រះភិរុត
ជាកេរតិតខ្លួងស្លាមនៅ ។

៩១២- នាងកោកល្យាហាហៅ ព្រះភិរុតឡើងទៅ
នូវព្រះសុត្រុតអនុជា ។

(1) RIB : pampaek nūv kul bhines

៩១៣- នាងទ្រង់ព្រះកន្សែងសោកា ព្រះហស្តដ៏ប្រទា
ទិនទុបអង្គព្រះភិរុត ។

៩១៤- នាងឃ្មុញព្រះបាទទសរថ ពិលាបលុះលត់
រលាយរំសាយសោកស្ងួរ ។

៩១៥- ថ្លែងថាតាំងទឹកនេត្រអាក់អួល ដង្ហើមខ្សឹកខ្សួល
ស្រក់ទឹកព្រះនេត្របីរលាយ ។

៩១៦. នាងប្រាប់ដោយដំណើរព្រះរាម រត់ស្ដេចឲ្យតាម
ទៅឃាត់មិនឲ្យចេះចេរ ។

៩១៧- អ្នកពុំវិលថ្កានព្រះនគរ ឡើយលុះចេញចរ
ក៏ត្រេចព្រះព្រៃយាត្រា ។

៩១៨- ព្រះបាទទសរថរាជា សោកព្រះរាមា-
ធិរាជលុះស្ដេចសុគត ។

៩១៩. នាងប្រាយប្រាប់ព្រះភិរុត ដូចដើមពាក្យមត់
នាងកៃកេសីសូមពរ ។

៩២០- វរសិទ្ធិមុនីប្រើសារល អញ្ជើញព្រះភិរុតចរ
គូព្រះសុត្រុតអនុជា ។

៩២១- មកលើកព្រះសពព្រះបិតា ព្រះអង្គអនិច្ចា
លុះសោយព្រះទិវង្គត ។

៩២២- នាងកៃកេសីមកមត់ ប្រើប្រាប់ព្រះភិរុត
ថានូវស្ដាប់ប្រជា– ។

៩២៣- ភិសោកព្រះរាមរាជា . ស្អប់ព្រះបិតា
នោះសឹងមុសាវាទទេ ។

៩២៤- នាងប្រាប់អស់សាថិឥតទេ[1] ក្បួណនោះឯងឯង
ព្រះភិរុតរឹងក្រេវក្រោធក្រៃ ។

៩២៥- ដឹងដើមសារសព្វសម័យ ពាក្យពីនាងកៃ-
កេសីក៏ប្រើធ្វើកល ។

៩២៦. ដងនោះមហាមុនីនិមល មកថ្កានមណ្ឌល
ប្រាសាទនាងកោសល្យា ។

៩២៧- ព្រះភិរុតព្រះសុត្រុតអនុជា យល់វរសិទ្ធិមហា-
ឫសីមកសួរពត៌មាន ។

៩២៨- ទុបយំលើប្រាសាទស្ពាន លុះបន្ទោសោកស្រាន
ស្រេចស្ងួរព្រះបាទគិសី ។

៩២៩- ប្រាយប្រាប់អស់ពាក្យពេចន៍ពី ព្រះជនកនរបតី
ក៏សោកព្រះរាមរាជបុត្រ ។

៩៣០- ថាលៃហាព្រះស្រីជីភិរុត ព្រះជនកបាសុគត

(1) RIB : it dve

ដ៏ក្រៃដណ្តាប់ថ្ងៃ ហើយ ។

៩៣១. ពុំគួរយើងថ្ងូរថ្ងួងឡើយ បន្ទោរសោកស្បើយ
សំរេចព្រះសពសំស្ការ ។

៩៣២. នាព្រះភិរុតព្រះសុត្រុតកុមារ ស្តាប់ព្រះបន្ទូលសារ
មហាឫសីវរសិទ្ធិ ។

៩៣៣. ឲ្យរៀបទស្គរជ័យភេរី ផ្លុំមុខមន្ត្រី
នូវពលសកលយោធា ។

៩៣៤. ប្រដាប់មណ្ឌបសុវណ្ណា ភាយរត្នរចនា
រូបឋានពិមានត្រៃត្រឹង្ស ។

៩៣៥. លើខ្ពងព្រះសុមេរស៊ឹមស៊ឹង បរិពន្ធ(1) ជុំវិញ
ស៊ឹងរត្ននូវនពសុវណ្ណា ។

៩៣៦. ហើយយកព្រះសពព្រះបិតា ដ្កល់ផ្តើងបូជា
ព្រះភ្លើងសំរេចសំស្ការ ។

៩៣៧. ស្រេចមហាឫសីមុនីអាត្ម(2) ព្រាហ្មណ៍ព្រឹទ្ធភិណាចារ្យ
មន្ត្រីសេនាដ៏អនេក ។

៩៣៨. នូវប្រដាប់មង្គលអតិរេក ប្រជាមាភិសេក
ព្រះភិរុតឲ្យសោយរាជ្យវង ។

៩៣៩. ទម្រង់ថ្កុំក្រោមត្រប់ត្រង សេពសោយរាជ្យស្នង
សម្តេចព្រះវរបិតា ។

៩៤០. ព្រះភិរុតក្រោធទ្រង់ព្រះចិន្តា ឥតចិត្តចេតនា
នូវជប់សោយរាជសម្បត្តិ ។

៩៤១. ដូចអ្នកយកពិសពស់(3)ក្តាត់ ជាក់ជិវ្ហាថ្វាត់
ស្ទើរក្ស័យព្រះជន្មកាលនោះ ។

៩៤២. ស្តេចទ្រង់ព្រះចិន្តាជាពោះ អញសោយរាជ្យផ្តោះ
ស្នាលស្នងព្រះវរបិតា ។

៩៤៣. ដោយពាក្យអ្នកតាំងនេះណា ស៊ឹងហៅបានហា
ដូចពាក្យនាងកៃកេសី ។

៩៤៤. លោកដែលដល់សម្លាប់ប្តី ឈ្មោះតើគាប់អ្វី
ក៏នឹងថ្ងូលចិត្តព្រមដង ។

៩៤៥. គួរព្រះរាមរាជបុត្រច្បង ស្តេចសោយរាជ្យស្នង
សម្តេចព្រះវរបិតា ។

(1) MBN : paribā
RIB : paribhaṇḍ
(2) RIB : munī āth
(3) RIB : bis bal

៩៤៦. លុះស្ថិតរាជនោះកាលណា ទើបយកអនុជា
ដឹកល់ប្រគល់រាជ្យរម្យ ។

៩៤៧. ហេតុចិត្តឧត្ថាស(1) ជាប់បំ- បែកជាកោសធំ
បង្កើតកោលាហលក្រៃ ។

៩៤៨. ពោះប៉ិឲ្យអញសោយរាជ្យនៅឡ. ព្រះនគរនេះនៃ
អញទើមតាំងដល់ប្រាជ្ញា ។

៩៤៩. អញនូវយកព្រះខ័នពេជ្រថ្លា ទំលាយអង្គទិព
អញបង់ឲ្យលុះអន្តរាយ ។

៩៥០. មួយសោតអញនូវតាមពៅថ្វាយ បង្គំព្រះបាទនារាយ
ហើយសូមអញ្ជើញស្ដេចមក ។

៩៥១. ពោះបីព្រះរាមជ័ពន្លក តុំវិលវិញមក
ប្រយោជន៍ប្រវេណីក្សត្រ ។

៩៥២. អញនូវបំរើប្រតិបត្តិ ព្រះបាទទៀមរត្ន
បីដូចព្រះលក្ស្មណ៍នោះហោង ។

៩៥៣. ឯមហាឬសីព្រាហ្មណ៍ផង ឯកមន្ត្រីឆ្លង
ពីរឯរិះតំរង់មហាក្សត្រ ។

៩៥៤. ពុំអាចនូវទូលទាំងឃាត់ ព្រះភិរុតខ្វាល់ក្ដាត់
ប្រើព្រះសុត្រុតអនុជា ។

៩៥៥. ឲ្យរូបភេរីឃោសនា ជុំរាជយោធា
សេនាមុខមន្ត្រីផង ។

៩៥៦. ខុនគជរៀបគជផ្លូវរដ្ឋង ខុនពាជីផង
គ្រឿងគ្រប់ប្រដាប់ក្ងិតក្ងង់ ។

៩៥៧. ខុនរថរៀបរថបីរហាប់ សោតសឹងប្រាណប្រុង
ប្រដាប់សំរាប់រថភាយ ។

៩៥៨. ខុនពលផ្ទើរដើរទាំងឡាយ ប្រាមប្រាប់សព្វសាយ
សឹងសោមនស្សសាទរ ។

៩៥៩. ឮជាព្រះភិរុតនឹងចរ ទៅទូលព្រះភូធរ
វិលមកមណ្ឌលស្ថានស្ថិត ។

៩៦០. ដូចអ្នកយកទឹកអម្រឹត មកស្រោចស្រប់ចិត្ត
គ្រាកាលត្រូវដាក់ភ្លើងក្រៃ ។

៩៦១. សោតសឹងព្រមត្រើសហឫទ័យ ហេតុក្ដីអាល័យ
អាណោះសម្ដេចភូវនាថ ។

៩៦២. ព្រះភិរុតព្រះសុត្រុតកុមារ ពាសពាក់ជដា
សម្ភារសំបកឈើក្រង់ ។

(1) RIB : opās

៩៦៣. ប្រែប្រាណាបីរូបបានបាក់អង្គ  ឫសីសិទ្ធពរពង្ស
ពិសេសពិសុទ្ធសីលា ។

៩៦៤. ឡើងលើរាជរថយាត្រា  គគឹកដូចជា[1]
គេគោះទាំងរាជដ៏បុរី ។

៩៦៥. នាងកោកល្យាក្សត្រី  នាងកៃកេសី
ប្រតីនូវនាងស្រមុត ។

៩៦៦. សឹងឡើងគង់លើរាជរថ  តាមព្រះភិរុត
សន្និកធារាធរណី ។

៩៦៧. អស់ភ្លេងភ្លាត់តូរ្យតន្ត្រីយ  ត្រៃសង្ខភេរី
រៀបរៀងដោយដងមាគ៌ា ។

៩៦៨. ស្តេចទៅទាំងទុក្ខសោកា  ស្ទួតព្រះភក្ត្រា
ឱភាតាន់តឹងរួលក្រំ ។

៩៦៩. ស្តេចប្រាមពុំឲ្យដំផ្លុំ  តន្ត្រីយសេពសម
ប្រគំបំរើឡើយហោង ។

៩៧០. លុះទៅដល់ព្រះបាទបង  ឈងភ្លេងភ្លាត់ផង
ជំរៀងបំរើព្រះអង្គ ។

៩៧១. រាជរថព្រះភិរុតស្តេចគង់  ថ្កល់ធ្មើងយាក់អង្គ
មណ្ឌលនៃព្រះចន្ទ្រា ។

៩៧២. អស់មុខមន្ត្រីសេនា  ស្រីស្នំព្រៀបព្រា
រូបបានតាភាកាសធរ ។

៩៧៣. ស្តេចចេញចាកក្សួរព្រះនគរ  ពល់ក្រាស់វិករ
កក្រើកអំពើកប្រថពី ។

៩៧៤. ប្រាំមួយម៉ឺនអក្ខោភិនី  ព្រះភិរុតនរបតី
នូវព្រះសុត្រុតយាត្រា ។

៩៧៥. ស្តេចចរលុះរសៀលសុរិយា  ស្តេចដាក់នៅនា
ឧទ្យានដែលព្រះរៀមផ្ទុំ ។

៩៧៦. ស្តេចលុតលើកករបីបង្គំ  គក់ឱរាយំ
ស្រណោះព្រះរៀមដៃស្នា ។

៩៧៧. លុះព្រឹកស្រាងស្រែចទិវា  រំស្តួងស្តេចលេលា
ទៅដល់ឆ្នេរមហានទី ។

៩៧៨. សួរសព្ទសេនាសេនីយ  រាជរថពាជី
នូវពលសកលយោធា ។

៩៧៩. សន្និកត្រៃព្រឹក្សបព្វតា  ធ្លាក់ធ្លាយសេលា
មហានទីបីរលក ។

(1) RIB : dau jā

# កណ្ឌ ទី៩

៩៨០- ឯវៃនោះកុម្ភ័នចេញមក    ដោកបើកភ្នែកដក
ក៏មើលទៅយល់យោធា ។

៩៨១- យល់អស់រាជរថអស្សពាហា    គជសារសេនា
នូវរេពលពាលក្រាស់ក្រៃ ។

៩៨២- កុម្ភ័នក្រោធញ័រឫទ័យ    គិតអស្ចារ្យស្ម័យ
ថានេះនាងកៃកេសី ។

៩៨៣- អភិសេកព្រះភិរុតជាតិ -    ស្នូររាជបុរី
បុរាណនៃស្រីអយុធ្យា ។

៩៨៤- នេះសមព្រះភិរុតរាជា    នាំពលយោធា
មកតាមព្រះរាមនូវព្រះលក្ស្ម ។

៩៨៥- លោកដែលជង្គើមរាជ្យអ្នក    បានត្រងរាស្ត្ររក្ស
ដោយពាក្យនាងកៃកេសី ។

៩៨៦- ស្ដេចពុំឃ្លានរាជបុរី    ហើយនាំទេពី
ជាបីនូវព្រះអនុជា ។

៩៨៧- មកនៅនាព្រៃបព្វតា    ធ្វើតបៈកម្មជា
ឫសីពិសេសសិទ្ធពារ ។

៩៨៨- ស្ដេចហើយព្រះភិរុតនាំប-    រិវារពលនិករ
មកតាមធ្វើគត់ព្រះអង្គ ។

៩៨៩- ពោះបីព្រះភិរុតនេះខ្ញង[1] -    ពលមកត្រៃចត្រង់
អញ្ជើញព្រះរាមនរបតី ។

(1) RIB : baṅs

៩៩០. វិលទៅសោយរាជ្យនាបុរី នោះអញមេត្រី
សំណោះសំណាលសួរសាន្ត ។
៩៩១. ស្ដឹកបើភ្លេចភ្លើយបាន ដោះមកទុកភាន
បំពានពិឃាតបិ៍ព្រះអង្គ ។
៩៩២. អញនូវផ្លាញព្រះកិរុតប្លែងប្លុង ឲ្យវិនាសបង់
ទាំងពលសកលយោធា ។
៩៩៣. ហើយអញយកព្រះភរិយា ទៅសោយរាជ្យា
ស្រីអយុធ្យាដ៏ប្រាកដ ។
៩៩៤. យល់ជាទ ព្រះកិរុតរាជបុត្រ ព្រះជាទទសរថ
ក៏ទៀបសរអញជានឬ ។
៩៩៥. កុវ័ននឹងបំពង់ឫស្សី រំពងទាំងនៃត្រ
អស់ពលក្រុំមួយម៉ឺនមក ។
៩៩៦. ឲ្យមូលទូកទាំងម៉ឺនសឹក ក្នុងនៃត្រហើយយក
នូវគ្រឿងអាវុធសស្ត្រា ។
៩៩៧. ចូលចាំសព្វច្រកអធ្វា ដោយភ្នេរគង្គា
បង្កប់នូវកិច្ចក្លួមក្លាត់(1) ។
៩៩៨. ប្រាប់ជាគ្នាយើងប្រយ័ត្ន អញនូវផ្លាញក្សត្រ
នេះឲ្យវិនាសអន្តរាយ ។
៩៩៩. ពោះទាំងទេពតាស្លូតនាយ អញនូវជាញ់ឲ្យខ្លាយ
ប្រល័យទាំងស្លូតវិនាសបង់ ។
១០០០. ម្ដេចឲ្យព្រះរាមទេពទ្រង់ សំបកឈើគង់
ត្រមោចព្រះអនុជទេពី ។
១០០១. នេះបទនាងកៃកេសី ជំណើមរាជ្យពី
ព្រះរាមមកឲ្យព្រះកិរុត ។
១០០២. អញនូវថ្លែងសរបីប្រាកដ ឲ្យខ្ទាត់ដល់សមុទ្រ
បង្អើរទាំងពលយោធា ។
១០០៣. កុវ័នទឹងខិងឯមហិមា រៀបពលត្រៀបត្រា
បណ្ដាក់ដោយភ្នេរនទី ។
១០០៤. កាលនោះអង្គឯកមន្ត្រី ទូលព្រះនរបតី
ព្រះស្រីកិរុតរាជា ។
១០០៥. បពិត្រស្ងួនព្រះចិន្ដា នាំយើងយាត្រា
មកដល់នគរនេះនៃ ។
១០០៦. មានប្រមាញ់មួយជាស្ដេចនៃព្រ ឈ្មោះកុវ័ននៃព្រ
នូវឫទ្ធិតេជៈបីទូរ ។

(1) RIB : cūr cāṃ sabv crak ādhvā
pañkap' ātmā
pañkot hoey buon klaṃ klāt'

១០០៧. រីកម្លាំងគីតួគជសារ(1) ស្មោះខ្លាំងពេញពល
មានពលប្រាំមួយម៉ឺនដៃ ។
១០០៨. កូចិនខ្ពស់ធំស្ពឹមស្មៃស្កុ ស្មោះស្មើភ្នំនៃ
មមា មមួរយោជនា ។
១០០៩. កាលព្រះរៀមស្ដេចដល់ស្ថាន នេះព្រះរៀមបាន
ជាមិត្រនឹងកូចិននោះ ។
១០១០. កូវិនស្មើស្មុំពាងពោះ ចងចិត្តស្មើស្មោះ
សម្លាញ់សំលូតតតត្លង ។
១០១១. ហើយកូចិនឯងចម្លង ព្រះរាមស្ដេចឆ្លង
លុះរួចទៅត្រើយខាយណា ។
១០១២. នេះតម្ងួរ ព្រះអង្គយាត្រា នាំពលយោធា
ពលគជតាជីសារថី ។
១០១៣. បរិពារពាសពេញប្រថពី មកដល់នទី
ដៃជនបាន ព្រះរៀមនេះតម្ងួរ ។
១០១៤. ក្រែងស្ពានស្ដេចនាំពលញូរ មកជាសត្រូវ
នឹងព្រះរៀមភជភមា ។
១០១៥. ក្រែងកូចិនខឹងពុះពារ ការព្រះជេដ្ឋា
ប្រយ័ត្ននឹងព្រះនរបតី ។
១០១៦. គាត់ពុំដឹងដើមមកនូវក្ដី ជាតិជាមេត្រី
បង្គំព្រះរៀមក្សត្រថ្លៃ ។
១០១៧. ព្រះភិរុតក្រាបព្រះបាឬទ័យ ដឹងដើមត្រើរត្រូ
ពន្លឺកនូវឫទ្ធិដេស្ដា ។
១០១៨. ឯងនោះកូចិនយាត្រា លុះឆ្នេរគង្គា
ប្រយោជន៍ទទួលសឹកសារ ។
១០១៩. មើលយល់អស់រាជបរិពារ គប់គាល់ក្រាស់ក្រាល
អនេកអនន្តជាសងា ។
១០២០. ព្រះភិរុតព្រះសុត្រុតជាតិជា ស្ទប់ស្ទាត់ព្រះភក្ត្រា
ក៏ប្រួញពុំត្រើសរួសរាយ ។
១០២១. សោតសឹងទល់ទុក្ខសព្វសាយ ពិតពុំសប្បាយ
តាំងពលរេរាជបរិពារ ។
១០២២. ព្រះភិរុតព្រះសុត្រុតកុមារ សឹងពាក់ជដាធារ
សម្ភារសំបកឈើទ្រង់ ។
១០២៣. កូចិនសន្ធប់លុតជង្ឃ្យ ស្រយាកអស់អង្គ
ក៏ផ្ទាក់ផ្គួរកាំពីដៃ ។

(1) RIB : rī kamlāṃṅ git ṭă gajendr sār

១០២៤. ដាក់ជាព្រះភិរុតមកវៃ - ត្រើរករៀមវៃខ្លួ
អាល័យសម្ដេចភមា ។
១០២៥. កូវ៉ិនលុះលាន់មាត់ថា អះអញស្មានជា
ព្រះភមនូវព្រះជ័ភិរុត ។
១០២៦. ស្ដេចខ្លាល់សំដាក្ខាបទ ព្រះបាទទសរថ
ដោយពាក្យតាងកៃកេសី ។
១០២៧. អភិសេកព្រះភិរុតជាត - ស្នូរភជជ័បុរី
ព្រះភមព្រះទៀមខ្លាល់ហោង ។
១០២៨. ហើយព្រះភិរុតមោះមកប៉ង ជាសត្រូវផង
សម្ដេចនាភយភមា ។
១០២៩. តុំដឹងដើមព្រះភិរុតជា ឈ្មោះទេកូវិលា
កម្លូវមកតាំងទុក្ខទល់ ។
១០៣០. កូវ៉ិនអន្សាស្រ័យយល់ សព្វប្រការកល
ដំរិណាងដំណើរនោះផង ។
១០៣១. ជឿជាសុភាពពិតហោង ទើបកូវ៉ិនក្ដង
ថ្វាត់ថ្វាយបង្គំកាលនោះ ។
១០៣២. ព្រះភិរុតយល់កូវ៉ិនឆ្ពោះ មកថ្វាយបង្គំឈ្មោះ
សំលូតពិតពីហឫទ័យ ។
១០៣៣. វិស្ដងស្ដេចលើកព្រះហស្ដាខ្លួ នមស្ការធ្មើរពៃព្រ
រីងហើយសំណោះស្នេហាស្និទ្ធ ។
១០៣៤. កូវ៉ិនទូលជាបពិត្រ នាស្ដេចទ្រង់ក្រិត្យ
ព្រះក្រមពិសុទ្ធសីលា ។
១០៣៥. តីរអង្គព្រះលក្ស្មអនុជា សឹងរិប្រប្រាណជា
មហាឫសីសុន្ទរ ។
១០៣៦. ហើយស្ដេចចេញចាកព្រះនគរ ត្រេចពៃព្រពនចរ
មកជាក់ទ័ពទីទុរគម ។
១០៣៧. នាំតាំងទេពីព្រះស្និ បរិពារនារដំ
អនន្តអនេកពេកក្លាត់ ។
១០៣៨. ស្ដេចតុំសោយរាជសម្បត្តិ បរិបូណ៌ជាក្សត្រ
អស់តិភពតារអយុធ្យា ។
១០៣៩. ដងនោះព្រះភិរុតឆ្លើយថា ឱហាកូវ៉ិនបា
ដីជាតស្នូរស្ដេចពៃព្រ ។
១០៤០. នាព្រះភមទេពថ្លាខ្លួ រាជបុត្រធ្សដាន
ស្ដេចតុំសោយរាជ្យរក្សរាស្ត្រ ។
១០៤១. ម្ដេចឡើយអង្គអញ១ឃ្លាស[1] លោភលុះប្រាណប្រាស

(1) RIB : upās

ជាភយនរបតី ។

១០៤២. នេះឥឡូវអញ្ញាបង់ជ័បុរី ប្រយោជន៍យកសិរសី
មករឯព្រះបាទរពិន្ទ(1) ។

១០៤៣. សូមអញ្ជើញសម្ដេចព្រះភូមិន្ទ ភជាធិបតិន្ទ្រ
នូវព្រះទេពីវនិតា ។

១០៤៤. វិលថ្កានស្រុកស្រីអយុធ្យា សេពសោយភជ្យជា
ឥស្សរកំពូលពង្សក្សត្រ ។

១០៤៥. ឯងនោះកូវ័នអរក្ដាត់ ក្រឹញក្រាបប្រណិប័ត
បង្គំក្រាបក្រោមបាទ ។

១០៤៦. សរសើរព្រះភិរុតថា ក្រាសវៃឯណោភា
ឥន្ទ្រា ណោពោភ័យឯង ។

១០៤៧. ពាក្យពិតទៀងឥតក្ដង ដើរដោយនូវគន្លង
ព្រះធម្មអារ្យសត្យសច្ច ។

១០៤៨. នាស្ដេចមកយកគោរព ប្រតិបត្តិអង្គអ-
ភិវាទអញ្ជើញព្រះបង ។

១០៤៩. កាលព្រះរៀមស្ដេចយកក្ដង អស់មហាឫសីឯង
សឹងអរទទួលព្រះអង្គ ។

១០៥០. នេះឯងស្ថានដែលស្ដេចគង់ ហើយស្ដេចផ្ទំក្នុង
អាស្រមស្រេចមួយរាត្រី(2) ។

១០៥១. លុះព្រឹកស្ដេចនាំព្រះទេពី ព្រះអនុជនរបតី
លេលាចេញចាកព្រះអាស្រម ។

១០៥២. ព្រះភិរុតក្រាបថ្វាយបង្គំ ស្ថានដែលស្ដេចផ្ទំ
ក៏ញ័រព្រះអង្គបីចំប្រប់ ។

១០៥៣. ស្ដេចទ្រង់ព្រះកន្សែងសន្លប់ លើស្ថានស្ពល់ស្ពប់
អាណោះសម្ដេចព្រះចក្រី ។

១០៥៤. ស្ដេចផ្ទំអស់ឯករាត្រី(3) មួយនៅនាទី
អាស្រមដែលព្រះជេស្ឋា ។

១០៥៥. ព្រឹកស្រេចវៃស្ដែងស្ដេចលគណា សម្ដេចព្រះមហា-
ឥសីមុនីថ្វាយពរ ។

១០៥៦. កូវ័នក្រាមប្រើអស់ប- រិចារខ្លួនស្នឹងឯរ
ទៅនាំនាវាសព្វច្រក ។

១០៥៧. ទូកចាំងមួយម៉ឺនមីមក ពុំគ្រាន់ល្បើយយក
អស់ទូកប្រមាញ់បរិវារ ។

(1) RIB : braḥ pād narabin
(2) RIB : āsram srap' muoy rātrī
(3) RIB : stec phdaṃ luḥ as' rātrī

១០៥៨- បានជាច្រាំបីកោដិក្រាស់ក្រាល[1] ខ្ពស់ខ្ពាប់ទាំងនាវ
មហានទីទូរឆ្ងាយ ។
១០៥៩- ដន់ដោរពេញពោរសព្វសាយ ច្រាំងបាក់ធ្លាក់ធ្លាយ
ពន្លិកពន្លកឃ្លោរបៀរ ។
១០៦០- ចម្លងអស់ពលបរិពារ ពាជីគជសារ
នូវពលរថក្រាស់ក្រៃ ។
១០៦១- សព្វកងរំពងព្រឹក្សព្រៃ លុះដល់អាស្រមនៃ
ព្រះភារទ្វាជឥសី ។
១០៦២- ចូលថ្វាយបង្គំព្រះមុនី សួរសព្វសេចក្ដី
អំពីព្រះរាមស្ដេចខ្វល់ ។
១០៦៣- ព្រះមុនីប្រាយប្រាប់អស់អាថ៌ ពាក្យពេចន៍អំពាល
ដំណឹងដំណើរព្រះអនុជ ។
១០៦៤- ស្រេចព្រះមុនីសាន្ដសារ ព្រះឫទ័យអរ
នឹងព្រះភិរុតរាជា ។
១០៦៥- ឲ្យលៀងអស់ពលយោធា បរិភុលភោជភោគ្គា
នូវក្បៀរបំពេញពិធី ។
១០៦៦- បូជាក្នុងកើតជំណើ ទិជារសជី
តុំត្រានូវផ្លែតផ្ទន់ជិន ។
១០៦៧- កក្រើកទៅដល់ព្រះឥន- ព្រះព្រៃសនរិន្ទ្រ
ក្រើកក្រាសបន្ទូលឃ្មឹម្ហា ។
១០៦៨- ឲ្យអស់ទេវបុត្រទេវតា ទាំងទេពកញ្ញា
ចុះមកជួបជុំនិម្មិត ។
១០៦៩- ក្រឹះគ្រៃគ្រប់គ្រឿងស្ពានស្ថិត សឹងរត្នពិចិត្រ
ប្រពៃព្រះពិស្សុការធ្វើ ។
១០៧០- បល្ល័ង្កភ្លឺស្ដុកសាចលើ ទេសទិព្វនូវអំពើ
អំពីដោរ ដាលគគ្គា ។
១០៧១- ត្រសួប់ផ្សាយផ្សព្វទិសា គ្រឿងផ្ទុំបពស្ត្រា
អនេកអនន្តសព្វសាយ ។
១០៧២- គ្រាន់គ្រប់សព្វភស្ត្ដទាំងឡាយ សឹងសុខសប្បាយ
កំភាលទិព្វទន់នៃបនិត្យ ។
១០៧៣- បាក់បាន ពិមានសួគ៌ស្ថិត ទាំងរស់ជីវិត
ពិតតុំរំលងរូបកាយ ។
១០៧៤- ទាំងអាហារទិព្វសួគ៌នាយ ភាជនមាសរៀបរាយ
គ្រាន់គ្រប់ទាំងពលបរិពារ ។

(1) MBN : pān jāp tiko krās krāl

១០៧៥. ទាំងស្នៀតាជីតជសារ ធ្លាក់ពីកណ្តាល
អាកាសពេញពាសប្រថពី ។

១០៧៦. ទោះក្របីគោសេះដំរី ដើរដេកឈរស៊ី
សឹងវិដ្ឋពត្រអាលស្លាប់ស្លល់ ។

១០៧៧. ព្រះភិរុតធ្វុំលើមណ្ឌល ទេព្វទិពនិម៌ល
បង្ហួស់ឯកភក្រ៏ត្រេក ។

១០៧៨. អស់ក្សត្រសេនាពលដេក លក់លង់នូវដំណោក
ដំណេកទិព្វទន់សុខសល់ ។

១០៧៩. លុះព្រឹកព្រះភិរុតនិម៌ល តើនតឿនរេពល
សកលយោធាចេញចរ ។

១០៨០. នមស្ការមុនីនាថសារទ ជំរើនឫទ្ធីពារ
សុវេចស្តេចចរយាត្រា ។

១០៨១. សព្វសេះសារសួរយោធា ភាជរថគជា
សន្ធឹកញាប់ញ័រប្រថពី ។

១០៨២. ស្និតស្លន់ដុំយធង់ធូលី អាប់អស់ទិសទី
មណ្ឌលអាកាសស្លប់ស្លៃង ។

១០៨៣. អឹងអរខ្ទាយខ្ទរក្តល់ក្តែង លាន់ឮសព្ទសៃង
គគឹកគគុកដាសដេរ ។

១០៨៤. ពៅទៀបមណ្ឌលបរិវេណ៍ ព្រះគង់រូតម្ភីរ[1]
រលកសមុទ្របីរំជែង ។

១០៨៥. ពុះពោរបោកបែកផ្កាត្រែង មុខក្សូរស្លប់ស្លៃង
សន្ធឹកធាភាគរណី ។

១០៨៦. ព្រះលក្សណ៍លើកករអញ្ជលី ដាក់ដល់សិរសី
បង្គំទូលព្រះភាមា ។

១០៨៧. បពិត្រសូមព្រះករុណា ស្តេចទ្រង់ចិន្តា
នូវព្រះទិព្វញាណចក្រី ។

១០៨៨. នាព្រះភិរុតគ្រងរាជបុរី ឈ្មោះហៅយព្រះស្រី-
ភិរុតពុំពេញចិត្តសោត ។

១០៨៩. ហេតុអ្វីព្រះភិរុតដ៏ពិរោធ រិះរកកលក្រោធ
ក៏នាំសេនាពលព្យូហា ។

១០៩០. មកតាមព្រះអង្គនេះតំរូវ ប្រយោជន៍ជាសត្រូវ
ពិឃាតព្រះបាទដេស្លា ។

១០៩១. បពិត្រខ្ញុំសូមក្រាបលា លោងនឹងសេនា
យោធាភិរុតឫទ្ធិរឹង ។

(1) MBN : kumbhel
RIB : gambher

១០៩២. ស្ដេចបានរាជ្យហើយប្រែប្រឹង ពាពុំទំពឹង
រំពៃពាមិនមានមេត្តា ។

១០៩៣. នាព្រះអង្គជាជេដ្ឋា ស្ដេចពុំប្រាថ្នា
ប្រកួតប្រយោជន៍រាជ្យរម្យ ។

១០៩៤. ចរចេញសាងសីលក្រឹត្យក្រម ភិរុតរឹងទឹងទំ
មកតាមពិឃាតហេតុអ្វី ។

១០៩៥. ពោះព្រះភិរុតរស់លោកីយ លុះបរលោកក្ដី
ពុំចៀសជំនៀលនិន្ទា ។

១០៩៦. ព្រះភិរុតពុំរួចចតុរា- បាយបាបបទជា
មោហាអធម្មកម្មក្រៃ ។

១០៩៧. ព្រះភិរុតពុំរួចវៃឯភ័យ សរសក្ដិសិទ្ធជ័យ
ប្រល័យវិនាសនេះឥឡូវ ។

១០៩៨. ទ្រំនូវផ្លាញអស្សពាហពលព្យូហ គជរថបីត្រជូរ[1]
រូតភ្លើងកល្បកើតជំពិឃាត ។

១០៩៩. ឲ្យជាចំណីក្អែកត្មាត ក្អៀលត្មាត់ព្រោយព្រាត
ពាសពេញភូមិមហាទេវា ។

១១០០. លុះលាយឈាមតជអស្សពាហ ឈាមគោមហិង្សា
នូវឈាមសេនាពលយុទ្ធ ។

១១០១. ហាំងឈាមព្រះសុត្រុតនូវភិរុត ជន់ជោររូសមុទ្រ
ស្រីមៃជាជលសាគរ[2] ។

១១០២. ព្រះលក្ស្មណ៍ទូលព្រះភូធរ ស្ពាយបំពង់សរ
ព្រះករក៏ទ្រង់កោទណ្ឌ ។

១១០៣. ព្រះអង្គសឹកសៀតនូវព្រះខ័ន ពេជ្រព្រះករកាន់
សរសក្ដិគ្រូវផ្គាប់ថ្មីម្ហា ។

១១០៤. ឯងនោះព្រះនារាយរាមា ឃាត់ព្រះអនុជា
បន្ទូលមធុរសារសព្ទ ។

១១០៥. ថាវៃហាលក្ស្មណ៍បាទូលស្ដាប់ បងបាននូវគ្រាប់
ដោយច្បាប់ពីព្រេងជីបុរាណ ។

១១០៦. អស់ទេវតាព្រួតតណាជ័សន្ដាន យើងសោកសឹងមាន
ជំណាប្រទេណីក្សត្រ ។

១១០៧. សោយរាជ្យក្រៀងមកច្រើនក្ដាត់ សោកសឹងប្រតិបត្តិ
នូវសត្យៈធម៌ក្រៀងគាប់ ។

១១០៨. សឹងសោយរាជ្យដោយតំនាប់ ជនកច្បងច្បាប់
អណ្ដាប់អណ្ដោយអនុជា ។

(1) RIB : trajū
(2) RIB : sumeru jā jal sāgar

១១០៩- លោកពុំដែលដល់ហឹង្សា ប្រមាថពាធា
ដំណើមដោយចិត្តចើកចង់ ។

១១១០- មួយសោតព្រះភិរុតរាជទ្រង់ សត្យធម៌ពេញពុង
បណ្ដូលដំណើមហឫទ័យ ។

១១១១- គាត់គំនាប់ធ្ងរធ្ងន់ក្រៃ ក្រាស់អត្យាស្រ័យ
រូបបានសុមេរដ៏គិរី ។

១១១២- អាចទប់ទល់ខ្យល់តាំងប្រាំបី ទិសបោកបក់ក្ដី
ពុំអាចកម្រើកឡើយណា ។

១១១៣- ពោះបីនាងវៃកកេសីជា ម្ដាយឯងឫស្សា
នូវថង់បង្កើតពោសថ្កាន ។

១១១៤- ពុំអាចញុះញង់ចេញបាន ព្រះភិរុតគាត់មាន
មនោពុំក្រោធឆន្ទា(1) ។

១១១៥- មួយសោតកាលយើងយាត្រា លះវៃឯងអយុធ្យា
មកនៅនាព្រៃពនេចរ ។

១១១៦- ព្រះភិរុតចេញចាកព្រះនគរ ហើយយើងចេញចរ
មកធ្វើតបះកម្មព្រត ។

១១១៧- ក្រែងក្រោយយើងនេះព្រះភិរុត រឹងមកបំបុត
សោយរាជ្យពិភពអយុធ្យា ។

១១១៨- ស្រេចហើយគោះក្បៀរសេនា មករកជេដ្ឋា
សំឡាញ់សំលូតចង់យល់ ។

១១១៩- ឲ្យបាលក្បួនធ្នូរបាមើលកល អស់បរិវារពល
ដំណាក់ដំណែងនោះម្ដេច ។

១១២០- បើជាសត្រូវកលកិច្ច នោះហើយបងផ្ដាច់
ក្ស័យឡើយឲ្យក្ស័យដល់បា ។

១១២១- បងដូចសាគរដលសា ដង់ជោរពោរពា
លុះលត់លើអគ្គីកល់ ។

១១២២- ព្រះលក្ស្មណ៍ព្រះអនុជនិម្មល ស្ដាប់ព្រះទសពល
បន្ទូលមធុរសារសត្យ ។

១១២៣- លុតជង្ឃដាក់ធ្នូសរថ្នាត់ ក្ដួញក្រាបប្រណិប័ត
មប្តីព្រះបាទជេដ្ឋា ។

១១២៤- ដឹងនោះព្រះភិរុតយាត្រា ទៅលុះបញ្ចា
អាស្រមព្រះបាទនរបតី ។

១១២៥- ដល់ដាក់ទ័ពទៀបគិរី រៀបពលសេនី
នូវរាជសកលយោធា ។

(1) MBN : mano dhiro chandā

១១២៦. ស្រេចទើបព្រះភិរុតភាជា ព្រះសុត្រុតយាត្រា
តែពីរព្រះអង្គទុរគត ។
១១២៧. ពានឡើងលើខ្ទង់បព៌ត ត្រេចត្រង់អាស្រមបទ
ព្រះបាទនារាយរាមា ។
១១២៨. ស្តេចយល់ពីរព្រះអនុជា ដោរជលនេត្រា
សស្រាក់អំភ្លាងដើរមក ។
១១២៩. សីងពាក់ជជានូវសំបក- ឈើប្រែប្រាណយក
អៀសជាតិសីសិទ្ធីពង្ស ។
១១៣០. ជឿជាក់សំលុតព្រះអង្គ អាក់អួលបីរលង់
រលាមព្រះនេត្រជ្រួតជ្រាប ។
១១៣១. ព្រះភិរុតព្រះសុត្រុតក្រាប ក្រោមបាទជ័ស្រពាប
សន្លប់បាក់បៀបមរណា ។
១១៣២. ស្តេចឱបអង្គែលអនុជា ជលនេត្រធារា
ល្វែងហូរលើព្រះបិដ្ឋី ។
១១៣៣. បាក់ដូចផ្លេករត្នជ័មណី ធ្លាក់លើរស្មី
សុពណ៌សុវិណ្ណជលកា(1) ។
១១៣៤. ស្តេចថ្នមពីព្រះអនុជា ភ្ញិតព្រះភក្ត្រា
លុះមានស្មារតីបង្គ ។
១១៣៥. ក្រាបក្រោមព្រះបាទជ័ឧត្តម សោកសោះខ្លួញយំ
ពិលាបសង្រេងខ្លួញជា ។
១១៣៦. ទុំខ្ញុំគិតស្មានជាប្រាស និរាសរូបរត្នព្រះរាមា
នារាយរាជរឹងឬទ្ធ កាលណាកើតប្រទះរណី ។
១១៣៧. ទុកភ័ព្វប្រាំប្រការក្រៃ ភ័ព្វមួយនៃចក្ខុន្ទ្រីយ
ភ្នែកខ្ញុំសោតត្រើសប្រស្រើ បានយល់ព្រះភក្ត្រនិម៌ល ។
១១៣៨. ភ័ព្វមួយនាសោតិ- ន្ទ្រីយប្រែងតន្ទ្រីយសោតសល់
ស្រោតត្រេកវិញ្ញាណស្កល់ ឮព្រះសូរមធុរសារ ។
១១៣៩. ភ័ព្វមួយនាឃានិ- ន្ទ្រីយអធិន្ទ្រីយត្រកាល
នាសិកសោតគន្ធា ជុំសុគន្ធសុមាលា ។
១១៤០. ភ័ព្វមួយនាអង្គតិ- ន្ទ្រីយជិវ្ហិន្ទ្រីយជិវ្ហា
អណ្តាតជាលមុខា បានស្នេហាស្នងបន្ទុលថ្លៃ ។
១១៤១. ភ័ព្វមួយនាកាយិ- ន្ទ្រីយាចិន្តាវិណ្ណាស្រ័យ(2)
ខ្លួនខ្ញុំបានប្រសប់នៃ ព្រះបាទប្រសើរវិសេសសាន្ត ។
១១៤២. អស់តន្ទ្រីយប្រាំប្រការ កបនាមនោវិញ្ញាណា

(1) RIB : subarṇ suvaṇṇaracanā
(2) MBN : cantāvaṇṇāsrai
RIB : ciṇṇavaṇṇāsrǎy

ដហូរទិដ្ឋីបាន　　　បើកបរិបូណ៌ដ៏ត្រើសថ្លា
១១៤៣- ឯឯនោះព្រះបាទក្សត្រា　　　ទាំងប្រាំអង្គា
បន្ទោទុក្ខសោកបរិវល្ត ។
១១៤៤- ព្រះរៀមត្រាសដាំបៃហាភិរុត　　　ចៅសុត្រុតថ្វាយព្រាត
ភៀសដិប្បសិរីសិទ្ធិពរ ។
១១៤៥- បាអាចគោះកៀរអស់ប-　　　វិពារពលនិករ
មកតាមរករៀមនេះតិច្ចូវ ។
១១៤៦- បងប្រាជ្ញរក្ខក្រែងភាងសត្រូវ　　　ភៀតភៀនព្រះវង្ស-
ធរាភជិតិសោសសុន្ធរ ។
១១៤៧- ម្តេចបាលះវៃងព្រះនគរ　　　បោះបង់ព្រះវរ-
បិតាធិរាជធិបតី ។
១១៤៨- ឃ្លួយព្រះកោកល្យាណី　　　នាងកៃកេសី
នូវនាងស្រីមុតកល្យាណា ។
១១៤៩- ញាំងក្សត្រស្នេហាស្និទ្ធក្បេមក្សាន្ត　　　ម្ដព្រះអង្គមាន
ឯភាភោគាញាប្បធី ។
១១៥០- ឯឯនោះព្រះភិរុតអភី-　　　វាទវរវន្ទី
បង្គុំប្រណម្យទូលស្នង ។
១១៥១- អាក់អួលខ្សឹកខ្សួលសួរសង　　　ថ្វាយព្រះកន្សែងជង
ព្រះនេត្ររូបហានភោហិណី ។
១១៥២- ទូលថាបពិត្រព្រះចក្រី　　　វិព្រះនរបតី
ជីដាព្រះវរភាជបិតា ។
១១៥៣- កាលក្រោយព្រះរៀមយាត្រា　　　លះចៃងអយុធ្យា
ស្ដេចត្រែចព្រះព្រៃពនេចរ ។
១១៥៤- ព្រះបាទព្រះបិតាភូធរ　　　សោះសោកតក់តរ
ទ្រវះសង្រៀងឥតស្បៀយ ។
១១៥៥- ព្រះអង្គសុគតលុះដល់ត្រើយ　　　ម្រឹត្យូវទៅហើយ
សំរេចព្រះជិន្នអនិច្ចា ។
១១៥៦- ក្សិណានោះព្រះបាទភាមា　　　ជ្រាបថាព្រះបិតា-
ធិរាជទ្រៃងស្ដេចសុគត ។
១១៥៧- ព្រះបារម្ភយញ័របរន្ធត់　　　ពុំអាចបីនូវអត់(1)
សោកលុះសន្លប់ប្រះប្រាណា ។
១១៥៨- ទាំងព្រះទេពីកល្យាណា　　　នូវព្រះលក្ស្មជ្រោមជ្រាណា
សន្លប់លើខ្ពងបព្វតា ។
១១៥៩- ឯឯនោះនាងកោកល្យា　　　នាងស្រីមុតសោភា

(1) RIB : bum ā̄c ṭoem at'

នាងកៃកេសីក្សត្រី ។

១១៦០- នាំអស់បរិវារសេនី ឡើងលើគិរី

អាស្រមព្រះបាទភរតា ។

១១៦១- ធូលនុបក្រសោបបុត្រា សឹងសោយសោកា

សន្លប់លើខ្លួងគិរី ។

១១៦២- អស់អមាត្យមុខមន្ត្រី បរិវារប្រុសស្រី

អនេកអនន្តគណនា ។

១១៦៣- សឹងសោកកក់គរនិភ សន្លប់លើបញ្ញតា

នឿលបំរះប្រះប្រាណា ។

១១៦៤- លង់លុះភ្ញាក់ស្មារតីបាន បន្ទោសោកស្រាន

ក្សត្រក្សាន្តក្សួរគង់គិតហ្មង ។

១១៦៥- ទាំងទេពីមុនីឫសីផង ទេពលអឹងកង

ជុំមុខមន្ត្រីរឹករឹរ ។

១១៦៦- សឹងលុតសឹងលើកទសករ បង្គំព្រះភូធរ

នាភាយភរតាវរវង្ស ។

១១៦៧- ទើបព្រះភិរុតភាជនូនអង្គ លើកអញ្ជលីផ្គង់

បង្គំព្រះជៀដជិបតី ។

១១៦៨- ក្រាបទូលអញ្ជើញព្រះចក្រី វិលថ្កានព្រះបុរី

បុរាណស្រីអយុធ្យា ។

១១៦៩- សេពសោយរាជ្យស្នងព្រះបិតា គ្រងរាស្ត្រជ័ប្រជា

រដ្ឋាភិសេកជ័យមណ្ឌល ។

១១៧០- នេះតម្រូវរាស្ត្រផងទាំងស្កល់ កើតកោលាហល

ហេតុប្រាសព្រះបាទជេស្ឋា[1] ។

១១៧១. សូមទានសូមទ្រង់ព្រះមេត្តា កុំផងទោសា

យកទោសនាងកៃកេសី ។

១១៧២- បទភាត់កាចកាប្បកិណី ទើបព្រះចក្រី

ស្ដេចខ្វាល់ចេញចោលព្រះនគរ ។

១១៧៣- លុះវេលាលះព្រះវរ- បិតាដល់មរ

ព្រោះសោកព្រះអង្គឯងណា ។

១១៧៤- ឯងនោះព្រះនាភាយភរតា បន្ទូលសារសត្យា

សំណោះជាំពាព្រះភិរុត ។

១១៧៥- ថាព្រះបិតាសុគត ក្ស័យព្រះជន្មបទ

ព្រះអង្គតាំងបង់ពាក្យសត្យ ។

១១៧៦- ស្ដេចនូវឱ្យបាសោយសម្បត្តិ ស្ដេចឡើយមាកាត់

ព្រះស្នូរបន្ទូលប្ដេជ្ញា ។

(1) RIB : pañrās nirās jesṭhā

១១៧៧. បើបងសោយរាជ្យមុនបា　　　បង់ព្រះសត្យា
សម្ដេចព្រះជនកនរបតី ។
១១៧៨. ចូរបារីងក្រុងជ័បុរី　　　មណ្ឌលធានី
នគរស្រីអយុធ្យា ។
១១៧៩. ឲ្យគង់បន្ទូលដេក្ខា　　　ព្រះវរបិតា
ដោយសត្យធមិព្រះបិណាង ។
១១៨០. បើបាចង់ប្រណិប័តបង　　　បាទិលទៅក្រុង
មហានគរអយុធ្យា ។
១១៨១. បាយកសុពណ៌បាទ　　　នេះទៅទុកនា
សំរាប់បន្ទំស្ថានស្ថិត ។
១១៨២. ហើយបាវក្សាប្រណិប័ត　　　ធ្វើដោយក្រមក្រិត្យ
ចំរើនមង្គលសួស្ដី ។
១១៨៣. បងនូវធ្វើតបះការវុឌ្ឍី　　　ដោយក្រមព្រះមុនី
លុះប្អូនដំណ្តប់ឆ្នាំណា ។
១១៨៤. ហើយបងវីងវិលលេលា　　　ឋានស្រីអយុធ្យា
ពិភពបុរីក្រាណត្រើយ ។
១១៨៥. ស្ដេចមានបន្ទូលស្រេចហើយ　　　ពិតពុំលង់ឡើយ
ស្ដេចដោះសុពណ៌បាទ ។
១១៨៦. ឲ្យព្រះភិរុតរាជអនុជា　　　ទូលទុកសិរសា
ពិណាបស្រណោះព្រះភូធរ ។
១១៨៧. ស្រេចហើយក្រាបលាចេរចរ　　　វិលឋានព្រះនគរ
បុរីស្រីអយុធ្យា ។

# កណ្ឌទី១០

១១៨៨. ដឹងនោះនាងភយភាសា ស្តេចទ្រង់ព្រះចិន្តា
នឹងព្រះអនុជនូវទេពី ។

១១៨៩. ថាយើងនៅមណ្ឌលទី ចិត្រកូដគិរី
នេះទៀបអយុធ្យាព្រះនគរ ។

១១៩០. ក្រែងព្រះភិរុតនាំប- រិវារមកអង្វរ
សំបូងសំរូងអញបង ។

១១៩១. ចិតខំឲ្យអញទៅក្រុង ភស្ត្រពិភពស្នង
សម្ដេចព្រះវរបិតា ។

១១៩២. ឈ្មោះគួរយើងចរលេណា លះវៃលងបព្វតា
ទៅរកទីស្ថានទុរគម ។

១១៩៣. អញនូវធ្វើតបៈការក្រម សាងសីលបីសន្សំ
វិវេកចំរើនសាស្ត្រា ។

១១៩៤. ព្រះអង្គធ្វើសទ្រង់ព្រះចិន្តា ស្រេចនាំព្រះជាយា
នូវព្រះអនុជសារពេភ្ជ ។

១១៩៥. ដឹងនោះព្រះមហាក្សត្រស្ដេច ទាំងបីអង្គត្រេច
កណ្ដាលព្រៃក្បែព្រៃអង្គា ។

១១៩៦. ក្បែរណានោះមានយក្សមួយណា ហោះវៃស្វងព្រឹកា
ប្រហារប្រហាស[1] ខ្ញីខ្ញាន ។

១១៩៧. នាគ្លងព្រៃស្លូតពានស្ពាន ត្រេចត្រង់ហោមពាន
ដំរៃដដំណើរសីហានាទ ។

(1) MBN : prahā prahāp'
RIB : prahār prahāt'

១១៩៨. យក្សនោះនាមឈ្មោះពិរាធ សម្ដែង(1)ក្រើមក្រោធ
គំរាមគំរោះសោះសា ។
១១៩៩. ករកាន់សូល(2)សក្តិថ្លៃថ្លា ភាងរូបបិក្រតា
ក្រតើនក្រមួសសោតសល់ ។
១២០០. ចាប់សេះសិង្ហសីហាខ្លាយខ្ទរ ចាប់ញ្ញាប្រែកដសល់
ពិឃាតអម្រឹតភោក្តភក្ស(3) ។
១២០១. ពារៃព្រៃព្រឹក្សាបែកបាក់ សព្វសត្វបីអនមិ
អនេកនូវកើតភារភ័យ ។
១២០២. ដំណើរយក្សយល់ឫទ្ធិក្រៃ ម្លូមិនិរភ័យ
កក្រកកាំងព្រៃព្រឹក្សា ។
១២០៣. ជីងមាំងមៀងមើលមាគ៌ា ចេញចរយាត្រា
ប្រទះសម្ដេចភូធរ ។
១២០៤. ទៀបអាស្រមព្រៃមុនីសរ សាងសីលជីបវរ
ពិសុទ្ធសន្សំបារមី ។
១២០៥. ឯងនោះពិរាធដ៏អប្រិយ យល់ព្រះទេវី
ពិសេសពិសុទ្ធសុន្ទរ ។
១២០៦. ពិរាធភិរម្យត្រេកអរ មិនមាំងជាងករ
មមិចមមៀវបោយរៃង ។
១២០៧. ស្ទុះស្ទៃងពីក្រញៃងខ្លួនថៃ ញ័រភ្លុងឯហាឫទ័យ
ប៉ីផ្ទុកប៉ដប់បីលណាម ។
១២០៨. អញហោងហៅពិរាធនគ្រាម(4) ត្រេចធូលមកតាម
ដំរិរមាសភ្លោងខ្លា ។
១២០៩. អញបុត្រព្រះកាលដ៏មហា ឯកតេជអញជា
ក្រុងទណ្ឌការញ្ញពន ។
១២១០. អញមានដ៏តេជះបុណ្យ គិប្បូវលាភលន់
ប្រទះដ៏ពីងពីរហោង ។
១២១១. យក្សជាហៃហាបស្វឹងឯង ពីងសោតសិរជង
ឯជាបីជើរឥតក្រែង ។
១២១២. ព្រៃនេះខរឲ្យអញលេង ភរិយាពីងឯង
អញនឹងនូវយកទុំឲលេង ។
១២១៣. ថ្ងៃពីងអញពុះនូវសំពៃង ឲ្យទេពតាឯងស្មៃង

(1) RIB : ṛddhi riṅ
(2) RIB : mūl
(3) RIB : cāp' byaggh pī racal'
kă cāp' gajendr bhog bhăks
(4) MBN : nattagrām
RIB : nuttagrām

អំណាចនៃអញ្ញមហិមា ។

១២១៤- តិភាជពោលពាក្យវាចា ទូលដក់សីតា
ទេពីតីព្រះនរបតី ។

១២១៥- ពៀងតារយកមកដល់ទី អរិឯងឥតបី
នានឹងថ្លាថ្លែងឧបមា(1) ។

១២១៦- ឯងនោះព្រះនាភាយភាសា ទ្រង់ព្រះក្រោធា
បីដូចភ្លើងដុតនៃអគ្គី ។

១២១៧- ស្រេចស្ដេចដាក់ព្រាតតិធី ហើយព្រះចក្រី
ក៏ទ្រង់កោទណ្ឌសរវ្ធា ។

១២១៨- ក្សិណនោះព្រះលក្ស្មអនុជា ទូលព្រះជេដ្ឋា
ធិរាជសូមសុំព្រះពរ ។

១២១៩- ខ្ញុំសូមភាសាយកវរ- ជាយាត្រាយប-
រមនាថបពិត្រនេះតម្រូវ ។

១២២០- ទូលស្រេចស្ដេចទ្រង់ឫទ្ធិទ្ធ សរសក្ដិព្រះគុ-
ជទេវន្ទ្រ ធិរាជនោះក៏ទ្រង់ ។

១២២១- គោះកាំជាញជ័យវឿណាវគ្គ យក្សាបីទ្រនង់
ដំនាញដំនះមហិមា ។

១២២២- វត់ចូលថ្កានព្រះអនុជា ដូចកលបញ្ចតា
ទាំងពីរប្រទះប្រតិពល ។

១២២៣- ដូចព្រះពាយពាតបោកបក់ដល- សាសាត់ជោរមដល់
វលកវលុបតសុធា ។

១២២៤- ព្រះអនុជចូលយុទ្ធយក្សា យក្សសោតមហិមា
ក្រពាក្រទូសពាស់ខែឯ(2) ។

១២២៥- ស្មុះចូលចាប់ព្រះស្ដេចថ្លៃឯ សភាសំខែឯ
សំពៀញឯនូវតេជោជ័យ ។

១២២៦- ឯងនោះព្រះរាមឫទ្ធិនៃក្រ យល់ព្រះអនុជនៃ
ប្រយុទ្ធនូវយក្សដាក់ដើរ ។

១២២៧- ទើបព្រះនរនាថដ៏ប្រសើរ យល់ព្រះអនុជស្មើរ
ក៏ថ្លែងសភាសរវ្គ្គល ។

១២២៨- ព្រះចូលចាប់យក្សាដ្ឋិ យក្សយុទ្ធប្រែប្រួល
បំណាងនឹងចាប់ព្រះចក្រី ។

១២២៩- យក្សកករកាន់សូលជ័យស្រី ចូលចាប់ព្រះចក្រី
ក្រវីព្រះខ័នវាត់វាយ ។

(1) Stance mal imprimée, illisible dans RIB ; reconstituée d'après la leçon de MBN.
(2) MBN : kradā kradūs khās khaeṅ

១២៣០- យក្សនឹងអនុជនាជនាភាយ[1] រំដួលពសុធាធ្លាយ
កម្ហាំងពន្លឹកយុទ្ធក្រៃ ។
១២៣១- ស្តេចជេបសិល្បសរជ័វិជ័យ ថ្លែងផ្លាញក្សិរណាក្ស័យ
តិភាគក៏ដួលដីធារា ។
១២៣២- ធ្លាក់ព្រឹក្សព្រៃបែកបព្វតា អស់ទេពគិរិន្ទ្រា
ស្លុតវិជ័យឆ្ងាយពារ ។
១២៣៣- ស្តេចដួលពិភាគដំមរ ដោយតេជៈសរ
ស្រេចដុតអសុរធាបី ។
១២៣៤- ព្រះអង្គព្រះអនុជទេពី គង់ក្រឹត្យប្រក្រតី
នៅទណ្ឌការណ្យពាន ។
១២៣៥- ព្រះលក្ស្មណ៍គិតខ្លួនប្រជុំជួន បើយប៉ះបញ្ញាក្តួន
រំលាយអស់អង្គរូបា ។
១២៣៦- លើកអញ្ជលីទូលវិរងា ខ្ញុំសូមក្រាបលា
បពិត្រព្រះរៀមទ្រង់ធម្ម ។
១២៣៧. ខ្ញុំមោះធ្វើតបៈដោយអាជីវ ក្រៃពេកសាស្ត្រា
ភិនេស្លុមតសីជង ។
១២៣៨- ព្រះរាមបន្ទូលវិងស្មង អះរៃងធ្លាកនាក់ជង
តម្លៃស្ដេចហោងធ្លាកោឯកអាត្មា ។
១២៣៩- អះប្អូននួវរៀមអ្នកដូចធាយ៉ា រីរៀមបង់ធ្លា
អនុជអនាថសោកសោត ។
១២៤០- ព្រះរាមទល់ទុក្ខសែនកោដិ ដាបដួលដ័យដោត
ព្រះទ័យតតពសាទរ ។
១២៤១- ព្រះលក្ស្មណ៍លុះព្រឹក្សាករ កាន់ខ័នដ័យឈរ
បវរប៉ង់អធិស្ឋាន ។
១២៤២- ដោយក្រមតសីស្មាធិឆ្ប៉ាន ជបហោមពិធីញាណ
បង្គំប្រណិប័តនិរន្តរ ។
១២៤៣- បក្សីនាំជលាករ ផ្ចាត់ឆ្ងាយអស់វិរ-
វិសុទ្ធសីលឧបេក្ខា ។
១២៤៤. ជងនោះអនុជអស្សុរិន្ទ្រា ឈ្មោះសូរបនខា
ដំណោកដំណើរពនេចរ ។
១២៤៥. ភ្លេងលឿនដល់មហាសាគរ ដើរដល់ក្រុងខរ
បង្គំសំណេះភក្តី ។
១២៤៦. ខ្ញុំម្នាតីព្រះចក្រី មានព្រះមហេសី
ព្រះអង្គអនុជតើរអង្គ ។

(1) MBN : anuj nāth saranrāy

១២៤៧. ហើយជាប្រែរូបបីបញ្ចប់ ឲ្យព្រះអនុជទ្រង់
ជាភងទេពីស្នេហាស្និទ្ធ ។

១២៤៨. ស្រេចត្រិះប្រែរូបាក្រឹត(1) ពន្រាយជ័ពិចិត្រ
ដូចស្រីសុរាង្គគណនា(2) ។

១២៤៩. ដើរត្រេចព្រៃពនបព្វតា ដល់ស្ពានភរា-
ធិរាជហើយស្ទាបអស់អង្គ ។

១២៥០. រីឯសិតសក់ខាត់ជាត់ជង់ ធ្ងួលទៀបស្តេចគង់
កន្លែងកន្លែក្រោយករ ។

១២៥១. នោះទើបព្រះបាទភូធរ យល់អសុរីចរ
បណាងចំណាប់ស្នេហា ។

១២៥២. ព្រះបន្ទូលថាស្រីសោភា នោះមេស្រាថ្លា
ប្រយោជន៍មេមកនេះឥឡូវ ។

១២៥៣. នោះអសុរីភងម្ចូ ទូលថ្លែងព្រះភូ-
ធរនូវសំដែងអាត្មា ។

១២៥៤. ខ្ញុំជាប្អូនក្រុងរាពណា- សូរសោយណង្កា
យសាធិរាជដ៏ពិពណ៌ ។

១២៥៥. បងមួយឈ្មោះក្រុងកុម្ភការ បងមួយទេះធមិ
ហៅឈ្មោះពិភេកហោរា ។

១២៥៦. ត្រិះរិះគិតនូវអាពាហា- ពិពាហាសិងប្លាតប្លា
កង្វល់នៃការក្នុងគ្រោម ។

១២៥៧. នោះទេពាពង្សទ្រង់នោម នាយានឹងល្បួងលោម
អញតាំងត្រេកអរដោយចិត្ត ។

១២៥៨. ខ្ញុំឮព្រះពីរដ៏បពិត្រ ខ្ញុំពេញចិត្តគិត
ព្រះអង្គឃាក់ដូចៗយល់ ។

១២៥៩. នោះទេពីព្រះក្រោធដល់ ដំខ្ញុំខ្ញុំទល់
ជំណាំសម្តេចទេវី ។

១២៦០. វែលងព្រះបាទព្រះនរបតី យកខ្ញុំជាស្រី
ព្រះស្នំសម្តេចភរា ។

១២៦១. ឯឯនោះព្រះរាមក្សត្រា បើកបន្ទូលថា
វៃហាមេមានរូបដ៏ប្រពៃ ។

១២៦២. អង្គអញឥឡូវនេះនៃ ស្បិតមានសង្ស័យ
អំពល់នឹងភរិយាហើយ ។

១២៦៣. តាំងនៅស្រលះទេឡើយ ដោយអញគិតហើយ(3)

(1) RIB : rūpākrịty
(2) MBN : ṭūc srī surāṅ gannār
(3) RIB : ṭoy aň mān hoey

ព្រះលក្ស្មណ៍ប្អូនអញនោះហោង ។

១២៦៤. កណ្ដោះឥតគូស្នេហាស្នង គួរឲ្យគេគ្រង
រូបមេជាស្រីសោភា ។

១២៦៥. យល់ភ័ក្ត្រព្រះលក្ស្មណ៍ស្ដេចប្រា- កដបានមេជា
ទេពីប្រពន្ធ័ត្រឹមហោង (1) ។

១២៦៦. ទើបសូរបនខាឆ្លើយស្នង ណាព្រះជោយដង
គិរីត្រេចឆ្ពោះនរបតី ។

១២៦៧. លុះទៀបអាស្រមព្រះឥសី បញ្ជើរូបនូវឫទ្ធិ
អំពើអំពើកអស់អង្គ ។

១២៦៨. ដើរដល់ស្រេចលុតជ្ញញជង្ឃ ករកោមលង្គុង
បង្គុំប្រណាម្យទសពល ។

១២៦៩. ទូលថ្លែងថាខ្ញុំបានដល់ ស្ថាននេះខ្ញុំយល់
ជាភ័ក្ត្រខ្ញុំឥតគណនា ។

១២៧០. ខ្ញុំឮព្រះរៀមរាមា មានភរិយសីតា
បំរើព្រះរៀមស្គាល់អង្គ ។

១២៧១. ខ្ញុំឮព្រះអង្គឯកអង្គ ខ្ញុំគិតខ្ញុំចង់
សម្បត្តិនៃទេពខ្ញុំប៉ង ។

១២៧២. ទោះព្រះករុណាខ្ញុំហោង ភរនោះព្រះដ៏គ្រង
ទម្ងន់ត្រៃលោកាករ ។

១២៧៣. ព្រះលក្ស្មណ៍ឆ្លើយមិនសាទរ អញឥតចិត្តអារ
នូវភរិទេពីស្រីស្នំ ។

១២៧៤. អញសុខសាងសីលភិនេស្រ្កម ដូចសុត្តាភាសព្រាហ្ម
មហាវិសុទ្ធសីលក្រឹត្យ ។

១២៧៥. ពាំងថ្កានព្រះរាមជ៏បពិត្រ ស្ដេចស្គាល់ព្រះចរិត
ពិសេសដ៏ទ្រង់ធរណី ។

១២៧៦. សីតាជាភរិទេពី តាំងជាទុតិយ-
ទេពីអណ្ដាប់សោតហោង ។

១២៧៧. ទើបសូរបនខាសារសង ណាព្រះជោយដង
ប៊ីលុះសម្ដេចរាមា ។

១២៧៨. ទូលថ្លែងដើមព្រះអនុជា កុំយកសារណា
និយន្ដនៃអញខ្ញុំឡើយ ។

១២៧៩. ស្ថានជាព្រះអនុជយកហើយ ឥឡូវខ្ញុំឥតត្រើយ
មិនត្រូវនឹងព្រះអង្គឯង ។

១២៨០. ព្រះរាមព្រះបាឫទ័យល្បែង ហាមេតីព្រែង
បីហើអ្នកសាងចរិយា ។

(1) RIB : braḥ bīr prabandh trek hoṅ

១២៨១. ទោះបីអ្នកមានប្រាថ្នា (1) និមន្តម្តងនោះណា
មិនគួរបីអ្នកយកមត់ ។

១២៨២. គួរមេទៅជាតិរវត់ (2) មេថ្លៃងដោយពុត
ចំណាប់នៃអ្នកប្រោសមេ ។

១២៨៣. នោះសូរបនខាដើរល្វេ វិលវីងក្រោយកែ
ដល់ព្រះអនុជលោតលោង ។

១២៨៤. ទូលថាខ្ញុំមកនេះម្តង យកខ្លួនស្លាប់ផង
នៅព្រះបាទពុំឃ្លាតឃ្លា ។

១២៨៥. ទោះព្រះពុំយកខ្ញុំជា ភរិយាខ្ញុំស្វា-
មីយកព្រះជាប្តីឯង ។

១២៨៦. ព្រះលក្ស្មណ៍ក្រេវក្រោធតតក្រែង លេះយក្សបីប្រវែង
ប្រណោមល្មមណោមតណ្ហា ។

១២៨៧. អើជព្រះខ័នជ័យពេជ្រថ្លា ចាប់សូរបនខា
ក៏ដាន់កណ្តាលប្រថពី ។

១២៨៨. ស្តេចនឹងកាត់កោរកេសី អសុរស្រែកប្រថពី
កក្រើកអំពើកពសុធា ។

១២៨៩. ក្បូណាប្រែប្រឹងប្រាណរូបា គៀសដាយក្បា
សំញៀងនូវយក្សអសនី ។

១២៩០. ស្រែកពោលពៅព្រះនរបតី ធ្លុះដល់បុរី
នាទល្ហុកការល្បៀពាន ។

១២៩១. សូរបនខាស្រែកបីផ្លូន់ ភរត់បីរលន់
រលេះរលាំងខាស់ខំ ។

១២៩២. ខរទូសូរបនខាយំ ខរក្រោធាដំ
ភេរីរន្ទះ (3) យោធា ។

១២៩៣. ប្រើទូតថាដាយអស្សូពាហ៍ យក្សសូរបនខា
ឲ្យដឹងប្រការនោះផង ។

១២៩៤. ទូតទៅនូវកំលាំងពោះស៊ួង ដល់ដូចបំណង
ក៏យល់នៃសូរបនខា ។

១២៩៥. យល់រូបអាក្រូវចេរថ្លា បង់កេរតិមេធា
កាច់ខ្ទាស់កាច់យសបង់ប្អូន ។

១២៩៦. ឯអត្ថតិការនោះសូន្យ ខាស់ខំលលួន
ទូតយល់អាណិតសោកា ។

១២៩៧. យំភ្លាងលើកសូរបនខា ដាក់លើអស្សូពាហ

(1) RIB : doḥ pī mān anak prāthnā
(2) MBN : vudh
RIB : vutt
(3) RIB : randaḥ

ពីលុះនគរនោះណា ។

១២៩៨- លុះលើស្ថានរាជអស្សពាហ(1) អស្សូររាជកញ្ញា
ក៏ទ្រង់កន្សែងសោកសល់ ។

១២៩៩- ក្រុងខរក្រេវក្រោធានល អះមេនិមិល
បង់កេរតិអសោចដ៏អាស្រូវ ។

១៣០០- ធូរមេរៃណាឈ្មោះជ័សត្រូវ ទាំងព្រះម្រឹត្យូវ
ពីជួយជីវិតអ្នកកាច ។

១៣០១- អញនឹងដេញព្រះម្រឹត្យូវរាជ ផាប់ផោរដ៏កំណាច
ពីលុះកណ្តាប់ដៃបង(2) ។

១៣០២. បងនឹងពិឃាតវិវស្នង ឲ្យអន្តរាយហោង
ជីវិតលុះមរព្រាបព្រិក ។

១៣០៣. ខរទូងភេរីរើសរក ពលព្រឹន្ទដងមក
ដុំនៅព្រះរាជសីមា ។

១៣០៤. ស្រេចស្រាវយក្សយប់យោធា ត្រៀបរៀបគ្រឿងអា-
វុធាអាវុធកាងករ ។

១៣០៥- សឹងជិះនូវដំនិះចេញចរ ជិះនាគជិះមករ
ខ្លះជិះដំនិះម្រឹគា ។

១៣០៦- ជិះគោជិះគោមហិង្ស ខ្លះជិះសៀងភា
ខ្លះសោតក៏ជិះរាជសីហ ។

១៣០៧- ខ្លះជិះសេះនូវក្របី ជិះគជហត្ថី
ដំរីរមាសក្លោងខ្លា ។

១៣០៨- ជិះឥន្ទ្រីជិះខោតជុំពា(3) ជិះសិង្ហជិះណា
សោតសឹងពហុសុវិជ័យ ។

១៣០៩- ខុននោះសឹងមានថ្វីដៃ កាន់ពលមួយរៃ
សហាស្សនីមួយគ្រប់ខ្លួន ។

១៣១០- សឹងស្រែកអួតអង្គពីកក្កុន បស្ទីតឹងតួន
ស្ថានណាពីគង់ដៃយើង ។

១៣១១- សឹងជិះនូវដំនិះពលជើង ធុលីឡប់ឡើង
ស្រឡប់ទាំងសែងសុរិយា ។

១៣១២- ព្រះអង្គពីរពង្សក្សត្រា យល់ពលយក្សា
មហាកុម្ភណ្ឌសោតសល់ ។

១៣១៣- លើកទ័ពកងកោលាហល ក្សត្រទ្រង់ឫទ្ធិពល
នឹងចេញប្រយុទ្ធយក្សហោង ។

(1) pī luḥ ... assabāh : manque dans RIB
(2) RIB : paṅ'
(3) RIB : jiḥ khot jum̤bā ~ jiḥ khot jiḥ bā

១៣១៤. ព្រះលក្ស្មក្រាបបាទទូលស្នង បពិត្រនាថពលផង
សំរាប់សម្ដេចសល់ភង ។
១៣១៥. ពោះឮលើកពលផងអាច ចេញដេញនូវអំណាច
ព្រះបាទសម្ដេចប្រើយោធា ។
១៣១៦. នេះតែប្អូនខ្ញុំមួយអាត្មា ខ្ញុំសូមអាសា
ដូចប្រាអមាត្យ(1) នោះហោង ។
១៣១៧. សូមព្រះស្ដាប់ព្រះអង្គហោង ខ្ញុំនឹងចេញប្រឡង
ប្រយុទ្ធយកជ័យវិតថ្វាយ ។
១៣១៨. ដឹងនោះព្រះរាមសន្ធាភាយ ដើមប្រិយអភិប្រាយ
បន្ទូលនឹងព្រះអនុជា ។
១៣១៩. ហៃលក្ស្មនាសូរបនខា ជាហោងពាធា
អសុរកំព្រោធបំពន្លឹក ។
១៣២០. ក្រុមពលយក្សបីអធិក បានឹងនានាសឹក
រំលងអសូរដ៏ទុចារ ។
១៣២១. ក្រែងដូចបងនូវភាការ សឹកនេះភ្ញាក់ងារ
ជាឯងខ្សឹតសូរបនខា ។
១៣២២. តើនោះខ្សឹតមានបងជា បងនឹងនានា
ថ្ងាំងឯងកុំជាព្រួយចិត្ត ។
១៣២៣. បងនឹងចេញខ្លែងសំដែងឫទ្ធិ យកយក្សទុច្ចរិត
កណ្ដាលរណរង្គពសុធា ។
១៣២៤. ផ្ទរបាមើលជ័យចេស្ដា ជ័យជោគជ័យា
ទូទាំងត្រៃលោកព្រួសាយ ។
១៣២៥. ដឹងនោះអសូរសហ័សសប្បាយ រៀបពលដង(2) ខ្វាយ
ធុលីត្រឡប់វេហា ។
១៣២៦. លើកដល់ដែនព្រះរាជា ហើយព្រះរាមា-
ធិរាជសមនូវមរណា ។
១៣២៧. អស់ពលចតុរង្គគជសារ សេនាពលមារ
កក្រើកដ៏ទាំងធាត្រី(3) ។
១៣២៨. ពេញពាសទាំងដែនធរណី ចង្អៀតទាំងបុរី
សន្ធឹកនូវសព្ទយក្សា ។
១៣២៩. ខរវឹងក្រោធក្រៃមហិមា ហៅខុនទូសជា

(1) MBN : ṭūc mūv
RIB : ṭūc hmū
(2) RIB : ṭaṅ
(3) RIB : ṭă rajjadhātrī
Le MBN contient un supplément qui semble être une interpolation (entre st.1326 et st.1327), dont les vers sont d'un mètre extrêmement confus.

អនុជនាថនៃព្រះអង្គ ។

១៣៣០- ហៃទូសបក្សីពីរពង្ស ទ្រុះទ្រឹសទ្រើសទ្រង់
ផ្ទួសិល្បនៃសរសក្តិថ្លា ។

១៣៣១- បួសបក្សីស្វែងចរិយា ធុត្តកម្ម(1) ដោយហា
មហាកម្លៀកាចសល់ ។

១៣៣២. ធ្វើពោសសួរបនខាយល់ អាប់អង្គទុរពល
ពុំខ្លាចអំណាចយើងណា ។

១៣៣៣. ធុរបានាំពលសេនា ពហានអាសា
ពលាធិការក្រាស់ក្រៃ ។

១៣៣៤. ទៅចាប់បក្សីសុវិជ័យ វៃឯងដឹងតេជនៃ
ឫទ្ធិតបះនូវអំណាច ។

១៣៣៥. បក្សីនោះពីរអង្គអាច ទុការឫទ្ធិភាព
ជំរុកជំភនភវី ។

១៣៣៦. វិថ្លៃងផ្លាញលាញពលសេនីយ យក្សអសុរី
បឹកក្រើកព្រះនគរ ។

១៣៣៧. ជាសឹងបានសិទ្ធិព្រហ្មពរ ប្រើសិទ្ធិសិល្បសរ
មួយម៉ឺននៃភាមនូវលក្ស ។

១៣៣៨. ដោយតេជបាទ្រង់សិល្បសក្តិ ផ្រាលផ្រាបបំបាក់
នៃភាពសត្រូវមហិមា ។

១៣៣៩. ខុនទូសថ្វាយអញ្ជលីលា រៀបរថអស្សពាហ
អនេកអនន្តសែនសល់ ។

១៣៤០. ជ័សំបូណ៌នូវយសសក្តិស្គល់ បៀវបោះរូបខ្យល់
កំណើតនៃអាជានេយ្យ ។

១៣៤១. ផាផាក់ផ្សៀលផ្ទាត់ភពត្រៃ ហិចបោះវិលវៃ
ចំហុតបីដូចចិន្ត ។

១៣៤២. ភាយភត់រថទេវពស្តា- ករណ៌ពណ៌ភូសា
សុពណ៌នូវរត្នសេះសារ ។

១៣៤៣. ខុនទូសទ្រង់សិល្បបីប្រហារ ពីរព្រះភូវនាថ
ករកាន់សុលីជ័យឈរ ។

១៣៤៤. ប្រែប្រឹងភុជពីរភូធរ ពលយក្សនិករ
កំស្រែកឡើងជ័យមហិមា ។

១៣៤៥. គោះគងជ័យដែងនូវឫក ដល់ព្រះភាសា
កំភយពលចាក់ចោមបាញ់ ។

១៣៤៦. បោះសឹងសុលីសក្តិពេញ ស្អួលសក្តិប្រែវិញ
ត្រឡប់កំដាលដាក្សិ ។

(1) RIB : dhujakamm

១៣៤៧. ខុនទូសយក្សយកអសនី បាញ់ព្រះនរបតី
ក៏ដាលបុប្ផាករង្វាយ ។
១៣៤៨. ជាមាលាត្របីត្រសាយ កេសររីកភាយ
កំរងព្រះបាទដ៏សុពណ៌ ។
១៣៤៩. ពលយក្សសែននិករ ប្រះធ្នូសិល្បសរ
ក៏ចាប់សិខរ[1] ដាលដេញ ។
១៣៥០. ព្រះស្តេចស្តែងស្តេចចរចេញ ចាប់យក្សាវិញ
សំរែងនូវតេជោពល ។
១៣៥១. យក្សាមហិមាខ្វែងខ្វល់ ចាប់ព្រះទសពល
ដ៏ទ្រង់នូវឫទ្ធិចេស្តា ។
១៣៥២. ព្រះចាប់ខុនទូសយក្សា យក្សយំដ៏ប្រែវា
ក្រោធនឹងចាប់ព្រះវិង ។
១៣៥៣. ព្រះភាត់កោទណ្ឌឫទ្ធិរឹង ការកររំប្រែប្រឹង
ករកោះសភាសរផ្លែង ។
១៣៥៤. ត្រូវត្រង់ខុនទូសដួលស្មុង យក្សយំស្លាប់ស្មែង
ក៏ដ្រិកដោយគ្រោះគោបា ។
១៣៥៥. អស់ទេពស្ថិតនូវគិរិន្ទ្រា ទ្រង់រត្នមាលា
ពិសេសពិស្ឋរ[2] មកង្វាយ ។
១៣៥៦. ស្ត្រីនរនាថនាភាយ ធំរើនជ័យប្រុះប្រាយ
នូវលាជសុគន្ធភ្ញីផ្កា ។
១៣៥៧. ក្រុងខរក្រេវក្រោធមហិមា ហៅត្រីមុខជា
ព្រះរាជបុត្រស្នេហាស្នង ។
១៣៥៨. ចាវហៅត្រីមុខដ៏កន្លង បាឯងទ្រីសឃ្លង
ធ្វើសឹកធំហុតមានជ័យ ។
១៣៥៩. ធ្នូរបាចេញតតេងដៃ យុទ្ធយកដោគជ័យ
ពិជ័យសម្តេចភាមា ។
១៣៦០. ដងនោះត្រីមុខមហិមា បង្គំក្រាបលា
ក៏ចេញទទួលរណារង្គ ។
១៣៦១. ត្រីមុខសុបរិវទ្រីសទ្រង់ កាន់កោទណ្ឌផ្គង់
ក៏ចេញកណ្តាលរង្គព្យូហា ។
១៣៦២. ខុនទីងទិតខ្លួនចងខ្វូរ ធំញើបក្រញូវ
គគ្រឹតកព្ចន់ស្រែកថា ។
១៣៦៣. ត្ស៊ូងប៉ីដៃប្អូនសោះសា កាន់គ្រឿងអាវុធា

(1) MBN : sikh
RIB : sīr khar
(2) RIB : bises bī suorg

ក៏គ្រប់ចតុដៃកាន់ ។

១៣៦៤- ដៃឆ្វេងកាន់សរសក្តិខ័ន ដៃស្ដាំកៅទណ្ឌ
នូវចក្រក៏បោះបែនបត ។

១៣៦៥- ក្រោះក្រាយ(1) ភត់ភាយសោតសុទ្ធ ក្រាស់ក្រៃដ៏ប្រាកដ
ប្រដាប់នូវរត្នរចនា ។

១៣៦៦- សម្ភារមកុដកែវកុណ្ឌលពា- ហុរក្ត(2) រចនា
មហាប្រាកដឫទ្ធិក្រៃ ។

១៣៦៧- ទ្រង់គជសារខ្លាំងដាញជ័យ កាន់គ្រឿងគ្រប់ដៃ
ក៏ពើសនូវចិត្តគឺដ៏ហ៊ាន ។

១៣៦៨- គ្រឿងគ្រប់ពណ៌ពេជ្រសឹងមាន ការអង្គាប្រាណ
ប្រយ័ត្នពុំឲ្យមុតសរ ។

១៣៦៩- ពលយក្សាសែននិករ ស្រែកសព្ទរូគ្គរ
សំញើញសំញែងតំរក្សត្រ ។

១៣៧០- យល់ដល់ព្រះដំព្រះចាប់ ព្រះស្រែកសន្ធាប់
អំណាចអំណត់មហិមា ។

១៣៧១- ដៃឆ្វេងព្រះទ្រង់ធ្នូ ដៃស្ដាំភដា
ស្ដេចចាប់នៃអង្គអសុភ(3) ។

១៣៧២- ស្ដេចកាប់អសុរដួលដាល ឈាមហូរបីរបាល
រូបហាននៃជលធារា ។

១៣៧៣- ឈាមហូរដូចស្ទឹងយមុនា ដោរដន់សោះសា
រហៀងរហាចគឺដ៏ធូល ។

១៣៧៤- ពុងពោះធ្នូភច្រាលច្រូល ក្រុងក្រោធបោះធូល
ក៏កាងនូវកររេភាំ ។

១៣៧៥- ខុនខែងខឹងខ្លួនវឹងខាំ មាត់ភ្លាងផុំាផុំា
ត្របាសត្របែងផ្លែងកាំ ។

១៣៧៦- កោះសរសក្តិផ្លែងបី១ផ្ដុំ ខុនចក្រព្រះហស្ដស្ដាំ
ត្រវីត្រៃវាសបោះបាច ។

១៣៧៧- បាញ់ព្រះនរិន្ទ្រភាមសរសាច ធូលយុទ្ធនូវអំណាច
ប្រកួតប្រកឹងចេស្ដា ។

១៣៧៨- រុកភានរួសរាន់យាត្រា ព្រះចាប់យក្សា
យក្សាប្រមូសវិលវឹង ។

១៣៧៩- ព្រះកោះសរសក្តិប្រែប្រឹង ផ្លែងផ្លាញអសុរវឹង
អសុរក៏ដួលដ៏មរ ។

(1) RIB : kroḥ krā
(2) RIB : bāhūratn
(3) RIB : asurāsar

១៣៨០- ដងនោះអសូរខុនខរ ដឹងឫទ្ធិព្រះភូធរ
បវរក៏ប្រែសរផ្លាញ ។

១៣៨១- បាញ់ទូសបាញ់ត្រីមុខដាញ(1) ពលត្រីនុលុះណាញ
រលំកំបែងដែនដែនដុង ។

១៣៨២. ក្រេវក្រោធពោលពាក្យបីប្រែន់ អះអញបរអគ្គ
នឹងចូលប្រយុទ្ធយកជ័យ ។

១៣៨៣- អស់ទូសអស់ត្រីមុខក្សយ(2) បាញ់ពលត្រីនុក្រៃ
រលំរលត់មរណា(3) ។

១៣៨៤. អះអញឯកោម្នាក់ ដូចអង្គពូភ -
ពាក់អ្នកកាត់កយកភ្លុក ។

១៣៨៥- ពោះបីនៅដោយកាមសុខ អសូរនិរទុក្ខ(4)
លោកជាប្រុសតតអំណាច ។

១៣៨៦. កើតជាក្សត្រខ្សោយខ្លៅខ្លាច ចិត្តចងរ័កភាព្យ(5)
ពុំអាចដំណើមចេស្តា ។

១៣៨៧- អះហៅសរិលសត្វលោកា ពុំដែលធ្វៀសកាណ
ព្រះម្រឹត្យូវនឹងយកប្រាណ ។

១៣៨៨- ពោះបីនៅសុខសួស្តីក្សេមក្សាន្ត ពុំដែលហៅមាន
អាយុយូរយឺនរួចកាល ។

១៣៨៩- អំណាចទុរយសទុរជមិ(6) អនេកសង្វេយ្យកល្ប
អ្នកជងឯនឹងដៀលជាខ្លាច ។

១៣៩០- ខរត្រិះរិះឯងនូវអំណាច និរភិតតិតខ្លាច
ប្រដាប់នូវអង្គអាត្មា ។

១៣៩១. ឡើងរថទឹមទៀមអស្សពាហា ពាក់ពេជ្រជ័យមាលា
ប្រដាប់នូវកងកែវកន់(7) ។

១៣៩២- ទ្រង់មកុដកុណ្ឌលកៅទណ្ឌ ដត្រឆាយាកាន់
មយូរនូវព្រួយព្រាយព្រៃ ។

១៣៩៣- ខែលខ័នកៅទណ្ឌសំសែ(8) ត្បូងឥន្ត្រីយព្រៃ

(1) GB : lāñ
(2) RIB : aḥ dūs aḥ trīmukh khsǎy
(3) MBN : nīddhā
RIB : kaniṭṭhā
(4) GB : asūr nǎk duk
MBN : asur rū bī duk
RIB : asur rū bhīniradukkh
(5) RIB : raks rāj
(6) RIB : dūr dāl'
(7) RIB : kañ kaudaṇḍ
(8) GB : jāv see
RIB : sāv sai

ទ្រហឹងបីលោកខ្ញើរខ្ញារ ។

១៣៩៤. ជិះគជជិះសិង្ហងរងា ប្រជពីញាប់ញ័រ
អស្ចារ្យកក្រើកពសុធា ។

១៣៩៥. ស្រឡប់សែងស្លូវមេឃា ទាំងទេពតត្រា
ងងឹតពុំយល់ស្លូវសែង ។

១៣៩៦. ពលលោកឲ្យជ័យឆ្កើងឆ្កែង ប្រជពីគ្រលែង
រលើងរលំបញ្ចា ។

១៣៩៧. ផ្ទួលយុទ្ធនឹងព្រះភជា ព្រះទ្រង់សរថ្លា
ក៏ថ្លែងសរភសរសំ ។

១៣៩៨. រថបីរយះកង់កាំ បាក់បែកខ្ទិខ្ទាំ[1]
រទុះរូបានផង់ធុលី ។

១៣៩៩. ដាច់សេះអង្គសេះសារថី ដាច់កពាជី
ស្រណាក់ប្រពាក់លើគ្នា ។

១៦០០. វិខលចិនកៅទណ្ឌធ្នូស្នា គ្រប់គ្រឿងអាវុធា
ប្រយុទ្ធប្រយ័ត្នរឿណរង្គ ។

១៦០១. ខ្មោចខ្មៅ[2] ស្លុតស្លាប់បាត់បង់ ឈាមហូរច្រាលបង់[3]
រូបាននៃជលសាគរ ។

១៦០២. អស់ពលយក្សយប់ជីមរ ជីសពកៀរគរ
សឹងឈាមរូបានជាស្ទឹង ។

១៦០៣. ខុនខែងទឹកខ្លួនខះទឹង ប្រើប្រែច្រាណប្រឹង
សំរក់ទឹកមាត់បាត់បា ។

១៦០៤. ទ្រង់សរថ្លែងផ្លាញនូវគ្នា សរព្រះភជា
មហាប្រទះសរខ្វាយ ។

១៦០៥. សរពាន់សរពិសសព្វសាយ សរបែក[4] ព្រាត់ព្រាយ
ច្រវាត់កណ្ដាលនភី ។

១៦០៦. សរខរបាញ់បែកជាភ្លី សរព្រះនរបតី
សឹងសុទ្ធអាវុធផ្លាញផ្លា ។

១៦០៧. សរខរថ្លែងជានាគា សរព្រះភជា
ជាគ្រុឌច្រវាត់ផ្តាត់ភ្លៀល ។

១៦០៨. សរខរជាគជបីសំពៀរ សរព្រះផ្តាច់ពៀរ
ជាគជសីហាសារសិង្ហ ។

(1) RIB : pī radāṃ
(2) RIB : khmoc khmāṃṅ
(3) GB : crāl thmaṅ
RIB : crāl khbaṅ
(4) RIB : samraek

១៦០៩- សរខរដាផ្កាផែក[1] រឹង សរព្រះថ្លែងរឹង
សឹងពេជ្រមហាពេជ្រផ្លា ។
១៦១០- សរខរដាភ្លើងបរិយ្យាហា សរព្រះថ្លែងដា
កប្តាពន្លឹកលើសលត់ ។
១៦១១- ក្បូរត្រពីរមហិមាដីប្រាកដ ជាញជ័យអាចអត់[2]
អំណាត់អំណាចនូវឫទ្ធ ។
១៦១២- សឹងថ្លែងសរផ្លាស[3] នូវគ្នា សរព្រះរាជា
មហាប្រែះបាញ់បាន ។
១៦១៣- បាញ់ព្រះព្រះបាញ់រឹងក្លាន ចាប់ព្រះព្រះប្រាន
ពុំអាចនូវទៅទៀបព្រះ[4] ។
១៦១៤- ដឹព្រះព្រះដំនូវតប់ះ ព្រះចាប់ខរប្រះ
ខរខឹងក្រោធក្រៃដ៏កន្លង ។
១៦១៥- ចាប់ព្រះព្រះចាប់រឹងស្លង កៅទណ្ឌបីសំពង
ក៏ខរទៅខរបាបី ។
១៦១៦- ខររុករានចាប់ព្រះចក្រ កាន់ចន្ទបីគ្រវី
សំទៀរសន្ធាប់ឲ្យព្រះអង្គ ។
១៦១៧- ដាល[5] ឯកបញ្ចាកាន់ទ្រង់ ដោះអង្គត្រូវអង្គ
នរបតីទ្រង់ដេញដំ ។
១៦១៨- ខរខឹងករកាច់កាន់ភ្នំ សិលាធារធំ
ប្រពោះប្របាចសាចសរ ។
១៦១៩- ព្រះសព្ទអឺអឺងខ្ទាយខ្ទរ កក្រើកកាំងអម្ពរ
មហាពន្លឹកស្លែងស្លប់ ។
១៦២០- ដោយហាសុរិយាបីស្រឡប់ ញ័រទាំងត្រៃភព
សឹងភ្លឹកន្លងគេជោជ័យ ។
១៦២១- ខុនខឹងស្រែកសព្ទខ្លំងក្រៃ កាន់កៅទណ្ឌជ័យ
ក៏ថ្លែងសព្ទខ្ញាតខ្ញី ។
១៦២២- ពោលពាក្យអសុរសនរបតី ជាទ្រីយបញ្ញី
អប្រិយចិត្តចោរមិច្ឆា ។
១៦២៣- អស់ពលអញអសង្ខ្យា ឯងថ្លែងសរផ្លា
លុះមរប្រាកដដ៏វិនាស ។
១៦២៤- នេះតប្បូវពីងពុំគិតខ្លាស អាត្មាទ្រង់សាស្ត្រ

(1) RIB : phkā phlek
(2) RIB : āc pat'
(3) RIB : phlāñ
(4) RIB : cāp' braḥ praḥ prāṇ
bum̤ āc nūv dau dīet braḥ
(5) RIB : ṭal'

ពុំគិតព្យេរពន់ពេកក្រៃ ។

១៤២៥. ចង់ទៅសោយទុក្ខស្ថានភ័យ គោជិកល្បអសង្វៃយ្យ
ពុំដឹងរូបាបរណា(1) ។

១៤២៦. នោះព្រះបន្ទូលត្រាស់ថា ឱ្យយក្សមិច្ឆា
មហាចិត្តចោរអប្រិយ ។

១៤២៧. មីងមិនដឹងតេជឫទ្ធិ អង្គអញឫទ្ធី
គឺព្រះនារាយការណា ។

១៤២៨. អស់ទេពសោឡសសួគ៌ា និមន្តអញមកជា
ព្រះរាមទេពនូវតបះ ។

១៤២៩. មិនដឹងអញទ្រង់នូវតេជះ ចុះមកដ៏ជំរះ
អសុរដ៏កាចឃាឃី ។

១៤៣០. មីងដូចសំរាមនឹងសំបី អញដូចអគ្គី
បីឆេះរចល់ច្រួលច្រាស់ ។

១៤៣១. មីងពុំដឹងតេជអញជាម្ចាស់ មីងមករប់ពាស់
នូវឫទ្ធីអញមហិមា ។

១៤៣២. ឯងនោះយក្សយប់ហត់ហា រត់ជ្រកគោហា
រណ្តាប់ពិធីជោយក្រម ។

១៤៣៣. ឯបហោមយេង្វិធ្យានប្រណម្យ(2) សូត្រសាស្ត្រដ៏អាគម
រំលឹកពិធីមន្តមក ។

១៤៣៤. ឯបដ្ឋួយអាត្មាបីសំកុក សម្ងាត់នូវព្រៃជ្រកជ្រក
កំលុងគោហាជាគំ ។

១៤៣៥. ព្រះដឹងខរមន្តអាគម ព្រះទ្រង់ធ្នូធំ
ក៏វាយបពិតនោះដ៏ប្រេះ ។

១៤៣៦. ឱ្យខរមីងខ្លៀតតចំណោះ មោះមីងពុំគ្រឹះ
ក៏រត់ពៃតខ្លួនរួចជ្រក ។

១៤៣៧. មីងនេះហៅប្រុសតម្រក់ អញ្ជើញមីងមក
ប្រយុទ្ធប្រឡងចេស្តា ។

១៤៣៨. ក្រុងខរស្តាប់ព្រះអាជ្ញា ប្រឹងគ្រាណអាត្មា
ក៏គ្រោធក្រដួររូភ្លើង ។

១៤៣៩. បង់ព្រតពិធីឯាលឡើង អាត្មាថ្កាថ្កើង
ប្រយុទ្ធនូវរាមសត្តភាយ ។

១៤៤០. ពោកបាក់នូវសិលាផ្លាក់ផ្លាយ ៗព្រព្រឹក្សខ្ចាត់ខ្ចាយ
រលុះជាព្រោះព្រោងការ ។

១៤៤១. កព្រឹក្សទាំងសួគ៌ណា ទេពថ្វាយសាធុការ

(1) RIB : bum̥ ṭịṅ pad pāp gaṇanā
(2) RIB : dhyān bar brahm

ចំរើនសម្តេចនរបតី ។

១៤៤២. ព្រះបាទនរនាថភូមី ផ្លាញយក្សយាយី
លុះក្ស័យជីវិតសូន្យបង់ ។

១៤៤៣. ព្រះស្តេចជាតិជាញជើណរង្គ អសូរយក្សយង់
ក៏អស់ព្រះជន្មលុះជ័យបរ ។

១៤៤៤. ព្រះស្តេចសំរេចឫទ្ធិករ(1) ផ្លាញពលក្រុងខរ
ទូទីសរសម្តេចផ្លាផ្លាញ ។

១៤៤៥. ទាំងមូលអសុរាជ័ណាញ ត្រីមុខជាងជាញ
ក៏មករកណ្តាលពសុធា ។

១៤៤៦. កក្រើកដល់ចក្រវាឡ សុមេរុរាជមហា-
គិរិន្ទ្ររំជួលញាប់ញ័រ ។

១៤៤៧. ទាំងទេពទសសហស្សចក្រវាឡ សុបណ៌បក្សា(2)
សឹងហោះមកថ្វាយព្រះពរ ។

១៤៤៨. ថ្វាយមាលារត្នទេពបវរ ថ្វាយបង្គំជក់
សំអាងនៃកេសរភ្នី ។

១៤៤៩. ព្រះអង្គព្រះអនុជមហេសី មហាក្សត្រត្រៃត្រី
ប្រសើរជ័លើសលោកា ។

(1) RIB : samrec siddhī braḥ kar
(2) MBN et RIB : dāṃṅ deb sahassadharm
satasahass braḥ supār

# កណ្ឌ ទី១១

១៤៥០- ឯងនោះអសុរសូរបនខា យល់ឫទ្ធិរាមា
ធិរាជជ័យឫទ្ធិពល ។

១៤៥១- យល់ទូសយល់ត្រីមុខយល់ ក្រុងខរនិស្សល
នូវពលអសុរត្រឹន្ទជ័យមរ ។

១៤៥២- មួយអង្គចេញផាកព្រះនគរ ឆ្លងសាគរចរ
កំលុះបុរីលង្កា ។

១៤៥៣- ដល់ចូលទូលក្រុងរាពណា- សូរថ្លែងចេស្តា
ព្រះរាមនរបតីព្រះលក្ស ។

១៤៥៤- ពីរអង្គផ្តាញទូសប្រត្យក្ស ផ្តាញក្រុងត្រីភក្រ្ត
ក៏ផ្តាញខរាធិបតី ។

១៤៥៥- ផ្តាញទាំងពិរាធជ័យឫទ្ធិ ផ្តាញពលពាជី
គជេន្ទ្រនូវរថធ្លាក់ធ្លាយ ។

១៤៥៦- នគរទណ្ឌកាអន្តរាយ ពលត្រឹន្ទខ្ចាត់ខ្ចាយ
ទាំងបរមមណ្ឌលទិព្វសូន្យ ។

១៤៥៧- ក្រុងរាពណាស្តាប់សូរ- បនខាថ្លែងទូល
រន្ធត់ហាឫទ័យប្រះប្រាណ ។

១៤៥៨- ក្រុងខរធិរាជប្រធាន ឫទ្ធិរឹងអប្រមាណ
ម្ល៉េះហើយបាបកមរណា ។

១៤៥៩- ក្បិលាភ្ញារនេត្រាអសុរា យល់លក្ខណ៍កេសា
នៃសូរបនខាពិត ។

១៤៦០- ហោសូរបនខាសុចរិត យល់រូបាក្រឹត [1]
នៃមេពិការស្តែងយល់ ។

(1) GB : rūpākṛṣ(ṇ)
RIB : rūpākrịty

១៦៦១- អះមេមានរូបដ៏ បវរសុទ្ធនិម៌ល
ស្រីសួគ៌សុភក្ដិយល់(1) ដ៏រូបមេប្រសើរក្រៃ ។
១៦៦២- អ្នកណាមានះបើអាច ពុំខ្លាចអញដ៏ជាតិ-
សួរលោកពាំងភពត្រៃ ត្រៃភពភូមិដ៏សាកល ។
១៦៦៣- អាចឲ្យដ៏ភ័យមេ អញពន្លឹកសល់
មេថ្លែងនូវប្រការកល កិច្ចសំពើនោះដ៏អស្ចារ្យ ។
១៦៦៤- នោះសួរបនខាបង្គំ ប្រណម្យថ្លែងសំដែងអាថ៌
ខ្ញុំព្នបស្ងីពិសុទ្ធធម៌ នោះប្រសើរដ៏ពីរពាក្យ ។
១៦៦៥- ខ្ញុំធ្លូលបំរើប្រយោជន៍ យកកុសលបវរម-
ង្គលគុះក៏ក្រោធច្រង់ នឹងអញខ្ញុំបង់កេរតិយស ។
១៦៦៦- ជាខ្ញុំពុំកោតខាម ត្រេចតាមមករកប្រុស
បស្ទីនោះក្រោធខុស កំហុសច្រើនពុំយល់ក្តី ។
១៦៦៧- ច្រង់ខ័នបីកាត់ករ កាត់កំមា(2)នូវកេសី
ខ្ញុំគិតខ្លាចពុំរស់ជីវី ពុំពាន់យល់ព្រះភក្ត្រា ។
១៦៦៨- ក្រុងខរក៏ក្រោធក្រៃ ព្រះហឫទ័យរន្ធត់ង្ហា
ចេញយុទ្ធនូវរាមា(3) ដល់បីក្ស័យព្រះជីវី ។
១៦៦៩- បស្ទីនោះច្រង់នាម ឈ្មោះលក្សភាមសុមេត្រី
បស្ទីដ៏មានស្រី សួគ៌សេពសមបំរើនិត្យ ។
១៦៧០- នាមនាងសីតាភក្ត្រ បវរលក្ខណ៍ដ៏ច្រង់ក្រឹត្យ
កបនូវមារយាទចរិត ប្រសើរលើសនៃលោកា ។
១៦៧១- ដូចចន្ទ្រទុទ័យប- រិបូណ៌តតមន្ទិលជា
អាចតំរេកនៃកាមា ព្រះហឫទ័យដ៏ស្នេហាស្និទ្ធ ។
១៦៧២- ក្សូរនឹងសម្ដេចព្រះ- រៀមអតិរេកដ៏រឹងឫទ្ធិ
យកជាមហោសីបពិត្រ សន្សំភាពស្ឋិតស្រី ។
១៦៧៣- ក្រុងភាពឲ្យទូងភេរី ជំនុំមុខមន្ត្រី
អនេកអសូរសេនា ។
១៦៧៤- ក្រុងភាពបន្ទូលព្រះអាជ្ញា ហៅរាជយោធា
ឲ្យស្ដាប់(4)អនុជទូលថ្លែង ។
១៦៧៥- មោះបីយើងក្រីតាពល(5)ខ្ចង ធ្លូលចាប់ជាញថែង
ក៏បានបស្ទីជាយសល់ ។
១៦៧៦- ក្រែងទុរយសយើងដូចដល់ ល្មុះបរព្រឹន្ទពល
នឹងចាប់បស្ទីសាមាន្យ ។

(1) RIB : trīsūr kruṅ rāb(ṇ) yal'
(2) RIB : kāt' kām
(3) RIB : ṭā nūv braḥ rāmā
(4) RIB : oy stec
(5) RIB : kradā bal

១៦៧៧. យើងធ្វើកលមួយឲ្យបាន បង្ហើមុតហាន
ក៏ចាប់ឧបាយនូវកំហាល់ ។
១៦៧៨. យើងយកសីតាដោយកល បានបង្ហើទល់
មហាក្សត្រាសល់សោក ។
១៦៧៩. ស្អាងសូរបនខាអមោឃ (1) នឹងខរលើសលោក
ក៏មរនូវសរបង្ហើ ។
១៦៨០. កាលនោះអស់រាជមន្ត្រី ថ្វាយករអញ្ជលី
ស្តុតីតសូរទ្រង់ឫទ្ធិ ។
១៦៨១. ជាព្រះគ្រាស្វាដ៏បពិត្រ ពិសេសព្រះគំនិត
អញ្ជើញស្តេចប្រើធ្វើថ្វាត់ ។
១៦៨២. ស្តេចប្រើអមាត្យមួយនិព័ទ្ធ ទ្រង់នាមប្រសិទ្ធ
ហៅមហារីករត្នពន្រាយ ។
១៦៨៣. ប្រើប្រែរូបអង្គឆោមឆាយ ជាម្រឹគពន្រាយ
ប្រសើរក្រៃលែងម្រឹគា ។
១៦៨៤. ជាឃាមហារីក ព្រះស្តែងដំណែងរូបា
ជាម្រឹគរត្នមហា- ប្រសើរក្រៃលែងម្រឹគឯង ។
១៦៨៥. លល្អងព្រះរាមដ៏ច្បង (2) ឲ្យបរបាញ់ល្បង
ករកាន់ធ្នូសរផ្គាប់ផ្គង ចេញវៃឯអាស្រមឃ្លាតឃ្លា ។
១៦៨៦. បានអញនឹងយក រត្នភគវតីសីតា
មហោសីបង្ហើណា នឹងបានសំរិទ្ធិប្រាកដហោង ។
១៦៨៧. ឯងនោះមហារីកបង្គំ ប្រណាម្យជុំលីស្នង
អញខ្ញុំសុំណាពោលកន្លង អាជ្ញាក្សត្រដ៏ប្រើប្រាណ ។
១៦៨៨. អង្គអញខ្ញុំដ៏ដឹងឫទ្ធិ សម្តេចព្រះរាមហៅហាន
លេះអញខ្ញុំធូលស្លាន ជីវិតខ្ញុំពុំរួញរា ។
១៦៨៩. មុះនិសម្តេចព្រះមេ (3) អញខ្ញុំប្រថមព្រឹទ្ធ
ជាកាកនាសូរដ៏ប្រា- កដសហ័សអសូរឯង ។
១៦៩០. ធូលចាប់រំលង យេស្តិយញ្ញដ៏ហោមឯង
លងតបះរាមដ៏កន្លង អំណាចក្រៃដ៏មហិមា ។
១៦៩១. កាលនោះស្តេចឯបសិល្ប ពោទិត្រៃ (4) សំដែងនៃព្រះចេស្តា
វិន្លងថ្លាញព្រះមេខ្ញុំនៅនា ហោះក្រែកតិរិន្ទ្រថ្នាប់ ។
១៦៩២. សរស្តេចដូចព្រះម្រឹត្យូវ នូវដោយសរិលឆាប់

(1) RIB : paṅ sūrapanakhā āmokkh
(2) GB : braḥ rām toy lpaṅ
RIB : rām ṭă sraṃ(ṇ)
(3) RIB : mahima samtec braḥ me
(4) RIB : koet trai

មរនូវសរព្រះតីដ៏ស្លាប់[1] ជីវិតក្ស័យដ៏ណាញអង្គ ។

១៤៩៣. ឥឡូវបីនឹងលួចភគវតី មហោសីដ៏បវរម -
ក្តលស្តេចក៏ក្រោធទ្រង់ ដ៏នូវផ្នួសសំដែងឫទ្ធិ ។

១៤៩៤. ឯស្តេចសំរេចសិល្ប សំរេចព្រតសំរេចក្រឹត្យ
ផ្លាញរាមបរមសួរជីវិត ដ៏នូវឫទ្ធិទេពតា ។

១៤៩៥. ផ្លាញទូសនូវត្រីភក្ត្រ ផ្លាញតិរាជធារា
មរនូវសំរិទ្ធិប្រា - កដដូចមនះត្លើង[2] ។

១៤៩៦. ឫទ្ធិរាមតបះដបសិល្ប បីព្រះនៅក្ដុងក្ដើង
លេះយើងនឹងយកដបយើង រំលាយលត់ដ៏ណាញប្រិះ ។

១៤៩៧. ក្រុងរាពណ៍ក្រេវក្រោធដ៏មានះ មនោជាអះ
ផ្ទេះបីមីងអង្គអាចខ្ចី ។

១៤៩៨. មឹងអាងអួតអង្គហរី មឹងងជាបស្ទី
សរសើរសរសើរសោះសា ។

១៤៩៩. មឹងពុំខ្លាចអញតីដ៏ងា តស្សូរមឹងជា
បស្ទីក៏មានឫទ្ធិក្រៃ ។

១៥០០. មឹងក្បៀចកាចគួរត្រូវដៃ ដៃអញដំយក្រៃ
តិជ័យនៃលោកាករ ។

១៥០១. មឹងជាអួតជ័យមឹងអរ ជ័យព្រះហរិសរ
តិជ័យនៃជយាយើង ។

១៥០២. មហារឹកបីបន្ទំឡើង ខ្ញុំខុសស្ដេចជើង
ផ្ទេះបីលើកជ័យលើសលោក ។

១៥០៣. ខ្ញុំក្ដៅស្ដូជិត្តដួចោក យល់ក្រុងខរសោក
ក៏មរនូវសរអនិដ្ឋា ។

១៥០៤. ឥឡូវខ្ញុំយកសិរសា សូមទូលអាជ្ញា
ព្រះបាទសម្ដេចស្ដេចប្រើ ។

១៥០៥. ខ្ញុំសូមសាងធម៌ខ្ញុំធ្វើ កុសលខ្ញុំជឿ
ត្រកូលនឹងបុត្រស្នេហា ។

១៥០៦. សូមព្រះទ្រង់ព្រះករុណា វិសេសខ្ញុំនា
ព្រះបាទព្រះបរមបពិត្រ ។

១៥០៧. មហារឹកវិលវឹងស្លាន់ស្លុត ឡើងធម៌ជីវិត
អាណិតនូវក្ស័យជន្មា ។

១៥០៨. ស្រេចមហារឹករួសកាលា ទូលព្រះអាជ្ញា
ទៅដោយបណ្ដាំទសកណ្ឋ ។

១៥០៩. ចេញចាកបុរីរាជស្ថាន ខំអញមរស្លាប់

(1) RIB : mar(ṇ) nūv sar braḥ ṭit phlā
(2) RIB : ṭūc manaḥ tloeṅ

ហេតុដោយអំណាចមោហា ។

១៥១០. មហារីកស្រេចប្រែកាលា ជាម្រឹគជ័សង្ហា(1)
ប្រសើរក្រៃលែងម្រឹគឯង ។

១៥១១. មិតមាសមៀងម្ហូលនូវសុរង ប្រែប្រាណស្លៀងស្លង
ប្រដូចនូវទងលតាមាស ។

១៥១២. នេត្រនីលយល់យង់ដ៏ទិភាស ដូចនីលរត្នដាស
ក៏ដាំក្នុងវង់នេត្រា ។

១៥១៣. ដូចផ្កាយព្រឹក(2) ពីរផ្ទឹមគ្នា ដូចកលតារា
ព្រាហស្បតីពីរស្មោះ ។

១៥១៤. ស្នែងស្និទ្ធពីរព្រែកក្បុំក្បោះ ក្រូងក្រាងស្មើស្មោះ
ប្រកបនូវព្រះរត្នភាយ ។

១៥១៥. ដូចអ្នកស្លៅផ្លាក់ព្រោងព្រាយ ដាំត្បូងភាត់ភាយ
នូវរត្នជ័ព្រៀបរេខា ។

១៥១៦. ថ្ពាល់ថ្កូងបីប្រពៃសោភា សោភ័ណាជយា
ភក្ត្រាភក្ត្រីត្រើសត្រើត ។

១៥១៧. ល្អល្អះសំបុរឆាយឆើត ឃាក់ឆព្វជាតិកើត
កំណើតកំណាត់ស្រស់ស្រាប់ ។

១៥១៨. រូប(3) ពិស្ណុការដ៏ប្រដាប់ ប្រដាផ្គូរផ្គាប់
របបរបៀបរចនា ។

១៥១៩. ដាំកែវមណីមាលមុខា មើលម្ដងសោភណា
បីដូចពពាលរត្នភាយ ។

១៥២០. រស្មីផ្ទះផ្លាស់ព្រោងព្រាយ ដូចកលពិពយ
ពិទូរ្យទិមរូស្សូរ្យកាន្ត ។

១៥២១. ដូចរត្នកោមលមាសមាន រស្មីបីរូមាន
នៃលោហិតាស្លេករត្ន ។

១៥២២. ម្ដងដូចមរកតកាលវាត់ រូបអ្នកយកបទុមរត្ន
នូវរត្នទៅផ្គូរចនា ។

១៥២៣. ដូចបរស(4) កែវកែមនូវគ្នា អស់អង្គរូបា
ជិញ្ចាចសីងមាសនពគុណ ។

១៥២៤. កៀងគូញីញង់ដើរមុន ឈរឈប់ស្ងួលស្ងួន
សំអិតសំអាងរូបា ។

១៥២៥. អង្គនួនល្មៀនលិតបាទា យាងយាសយាត្រា

(1) RIB : ṭă sahăs
(2) RIB : phkāy pūrbabriks
(3) RIB : rūp
(4) MBN : pus
RIB : puras

គន្លងគន្លៃដើយឯរ ។

១៥២៦. ត្រេចត្រង់អាស្រមបវរ ទៀបព្រះភូធរ
ក៏រឹងអំពើមួយសា ។

១៥២៧. រឹងដើយរឹងឯរស្កាប់ខ្វារ រឹងខ្វែកដ៏ត្រកាល(1)
ត្រចះត្រចង់សោភា ។

១៥២៨. បាក់ដូចតាំត្រៃត្រឹង្ស ដូចព្រះឥន្ទ្រា -
ធិរាជក៏អាចនិម្មិត ។

១៥២៩. ដូចម្រឹគមាសមាលដ៏ពិចិត្រ រូបព្រះអាទិត្យ
នាទៀប(2) ខុំយដុសឡើង ។

១៥៣០. ដើតឆាយពន្លាយយល់ភ្លើង ដើលាឯក្រចកជើង
បីដូចនូវមហាមរកត ។

១៥៣១. ស្អាតស្អំសក្តិសមដើមបរ ដូចនូវផ្អើលដូចនូវរត់
ក៏ត្រេចត្រង់សាលារង់ ។

១៥៣២. ក្បែរលានោះសម្តេចភគវតី មហោសីសីតាបង់
ព្រះនេត្រយល់ម្រឹគរត្នមាសបញ្ចាង់ បញ្ចើចចិត្តដ៏រីករាច(3) ។

១៥៣៣. ទូលព្រះដ៏ទ្រង់ព្រត ពិតណាស់ទ្រង់អំណាចអាច
មៀងមើលម្រឹគមាសចិញ្ចាច ពន្លាយរត្នប្រដាប់ដូង ។

១៥៣៤. គួរស្តេចពិឃាតយក សុពណ៌ស្បែកប្រសើរគង់
ដល់ស្តេចស្តល់ព្រះអង្គ អភិសេករាជ្យអម្រឹតជេរ(4) ។

១៥៣៥. ក្រាលលើមាសមុខរត្ន មាសប្រសើរកិរតី
ឥន្ទ្រាពិសេសពិសុទ្ធ រូបក្រពត្តិរាជា ។

១៥៣៦. នោះរាមភក្ត្រស្តេចយល់ ម្រឹគមាសកលយាត្រា
ហៃលក្សណាមើលម្រឹគា អស្ចារ្យប្រែរូបាក្រឹត ។

១៥៣៧. ជារក្សាសីតាឯង នឹងពិឃាតអសូរសំដែងឫទ្ធិ
ដោយតេជសរសុរិចិត្រ(5) កុហកយកក្បួនពាធា ។

១៥៣៨. ទើបព្រះប្រើព្រះអនុជា រក្សារាជពនិតា
ព្រះអង្គបរិបារ(6) ចេញចរ ។

១៥៣៩. យាងព្រះបាទដ៏បវរ ឯកអង្គព្រះភូធរ
នរបតីអាចទ្រង់ ។

១៥៤០. ធ្នូសរសិល្បសក្តិនូវបំពង់ ឯកអង្គត្រេចត្រង់
គិរិន្ទ្រនូវព្រៃព្រឹក្សា ។

(1) RIB : tracā
(2) RIB : nā deb
(3) RIB : rīk rāj
(4) RIB : am riddhī
(5) RIB : sar puras vijit
(6) RIB : brahā

១៥៤១- រុកភានពារពានបត្តា ដល់ដេញម្រឹគា
កក្រើកសិលាបែកខ្ទាយ ។
១៥៤២. អម្រឹគយក្សភ្លឹកឬទ្ធិតាភយ នរិន្ទ្រឬទ្ធីពាយ
ពន្លឹកពន្លកព្រឹក្សព្រៃ ។
១៥៤៣- លុះព្រះសុរិយាល្ងាចថ្ងៃ ខ្យល់ហៀនភោះនៃ
ទ្រហឹងនូវសត្វសួរស្នែង ។
១៥៤៤- ព្រះរំពឹងព្រះអនុជព្រះឯង ព្រះបារម្ភខ្លាចក្រែង
អសូរដ៏ទ្រើសឫស្យា ។
១៥៤៥- ល្អឯព្រះអនុជធិភជា ខុបាយកលមាយា
អសូរក៏លួចមហោសី ។
១៥៤៦. សឹងហឫទ័យនរបតី បារម្ភភជទេពី
សីតាវិសុទ្ធទ្រង់ពារ ។
១៥៤៧- ស្រេចព្រះទ្រង់សរខ្សែងសរ អម្រឹគនូវមរ
នឹងសរសម្ដេចនរបតី ។
១៥៤៨- អសូរម្រឹគា ស្រែកសព្ទឃំងា រូ[1] ព្រះចក្រី
ដង្ហោយស្រែកហៅ សុមិត្រមេត្រី អសូរអប្រិយ
នេះគឺយក្សា ។
១៥៤៩- បីអាចប្រមាថ បីអាចពិឃាត ព្រះទ្រាមហៅឯណា
ដង្ហោយរស្រែកហៅ ហៃលក្សកើយបា អសូរពាធា
លក្សកើយជួយបង ។
១៥៥០- ក្សែលាញសូរសព្ទអសុរស ទេពីប្រើស្ដោះ
ព្រះលក្សគឺព្រះអនុជា ។
១៥៥១- ហៃលក្សធូរបាយាត្រា ត្រេចតាមជេស្ឋា
ធិភជជីវជទុក្ខទល់ ។
១៥៥២- ព្រះលក្សក្រាបបាទយុគល ប្រណម្យទូលថ្លែងកល
កុហកអសូរមាយា ។
១៥៥៣- សូមទានព្រះអង្គកុំព្រះចិន្តា បារម្ភព្រះជេស្ឋា
ធិភជនោះឡើយតទ្បូវ ។
១៥៥៤- សរព្រះដូចព្រះម្រឹត្យូវ ពោះបីសែនសត្រូវ
សាហ័សសហិចដល់ព្រះអង្គ ។
១៥៥៥- ព្រះឯងព្រះអង្គអាចទ្រង់ សរព្រះពិស្ណុពង្ស
ពិឃាតសត្រូវពាធា ។
១៥៥៦- ដូចព្រះនេត្រព្រះពនិតា យល់ឯងកាលណា
ព្រះផ្ចាញ់នៃភមបរមសូ ។

(1) RIB : rūp

១៥៥៧- ហើយព្រះមកផ្លាញ់ខរទុរ- យសញាតិនឹ៍ប្រយុរ(1)
ក៏លាញទាំងទូសត្រីសិរ ។
១៥៥៨- លាញពលនូវតិភងមារឋី ពះពាងពលពីរ
ប្រទះព្រះផ្លាញជ័មរ ។
១៥៥៩- សូមព្រះមហាសីជឿសរ ជឿតេជព្រះករ
ព្រះអង្គព្រះពង្សពិស្ណុ ។
១៥៦០- នោះរាជសីតាសោកព្រះទុ- ជរទ្រង់ឫទ្ធិគ្នុ
ព្រះទៀមអសុរពាធា ។
១៥៦១- ស្រែកហៅហៃលក្ស្មណ៍អើយជា នាព្រះរាមា
និរាជឥសូរយើងហោង ។
១៥៦២- អញនឹងបាជាខ្ញុំអ្នកគង់ បំរើព្រះហោង
ទម្លន់សម្តេចព្រះរាមា ។
១៥៦៣- នេះតម្បូវជ័ទុស្សអាជ្ញា ហៅថាលក្ស្មណ៍ជា
តាំអឹងនូវអាជ្ញាក្សត្រ ។
១៥៦៤- ញាំងមានអាជ្ញាមួយឃាត់ ជាបានប្រណិប័ត
នូវព្រះរាជអាជ្ញានោះ ។
១៥៦៥- នេះតម្បូវតែអាជ្ញាស្មោះ ហៅចំបាឆ្ពោះ
អសូរប្រមាថជេស្នា ។
១៥៦៦- ពោះបើបាពុំចរយាត្រា ក្រែងលោកនិន្ទា
ថាបានឹងមិនត្រង់បងឯង ។
១៥៦៧- ព្រះលក្ស្មណ៍មិនបរិសុទ្ធល្បួង ហេតុកម្មនឹងបង្វែង
ព្រះអង្គនៅមានវេរា ។
១៥៦៨- លើកអញលីទូលពនិតា ខ្ញុំគិតព្រះរាជា
ជននិ៍បញ្ញើតខ្ញុំនៃ ។
១៥៦៩- លេះឲ្យខ្ញុំដឹងព្រះហឫទ័យ ដោយអឈ្យាស្រ័យ
ហឫទ័យសម្តេចប្រើខ្ញុំហោង ។
១៥៧០- ព្រះលក្ស្មណ៍អធិស្ឋានផ្សង ហៃទេពតាផង
ជំមាននៃព្រះធរណី ។
១៥៧១- ទេពារក្សអារក្សគិរី ទេពារក្សត្រីក្សី
ក៏គង់នៃព្រៃពនាន្ត្រា ។
១៥៧២- ខ្ញុំសូមផ្ញើព្រះពនិតា សូមព្រះករុណា
រក្សាសម្តេចមហាសី ។
១៥៧៣- ក្សិណនោះព្រះលក្ស្មណ៍នរបតី លាព្រះទេពី
សម្តេចនឹងយាត្រាត្រេច ។

(1) MBN : yāt subraḥyav
RIB : yād suprayūr

១៥៧៤- ចេញលៃលព្រះអាស្រមពេកិច ទើបព្រះអង្គស្ដេច
ស្រេចដល់ព្រះរៀមភា ។
១៥៧៥- ដងនោះក្រុងភាពអស្សុរា យល់ព្រះអនុជា
ត្រេចតាមព្រះរាមដ៏បពិត្រ ។
១៥៧៦- ភាពប្រែកាណាឫសីសិទ្ធ ចងដងជាដើរត្រឹទ្ធ
ស្រគត់[1]រូព្រាហ្មភណាចារ្យ ។
១៥៧៧- កាន់ស័ង្ខសៀតស្លឹកស្មី ពាក់ផ្គាំស្លូតដ៏ហោមការ
ធៀរចើមចាប់ភក្ត្រពាក់សង្វារ ដ៏ស្លូតសាស្ត្រាមន្តសេពង្ខង់ ។
១៥៧៨- ដូចក្រមឫសីសិទ្ធ សីលាក្រឹត្យប្រសើរទ្រង់
ត្រៃពេទសាស្ត្រឫសីពង្ស ប្រព្រឹត្តរូព្រាហ្មភណាចារ្យ ។
១៥៧៩- ឯកអង្គដ៏ត្រេចព្រៃ ដោះសំដៅនៃពនាន្តា
ទីអាស្រមបទនាងណា ព្រាហ្មដ្ឋំស័ង្ខភ្លាងសំដែងភេទ ។
១៥៨០- ក្បូណានោះព្រះភគវតី មហេសីសីតានេត្រ
យល់យល់ព្រាហ្មត្រឹទ្ធសំដែងភេទ ពាត់ពាក់ពស្ត្រាសង្វារទ្រង់ ។
១៥៨១- ស្មានព្រាហ្មពិសុទ្ធសីល គឺដ៏នាងប្រណម្យផ្ចង់
ឲ្យសាសនាពរម - ផ្ទលដ៏កាប់គំនាប់មារ ។
១៥៨២- ក្បូណាភាពណាសួរ យល់មហេសីនិមិលនមសការ
ក្នុងផ្ញើមបាក់រូប្រែបារ ប្រហាប់ដុតឃាឫទ័យខ្នុរ ។
១៥៨៣- ហៃមេដ៏មានទ្រង់ រូបបញ្ចង់ដ៏បវរ
ពោះទេពទាំងនិករ អប្សរកញ្ញាដ៏ស្ទួគិស្រី ។
១៥៨៤- ពុំអាចនឹងប្រៀបត្រាប់ រូបមេដ៏មហេសី
អញស្មាននាងឧមាភគវតី ប្ដីខេរទីងបំបាបង់ ។
១៥៨៥- ឈោះមេដ៏មានលក្ខណ៍ បវរភក្ត្រប្រសើរទ្រង់
ពោះទេពនូវមនុស្សបីនឹងចង់[2] ប្រសប់មេដង្ហើមស ។
១៥៨៦- ស្ដេចមេមកនៅព្រៃភ្នំ ទុរគមសឹងបិសាចចរ
សឹងម្រឹគត្រេចម្រឹគឈរ ម្រឹគដ៏ចាំម្រឹគដ៏ចាប់ ។
១៥៨៧- គួរមេពៅនៅនគរ បរិបូណ៌ពលប្រដាប់ស្រាប់
គួរមេស្ថិតស្ថានគាប់ គស្មូរសេពដ៏គង់គាល់ ។
១៥៨៨- ស្រីរត្នអតិរេក អនេកដ៏រៀងរាល់
គួរមេស្រីក្សេមដ៏ក្រសាល[3] ក្រសោបបុស្បក្រចេះទ្រង់ ។
១៥៨៩- យល់អញមហាភ័ព្វ មហាបុណ្យបានយល់អង្គ
ធ្វើស្ដេចកុលភ្នែកគឺដ៏យប់ មួយសែនសោតនឹងមើលគ្រាន់ ។

(1) RIB : sugat
(2) RIB : pī pañcaṅ'
(3) MBN : guor metriy khsaem ṭa krasāl
RIB : guor me krasaet ṭă krasāl

១២៩០- ធ្វើម្ដេចនឹងកុលគិល្ម កុលអណ្ដាតបានជួយសែនពាន់
បងនឹងសរសើរមេរុចន្ទ្រ ដ៏ច្រាលាដ្រៃនៃទេវហា ។
១២៩១- ក្សណានោះសម្ដេចព្រះភគវតី មហាសីរិៈក្នុងឋាបុះយា
ព្រាហ្មណ៍នេះពុំដូចព្រាតដ៏សីលា ភណាចាប្បដ៏ប្រយុះ ។
១២៩២- ក្ដូរអញសរសើរម្ប- ទ្វីព្រះនរិន្ទ្រដ៏ឥស្សូរ
ឲ្យព្រាហ្មណ៍ដ៏កំណាច៖- រជនដឹងដើមព្រះចេស្ដា ។
១២៩៣- ក្សណានោះសម្ដេចភគវតីវរលក្ខណ៍ ជាក់ព្រះភក្ត្រគុនសិរសា
លើកអញ្ជលីស្ដោះនភ- ធិបតិន្ទ្រដ៏រឹងឫទ្ធិ ។
១២៩៤- ថាព្រាហ្មណ៍អញជាមហេសី ព្រះហរិន្ទ្រាជសម្ដេចស្ថិត
សេពសោយរាជពិភពត្រីត្យ បរមរាជស្រីអយុធ្យា ។
១២៩៥- ស្ដេចលើកគួសិល្បសរជ័យ អធិកក្រៃពំងសួគ៌
ខ្លាញរាមបរមសូរ្យដ៏មហា- ឫទ្ធិតេជោដ៏ឧទារឈ្លង ។
១២៩៦- ស្រេចស្ដេចអភិសេកអញ ពីស្រាំមួយជល្ដាប់ឆ្នាំហោង
ស្ដេចត្រេចត្រៃព្រាតនាឯង ត្រៃត្រីក្សាដ៏សាងសីល ។
១២៩៧- ស្ដេចត្រេកប្បសីសិទ្ធ សីលាត្រីត្យព្រះពុំដែលខិល
នាស្ដេចលេលាហើយនឹងទិល លុះឯលស្ថានត្បូវហោង ។
១២៩៨- ធ្ងូរព្រាហ្មណ៍ធរយាត្រា កាន់អាសនាដ៏រូបរាង (1)
ជាស្ថានពីងត្បូវហោង ក្សត្រពាំងពីរពុំដែលឆ្លៀះ ។
១២៩៩- រាពប៉ស្មាពព្រាហ្មណ៍នោះ ជាយក្សាស្មោះ
សំញៀងនូវយក្សាសព្វ ។
១៣០០- កុលមុខអភិមុខប្រជាប់ កុលអម្ពរស្រាប់
ប្រជាប់នូវគ្រឿងបីចំរាស់ ។
១៣០១- កុលកុងកែមួយទ្រង់សស្ត្រ អាវុធដ៏ត្រចះ
អាវុធនោះដ៏សោះសា ។
១៣០២- កុលជើងជួនជាន់ពសុធា កុលអាភរមា-
ភរណ៍កុលនូវអាភរត្ន ។
១៣០៣- កុលអង្គអធិកដ៏អាតង្គ អចមិអសត្យ
អនេកអនាធិទេពី ។
១៣០៤- យក្សយ៉ង់ថ្លើសទ្រង់នូវឫទ្ធិ ហើយហោមហោសី
សំដែងនូវយសដ៏សម្បត្តិ ។
១៣០៥- បងជាឥស្សូរមហាក្សត្រ អស់អង្គអមរាត្ន
នៅតាវតឹង្សភពសួគ៌ ។
១៣០៦- សឹងជកូលបាខបង្ខំ បងអាចឆក់ដួង
ពីម៉ានព្រះពៃស្រពណ៍យក ។

(1) RIB : ṭă ruom raṅ

១៣០៧- បងអាចដេញព្រះយមរក យមកេងក៏ជ្រក[1]
ដ៏ជ្រោះគោហាសព្វស្ថាន ។
១៣០៨- បងអាចយកតន្ត្រីដ៏ប្រធាន អសុរនាគបៀនបាន
ប្រដាប់នូវរដ្ឋភព្យភស្ត្រ ។
១៣០៩- កៃលាសបពិតវិនាស ដាមគ្គលអាសន៍
តស៊ូរពន្លឹកភូវនាថ ។
១៣១០- បងអាចឯកអង្គដ៏ឧទារ ផ្អាបសព្វសួគ៌មារ
ជន្លូតាំងទេពបរិបូណ៌ ។
១៣១១- បងឲ្យដំនាមភពណាសូរ សោយភព្យដ៏ប្រយូរ
ពិសេសពិភពលង្កា ។
១៣១២- បងឮរូបមួយអាត្មា ស្ថិតពនាន្តា
អនាថអណោចឯកអង្គ ។
១៣១៣- បងមកយកមេកោឲ្យដ៍ សោយភព្យបំរុង
ផ្ដេកផ្ដិតរូបរក្សាភស្ត្រ ។
១៣១៤. មេឯងត្បូរគង់លើអាសន៍ ត្រីមុខមាលមាស
ប្រដាប់នូវរត្នរចនា ។
១៣១៥. អស់មុខមន្ត្រីសេនា ភពវង្សពង្សា
មកសូមព្រះពរយើងហោង ។
១៣១៦. មេឯងត្បូរគង់នៅនឹងបង អស់មន្ត្រីផង
ក៏ថ្វាយបង្គំបាទា ។
១៣១៧. ហៃរាពមនគីពីងមិថ្យា[2] ទ្រុះថ្មើសភព្វា -
ធិភពក៏ល្អចអញហោង ។
១៣១៨. អញបុត្រក្សត្រមិនិណាចង ពន្ធពាំរក្សត្រផង
ព្រះបាទទសរថភព្វា ។
១៣១៩- ទសរថរឹងឫទ្ធិចេស្ដា រីព្រះភព្វា -
ធិភពនូវព្រះនរបលក្ស ។
១៣២០- បុត្រព្រះទសរថសិទ្ធិសក្ដិ អង្គព្រះនារាយរក្ស
ដ៏លោកធាត្រី[3]ត្រៃតា ។
១៣២១- នេះតម្រូវក្នុបរយុគា ប្រែជាព្រះភព្វា
មហាប្រសើរលើសត្រៃ ។
១៣២២- ពោះត្អឹមទេពៗមហាត្រៃ ពោះនូវត្អឹមក្សត្រៗថ្លៃ
ប្រសើរពៃងក្សត្រាផង ។

(1) MBN : yaṃ tmīṅ rat jrak
(2) MBN : hai rāb biṅ bis mithyā
RIB : hai rāb(ṇ) min gī bīṅ mithyā
(3) RIB : lokadhātu

១៦២៣- ពោះនូវផ្ទឹមសិល្បៗជ័កន្លង ពោះនូវផ្ទឹមកម្លាំងផង
កម្លាំងសម្ដេចមហិមា ។
១៦២៤- អញជាវររាជជាយា អញទៀងសត្យា
នូវពាក្យសត្យព្រះភូធរ ។
១៦២៥- ទាំងទេពសួគ៌កាមាវចរ ពោះក្សត្រៗប-
រមរាជនូវចង់ណោមលង ។
១៦២៦- ពោះឥតនូវព្រះអង្គហោង អញសូមស្លាប់ផង
ព្រះបាទសម្ដេចរាមា ។
១៦២៧- អញពុំផ្លេកមើលក្សត្រា ទេពទាំងកាមា-
ពចរដ៏អញតិតចិត្ត ។
១៦២៨- នេះតម្បូវដូចមិនយកក្សមិ- ប៉្រាថ្វីស្ដមកតិត
វំណាងអធិស្ឋានអញ ។
១៦២៩- ព្រាត់ព្រះមហាព្រតង់សំឡាញ់ មិនយកសារបាញ់
ពុះទ្រូងនៃអញនេះតម្បូវ ។
១៦៣០- វៃលងបានខ្មោចអញផ្ញើភូ- ធរពីរព្រះតនូ
មកលើកសពអញសិស្ការ ។
១៦៣១- តម្បូវមិនអួតអង្គជ័ទុទារ ប្រាបសព្វសួគ៌មារ
ទាំងទេពក័ទូលបាទា ។
១៦៣២- នាលាក់លលោមល្អងណ វិស័យជាក្សត្រា
សឹងទៀរអំពើល្អចហោង ។
១៦៣៣- ក្រុងភាពក្រេវភ្លាងស៊ើចស្នង មេដេរពោលបង
វិស័យចិត្តស្រីរៃងរឹង ។
១៦៣៤- មេក្ដិចខ្វារបងជ័ព្រសឹង លុះអស់កំហឹង
ក្រចកក្រចៅបងសោត ។
១៦៣៥- បងអត់បងទុនតុំក្រោធ មេស្មានបងនោត
ដូចបសុប្ដីមេមុន ។
១៦៣៦- បងនូវយកមេទៅបង្ហាញបុណ្យ ហើយមេដឹងគុណ
ញញឹមញញែមរកបង ។
១៦៣៧- ទេពីក្រោធប្រះឆ្អូនហោង ភពទុបហោះផ្សង
អនាថកណ្ដាលវេហា ។
១៦៣៨- ជងនោះវររាជសីតា ដូចបូណ៌ចន្ទ្រា
គឺភពណាល្អចទៅ ។
១៦៣៩- ករកាយបីបង្គំយំនៅ គក់ទ្រូងច្រាលផ្កៅ
ទ្វហោហាឫទ័យសោកា ។
១៦៤០- ផ្ដាំនៃព្រផ្ដាំព្រឹក្សបត្តា ផ្ដាំទេពអប្សរា
ដីសឹង[1]នៃគោបាល្អាន ។

(1) RIB : sịṅ

១៣៤១- ហៃយាទេពធុររូលពតីមាន ព្រះរាមក្សត្រក្សាន្ត
ប្រសើរតស្សូរអញនៃ ។
១៣៤២- ក្រុងរាពណចោរទ្រុះទ្រើសនៃក្រ លួចលុះកណ្តាប់នៃ
តម្បូវក៏នាំទៅណា ។
១៣៤៣- អង្គអញជិតដោយយក្សា រិះចិត្តប្តេជ្ញា
ស៊ូស្លាប់ពុំឲ្យអាស្រូវ ។
១៣៤៤- ពោះបីអញអស់ជន្មជាតិតន្វ នោះនៃព្រះគុ-
ធទេវត្រូជិរាជបងអញ ។
១៣៤៥- សីតាសោកព្រះជ័សំម្ញាញ់ ទឹកព្រះនេត្រពេញ
ព្រះភក្ត្រក៏ប្រាលសិំងឈាម ។
១៣៤៦- ឱព្រះបពិត្រនរបតីរាម ស្តេចថ្លៃងសរតាម
អស្សូររត្សសរក[1] ខ្ញុំភាំ ។
១៣៤៧- ខ្ញុំឈឺឥតថ្លៃងឥតថា[2] ឈឺព្រះរាមា-
ធិរាជធម្មិកធារធម ។
១៣៤៨- ឈឺមួយរាពណទ្រុះទ្រើសទា- រុណាលួចលុះដោយការ
ដំនៀលនូវកើតចោរគ្រា ។
១៣៤៩- ឈឺមួយទៅព្រះនរបា- ធិបេសូរិន្ទ្រា
ថាខ្ញុំពុំស្លូតភក្តី ។
១៣៥០- ឈឺមួយទៅព្រះចក្រី ជឿខ្ញុំអស់ក្តី
សម្តេចនូវសោកខ្ញុំហោង ។
១៣៥១- ឈឺមួយព្រះពុំដែលមានហ្មង ម្តេចឡើយចាញ់ល្បង
អស្សូរកុហកកាចក្តត ។
១៣៥២- ឈឺមួយព្រះលក្សប្រណិប័ត អញឯងប្រើគាត់
ជាកម្មនឹងកើតអន្តរាយ ។
១៣៥៣- ឈឺមួយទៅព្រះជ័នារាយ ថាលក្សណ៍មើលងាយ
ពុំខ្លាចព្រះរាជអាជ្ញា ។
១៣៥៤- រីងគិតរីងស្តាយសោកា រៃសនសោកជ័ឲហា-
វិបត្តិវិបដ៍ស្តានស្ថិត ។
១៣៥៥- នាងស្រែកខ្លួញយំជ័អាណិត ហាឫទ័យរីងគិត
សម្តេចព្រះនារាយរាមា ។
១៣៥៦- ក្រុងរាពណហោះទៅលង្កា នាំរាជសីតា
មនោមនះត្រេកអរ ។
១៣៥៧- ទ្រង់គ្រឿងអាវុធកាងករ ការក្រែងព្រះគុជរ
នរបតីស្តេចដល់ ។

(1) RIB : ār sur rat' rak
(2) RIB : it thlịṅ it thmā

១៣៥៨- ហោះទៅកាំងយានមណ្ឌល នាងនាងមើលយល់
បក្សីរលើខ្លួងបញ្ចា ។
១៣៥៩- នាងស្រែកយំស្ទាងស្ដាំឆា ស្ដាំកុកបក្សា
ឲ្យប្រាប់ព្រះរាមប្រតិពល ។
១៣៦០- កុកអើយទោះព្រះស្ដេចយល់ ព្រះនរបតីដល់
នូវព្រះអនុជមកក្តង ។
១៣៦១- ជូរទូលពត៌មានអញផង ឥឡូវនេះហោង
អស្សូរក៏លួចអញណា ។
១៣៦២- អង្គអញតុក(1)ឯកអាត្មា ទល់ទុក្ខអនិច្ចា
មហាអនាថពេកសល់ ។
១៣៦៣- កុកអើយទោះព្រះបាទស្ដេចដល់ ឲ្យព្រះទសពល
នូវព្រះអនុជនរបលក្ស ។
១៣៦៤- តីរអង្គពង្សពិស្ណុ(2)ឫទ្ធិសក្តិ ឲ្យស្ដេចពិទ័ក្ខ(3)
អស្សូរជ័ទ្រុះឫស្សា ។
១៣៦៥- ដោយពាហុះខាតះសោះសា លួចណាក់ពាជា
ឥឡូវក៏នាំទៅហោង ។
១៣៦៦- ជូរព្រះស្ដេចទូលបាទក្តង ឲ្យព្រះអង្គហោង
តាមមកឲ្យទាន់អញណា ។
១៣៦៧- នាងស្ដាំព្រៃព្រឹក្សបញ្ចា ស្ដាំទេពអប្សា
ជ័សិង(4)នូវភូមិស្ថិតស្ថាន ។
១៣៦៨- ហៃទេពដង្ហទូលពត៌មាន ព្រះរាមជ័ប្រធាន
ឥស្សូរនៃអញសព្វថ្ងៃ ។
១៣៦៩- មនគី(5)ភាពចិត្តចោរចង្រៃ លួចលុះកណ្ដាប់ដៃ
ឥឡូវនឹងនាំទៅណា ។
១៣៧០- អង្គអញជិតដោយយក្សា ចិត្តអញព្រួជ្រា
ស៊ីស្លាប់ពុំឲ្យមាស្រូវ ។
១៣៧១- ពេលងបានខ្មោចអញថ្មើរភូ- ធរព្រះតនូ
មកលើកនៃសពសំស្ការ ។
១៣៧២- ពេលងបានយល់ព្រះភូវនាថ ស្ដេចល្បើយអសារ
មាស្រូវមគោចត្រូវនៃ ។
១៣៧៣- ទ្រុះទុសស្ដេចបពិត្រ សម(6)អ្នកនឹងមកអំពីព្រៃ

(1) RIB : tuḥ
(2) MBN et RIB : bis
(3) MBN : bīr dāk
RIB : bidaks
(4) RIB : siṅ
(5) RIB : min gī (pas.)
(6) RIB : caṅ'

ញុំាងបានម្រឹតឬអបរាជ័យ　　អសូរល្អដៃមៃធិលី[1] លាក់ដ៏នាំទៅ ។

១៣៧៤. អះព្រះអង្គសម[2]នឹងមកពីព្រៃក្តៅ　　ម៉្លេះសម[2]នឹងដង្ហោយហៅ
មហោសីពាំងាបាត់ ។

១៣៧៥. ស្រណោះព្រះចង់រកប្អូនរត្ន　　តប្អូវប្អូនព្រលឹងព្រាត់
អសូរចុះបំភាសហើយ ។

១៣៧៦. ព្រលឹងអម្ចាស់ប្អូនអើយ　　ព្រះស្រដីសុមិត្រឆ្លើយ
ឲ្យដ៏ជាំអញប្អូនណា ។

១៣៧៧. ទុំអញចង្វៃចិត្ត　　ឲ្យសុមិត្រដ៏យាត្រា
ពុំដឹងអសុភា　　ដ៏លល្អងបំភាសហោង ។

១៣៧៨. ទុំអញឆ្លាប់នៃបនិត្យ　　ស្មាលស្និទ្ធពុំដែលគ្លង
ឆ្លាប់យកកំភាលនូវរូបរង　　ប្រក្រតីនិត្យៗសព្វថ្ងៃ ។

១៣៧៩. ទសមុខមារមុះនិរភ័យ[3]　　ថ្នមនាងគ្រៀវថ្ងៃ
ច្រឡំនូវសូរ្យរង្សី ។

១៣៨០. តើបពះលើក្រុងបក្សី　　ត្រែក្រវែងតង្ក្រើ
គឺនាមជតាយុយដ់ ។

១៣៨១. បក្សីយល់ទសមុខចុះ　　នាងនាដនៃបអង្គ
ទុំរះក៏មើលភក្ត្រា ។

១៣៨២. បក្សីដឹងដើមសីតា　　ស្រែកសព្ទឃោសនា
សហ័សសហិចហើរហោះ ។

១៣៨៣. ឆៀងនាបចុះរជាស្ពាសស្ពុះ　　ទើយទសមុខមុះ
មីងកាចអាចល្អចពនិតា ។

១៣៨៤. អ្នកនេះជាបុត្រប្រុសា　　ទសរថរាជា
ជាមិត្រសំឡាញ់អញហោង ។

១៣៨៥. អញនឹងផ្លាញមីងកាលនេះម្តង　　ដ្បិតមិងអាចក្រែង
ទេពីនូវពុតពាណោ ។

១៣៨៦. ទសមុខជបិរាមានោ　　ស្លុតអាងតេជោ
ជយានុភាពដ៏កម្លាំង ។

១៣៨៧. ថាទើយសត្វស្លាបបីអហា-　　ង្ការកាចចង់ចាំង
ដណ្តើមមមហោសីស្លូតិ ។

១៣៨៨. មីងជាសត្វស្លាបពុំគួរ　　ឆ្មៀលឆ្ងាត់បឹងបួរ
បបួលនូវគ្នាពាំភស្តុ ។

១៣៨៩. ក្រាបក្រុងស៊ុតរះរើញាស់　　មិងអាចទប់តស់
សហ័សនៃអញផ្លាញផ្លា ។

(1) RIB : maidhulī
(2) RIB : caṅ'
(3) RIB : dasamukhamār mān bhoc bhăy

១៦៩០- មិនការពារនោះពេជតណ្ហា　　យកខ្លួនជាជា
សំឡាញ់នៃក្សត្រពង្សពូជ(1) ។
១៦៩១- មិនមែនក្សត្រសាមាន្យហោច　　បានពង្សត្រមោច
ត្រលាំង(2)កំណើតទុរលក្សណ៍ ។
១៦៩២- ជតាយុឆ្លើយទើយមិនយក្ស　　អញ្ចឹងស្មើសក្តិ
ម្តេចដឹងក៏អាងអួតអង្គ ។
១៦៩៣- យកខ្លួនជាជាទេពពង្ស　　ជាតិស្ដួចទ្រើសទ្រង់
អាងតុំគិតយុត្តិធម៌ ។
១៦៩៤- ក្សណនោះជតាយុហើរហា　　កាងស្លាបអស្ចារ្យ
សហ៊ឹសនៃយោជន៍ប៉ុ(3) ។
១៦៩៥- មេឃមិនសែងសូរ្យបីកំពុង　　ងងឹតម្លូតាំង
មហាវេហាសហាប់ខ្យល់ ។
១៦៩៦- ភពរះរូតរត់ធូលជល់　　ជតាយុអស្វល
ក៏ផ្ទាំងប្រណាំងជាញជ័យ ។
១៦៩៧- សីងជាញរណរង្គទីនៃ　　ខុតារឬទ្ធិកៃ្រ
ក្រមៀកក្រឡាប់ប្រតិរព ។
១៦៩៨- ចិករជិតកក់សេះបីចិប្រប់　　រិលរថបីត្រឡប់
ប្រយុទ្ធនៅវេហាសហា ។
១៦៩៩- ចាក់រថភជរថជ័ប្រហារ　　ភពថ្លៃងសរការ
កណ្តាំងជតាយុយប់ ។
១៧០០- រំជតាយុយសរថប់　　ស្ទះស្មាសឆ្ពោះអង្គ
អរិន្ទ្រភពនោះក៏ជាយ ។
១៧០១- ថ្លែងសរពាន់ពាត់ពិសសាយ　　រួមរូបជ័ភាយ
រំដួលនូវនាគគណនា ។
១៧០២- រីចំពុះពេជ្រពាំអស្សពាហា　　បង់អស់ពាហណ៍
ប្រកាប់ក៏ចិករថខ្ចាយ ។
១៧០៣- បង់រថចិកនាគដំរុះភាយ　　បង់នាគទាំងឡាយ
ទំលាយអាវុធសស្ត្រា ។
១៧០៤- ភពហោះវេហាសនូវជតា-　　យុហើរវេហា
មហាប្រទះយុទ្ធគាប់ ។
១៧០៥- ពុលើមេឃមហិមាសព្ទ　　ដូចស្លូតនូវក្រឡាប់
ហាក់ថ្កាប់ទាំងដែនធរណី ។

(1) MBN : bańs bodh
RIB : bańs bojjh
(2) RIB : traleń
(3) MBN : yoj kāń kāṃṇ

១៧០៦- អស្តាប្យអស់ទិសអស់ទី អសុរិន្ទ្រនរបតី
ប្រយុទ្ធនូវក្រុឧបិតក្រែង ។
១៧០៧- ញលើអម្ពរបីល្វែង សព្ទញសព្ទឯង
អំពល់នូវសព្ទអសនី ។
១៧០៨- ដូចគង្គាកាលិន្ទី(1) មហាមេឃអប្រិយ
ប្រយោជន៍ប្រយុទ្ធយកជ័យ ។
១៧០៩- ភពយុទ្ធអស់អង្គតេជវៃ គតជ័យជ៍ពិជ័យ
ក៏រិះនូវរកកលធ្វើ ។
១៧១០- យល់ព្រះទំរង់រត្នលើសលើ គតវៃទ្ធបីនូវស្មើ
ពិចិត្រតតឯគណនា ។
១៧១១- នូវព្រះហស្តភជសីតា ទំងឫទ្ធិជ៍មហា-
ពន្លឹកពន្លឺជិតជល់អង្គ(2) ។
១៧១២- លុះអសុរភពនោះក៏ទ្រង់ បោះអង្គត្រូវអង្គ
ជតាយុភជនោះក៏ធ្លាក់ ។
១៧១៣- ដើមស្លាបស្លុតធុះប្រត្យក្ស ឈាមហូរជ័សស្រាក់
សស្រោចក៏ពេញពសុធា ។
១៧១៤- ហេតុដោយតេជព្រះភាមា កាលព្រះនៅជា
សម្តេចព្រះនារាយនរនាថ ។
១៧១៥- ចក្រពត្តិពិសេសសល់ខ្វាត ស្តេចទ្រង់ពិឃាត
អរិន្ទ្រអសូរសោះសា ។
១៧១៦- លុះព្រះជាព្រះភាមា ចក្រពត្តិគឺជ៍ជា
ពិសេសពិសុទ្ធព្រះទំរង់ ។
១៧១៧- លុះអសូរភពនោះ(3)ក៏ទ្រង់ បោះអង្គត្រូវអង្គ
ជតាយុភជនោះក៏ធ្លាក់ ។
១៧១៨- ដើមស្លាបស្លុតធុះប្រត្យក្ស ឈាមហូរបីសុភ័គ
សុភាគ(4)ក៏ពេញប្រថពី ។
១៧១៩- ក្រាបស្ងប់ខាងភជគិរី ជន្មាពិធី
ពិណាបពុំលុះមរណា ។
១៧២០- ឯភពសោតយល់មហិមា នាំភជសីតា
ក៏លុះនៃលង្កាស្ថាន ។
១៧២១- ដំកល់ទុកលើភជស្ថាន ទេពីប្រះប្រាណ
ធារម្ភសម្តេចភាមា ។
១៧២២- ភពក្រេវក្រោធភជសីតា យក្សយោធាអា-

(1) RIB : kās nadī
(2) RIB : git ṭă aṅg
(3) RIB : āsant rāb(ṇ) noḥ
(4) RIB : subhāj

មាត្យដងថ្វូលចាំហៅបាន ។

១៧២៣- នាំនាងទៅទុកនាស្ថាន អសោកឧទ្យាន
ជំណុចជំណាប់សោភា ។

១៧២៤- ដងនោះព្រះលក្ស្មណ៍យាត្រា រលៀលវែងសុរិយា
ត្រសៀករំភើយព្រះពាយ ។

១៧២៥- សព្វសត្វសឹងហើរទៀងភាយ ល្អងកេសរខ្ចាយ
ខ្ចុះភាយសុគន្ធខ្ចរ ។

១៧២៦- ឯព្រះរាមសោតខ្លែងសរ បានម្រឹគដ៏បវរ
ក៏សៀតនូវខ័នសរសក្តិ[1] ។

១៧២៧- ព្រះរាមផ្ទៀងមើលព្រះលក្ស្មណ៍ ព្រះលក្ស្មណ៍ក៏ដាក់
បំពង់តម្លោះទៅទណ្ឌ ។

១៧២៨- លុតជង្ឃ់ដៃដាក់ព្រះខ័ន ក្រាបបាទថ្វូលការ
អម្រឹគពីព្រះជេស្ឋា ។

១៧២៩- ព្រះរាមដណ្តឹងវៃហា រក្សរាជសីតា
ម្តេចឡើយបី[2] បាឈករាយ ។

១៧៣០- ព្រះលក្ស្មណ៍ទូលដោយអភិប្រាយ បតិត្រអញខ្ញុំនៅនាយ
បំរើព្រះរាជសីតា ។

១៧៣១- ឮព្រះឱស្ឋរាជឧង្ការ ស្រែកហៅខ្ញុំថា
អសុរប្រមាថព្រះអង្គ ។

១៧៣២- ព្រះទេពីសោយសោកាទ្រង់ ប្រើខ្ញុំត្រេចត្រង់
ព្រះឱស្ឋអម្ចាស់ហៅហោង ។

១៧៣៣- ខ្ញុំឡើព្រះធរណីផង ឲ្យព្រះធរណីគ្រង
ទំរាំអញខ្ញុំទៅដល់ ។

១៧៣៤- ព្រះរាមថាឱបាខ្វល់ បាពុំគិតយល់
ដ៏ក្តីអនាគតកាល ។

១៧៣៥- នោះមានអសុរសហាសពាល ព្រះធរណីបាល
ម្តេចសមពុំនៅគង់យក្សយក ។

១៧៣៦- លោះបាអាចបង់បងមក ដើរត្រេចព្រៃរក
នាអ្នកដ៏មានចេស្តា ។

១៧៣៧- ព្រះលក្ស្មណ៍ទូលព្រះករុណា បតិត្រព្រះរាជសីតា
ខ្ញុំឡើនឹងព្រះធរណី ។

១៧៣៨- ខ្ញុំថ្លែងតេជព្រះចក្រី ទូលព្រះបរមេសី
ពុំជឿទំនួលខ្ញុំសោត ។

១៧៣៩- រឹងគក់ទ្រូងទ្រង់ព្រះក្រោធ ដេរថាខ្ញុំសោត

(1) RIB : ka nāṃ saṃṭaeṅ sar sakti
(2) RIB : mleḥ sam pī

ពុំឈឺសម្តេចរាជា ។

១៧៤០- ខ្ញុំគិតនោះហោងខ្ញុំណា ព្រះរាជសីតា
ខ្ញុំស្តើនៃព្រះធរណី ។

១៧៤១- ខ្ញុំមករកព្រះចក្រី ទោះទុសគាប់ក្តី
ពុំជេរស្ទួរព្រះករុណា ។

១៧៤២- ស្រេចព្រះប្រើព្រះអនុជា រករាជសីតា
សម្តេចបរមទេពី ។

១៧៤៣- ព្រះអនុជរត់រកមហេសី សព្វស្ថានប្រក្រតី(1)
សីតាបតិត្រវៃងគប់ ។

១៧៤៤- បើកច្បូរព្រះកុដិធូលត្រង់ បន្ទំព្រះពាំរអង្គ
ពុំយល់សម្តេចទេពី ។

១៧៤៥- ស្រែកហៅហៃហាព្រះមហេសី ព្រះរៀម(2)នរបតី
បីស្តេចវិលមកហើយណា ។

១៧៤៦- ពុំឃុសឃុរាជសីតា រឹងផ្ការព្រះជេស្ឋា-
ធិរាជធូលក្លាងៗយំ ។

១៧៤៧- ឯងនោះព្រះលក្ស្ម ស្តេចដាក់ខ្លួនដ៏បង្គំ
លើកអញ្ជលីដ៏ប្រណម្យ ក៏ធូលព្រះរៀមនៃភរិយា ។

១៧៤៨- បតិត្រខ្ញុំទៅ ស្រែកហៅព្រះរាជសីតា
ពុំឃុសឃុស្ទួរមធុរថ្លា ក៏ឆ្លើយសង្សារនៃខ្ញុំសោត ។

១៧៤៩- ស្រែកហៅដោយប្រជតី គិរីព្រៃដ៏គក្តោត
ពុំឃុសឃុមហេសីសោត ស្រែកហៅរឹងសូន្យស្ងាត់ ។

១៧៥០- រកនាអាស្រម ក្រណាបន្ទំព្រះពាំរក្សត្រ
ពុំយល់ព្រះទេពីរត្ន នៅអាស្រមនោះក៏ឡើយណា ។

១៧៥១- ស្តេចស្តាប់ព្រះអនុជនៃ ខ្លួនព្រះហឫទ័យរន្ធត់ចាប់ស្លុ
ក្សិណខ្ចាយព្រះនេត្រដ៏ធារា(3) ក៏ឃ្យរល្វៃងដ៏ពេញពាស ។

១៧៥២- ឱះឱសីតាមេជា ពុំងាបងស្តេចឡើយប្រាស
ឱមេព្រលឹងមាស ស្តេចឡើយប្រាសពីបងទៅ ។

១៧៥៣- ឱះឱមេដ៏ប្អូនស្រី ប្រក្រតីសព្វថ្ងៃនៅ
ស្តេចឡើយមេប្អូនពៅ ប្រែប្រាសទៅតិប្បវិណា ។

១៧៥៤- ឱះឱរូបមេប្រសើរក្រៃ ស្រីទាំងត្រៃភពស្មូគា
ទាំងឡូទសទិសា ពុំអាចបីស្មើបាន ។

១៧៥៥- ឱយើងនេះអង្គបី ចេញវៃងស្រីអយុធ្យាដ៏ពិមាន
ស្តេចឡើយតិប្បវិមកនៅស្ថាន នេះហោងតិប្បវិប្អូនបាត់ ។

(1) RIB : sabv thn̈ai prakratī
(2) RIB : braḥ rām
(3) RIB : ksiṇ khcāy yal' chn̈ay braḥ netr ṭǎ dhārā

១៧៥៦- ឱសមមានទេវា បងនឹងប្អូនស្មើនឹងវាសនា
បំភាសសង្ការគេឲ្យព្រាត់ អន្តរាយសូន្យបីបាត់បង់ ។
១៧៥៧- ទើបមកដល់យើងហោង ប្រាសស្នងដ៏ពីរអង្គ
ក៏អន្តរាយសូន្យបង់ ឥឡូវនេះពុំយល់ប្អូនដ៏ល្អើយណា ។
១៧៥៨- បងចាំកេសីបីខ្មៅញាប់ ប្អូនក្រសោបចាប់ចងនូវក្តា
កែមជូតប្រូតមាណ អស់ក្តាសារពើភ្ញី ។
១៧៥៩- បងចាំនាង្វាស បីដូចពពិលមាសមាននៃរស្មី
ដូចព្រះចន្ទពេញដ៏បូណ៌មី លោកីយ៍យល់ពន្លឺក្រៃ ។
១៧៦០- បងចាំចិញ្ចើមទ្រំរួយ បីដូចធ្នូយកោះថ្កាជ័យ
កោងស្រួលប៉ត់ក្រៃកាលនៃ ព្រះពិស្ណុការកាន់គួរតំរង់វាស ។
១៧៦១- បងចាំនាកាំមា សស្រួលសោភាបីដូចភ្ញីមាស
ពាក់តាំងរត្នអភិកាស ប្រសើរវៃវង់រត្នអំពល់ជង[1] ។
១៧៦២- បងចាំព្រះនេត្រវង្ឋា រូបបានប្រពាលរត្នដ៏កន្លង
ចាំនាសាសស្រួលមូលឥតគ្គង ប៉ុនល្អងដ៏ល្អើយនៃ ។
១៧៦៣- ចាំធ្មេញខ្មៅជិត ដូចអ្នកប្រកិតនីលរត្នថ្លៃ
បងគន់សំគាល់នៃ អំពាលរូបដ៏ប្អូនបង ។
១៧៦៤- បងចាំសំបុរប្អូនជិត ក្រៃវែងស្រលិតល្មើងទៀងដ៏កន្លង
វាវិឆ្លកសំបុរនោះដ៏បីដង មួយៃត្វថ្លឹង ៗ បំព្រងទុំ ។
១៧៦៥- បងចាំចង្កេះមួយក្ដាប់ ក្រសោបចាប់ព្រះហស្តជុំ
ដោះរូវថ្លៃទន្លាប់មាសទុំ បីជិតស្រពាប់ផ្ទាប់លើទិភានៃ ។
១៧៦៦- បងស្រណោះប្អូនបង ធង់ម្រឹតយកឬអជិកប្រសើរក្រៃ
ប្អូនប្រើបងតាមអម្រឹតនៃ ប្អូនធង់អម្រឹតដ៏រេកា[2] ។
១៧៦៧- បងកាន់ខ្លួសរទ្រង់ ដោយចំណង់ប្អូនស្នេហា
ឥឡូវនេះបានអម្រឹតា ដោយចំណាប់នៃប្អូនស្រី ។
១៧៦៨- ស្ដេចសោយសោកានល ស្មើរនឹងជាច់ខ្យល់សម្ដេចនរបតី
បំរះព្រះអង្គដោយប្រថពី នទៀលប្រមៀលបីដោយព្រៃ ។
១៧៦៩- ឈឺក្ដួងព្រះអង្គរន្ធត់ ពុំត្រង់ចំប្រប់ព្រះហឫទ័យ
ដូចនូវមររដូចនូវក្ស័យ ឈឺក្រៃសែនដ៏សោតសល់ ។
១៧៧០- ស្ដេចសោយសោកា មហិមាបីឥតឧល់
បទប្រាសទេពកមល ប្រសើរព្រះអង្គបាត់ ។
១៧៧១- ពីរ[3] ព្រះដោះដាលឡើងថ្ងាត់ តាមទេពីរត្ន
អស្សូរក៏ល្ហជាចេញចរ ។
១៧៧២- រុំកាភានពានព្រឹក្សាករ ឥតឈប់ឥតឈរ
ព្រះអង្គសង្វាតយាត្រា ។

(1) RIB : kambal phaṅ
(2) RIB : ṭă rekhā
(3) RIB : bī

១៧៧៣- លេចព្រៃពានលើបព្វតា ធ្លាក់ធ្លាយសិលា
រន្ធត់ទាំងដែនធរណី ។
១៧៧៤- ក្នុងព្រះហឫទ័យនរបតី ក្រោធដូចអគ្គី
ក៏ឆេះសុមេរគិរិន្ទ្រា ។
១៧៧៥- ស្ដេចចរន្លាងខ្លាយនេត្រា ឃើញរាជពនិតា
ហឫទ័យព្រះអង្គអួលក្ដៅ ។
១៧៧៦- ដោយព្រៃទុរគមត្រេចទៅ ទាំងពីរព្រះជៅ
ស្រងាត់ត្រមោចសោតសល់ ។
១៧៧៧- ស្ដេចសោយសែនសោកានល សែនទុក្ខសោកសល់
ដោយថ្មីរអាប់ព្រៃភ្នំ ។
១៧៧៨- ឮសព្ទស្នូរសត្វងងើយំ លន្លង់ទុរគម
សម្ដេចនាភាយធិបតី ។
១៧៧៩- ស្ដេចរត់តាមរាជទេវី ដោយតេជឫទ្ធី
កម្លាំងពីរក្សត្រជ័យដែង ។
១៧៨០- ក្សិណាពើបលើត្រីឧស្សប់ស្ដែង យល់ឈាមច្រាលស្ដែង
ក្រៃលែងសមុទ្រជលសា ។
១៧៨១- ព្រះជណ្ដឹងហៃក្រុងត្រុងា មោះមានអ្វីជា
សត្រូវប្រយុទ្ធអធិកក្រៃ ។
១៧៨២- ក្រុងត្រុឧស្ដាប់ព្រះបន្ទូលថ្លៃ ស្ដេចត្រាស់ជណ្ដឹងហៃ
អំពីអាជីក្ដីអង្គហោង ។
១៧៨៣- ក្រុងត្រុឧទូលព្រះវីងស្នង បតិត្រព្រះជ័កន្លង
ប្រសើរជ័ពីរភងា ។
១៧៨៤- បតិត្រនាភាជសីតា មនគឺភពអសុភ
ក៏នាំនាងនាជជ័មកក្ដីង ។
១៧៨៥- ដោយវេហាអាកាសដ្ឋុង ពះលើខ្ញុំហោង
ក៏ខ្ញុំយុទ្ធជងអសុភ ។
១៧៨៦- ខ្ញុំកាងស្លាបខ្ញុំមហិមា ភពថ្លែងសរន្ធា
ក៏សរទុំដល់ខ្ញុំងាយ (1) ។
១៧៨៧- ខ្ញុំបោះស្ន ះស្មាសខ្ចាត់ខ្ចាយ ណាញរជអន្តភាយ
ព្រាត់ព្រាយពាជីនិរនាស (2) ។
១៧៨៨- ភពរឹងថ្លែងសរដេរដាស សរពេញអាកាស
ពុំអាចបិះមកដល់អង្គ ។
១៧៨៩- លុះភពឃ្លាតចក្រទំរង់ ពីព្រះហស្ដទ្រង់
សីតាស្រីរត្នប្រសើរក្រៃ ។

(1) RIB : buṃ ṭal' khñuṃ nai
(2) RIB : nīs nās

១៧៩០- ទៅត្រូវខ្ញុំអបរាជ័យ ហេតុឫទ្ធិស្ដេចនៃ
ឥឡូវខ្ញុំលុះមរណា ។

១៧៩១. ស្ដេចស្ដាប់ក្រុងត្រុឱចរថា ថ្លែងដើមអាត្មា
ក៏ឈឺព្រះអង្គឯងហោង ។

១៧៩២. ស្ដេចបើកព្រះឱស្ឋស្ងួរសង ថ្វាយព្រះកន្សែងផង
ជតាយុរាជអាណិតក្រៃ ។

១៧៩៣. ថាជតាយុមានគុណក្រៃ គតឯស្មើនៃ
បីអាចនូវសងគុណណា ។

១៧៩៤. អញនូវជូនព្រះស្ដេចឲ្យដល់សួគ៌ា បរិពារកញ្ញា
សម្បត្តិប្រាសាទរូបរត្ន ។

១៧៩៥. ក្រុងត្រុឧស្ដាប់ព្រះបន្ទូលក្សត្រ ស្រេចហើយមរថ្វាត់
ទៅកើតនាសួគ៌ាល័យ ។

១៧៩៦. បានដោយបារមីបន្ទូលថ្លៃ សម្ដេចដេស្ឋជ័យ
អំបូរតជាគតណា ។

១៧៩៧. ស្ដេចលើកសពក្រុងជតា- យុលុះសួគ៌ា
ពិមានពិភពសម្បត្តិ ។

១៧៩៨. ស្ដេចសោយទុក្ខសោកច្រើនក្ដាត់ ពីរព្រះអនុជក្សត្រ
ក៏ស្ដេចសង្វាតយាត្រា ។

១៧៩៩. ដោយព្រៃទុរគមអត្ថា ទុកភានយាត្រា
ក្រទើនតាមព្រះរាជទេពី ។

១៨០០- គាប់យល់យក្សយ័ក្សតិរ្វីយ ស្រែកហៅនរបតី
សន្លាប់នូវសត្វហៅបាន ។

១៨០១. ព្រៃនេះជាបុរីស្ថាន ពោះយោបីមាន
សត្វអម្រឹតយល់ឃ្លងណា ។

១៨០២- អាចមកដើរក្នុងសីមា អញនឹងនោក្ដា
ជំអែតឧទរអញហោង ។

១៨០៣- ឥឡូវមីងពីរមកក្នុង គាប់អញជប់ហោង
បរិភោគនៃមនុស្សពិសា ។

១៨០៤- ពោះពីងធ្វើចិត្តក្រោធា នោះរំងអបរា-
ជ័យពីងអញហែកបីរាយ ។

១៨០៥- ជង់នោះព្រះពិស្ណុពង្សនារាយ ផ្ទាស់ផ្ដើយអភិប្រាយ
ព្រះឱស្ឋព្រះស្ទួរទៅវិ ។

១៨០៦ - ខ្ញើយយក្សយ័ក្សយសតិរ្វីយ មិនធ្លាប់ជាប់ស៊ី
អម្រឹកសញ្ចៃថ្ងៃនោក្ដា ។

១៨០៧. មិនពុំដឹងឫទ្ធិចេស្ដា យើងពីរភាជា
ពន្លឺកខ្ទូភ្លើងកល្បក្រៃ ។

១៨០៨- មិនស្គាល់ប្រកួតកាវង ពុំដឹងខ្លួនក្ស័យ

តំរូវនេះហោងទូលស្ដេច ។

១៨០៩- ក្រុងកពន្ធ(1) ខេរទឹងខាត់ខែង ស្រែកស្រួលនូវតំរៀង

សន្ធាប់សំពើមភរិយា ។

១៨១០- កាងទូលដាប់ព្រះមាតា ព្រះមាស្ដុភរិយា

ក៏កាច់ចង្កូមយក្សម្នាក់ ។

១៨១១- ស្ដេចជិះស្ដេចជាន់ស្ដេចឆាក់ ស្ដេចច្រានស្ដេចចាក់

ស្ដេចហែកទុះភាយជោះបង់ ។

១៨១២- ឈាមហូរជ្រោះជ្រៅថ្លាយង់ ជោរជន់លិចលង់

រូបានសមុទ្រចលដី ។

១៨១៣- ស្ដេចស្ទាញខ្លួនយក្សនូវឫទ្ធិ តីរព្រះនរបតី

រំពឹងចេរចរយាត្រា ។

១៨១៤- ដងនោះតីរព្រះភរិយា ត្រេចត្រៃត្រីក្សា

លំបាកតោកយ៉ាកព្រះអង្គ ។

១៨១៥- ក្សិណកុកយល់ព្រះតីរពង្ស ហើរចុះទូលថ្វង់

បង្គំនរេន្ទ្រនរបតី ។

១៨១៦- បពិត្រនាងនាថមហេសី ជាយានរបតី

ក្រុងភពឯងហោងយកទៅ ។

១៨១៧- នាងគក់ទ្រូងនាងច្រាលស្ដៅ ទួញយំស្រែកហៅ

នាងស្ដាំនៃយើងខ្ញុំហោង ។

១៨១៨- ប្រើខ្ញុំទូលព្រះអង្គឯង ប្រើស្ដេចថ្លែងផ្គង

សភាពិសពាន់តាមនៃ ។

១៨១៩- ព្រះលក្សស្ដេចខ្វាល់បារម្ភ័យ ហៃកុកបិទចង្រៃ

ស្ដេចផ្ញើងចដើងមុសា ។

១៨២០- មិនងរែងចឹកអាហារភោក្តា ដោយស៊ីងបីងណា

នោះផ្លាប់កំណើតនៃឃាង ។

១៨២១- កុកស្ដាប់ព្រះអនុជក្រោធផ្គង ផ្ទៀលអាត្មាហោង

ក៏សងវាចារីងតិះ ។

១៨២២- ហៃក្សត្រតីរតតចំណោះ ស្ដេចឡើយមកតិះ

នៃយើងជាដួសាមាន្យ ។

១៨២៣- អញមានបុរីរម្យស្ថាន បរិពារដងមាន

ផ្សារយើងជាសត្វបក្សា ។

១៨២៤- ខ្លាចឯព្រះអង្គឯងណា មានរាជសីតា

តែមួយជារាជទេពី ។

១៨២៥- ហោតុពាលស្រាលតុំចេះក្ដី ចាញ់កលអសុរី

(1) MBN : kruṅ khbaṅ
RIB : kruṅ kumbandh

ឲ្យយក្សយកទេពីបាន ។
១៨២៦- នេះហោងហៅដូសាមាន្យ ម្តេចមកជៀលព្រាណា
នៃយើងជាសាមាន្យណា ។
១៨២៧- ដឹងនោះសម្តេចព្រះរាមា ស្តាប់កុកបក្សា
ជៀលត្រូវព្រះអង្គហើយនៃ ។
១៨២៨- ស្តេចត្រិះក្នុងព្រះហឫទ័យ ដោយប្រាជ្ញាវៃ
នាពាក្យកុកនេះនៅឆ្ងាយ ។
១៨២៩- ផ្លាញកុកនេះឲ្យអន្តរាយ ពុំទាន់សព្វសាយ
សំដីនេះហោងជឿយណា ។
១៨៣០- ស្តេចវាតកៅទណ្ឌដល់ជា ញ័រផែនពសុធា
ពន្លឺកពន្លឹកសព្វថ្ងៃ ។
១៨៣១- បក្សីយល់ព្រះជេស្ឋជ័យ ឫទ្ធិព្រះលើសាគ្រ
ភិតខ្លាចខ្លួនក្ស័យលុះជីវរ ។
១៨៣២- ក្រាបទូលព្រះបាទជីបវរ បពិត្រព្រះបាទភូធរ
អញខ្ញុំសុំណាទោសណា ។
១៨៣៣- ខ្លួននេះជាសត្វបក្សា ដូចខ្លាឯងណា
ប្រមាថលោកមានបារមី ។
១៨៣៤- ទោះស្តេចនូវយកទោសក្តី ទុនផ្ទាយសិរសី
ក៏យកជីវិតទូលហោង ។
១៨៣៥- បើព្រះករុណាខ្ញុំឯង ជារខ្ញុំមាសាសង
គុណាស្តេចទុកខ្ញុំរស់នៃ ។
១៨៣៦- នាអង្គអញខ្ញុំសព្វថ្ងៃ អនេកបីជាប្រែ
ភាព្វទុបទ្រពណា ។
១៨៣៧- ព្រះអង្គនឹងចាប់លង្កា នាថ្ងៃណា ៗ
ព្រះអង្គប្រមាណអញខ្ញុំ ។
១៨៣៨- អញខ្ញុំហើរជាបីដុំ បន្តាយលង្កាធំ
នោះសូន្យលង្កាអន្តរាយ ។
១៨៣៩- ស្តេចស្តាប់កុកទូលអភិប្រាយ ហឫទ័យស្តេចរសាយ
ក៏ពុំចងទោសបក្សា ។
១៨៤០- គ្រោងកាលព្វបរយុគា នារាយកាលណា
គឺរាមទេពចុះមកគង់ ។
១៨៤១- នូវសំដែងចេស្តាព្រះអង្គ ផ្ទាញ់អសុរបង់
ជំរើនជីទេពឫសី ។
១៨៤២- ព្រះតីរព្រះអង្គនរបតី ប្រាសព្រះទេពី
ពិសោធពិសុទ្ធសុន្ទរ ។

# កណ្ឌ ទី១២

១៨៤៣- ព្រះបន្ទូលព្រះអនុជថានេះ ឮដ៏ព្រៃធានន្តរ
នេះមានមហិង្សាយុទ្ធជ័យ ។
១៨៤៤- នាស្ពានហោមពានព្រះព្រៃ ដុងដោមឈើងៃឈ
អធិកយោនយានសាយសម ។
១៨៤៥- ត្រើកត្រាចតត្រៅក្តុលកើតដងជ័ណាស់សម
ពោធិពៃនរបតីប្រណម្យ ដ៏ទេពាធិបតីហោង ។
១៨៤៦- មានជាតិបុស្សបុស្សនាគស្បូវតីអញ្ចៀនដង
ក្រស្នានូវធន្មមង - ឃុតទងលតាដ៏លាយលាស់ ។
១៨៤៧- ក្រូចក្រាយបុស្គៅឆ្កៀវស្រែគំគុយក្រសាំងក្រាស់
ពោកាក្តាជ័ន្ទូកន្លាស់ រំដួលដោរពានាលី ។
១៨៤៨- អនេកព្រឹក្សាករក្ទុម្ទុទអតិរេកអនេកដ៏ដោរត្រី
បក្សីពនានូវភូមរ ភ្ញុមភាពិណាសលេង ។
១៨៤៩- ពីងពាងជ័ជ្រៀវជ្រោះជ្រលងដងតួរចង្ហូរឈ្នួង
សញ្ញូសត្វជ័ត្រំត្រែង បន្លឺងបណ្តើរដោយគ្នាហោង ។
១៨៥០- ៗព្រៃព្រះហោមពានលន្លង់(1) ដាវៀយស្រណុកសាយសាន្ត
សាន្តអើយតំរេកសត្វឯង មនមាន(2)មហិង្សាភាជព្រៃសម្លួង
បាទរពលឯង សាន្តអើយអនេកសំខ្យា ។
១៨៥១- ឯងនោះមហិង្សាភាជ ជាតិជាញនូវអំណាច
គីរេន្ទ្រនូវពលមហិមា ។
១៨៥២- រុំរក្ស(3)មហិង្សីដ៏ឥណា សល់សែនសំខ្យា

(1) RIB : anlaṅ'
(2) RIB : mun mān
(3) RIB : rīem raks

អនេកនូវពលបរិពារ ។

១៨៥៣. មានតេជដាញដល់ដីឧទារ រកពានប៉ះពាល
គជេន្ទ្រនូវសារសិង្ហសីហា ។

១៨៥៤. ដើរត្រេចសឹងព្យព្រៃភ្វី សព្វសត្វប្រជាពី
រូតភ្លឹកអំណាចស្លុបស្មែង ។

១៨៥៥. ផ្ទាញ់អស់ពានពាដងស្ដែង តេជោជ័យដែង
មហាពន្លឹកមហិមា ។

១៨៥៦. នាមហៅមហិង្សភាគមហា- ឈោរឈៅសោះសា
មនោមានះទ្រើសឃ្លង ។

១៨៥៧. ពោះកើតបុត្រឈ្មោលសព្វដង មហិង្សជនកលង
យកបៀនជីវិតបុត្រឯង ។

១៨៥៨. ដោយនៃផលកម្មនូវបង្វែង ហេតុលោភវង្វេង
នូវកាមតណ្ហា ។

១៨៥៩. ដងនោះមហិង្សពនិតា កើតបុត្រមហិង្សា
គឺនាមបីហៅទូភី ។

១៨៦០. ជននីនាំសុខសព្វគិរី (1) ឮដ៏ព្រៃពនាលី
ក្រវើនបំពួនបាត់ហ៊ាំង ។

១៨៦១. នៅក្នុងព្រៃជ្រៅក្រាស់ក្រាំង ជុំពេញកម្លាំង
លល្បៀបលលបគោហា ។

១៨៦២. បរិភោគអាហារមហិមា ដឹងដើមមាត្រា-
នុភាពរឹងឫទ្ធិបីប្រពៃ ។

១៨៦៣. ស៊ីស្មៅបីវាលមួយថ្ងៃ ផឹកទឹកបីរងបី
បីដឹករបួតយល់ដី ។

១៨៦៤. នាមហៅមហិង្សភាគទូភី ឯស្ដ្រីឯភាគជននី
នូវអំណាចព្រះភុជា ។

១៨៦៥. អញខ្ញុំនូវសូមបរិពើព្រះបិតា នបបទុបាទា -
រតិន (2) ជនកសព្វថ្ងៃ ។

១៨៦៦. សូមព្រះករុណាខ្ញុំនៃ ខ្ញុំនូវបង្អស់យាឫទ័យ
ទទួលទម្ងន់ព្រះបិតា ។

១៨៦៧. ពោះបីមានសត្រូវពាធា ជារខ្ញុំអាសា
ពុំឲ្យទុរ្យសព្រះតនូ ។

១៨៦៨. ជននីឆ្លើយដោយចិត្តភូ- ធរភាគតសួរ
មនោមានះទ្រើសឃ្លង ។

១៨៦៩. ពុំរកអនុកូលឡើយហោង បុត្រឯងនោះហោង

(1) RIB : jananī nām santagirī
(2) RIB : pādā rū bin

ពីសីងបំបាត់និស្សល ។

១៨៧០- ទូភីគិតខ្លួនទុរពល ពីត្រូវអាលខ្វាយខ្វល់
បំពួនអាត្មាឯងពោរង ។

១៨៧១- ទូភីទ្រើសទារ[1]ដំឃ្មង ដើយប្អួយលោតលង
ក៏លោះកណ្ដាំងសោះសា ។

១៨៧២- ជ្រុងជ្រួយឆ្កុះឆ្កើសបព្វតា ផ្លាក់ផ្លាយសិលា
រលើងទាំងព្រឹក្សាករ ។

១៨៧៣- ញុតេងតេរងោជ័យខ្វុរ ទូរទ័រខ្លាំងខ្លុរ
ករក្រើករំពើកប្រងពី ។

១៨៧៤- ញុងល់ជនកទូភី ជាលក្រោធដូចអគ្គី
មហាមហិង្សដើររក ។

១៨៧៥- ដើយប្អួយដងខ្យល់ផ្លួចធ្វក សព្វសត្វដងជ្រក
ក៏ខ្លាចកណ្ដាំងមហិង្សា ។

១៨៧៦- មនគឺអញនាមមហិង្សា- សូរបានចេស្ដា
មហាពន្លឹកជ័ទុតារ ។

១៨៧៧- ក្បិណានោះមហិង្សរាជរុករាន ដើរត្រេចត្រាប់ស្ថាន
លំនៅនៃបុត្រអាត្មា ។

១៨៧៨- មើលយល់ទូភីមហិមា រូបរុងគិរិទ្រា
មហាពន្លឹកជ័ទុតារ ។

១៨៧៩- ដើរដោយដងញូរគ្រោះជារ[2] ដើយប្អួយផ្លួយថ្វា
ជជ្រួយជជ្រែងហិតដី ។

១៨៨០- ក្បិណានោះមហិង្សរាជឫទ្ធិ ធូលផ្កានទូភី
បីពោលនូវពាក្យឃោរឃោង ។

១៨៨១- ឱហាបុត្រមឹងទុតារ[3]ទ្រើសឃ្មង លេះអាចមកលង
នូវឫទ្ធិ៍អញនេះតិច្ចុរ ។

១៨៨២- លេះពីងអួតអាងតនូ ញើយកអាយុកូរ
មកជូនដល់ម្រឹត្យុរាជ ។

១៨៨៣- ពោះពីងតុំភ្លឹកព្រះអំណាច អញនូវផ្ដួលឲ្យខ្លាច
អំណាចនៃអញកុំបីលង ។

១៨៨៤- ក្បិណានោះទូភីគឺជ័ទ្រង់ - ឫទ្ធិក្រាបលុតថ្វង
បង្គំប្រណម្យបិតា ។

១៨៨៥- ទូលក្រុងមហិង្សរាជមហិមា សូមព្រះមេត្តា
ករុណានៃខ្ញុំនេះតិច្ចុរ ។

(1) RIB : dāru(ṇ)
(2) RIB : ṭaṅ dhvā jroḥ dhvā
(3) RIB : dāru(ṇ)

១៨៨៦- ខ្ញុំជាបរិចារព្រះភូ- ធរាជនានៅ
បំរើព្រះម្ចាស់សព្វថ្ងៃ ។

១៨៨៧- សូមបានស្ពានមួយអាស្រ័យ ដោយពនាល័យ
ដ៏ព្រៃពនន្ដរហោង ។

១៨៨៨- ក្បិណានោះមហិង្សរាជរឹងផង ចិត្តខឹងរឹងស្លង
ក៏ពោលនូវពាក្យអាស្រូវ ។

១៨៨៩- លេះមិងលបណាក់ខ្លួននៅ ចងជាសត្រូវ
នូវអញដ៏ជាបិតា ។

១៨៩០- មិងពឹងពួនព្រៃព្រឹក្ស ជ្រោះជ្រកបព្វតា
ដ៏ជាលំនៅសព្វថ្ងៃ ។

១៨៩១- លុះមិងរុងរូបស្គឹមស្ងៃ មិងចង់លងជ័យ
ពិជ័យនៃអញមហិមា ។

១៨៩២- ពីងពាលពាលោមោហា លេះនាំអាត្មា
អាយុមកជុនម្រឹត្យូវ ។

១៨៩៣- អញនូវផ្លាញឲ្យអស់តន្ទ កណ្ដាលរណភូ
ឫទ្ធិនៃអញស្រួចស្រាប់ ។

១៨៩៤- ស្រេចក្រុងទូភីស្ដែងស្ដាប់ ជនកឃោរក្រៅផ្សាប់
នូវធម៌អសត្យមេត្រី ។

១៨៩៥- មកបៀតបៀនបុត្រឯងក្ដី មោះគឺអលដ្ឋី
វង្វេងដោយពិសកាមកាច ។

១៨៩៦- ទ៉ើយទ៉ើយទូភី មិងស្លូតឫទ្ធី
កន្លងលោកា អញនឹងពិឃាត
ឲ្យមិងមរណា កណ្ដាលព្រឹក្ស
តប្បូវនេះហោង ។

១៨៩៧- ទូភីលេះក្រេវក្រោធ មានះរឹងសោត
ប្រែប្រាណថ្មើសឃ្លង អាណាមានពុត
ឲ្យមរនេះម្ដង វែងឈ្មុះម្ចាសគ្រង
តាំងពួងនេះណា ។

១៨៩៨- មហិង្សរាជ មានឫទ្ធិអំណាច
មានះសោតសា តណ្ហាហោវហាន
ប្រកួតពាធា កូនឯងសីងផា
ជាធំថ្មើសឃ្លង ។

១៨៩៩. មោហាម្នុះទុរជន កិលេសពេកពន់
ពុំពោលពាក្យស្លូត ភ្លេចភ្លាំងវង្វេង
ពារុណាថ្មើសហោង បណ្ដាលចិត្តចង
ពៀរភ័យឃោរឃៅ ។

១៩០០- ទូភីគិតខ្លួនមុរពល ជនកគតតចមិសល់

ស្រទីងដោយពិសកាមភាព ។

១៩០១- ពេញពាល[1] ពាណោអំណាច ពុំក្រែងពុំខ្លាច
ពុំអាចពុំអាសូរបុត្រ ។

១៩០២- អញនូវលាលង់ធ្វើយុទ្ធ[2] ពោះអស្ចារ្យ ទ -
ត្បាតបរអំពើអ្នកហោង ។

១៩០៣- ទាំងពីរសឹងទ្រើសធារឃ្នង[3] មហិង្សជនកលង
ឫញនូវទូតីបុត្រ ។

១៩០៤- ប្រតិរព[4] ផ្ទុលសមនូវប្រយុទ្ធ សឹងស្រីង្គស្រួចមុត
គីពេជ្រនូវពេជ្រផ្លាញផ្លា ។

១៩០៥- រុងរូបធាត់ធំមហិមា រូស្ទុមេរគិរិត្រោ
ដ៏ពីរកណ្តាលប្រថពី ។

១៩០៦- ប៉ាំងបាត់ពុំយល់រស្មី កក្រើកអស់តិ
ស្អួកាសោប្បសព្រហ្មដ្បើល ។

១៩០៧- ព្រះចន្ទ្រព្រះអាទិត្យឈរមើល ឃ្លាតឫក្សដំណើរ
នាទីពុំដូចសព្វដង ។

១៩០៨- ប្រយុទ្ធពីប្រថមោទ័យហោង លុះប្រថមត្រង់ហោង
ក៏ដួលជនកនោះមរ ។

១៩០៩- បានអស់មហិង្សានិករ ទូតីអ្នកអរ
បីសេពានូវសុខបរិពារ ។

១៩១០- ខ្លួនភ្លោះខ្លាំងខែងខុភារ ដើរដោយនូវរបាល
កដេន្ទ្របាសារសិង្ហសិហ ។

១៩១១- ស្សូរសព្ទរូវសែនអសនី ថ្នាស់ប្រេះប្រថពី
កគឹកទាំងព្រៃព្រឹក្សា ។

១៩១២- ចតុជង្ឃឈរឈានយាត្រា រូស្តម្ភសិលា
មហាគិរីបព៌ត ។

១៩១៣- ទីក្រចកដូចរត្នមរកត បាទាច្រំច្រត់
រន្ធត់ទាំងមហាប្រថពី ។

១៩១៤- រីទ្វេស្រីង្គស្រួចរូសូលី មេសក្តិសូលពី[5]
សម្តេចព្រះតស្សូរសារ ។

១៩១៥- ហិតហាជិវ្ហាព្រោយពណ៌ ស្រួចស្រួលអំពាល
អណ្តាតព្រះភ្លើងភ្លឺក្រៃ ។

(1) RIB : bīṅ bāl
(2) RIB : dhvoe dhammayuddh
(3) RIB : dāru(ṇ) ghnaṅ
(4) RIB : pratibal
(5) RIB : rī dvār sriṅg sruoc sūlī
mer sak sal' bī

១៩១៦. នេត្រប្រាលដូចសុរិយោទ័យ    រស្មីប្រាសព្រៃ
ពន្លឺកទាំងទសទិសា ។

១៩១៧. កកាយមុចមករាតា    ដូចព្យុះព្យោមា
ពន្លូកពន្លឺកផ្ទើងផ្ទែង ។

១៩១៨. ទន្ទុំង[1] កាមកាយយល់ស្នែង    រូបរុងរូកំពែង
កំពស់កំពូលបព្វតា ។

១៩១៩. រុកភានរត់ដេញម្រឹគា    ម្រឹគីព្រាត់គ្នា
គោក្តាអាហារពុំបាន ។

១៩២០. ព្រាត់គូព្រាត់គោត្រព្រាត់ស្ថាន    ព្រាត់សុខព្រាត់សាន្ត
សំនៅទីព្រៃព្រាត់បាត់ ។

១៩២១. ស្ថានគោយាសិង្ហសីហាស្ងាត់    ភាត់ភាយខ្ចាយខ្ចាត់
ក៏ដេញនូវតេជឫទ្ធិរឹង ។

១៩២២. គ្រេចត្រង់បង់ម្រឹគដែលនឹង    សំដៅទៅបញ្ចូលសិង្ហ
មុនីមានឫទ្ធិសិទ្ធិសក្តិ ។

១៩២៣. ដល់ភ្នំទ្រាំប្រាការបាក់    ភ្នំជាផ្លាយផ្លាក់
រលំរលើងព្រឹក្សា ។

១៩២៤. អារក្សយក្សសិងអង្គា    ពាក់ពឹង[2] ព្រះមហា-
ឫសីសីលាសិងឃាត់ ។

១៩២៥. ផ្លាស់ផ្តើយនូវក្តីសារសត្យ    ផ្លែងជាទៅថ្វាត់
ឋាមហ្មាលកំហែងមហិទ្ធិ ។

១៩២៦. ឃើញជាអ្នកស្វែងចរិយា    ពីភ្នំនេះណា
ជាស្ថានគោយាប្រក្រតី[3] ។

១៩២៧. ចិរកាលកើតដំណាលប្រជពី    ពីដំណាលគិរី
ឲ្យកណាសព្រះឥស្សរស្ថិត ។

១៩២៨. ពុំជ៏លែង[4] អាងអួតលងឫទ្ធិ    ពុំដែលមានចិត្ត
ប្រទូសប្រទះសត្វផង ។

១៩២៩. ជាឋាយូភីមកពីងប៉ង    បើពឹងចង់លង
ឫទ្ធិដង់អ្នកជ៏មានចេស្តា ។

១៩៣០. អញនូវណៃព្រះស្តែងលេណា    ត្រង់ទេពជីតា
រុក្ខមហាសាគរ ។

១៩៣១. អ្នកនោះឫទ្ធិមានប-    រិពារពលវិកវរ
មករនូវនាគគណនា ។

(1) RIB : dan' dāṃṅ
(2) RIB : buok biṅ
(3) RIB : gohā braḥ kuṭi
(4) RIB : laeṅ

១៩៣២- ទូកីស្តាប់ឫសីថា ត្រេចត្រង់អង្វា
ដល់ទេពធីតាសាគរ ។

១៩៣៣- ជ្រងជ្រួលយកគង្គាខ្វាយខ្វេរ ឈាន់ៗដូចឆ្គេរ
រន្ទុះទាំងទសទិសា ។

១៩៣៤- រលកដលខ្ទាត់ដល់អា- កាសកងសុរិយា
ចន្ទ្រាតារាភាំងភាត់ ។

១៩៣៥- អស្ចារ្យទូរទ័រសព្វសត្វ មករនាគនាស[1] ស្លាត់
បំពាក់បំពួនអាត្មា ។

១៩៣៦- ខាប់ខះសាគរគង្គា ទាំងទេពធីតា
ក៏ភ្លឹកអាត្មាថ្លាស់មរ ។

១៩៣៧- នាំអស់សត្វសិងសាគរ ណោមណាសារ
នូវពាក្យពោលពឹងប្រាស្រ័យ ។

១៩៣៨- ជាវៃហាទូភីឫទ្ធិក្រៃ ពីងជាឯកត្ត-
សុភនូវសត្វយល់ឃ្លង ។

១៩៣៩- ថ្លាញអស់សារសិង្ហសីហាផង តប្បូវពីងប៉ង
ប្រឡូងប្រយុទ្ធសាគរ ។

១៩៤០- ព្រះសមុទ្រមានគុណដ៏បវរ ក្រងនាគនូវមករ
អនន្តនូវនាគមច្ឆា ។

១៩៤១- ជាតិស្វរអស់ឯគង្គា ស្ទឹងបឹងផងណា
អនេកនៃកោដិសែនសល់ ។

១៩៤២- សត្វសព្វភូមិភពមណ្ឌល បានសេពសុខសល់
ដ៏កល់នៃលោកប្រធាន ។

១៩៤៣- ពីងឯងភោគ្គាហើយបាន តប្បូវពីងឈុកឈាន
នូវឈើងដ៏មានគុណគាប់ ។

១៩៤៤- ជាវៃហាទូភីពីងស្តាប់ អញ្ជើញលេណាប់
គំរង់នគរហោមពាន ។

១៩៤៥- ពោះពីងស្វាញ់អ្នកនោះបាន បីពីងមានស្ពាន
ប្រធានពពួកនូវទេវតា ។

១៩៤៦- សឹងសុខហោមពានជាអា- ស្រ័យស្រានអាត្មា
នូវទេពកញ្ញាដុំរដុក ។

១៩៤៧- ពីងយកស្ពានហោមពានទុក ជាបុរីស្ពានសុខ
បន្ទូលព្រះសុំមហាម្បី ។

១៩៤៨- ក្បិណោះមហារិស្យរាជនោះលី- ណាវែលងដលធី
សំដៅទៅស្ពានហោមវា ។

(1) RIB : nāy

១៩៤៩- រុកភានរត់លើបព្វតា ក្រែងត្រង់សិលា
កក្រើកកម្រើងមហាប្រថពី ។
១៩៥០- អឺអឹងគគឹកកូអគ្គី ដេះកញ្ឆកលី -
យុគយល់ពន្លឺកមហាស្បែង ។
១៩៥១- ហៅហៃហោមពានព្រះស្មែង ព្រះសមុទ្រស្អួតតាំងខែង
នូវឫទ្ធីរ៉ឹង[1] មហិមា ។
១៩៥២- ធុរចេញអញ្ជើញអាលយាត្រា ផ្លាញយសយក្សមហិង្សា
ជ័ទីងស្រឹង្គាពិសពាន់ ។
១៩៥៣- ទេពារក្សាសឹងមីលង់[2] ខ្លាចខ្សឹនទុរជន
មហាមហិម្សពាធា ។
១៩៥៤- ផ្លាស់ផ្ញើយសារសូមករុណា ហៃមានពជា
មហាតស្សូរសត្វដង ។
១៩៥៥- តាំងមកតប្សូវតើតាំងប៉ង យកសម្បត្តិគ្រង
ឬមួយមកលងឫត្ដ ។
១៩៥៦- វីសម្បត្តិដោយតាំងប្រាថ្នា វ៉ាងចេស្តា -
នុភាពពីងនោះយើងខ្លាច ។
១៩៥៧- វាំអំណាចតាំងគូនូវអំណាច យុទ្ធនូវពាលីភង
ទុរសសម្ដេចតគ្រៃ ។
១៩៥៨- នាមពាលីភងទេវា ចាប់ក្រុងភពណា
អសូរសហ័សចាប់ចង ។
១៩៥៩- សោយសុខបុរីវាស់ខិនហោង រក្សាពានរដង
អនេកជ័សៃនសំខ្យា ។
១៩៦០- បហិដ្ឋាស្ដាប់ហោមពានថា វុករកយាត្រា
សំដៅទៅពានរតាយ ។
១៩៦១- អរភ្លួតដោយចិត្តពាលពាយ ឃាយសោតស្ទូចទុម្ភាយ
ព្រះបាទសម្ដេចសាគរ ។
១៩៦២- សៅស៊ូចហោមពានបវរ តាំងដឹងពានរ
ពន្លឺកគឺភ្លើងកល្បក៏ន ។
១៩៦៣- បុរីគឺជ័ហោវខាស់ខិន ភិរម្យអចិន្ត[3]
ស្រណុកតតឯទុបមា ។
១៩៦៤- ពាលីសោយភាព្យនូវតា - នរសៃនសំខ្យា
នូវសក្តិនៃតេជោគុណា ។
១៩៦៥- មានមានពមួយជ័មារុណា សោយ្យា[4] គឺគុណា

(1) RIB : ṛddhi dāru(ṇ)
(2) RIB : debā raksas siṅ mī lan'
(3) RIB : bhiramy aciṇṇ
(4) RIB : sayā

នូវកម្លាំងមហិទ្ធិស្ទួរ ។

១៩៦៦ - ហោមពានមេគិរីទូល ពានរត្រៃមូល
នូវសក្តិនៃតេជោពុត ។

១៩៦៧ - មកថ្កានពាលីបីជំហុត បីដងហើយចេញយុទ្ធ
ក៏ពោលពាក្យខំខាស់ហោង ។

១៩៦៨ - ឱយាមានពពិងទ្រើសឃ្លង ពីងម្លួតចេះចង
មានះអងម្ចិស្ទួរ ។

១៩៦៩ - ឈ្មោះអញគឺក្រុងពាលរ មានឫទ្ធិពន្យួស -
សក្តិសាយជ័យជំនាភ ។

១៩៧០ - អញពុំនាំពលយោធា អញចេញមួយនា
សរិលជ័យសមតីងឯង ។

១៩៧១ - អញហោងគឺជ័យហៅទូភី ដោយសុមេរគិរី
សមុទ្រក៏ជ្រួយជ្រិងជល់ ។

១៩៧២ - ឱយាពាលីរំលងសោតសល់ ចេញមកឃើញនិងជល់
កម្លាំងតម្រូវកុំបីលង ។

១៩៧៣ - ឱយាមានពពិងក្រឡរង ពាលីហោងថ្លង
តីងរំលងរូបព្រះភិមុខពាន[1] ។

១៩៧៤ - លេះតីងបីមកឈុកឈរ ស្មើតីងនាំប្រាណ
មកជូនព្រះស្រីត្បូងហោង ។

១៩៧៥ - អាណា[2]ទ្រើយមិញ ទូភីគឺអញ
ជ័យមហិមា អញជ្រួយសមុទ្រ
គិរីកាណ អះអញហោងណា
គឺនាមបីហៅទូភី ។

១៩៧៦ - អញជ្រួយសមុទ្រ ត្រីងងស្លាប់ស្លុត
មនគឺជាតិ[3] នគរខាស់ខិន
ជាមានពាលី ចេញមកស្រដី
បីប្រយុទ្ធជ័យមួយឯង ។

១៩៧៧ - ជាទ្រើយទូភី មនគឺអញពាលី
ជ័ក្រែវលងហោង អញកាច់កតីង
បីផ្លូលមួយឯង អញសោតកន្លង
កាច់ស្នែងក្រវី ។

១៩៧៨ - ជាទ្រើយក្របី មិនពុំកាន់ៗ
តេងរៃងពាលី អញយះខ្លួនតីង

(1) MBN et RIB : braḥ dhimukh bān
(2) RIB : ānāth
(3) RIB : măn gī dịk jāti

អញលើកអញលី   វែងពីងពាលី
នោះដ៏វែងពុំក្រែង ។
១៩៧៩- ជាទើយពាលី   មនគីអញទូភី
ដឹងជាប្រវែង[1]   អញជ្រួយសាច់ស្អួត
ពុំពាន់គិត[2]វិស្អង   ស្វាស្លាប់ពុំវែង
តប្បូវនេះហោង ។
១៩៨០- ជាទើយក្របី   ដឹងពុំពាន់ឮ
ពុំដឹងនៃឯបង   អញកាច់កពីង
បីដូចមួយនឹង   ទើបអញមកលង
កម្លាំងនាមាន ។
១៩៨១- ក្រុងពាលីភាឯហៅបាន   ម្សូតអង្គក្តើងក្តាន
ពុំភ្លឺកទូភីមហិមា ។
១៩៨២- ទើយទូភីពីងជាតិជា   មហិង្សាសោះសា
ក៏ដ្ឋួលអាពុកក្សិណាក្ស័យ ។
១៩៨៣- តាំងពុំដឹងដើមតេជដៃ   ពង្សពានរវៃន
ផ្ញាកដប្រកួតប៉ះបុណ្យ ។
១៩៨៤- អញឯងឲ្យអស់ជីពជន្ម   ពីងពាលក្ស័យក្សិណា
នេះនៅតេជតេជោជ័យ ។
១៩៨៥- ពាលីពាណោក្រោកនៃក្រ   ហោះហិចអង្គឮ
មណ្ឌលមន្ទីរទឹងថ្វាត់ ។
១៩៨៦- ទ្បើងលើប្រាង្គប្រាសាទសត្ត -   រួតរម្យភាយរត្ន
កញ្ចាន់កញ្ចក់មាលមាស ។
១៩៨៧- ពាន់ពាក់ពស្ត្រា[3]ពាពាស   ក្រោងព្រាយដាំដាស
រលេចរលង់ទ្បើងរត្ន ។
១៩៨៨- ទ្រង់ព្រះខ័នពេជ្រហោះថ្វាត់   ទូភីប្រយ័ត្ន
ប្រយោជន៍ប្រយុទ្ធជាញជ័យ ។
១៩៨៩- សឹងសាញសោះសាដ៏ទីទៃ   ទូភីនិរភ័យ
លលេលលាំងរួសរង ។
១៩៩០- ភ្លោកភ្លើសធរណីជ្រួយជ្រុង   ខៃវរាត់ភ្លៀងឈ្មង
រលើងរលំព្រុំក្បូ ។
១៩៩១- ផ្លាយផ្លាក់បែកបាក់បញ្ចា   ដើយប្លួយដងរងា
រលាស់ស្រួចស្រឹង្គម៉ាយមៀង ។
១៩៩២- វិលវេះខៃវរាត់ខ្លាំងភ្លៀង   ស្មុះស្គុសឆាបឆៀង
ក្រមៀកក្រឡាស់ឃាក់ហោះ ។

(1) RIB : gralaeṅ
(2) RIB : ṭit
(3) RIB : bhaktrā

១៩៩៣- ក្រុងពាលីលុះដាញស្នោះ ខ្លាត់ដូចគេដោះ
ពុំនឹកដល់អង្គមហិង្សា ។

១៩៩៤- ស្នែងស្និទ្ធតីរពេជ្រផ្លាញផ្លា ពះលើសិល្បាពា -
លីរាជពុំអាចបីនូវមុត ។

១៩៩៥- ដូចលំពែងពេជ្រមុតបីប្រាកដ អ្នកជាក់ជ័ជំហុត
ទំលុះលើមហាពេជ្រឯង ។

១៩៩៦- ព្រះខ័នពេជ្រពះពេជ្រស្នែង ពេជ្រនូវពេជ្រឯង
ប្រកួតប្រកីងចេស្តា ។

១៩៩៧- ពាលីវៃវេះជ័វេហា ទូភីរងរា
ទន្ទុំទន្ទ្រយវិលវាត់ ។

១៩៩៨- ទូភីពាលីសឹងស្អាត់ សឹងជែងដាញក្តាត់
ប្រយ័ត្នប្រយុទ្ធកោះកាវ ។

១៩៩៩- ព្រោមព្រុតប្រេះប្រដិតីញ័រ កក្រើកកៃព្រៃទូរទ័រ
អស្ចារ្យទាំងទេពសួគ៌ស្ថាន ។

២០០០- ហិចហោះចេញចាកដំពិមាន ពេញអាកាសស្ពាន
មកមើលសរសើរចេស្តា ។

២០០១- សែងស្ទូរចង្រៃរល្អាតល្អា ពុំទៀងដាយា
ស្រឡប់ពុំដូចប្រក្រតី ។

២០០២- កោលាហលហេតុទូភី ពះលើពាលី
ពលានុពលដាញជ័យ ។

២០០៣- ពាលីដឹងឫទ្ធិជ័ទីទៃ ស្មោះស្មើតេជវៃ
មហិង្សារាជទូភី ។

២០០៤- នោះទើបក្រុងរាជពាលី លាកវែងទូភី
ក័រិះនូវប្រាជ្ញាឈ្វេង ។

២០០៥- ដាពោះបីអង្គអញឯង ប្រយុទ្ធនៅក្រៅក្រែង
ពុំឈ្នះនូវមហាមហិង្សា ។

២០០៦- រូបរុងក្រើសច្រង់នូវពលា នៅកណ្តាលពសុធា
ទូលាយស្រលះអស់កល (1) ។

២០០៧- ទំនើងវិលវាត់ដាញដល់ ក្បួរអញរកកល
បង្អោនបង្អស់ជន្មា ។

២០០៨- អញនូវនាំចរចូលគោហា ដានឹងយកដា
សុពណ៌មឈ្មួសរងអង្គ ។

២០០៩- ស្លោះហើយទូភីលម្ងប់ បាន:ចូលក្នុង
គោហាចង្អៀតអង្គឯង ។

(1) RIB : as' aṅg

២០៤៤ - ព្រះប្រាជ្ញាទិញប្រាជ្ញប្រុះ ស្ដេចឡើយមកលុះនូវអំណាច
នៃមហាមហិង្សាភាង ទូភីតារភ័យកោណ ។
២០៤៥ - តាំងទេសមុខមារ តាំងសព្ទតាលនៃនាគា
សឹងចាញ់ព្រះជេស្ឋា ស្ដេចចាប់លើងជាប្រក្រតី ។
២០៤៦ - ឱស្ដេចស្ដេចឡើយមកសុគត អសារបរឫទ្ធិទូភី
ឱកើតកេរតិក្រុងពាលី លុះអំណាចមហិង្សាសល់ ។
២០៤៧ - សុគ្រីពបន្ទោទុក្ខទល់ សោយសោកានល
រលីងរលាមនេត្រា ។
២០៤៨ - សុគ្រីពក្រោធបន្ទួលជា នូវអស់សេនា
យោធាមុខមន្ត្រីជង ។
២០៤៩ - អញតតចិត្តដេតនាគ្រង សេពសោយរាជ្យស្នង
ក្រុងរាជពាលីជេស្ឋា ។
២០៥០ - អញនូវតាមពិឃាតមហិង្សា ពាណោនូវពាណា
មកជាសត្រូវរុករាន ។
២០៥១ - មន្ត្រីទូលតស់សូមទាន កុំព្រះអង្គមាន
ព្រះហឫទ័យចងទេរា ។
២០៥២ - បើស្ដេចទៅតាមមហិង្សា ជោះបង់សេនា
ប្រជានុរាស្ត្រពលនិករ ។
២០៥៣ - សមសួន្យដេងតាំងព្រះនគរ អស់អង្គពានរ
នេះតតពាំនាក់ឡើយណា ។
២០៥៤ - ប្រាសតែព្រះទៀមសង្ហារ ស្ដេចព្រះអនុជា
ពាំក្រុងរាជរដ្ឋជ័យបុរី ។
២០៥៥ - សុគ្រីពស្ដាប់រាជមន្ត្រី ទូលទាស់នូវក្ដី
ប្រយោជន៍ប្រពៃពលីណា ។
២០៥៦ - ស្ដេចប្រាប់ប្រើអស់បរិពារ បរពលក្រាស់ក្រាល
ប្រញាប់នូវរាជសេនីយ ។
២០៥៧ - គោះកៀរពលពានរពី ខាស់ខិនជ័យបុរី
ជញ្ជូនគិរីសិលា ។
២០៥៨ - សន្ធប់ផ្លូវរត្នគោបា ជោះជិតជិតជា
អនេកនូវត្ថុជ័យប្រមាណ ។
២០៥៩ - សន្ធប់ផ្លូវគោបាឋាន សុគ្រីពទីងថ្កាន
នគរខាស់ខិនជ័យបុរី ។
២០៦០ - ទល់ទុក្ខនូវមុខមន្ត្រី តារារាជទេពី
នូវស្រីព្រះសុំស្នេហា ។
២០៦១ - សឹងសោយសោកសល់ជ័សោកា ដួញដើម[1]ក្រុងពា -

(1) RIB : duoñ paṇtoem ~ duoñ paṇtoer

សីរាជសន្ធឹកសព្វក្រៃ ។

២០៦២- ឯងនោះពាលីនិរភ័យ ថ្លៃលទុភ័ក្ត្រយ

នូវតេជអំណាចមហិមា ។

២០៦៣- ស្រេចដើរដល់ទួរគោហា យល់សឹងសិលា

គិរីសន្ធប់ជិតនៅ ។

២០៦៤- ពាលីស្រែកដង្ហោយហៅ ហោតុភ្នំក្រាស់ក្រៅ

ពុំឮពាក្យពាលីឡើយ ។

២០៦៥- ពាលីពុំឮសព្ទឆ្លើយ ថយទៅក្រោយហើយ

ក៏ស្រែកសីហនាទនូវឫទ្ធី ។

២០៦៦- កាត់កឈូរយកសិរសី មហិង្សាទូភី

ក៏លើកស្ទួយស្មាសនូវពណា ។

២០៦៧- បោះបាក់ផ្លាយផ្លាក់បព្វតា របើកទ្វារគោហា

នូវសិលាជាខ្ទាត់ខ្ទាយ ។

២០៦៨- ស្អិតអស់ភ្នាភ្នំផ្លាក់ផ្លាយ ផ្លាក់ទល់សមុទ្រនាយ

ដោយតេជក្រុងរាជពានរ ។

២០៦៩- ពាលីចេញពីគោហាជរ ចូលក្នុងព្រះនគរ

ក៏ឡើងលើប្រាសាទស្ថាន ។

២០៧០- ស្ដេចខ្ញាល់ពេកពន់នូវប្រមាណ ពុំបន្ទូលក្នុង

ទេពីមន្ត្រីឯងសោត ។

២០៧១- ទុំទាំងព្រះភក្ត្រក្រៃក្រោធ ក្រាស់ភាសពិរោធ

រួបាននូវដេះហឫទ័យ ។

២០៧២- ឯងនោះសុគ្រីពភិតភ័យ គិតខ្លួនខ្លាចក្ស័យ

ក៏ឡើងថ្វាត់ថ្វាយបង្គំ ។

២០៧៣- ទូលថាបពិត្រអញខ្ញុំ ឯងឲ្យដំនុំ

វិវាទ(1) ពិតពិចារណា ។

២០៧៤- ឈាមនេះអង្គីឈាមមហិង្សា យល់ជាក់ជាតិជា

ព្រះលោហិតហូរចេញមក ។

២០៧៥- នោះទើបខ្ញុំប្រាមប្រើយក អស់បពិតមក

បោះបិតសន្ធប់គោហា ។

២០៧៦- ពុំចេរនូវព្រះអាជ្ញា ទិព្វ(2) ទ្រង់ព្រះចិន្តា

ពិសេសព្រះករុណាឈ្មោង ។

២០៧៧- សូមទានស្ដេចទោទតឯង ដើលឈាមនោះក្រែង

កម្លៅយើងខ្ញុំពុំជាក់ ។

២០៧៨- មួយសោតយល់ស្ដេចដំពាក់ ប្រយុទ្ធយល់ប្រត្យក្ស

(1) RIB : varavād

(2) RIB : doep

ៗសព្វពន្លឹកហើយបាត់ ។

២០៧៩- ខ្ញុំទៅតាមព្រះមហាក្សត្រ អស់មន្ត្រីឃាត់
ខ្លាចផ្អើលកំលុងព្រះនគរ ។

២០៨០- ទូគីពិឃាតបរមប - ពិត្រលុះជ័យរ
ក្រែងកើតកោលាហលហោង ។

២០៨១- ឯងនោះពាលីទ្រើសឃ្លង ពុំមេត្រីឯង
សុគ្រីពអនុជបីសំឡាញ់ ។

២០៨២- មឹងពុំដឹងគេដៃងអញ មឹងជាជាធាញ់
ទូគីមហិង្សាសត្វ ។

២០៨៣- មឹងមោះមុសាវាទក្ដាត់ ចប់ភាជសម្បត្តិ
រកកលពិឃាតជេស្ឋា ។

២០៨៤- មឹងឲ្យជញ្ជូនបព្វតា បោះបិទគោហា
សន្ធប់ពុំឲ្យចេញបាន ។

២០៨៥- ហើយមឹងធ្វើស្លូតមកដ្ឋាន មេត្រីសោះសាន្ត
ពុំដឹងអំពើពុតពាល(1) ។

២០៨៦- មឹងចង់ក្បដបងសង្ហារ ចិត្តចោរស្រើបស្រាល
កុហកកម្លៅមោហា ។

២០៨៧- ក្រុងពាលីក្រោធមហិមា ទះនូវសិរសា
សុគ្រីពពុំអាចទប់បាន ។

២០៨៨- ស្ទុះបោះចេញចាកវៃងស្ថាន ប្រាសាទពិមាន
ពាលីបោះតាមពុំវៃង ។

២០៨៩- ដោយដេញទៅទល់កំពែង ចក្រវាលនូវកំពែង
កំហឹងនោះខ្លាំងឃោរទំ ។

២០៩០- ទាន់ទះបណ្ដើរដាល់ដំ សុគ្រីពត្រូវដំណំ
ពន្លឹកផ្ដាស់នឹងមរណា ។

២០៩១- វិលវេះបោះចុះវេហា ពុំឃ្លាតនឹងពា -
លីភាជក៏តាមជិតដោយ ។

២០៩២- ទាន់ទទះទៅពីក្រោយ ក្រុំក្រៃពុំឲ្យ
សុគ្រីពឃ្លាតនូវដំណំ ។

២០៩៣- សុគ្រីពនឿយណាស់ខាស់ខំ ចុះចួននឹងភ្នំ
ជ្រោះជ្រៃកលវង្វកសិលា ។

២០៩៤- ពាលីបោះចុះបព្វតា ដោយជិតជ័ប្រវា
ចាប់ជើង(2) ទាំងពីរដ៏ក្រវី ។

២០៩៥- នឹងបោកលើខ្ពង់គិរី សុគ្រីពមានស្មារតី

(1) RIB : amboe but vā
(2) RIB : jāp' joeṅ

កន្ត្រោងកន្ត្រាក់ឃ្លាឃោះ ។

២០៩៦- របូតពីដៃទក្សិណានោះ  សុគ្រីពឃោះស្ទោះ
ចូលវិស្សតំបពិត (1) ។

២០៩៧- ពាលីចូលពុំបានបទ  ស្ពាននោះសន្ធត
នៃព្រះវិស្សតំតសី ។

២០៩៨- ស្តេចខ្លាល់កាលក្រុងពាលី  ពិឃាតទូរី
ឈាមហូរទៅលើអាស្រម ។

២០៩៩- វិស្សតំតសីសន្សំ  សាបាលនៅភ្នំ
នោះពុំឲ្យពាលីជិត ។

២១០០- ដើរដល់លុះក្ស័យជីវិត  នោះពាលីគិត
ពុំអាចនឹងចូលទៅបាន ។

២១០១- ពាលីវិលវឹងទៅស្ពាន  ប្រាសាទពិមាន
រូបបានទិព្វទេពសួគ៌ា ។

២១០២- សុគ្រីពពួននឹងបញ្ញា  ទល់ទុក្ខសោកា
សម្រេចប្រយោជន៍ពីនូវឯមរ ។

២១០៣- ខ្ទស់ព្រះរាមរាជពានរ  ខ្ទស់រាស្ត្រនិករ
កំលុងខាស់ខិនបុរី ។

២១០៤- ជលនេត្រជាជលនទី  ពណ្ណងហូរចេញពី
គិរីគីជ្រោះសោភា ។

២១០៥- មាននៃហនុមានឯងជា  ក្ស័យក្សេងក្សុក
នូវជាកំដររសព្វថ្ងៃ ។

២១០៦- សុគ្រីពបង្អស់ហឫទ័យ  ថ្លើជីវិតនៃ
ព្រះហនុមានបុត្រភ្លា ។

(1) Sur la lecture "vissataṃ", voir R.I., p. 128, n. 1.

# កណ្ឌ ទី១៣

២១០៧- ដងនោះពីរព្រះរាជា ត្រេចតាមសីតា
ទេពីស្រីរត្នដ៏បវរ ។

២១០៨- ពីរព្រះអង្គត្រេចពានេចរ តតឈប់តតឈរ
សំរានព្រះអង្គឡើយណា ។

២១០៩- ស្តេចត្រេចលុះព្រៃបញ្ចតា ឆ្លងត្រាញ់យាត្រា
ក៏លុះនាព្រៃពនាលី ។

២១១០- ឮសព្ទមហាបក្សាសីហា ពាំងហួងឈ្មោលញី
ស្រកុំស្រកាំងជ្រួចជ្រូក ។

២១១១- អ៊ីអ៊ីងពាំងព្រៃស្កុងស្កក រងាំងរមាសរត់ជ្រក
បំពាក់បំពួនអាត្មា ។

២១១២- ស្តេចឮសូររាជបក្សា ជ្រួចគោះមាគ៌ា
ដោយមហាស្តុនសិទ្ធិសក្តិ ។

២១១៣- ស្តេចឈប់ឈរប្រែព្រះភក្ត្រ មៀងទតព្រះលក្ស្មណ៍
ព្រះអនុជនាថស្នេហា ។

២១១៤- ឱលក្ស្មណ៍នាយើងយាត្រា ដល់ស្ថាននេះណា
ឮសព្ទមហាបក្សាសូរ ។

២១១៥- ជ្រួចជ្រូកស្មៀរស្មឹរសព្ទថ្លៃ ស្ថាននេះបរិបូណ៌
ប្រសើរតតឯកណោនា ។

២១១៦- ចេរកាលនូវប្រទះអ្នកដា ទល់ទុក្ខវេទនា
នូវមកពីងចេស្តាយើង ។

២១១៧- នូវបំពេញលាភយសឲ្យថ្កើង ចំណោរទៅសោតយើង
នូវជាប់លង្កាបានបាយ ។

២១១៨- ស្តេចបន្ទូលទិញដ៏ទំនាយ ឲ្យអនុជគ្រាន្តប្រាយ
ទំនាយសម្តេចដេស្នា ។

# កណ្ឌ ទី១៣

២១០៧- ឯងនោះពីរព្រះរាជា ត្រេចតាមសីតា
ទេពីស្រីរត្នដ៏បវរ ។

២១០៨- ពីរព្រះអង្គត្រេចពនេចរ ឥតឈប់ឥតឈរ
សំរានព្រះអង្គឡើយណា ។

២១០៩- ស្តេចត្រេចលុះព្រៃបព្វតា ដួងក្រាញ់យាត្រា
ក៏លុះនាព្រៃពនាលី ។

២១១០- ឮសព្ទមហិង្សាសីហា ទាំងហ្វូងឈ្មោលញី
ស្រកុំស្រកាំងជ្រួចជ្រូក ។

២១១១- អឺអឺងទាំងព្រៃស្កាំងស្កក រងាំងរងាសរត់ជ្រក
បំពាក់បំពួនអាត្មា ។

២១១២- ស្តេចឮស្នូររាជមហិង្ស ជ្រួចឆ្កោះមាតា
ដាមមហាស្កុនសិង្ហីសក្តិ ។

២១១៣- ស្តេចឈប់ឈរប្រែព្រះភក្ត្រ ឆៀងទតព្រះលក្ស្ម
ព្រះអនុជនាថស្នេហា ។

២១១៤- ហៃលក្ស្មនាយើងយាត្រា ដល់ស្ថាននេះណា
ឮសព្ទមហិង្សាស្នូរ ។

២១១៥- ជ្រួចជ្រូកស្មៀរស្មើរសព្ទជ្រួំ ស្កុននេះបរិបូណ៌
ប្រសើរឥតឯកណាណា ។

២១១៦- ចេរកាលនូវប្រទះអ្នកដា ទល់ទុក្ខវេទនា
នូវមកពឹងចេស្ដាយើង ។

២១១៧- នូវបំពេញលាភយសឲ្យថ្កើង ចំណោរទៅសោតយើង
នូវចាប់លក្ខាបានបាយ ។

២១១៨- ស្តេចបន្ទូលទិព្វដ៏ទំនាយ ឲ្យអនុជគ្រាប្រាប់ប្រាយ
ទំនាយសម្ដេចដ៏ស្នេហ៍ ។

២១១៩- ស្ដេចពាយទំនាយមហិង្ស តីរព្រះយាត្រា
ស្រងាត់ដោយដងព្រៃព្រឹក្ស ។

២១២០- មានស្វាយស្ពួយដំដីអដិក ល្ហុតលាស់នូវសន្លឹក
ត្រសុំត្រសាយសាខា ។

២១២១- ផុំក្លិនកេសរគន្ធា ទួទាំងទិសា
បីដោយព្រះពាយផ្សាយទៅ ។

២១២២- ពួសួរសព្ទសត្វចៀវនៅ សូរសៀងត្រសៅ
មមះសសិតស្លាបលេង ។

២១២៣- ខ្លះទំខ្លះហើរបីប្រវែង សព្ទសូរទូរខ្លួង
តន្ត្រីយចំរៀងស្នូគាំ ។

២១២៤- ស្ដេចផ្ទុំក្រោមមហាព្រឹក្ស ព្រឹក្សមានដាយា
ស្រមោលអម្លប់សាន្តសឹង ។

២១២៥- ដុំជិតនិត្យនៅដុំទីង ត្រដាក់នៅនឹង
ព្រះពាយត្រសៀកបីរំភើយ ។

២១២៦- ស្ដេចផ្ទុំព្រះសិរស្ដេចកើយ លើទូរព្រះលក្ខណ៍ហើយ
ជាខ្នើយសម្ដេចភរិយា ។

២១២៧- កាលនោះហេតុបារមីតា រីព្រះសុរិយា
ពុំអាចអស្ដង្គតទៅ ។

២១២៨- ព្រះសូរ្យឈប់រជនឹងនៅ ត្រប់ព្រឹក្សក្រៅ
សឹងមានអម្លប់សាយសាន្ត ។

២១២៩- ដូចអ្នកសង់ឆត្រដោយឆ្ងាន ប្រជាប់នូវស្ពាន
បណ្ដាលព្រះអង្គផ្ទុំនិទ្ស[1] ។

២១៣០- ឯងនោះសុគ្រីពភរជបពិត្រ យល់បុព្វនិមិត្ត[2]
ប្រសើរអរតតតគណនា ។

២១៣១- ជាឃ្លៃបាបានុមានអើយបា បាមើលសុរិយា
រសៀលអស្ដង្គតហើយ ។

២១៣២- ល្ពឹកអ្វីស្រមោលត្រង់នៅឡើយ ឃ្លៃបាបានុមានអើយ
សមអ្នកដ៏មានបុញ្ញៃន ។

២១៣៣- ត្រេចត្រង់គង់នៅនាព្រៃ នោះទើបស្រមោលថ្ងៃ
រសៀលរវៀលជុំទីង ។

២១៣៤- ត្រប់ព្រឹក្សក្រៅឈប់ឈឹង សឹងត្រង់នៅនឹង
អំពល់នូវផលផ្លែផ្កា ។

២១៣៥- មានរសផ្អែមផ្អែកពិសា ឃ្លៃបាបានុមានបា
ផូរបាអាសាមា[3]ហោង ។

(1) RIB : phdaṃ nidr
(2) RIB : pūrbanirmitr
(3) MBN : āsā moel

២១៣៦. ជាទៅមើលសព្វស្ថានឯង អ្នកបុណ្យមកក្តែង
ក៏លុះដល់ស្ថានយើងតាយ ។
២១៣៧. ក្បិលណានោះហនុមានឫទ្ធិសាយ ជាទបតន៍[1]ក៏ថ្វាយ
បង្គំណារាជដ៏ក្របី ។
២១៣៨. ហោះទៅដ៏ដែនដីភូមិ យល់ព្រះនរបតី
សម្តេចព្រះនារាយរាមា ។
២១៣៩. ឈុំលើទីរូបរាជអនុជា ក្រោមអម្លប់ព្រឹក្សា
ស្រងាត់អនាថពីរអង្គ ។
២១៤០. ហនុមានហោះឡើងលើចុង ស្វាយគន់មើលអង្គ
ត្រង់ណាយព្រះហស្តរាមា ។
២១៤១. យល់លាយលក្ខណ៍វិលផ្លាស់ជា ចក្រសីងដ៏ក្រពា
សង្ខារព្រះហស្តដ៏បវរ ។
២១៤២. ហនុមានត្រីព្រួចត្រេកអរ ជឿជាក់ព្រះភូធរ
សម្តេចនារាយឫទ្ធិក្រៃ ។
២១៤៣. ហនុមានត្រេកត្រូវហឫទ័យ ជាអ្នកនេះនៃ
ជាតិជាតស្នូរអ្នកហោង ។
២១៤៤. វិមុខសោករាជសុគ្រីពឯង នូវណ្តោះនេះម្តង
ដោយតេជសម្តេចនរបតី ។
២១៤៥. ហនុមានត្រិះរិះអស់ក្តី បេះស្លឹកស្វាយខ្ចី
ស្លូតពីសម្តេចរាមា ។
២១៤៦. បេះបោះព្រុះខ្ជំខ្ចាប់ត្រា លើព្រះរាជា-
ធិរាជកំពងពីរព្រះអង្គ ។
២១៤៧. ព្រះអនុជស្តេចតែងបោសបង់ ស្លឹកស្វាយពីអង្គ
សម្តេចព្រះនារាយរាមា ។
២១៤៨. ហនុមានវិងសាចចុះណា នោះព្រះអនុជា
ស្តេចបោសស្លឹកស្វាយរាយដៃ ។
២១៤៩. ព្រះអនុជស្តេចឆ្មៀងឡើងនៃ ដោយស្វាយឈើឯព្រៃ
ក៏ឃើញស្វាស[2]សោភា ។
២១៥០. ស្តេចក្រេវក្រោធក្រៃសោះសា ចាប់សរសក្តិថ្លា
នូវខ្លែងនៃរាជដ៏ក្របី ។
២១៥១. ហនុមានវិងឫទ្ធិជ័ឫទ្ធី លោតដក់ស្ទូពី
ហារិត្រនៃលក្ខអនុជា ។
២១៥២. លោតឡើងសហ័សមហិមា តួនង្កាប់សាខា
ព្រឹក្សាឈើឯព្រៃបីត្រសាយ ។

(1) RIB : pādapaṅs
(2) MBN : svā chmār

២១៥៣- ព្រះលក្ស្មណ៍ចាប់ធ្នូសន្ធរាយ(1) កោះសរនូវទំលាយ
ទំលាក់នៃរាជក្របី ។
២១៥៤- ក្បួណនោះស្ដេចតើនឡើងខ្ញី ព្រះបាទនរបតី
ជណ្ដឹងនៃព្រះអនុជា ។
២១៥៥- ចាំងឃាលក្ស្មណ៍ហើយស្ដេចថា ថាកោះសរធ្លា
ថានូវផ្លែងអ្វីនេះឥឡូវ ។
២១៥៦- ព្រះលក្ស្មណ៍ដាក់សរសិទ្ធធ្នូ ក្រាបទូលព្រះភូ-
ធរទេន្ទ្រធិរាជជ័ជក្រី ។
២១៥៧- បពិត្រស្វាមួយអប្រិយ សសុទ្ធដុចសំឡី
អ្នកឆ្កើចបង្កើរកោះបង ។
២១៥៨- ទំលាក់ស្លឹកស្វាយលើព្រះអង្គ ខ្ញុំដាត់រឹងតែចង់
ទំលាយទំលាក់ច្រើនក្រៃ ។
២១៥៩- ខ្ញុំខឹងវាត់កោរស្កាជ័យ ផ្លែងផ្លាញឲ្យក្ស័យ
នាស្វាកំណាចនោះណា ។
២១៦០- ស្វានោះមានឫទ្ធិចេស្ដា ក្រោកដជយាមា
ឆក់ធ្នូពីដៃខ្ញុំបាន ។
២១៦១- លោតឡើងសាខាពួនពាន ពួនផ្ចាប់ណាក់ប្រាណ
នាខ្ពង់ព្រឹក្សានិត្យនៅ ។
២១៦២- ខ្ញុំផ្លែងតាមស្វាយកធ្នូ ទើសដើងព្រះភូ-
ធរទេន្ទ្រធិរាជខ្ញុំហោង ។
២១៦៣- ស្វានេះរកភានបីកន្លង លួចណាក់ធ្នូគ្គង
បំពាក់បំពួនពុំយល់ ។
២១៦៤- ក្បួណនោះនារាយរាមទសពល បារមីឆ្គិតដ្ដល់
បំពេញនូវព្រះចេស្ដា ។
២១៦៥- ទើបព្រះនរនាថភាមា ទតឡើងយល់ពា-
នរនៃរាជជ័ក្របី ។
២១៦៦- សសុទ្ធរុងរឿងរស្មី សងកាំយានៃ
ក៏ពាក់នូវកុណ្ឌលរត្ន ។
២១៦៧- នោះទើបព្រះពង្សយាវិន្ទ្រក្សត្រ ស្ដេចស្ដាប់បន្ទូលផ្ទាត់
ក៏ឃាត់ទៅព្រះអនុជា ។
២១៦៨- ចាំងឃាលក្ស្មណ៍ហើយឆ្ងរថា កុំបីក្រេវក្រោធា
ថាឡើលទៅស្វានោះហោង ។
២១៦៩- ស្វានេះប្លែកនឹងស្វាឯង ពាក់កុណ្ឌលជង
កាំយាពិពណ៌សោភា ។
២១៧០- យានុមានឫទ្ធិចេស្ដា ចុះពីព្រឹក្សា

(1) RIB : dhanū sar nārāy(ṇ)

មកថ្វាយបង្គំនរបតី ។

២១៧១- ស្រេចថ្វាយធ្នូព្រះចក្រី ទូនអង្គសិរសី
បង្គំប្រណម្យបាទា ។

២១៧២- ក្រាបទូលតីរព្រះក្សត្រា ព្រះអង្គជាតិជា
ឥស្សរប្រសើរខ្ញុំបោង ។

២១៧៣- ព្រះអង្គទ្រង់ជមិជ័កន្លង លើសវែងក្សត្រឯង
ប្រកបនូវព្រះពុទ្ធតា ។

២១៧៤- បពិត្រម្ដាយខ្ញុំថ្កាំជា ទោះនុំអ្នកឯណា
អាចយល់កុណ្ឌលទិព្វថ្លៃ ។

២១៧៥- អ្នកនោះឯងជាក់ជាតិ - ស្ងួនបាងឯងនៃ
អាចយល់កុណ្ឌលនេះណា ។

២១៧៦- ឥឡូវនរេន្ទ្ររាជក្សត្រា រិទ្ធិឫទ្ធិចេស្តា
ជ័ជាឥស្សរខ្ញុំបោង ។

២១៧៧- ខ្ញុំនូវរងគុណអាសាសង ព្រះគុណជ័កន្លង
ពិសេសនូវព្រះករុណា ។

២១៧៨- ក្បិលណានោះព្រះលក្ស អនុជា ពុំចេញចរចា
ស្ដេចសើចឯងក្នុងហឫទ័យ ។

២១៧៩- បានមានវៃអច្ឆ្យាស្រ័យ យល់ព្រះលក្សពុំដឿងនៃ
នូវពាក្យអញទូលនេះណា ។

២១៨០- នោះទើបបានមានឫទ្ធ ស្រេចស្ទាបឡើងបា
មាត់យល់រស្មីព្រោងព្រាយ ។

២១៨១- ភ្លឺទសទិសទិព្វពន្លាយ ភ្លឺស្រឡះសព្វសាយ
ទៃនដល់បាតាល[1]ទសទិស ។

២១៨២- ក្បិលណានោះព្រះបារិន្ទ្រតាប្សតិស្ស យល់អស្ចារ្យកិះ
ព្រះលក្សស្ដេចអនុជា ។

២១៨៣- ទុស្សានេះប្លែកមហិមា ជាតិជានរា -
ធិរេន្ទ្រនៃរាជជ័ក្របី ។

២១៨៤- នោះទើបព្រះបាទនរបតី បើកព្រះទុស្សប្រិមប្រិយ
ជល្ពាំងនៃរាជពានរ ។

២១៨៥- ជាវៃហាពានរនាមករ សំឫទ្ធិព្រះពរ
ព្រះស្ដែងនោះតើឈ្មោះអ្វី ។

២១៨៦- អញចង់ដឹងដើមសេចក្ដី ព្រះស្ដែងកើតពី
ឫសីឬពីទេពតា ។

២១៨៧- បានមានក្រាបទូលស្នងជា ខ្លួនខ្ញុំនេះណា

(1) RIB : nai traipātāl

គឺពាយុបុត្រ សុរបុត្រ (1) ។

២១៨៨- រីនាមករខ្ញុំប្រាកដ ព្រះជិនកសន្តត
ខ្ញុំឈ្មោះកំហែងហនុមាន ។

២១៨៩- នាខ្ញុំមកនៅនាស្ថាន នោះសោតស្បិតមាន
វានរពីររាជក្សត្រា ។

២១៩០- ជាកលពិភេទនូវគ្នា មួយឈ្មោះក្រុងពា-
លីនោះដ៏លើសនូវឫទ្ធិ ។

២១៩១- មួយឈ្មោះសុគ្រីពរាជដ៏ក្របី ជាប្អូនពាលី
គឺឯកឧទរមាតា ។

២១៩២- អ្នកទាំងពីរនោះសឹងជា មាខ្ញុំឯងណា
អគ្គីអ្នកដទៃហោង ។

២១៩៣- រីក្រុងពាលីរាជជាច្បង ស្ដេចក្រេវក្រោធខ្លង
ដ៏ក្រៅក្រឹត្យធម៌បុរាណា ។

២១៩៤- ស្ដេចខឹងតិះដៀលដេរថា បណ្ដេញព្រះអនុជា-
ធិរាជឲ្យចេញវៃងស្ថាន ។

២១៩៥- នេះកម្ពុវសុគ្រីពស្ដេចមាន ទុក្ខទល់ប្រះប្រាណា
រូបហានបុគ្គលអ្នកបង់ (2) ។

២១៩៦- នៅព្រៃស្មសានឯកអង្គ ឃ្មុញយំលន្លង់
សន្សោចត្រមោចឯងនៅ ។

២១៩៧- ទើបព្រះបន្ទូលវឹងទៅ ទុក្ខអញនេះហៅ
ដហាទុក្ខានលៃព្រៃ ។

២១៩៨- ហនុមានប្រុះប្រាស្វាវៃ ដឹងអត្ថាស្រ័យ
ហឫទ័យសម្ដេចរាមា ។

២១៩៩- ចាប់យល់សុគ្រីពរាជា ស្រេចហនុមានណា
ព្រះបាទសម្ដេចនរបតី ។

២២០០- ហិចហោះហួសដោយឫទ្ធិ ដល់រាជក្របី
សុគ្រីពក្របិន្ទ្ររាជា ។

២២០១- ហនុមានទូលព្រះបិតុលា បពិត្រព្រះមា
សម្ដេចប្រើខ្ញុំរកអ្នក ។

២២០២- ណាមានបុណ្យកបវិរលក្ខណ៍ ខ្ញុំយល់ជាតិជាក់
អ្នកបុណ្យនេះឯងហើយណា ។

២២០៣- សូមអញ្ជើញសម្ដេចព្រះមា ព្រះអង្គស្ដេចលេណា
ទៅថ្វាយបង្គំថ្វាតហោង ។

២២០៤- សុគ្រីពត្រេកអរប៉ុនប៉ង គិតទៅហោះផ្សង

(1) RIB : sūryaputr
(2) RIB : rū hān mak ṭal' anak p̈aṅ

សំណាក់សម្ដេចភជា ។

២២០៥- ជងនោះព្រះបាទភាសា ប្រើព្រះអនុជា
ទៅនាំទៅរកជលធី ។

២២០៦- ចាំហៃហាលក្សត្របុរបាលី – ណារកជលធី
មករៀមនូវបរិភោគស្រស់ ។

២២០៧- ព្រះអនុជបង្គំលុតជង្គង់ ដើរកករនូវកំបង់
ដុំលីព្រះរៀមយាត្រា ។

២២០៨- រុករានព្រៃព្រឹក្សា យល់ស៊ីងតារា
ទឹកភ្នែកស្រគ្រីពានិរភ័យ ។

២២០៩- ព្រះអនុជស្ដេចជងជលស័យ រត់រួសរឹងរៃ
មកថ្វាយព្រះរៀមនរបតី ។

២២១០- នោះព្រះអង្គស្ងោយជលធី យល់ប្រែអស្ដីក្ដី
ពុំដូចវិស័យជលសា ។

២២១១- ហៃហាលក្សត្របាជងតីឯណា គម្ពុជជលសា
ប្រែវិលជាវារីជងៃ ។

២២១២- ជលនេះជាអស្ចារ្យក្រៃ ពុំដូចជលស័យ
ជលធីនីមួយជងហោង ។

២២១៣- ហៃហាលក្សត្របាទៅរកលង ដើមទឹកនោះហោង
ក៏ហូរអំពីស្ថានណា ។

២២១៤- ព្រះលក្សបង្គំយាត្រា ស្រេចត្រង់ជលសា
គំរកនូវដើមទឹកនៃ ។

២២១៥- យល់មានភ្នំមួយធំក្រៃ ហូរជ្រោះជលស័យ
វិល្អងចេញអំពីនោះហោង ។

២២១៦- ឮសព្ទរ៉ញទំរ៉ញដ៏កន្លង ស្ដេចស្ដាប់ជាក់ជង
នូវសព្ទយោបំសោកា ។

២២១៧- ព្រះលក្សវិលវិញយាត្រា ក្រាបទូលអភិវាទ
ព្រះរៀមជិរាជថ្លៃថ្លាស់ ។

២២១៨- បពិត្រព្រះរាជតំរាស់ ព្រះអង្គស្ដេចត្រាស់
ប្រើខ្ញុំរកជងជលស័យ ។

២២១៩- នោះមានភ្នំមួយធំក្រៃ ហូរជ្រោះជលស័យ
អំពីភ្នំនោះហោងណា ។

២២២០- ហើយឮសព្ទយោបំសោកា រ៉ញយំមហិមា
នូវសព្ទកណ្ដាង[1]ម្រាម ។

២២២១- ទើបព្រះសារពេជ្ញឧត្ដម បើកព្រះសារសម
ក៏ប្រើអនុជស្នេហា ។

(1) RIB : kanleṅ

២២២២. ហោលក្សណ៍ដួរដាយាត្រា វាយភ្នំនេះណា
ក៏មើលជាអ្នកណាហៅ ។

២២២៣. ព្រះអនុជស្តាប់ព្រះបន្ទូលថ្លៃ ហើយចរចូលព្រៃ
តំរង់ភ្នំនោះឯងហោង ។

២២២៤. ក្សិណានោះព្រះអនុជស្តេចផ្គង កោទណ្ឌបីសំពង
ក៏វាយភ្នំនោះហោងណា ។

២២២៥. ពុំបែកពុំធ្លាយឡើយណា រឹងឫទ្ធិចេស្តា
សំភានក៏វាយប្រត្យក្ស ។

២២២៦. ភ្នំទល់រឹងព្រះពុំបាក់ ស្តេចវាយប្រត្យក្ស
កក្រើកអំពើកធរណី ។

២២២៧. សព្វសត្វយង់ឃ្លងម្រឹគី ភ្លឹកខ្លាចដ៏ឫទ្ធិ
ក៏រត់បំពាត់ខ្ចាត់ខ្ចាយ ។

២២២៨. សុគ្រីពឆ្លាស់ឆ្លើយអភិប្រាយ បពិត្រស្តេចកុំបីវាយ
កុំព្រួយព្រះអង្គឡើយណា ។

២២២៩. ស្តេចយកជង្គ្លួយកោទណ្ឌធ្លា ភ្នំះមិញធ្លាយណា
កុំព្រួយព្រះអង្គវាយនៃ ។

២២៣០. ស្តេចស្តាប់ពានរនិរភ័យ ទូលថ្កានក្សត្រថ្លៃ
ក៏ថ្លែងនូវពាក្យនោះហោង ។

២២៣១. ស្តេចយកជង្គ្លួយកោទណ្ឌផ្គង ភ្នំះភ្នំនោះហោង
រលើងរលំសោះសា ។

២២៣២. នោះក្រុងសុគ្រីពភាជា ឱនក្រាបសិរសា
បង្គំព្រះលក្ស្មណ៍នរបតី ។

២២៣៣. ព្រះលក្ស្មណ៍ស្តេចនាំជ័យគ្រីបី ដើរមកថ្វាយជគ្រី
ព្រះរៀមធិរាជជ័យភូធរ ។

២២៣៤. ព្រះលក្ស្មណ៍នូវក្រុងពានរ ចាកព្រឹក្សាករ
លុះដល់សម្តេចនរបតី ។

២២៣៥. ព្រះលក្ស្មណ៍ថ្វាយក្រុងជ័យគ្រីបី ពានរាធិបតី
ក៏ថ្វាយបង្គំភាសា ។

២២៣៦. ក្សិណានោះស្តេចទ្រង់បុច្ឆា អាស្សូរភាជា
សុគ្រីពស្តេចរាជទុក្ខទល់ ។

២២៣៧. ស្តេចឈ្លងដោយព្រះយោបល់ ពោះអ្នកទុក្ខទល់
ទម្ងន់នូវអញបានណា ។

២២៣៨. ម៉ោះមានហេតុអ្វីក្រុងពា- លីក្រេវក្រោធា
បណ្តោញព្រះស្តែងបរាជ័យ ។

២២៣៩. សុគ្រីពទូញក្រាបលុតជង្ឃ នបបាទបីកំបង់
បង្គំសម្តេចនរនាថ ។

២២៤០. បពិត្រខ្ញុំនូវទូលដើមអាទិ ឲ្យស្រាបវរបាទ

សម្តេចជ័ទ្រង់ធរណី ។

២២៤១- មុនមាន(1) ភាជមហាសិង្ហសីហា អាងអួតឫទ្ធិ
កម្លាំងកម្លោះសោះសា ។

២២៤២- ទ្រង់នាមទូភីមហិមា ភាងរូបឫទ្ធា(2)
ភស្ទុរអម្រឹកសារសីហា ។

២២៤៣- ទ្រេចទ្រង់ខាស់ខិនជ័បុរី ហើយហៅពាលី
នូវចង់ប្រយុទ្ធលេងលាង ។

២២៤៤- ពាលីស្តេចហិចបោះជ្វង ចរចេញយុទ្ធជង
នូវក្រុងទូភីមហិមា ។

២២៤៥- ស្តេចប្រយុទ្ធនូវភាជមហាសិង្ហ ពីប្រថមសុរិយា
លុះអស្តង្គតបាត់ថ្ងៃ ។

២២៤៦- សឹងជាញទៀណរង្គជ័ទីទៃ ពុំលុះនាក្ស័យ
ជីវិតនោះមួយៗណា ។

២២៤៧- ពាលីនូវក្រុងមហាសិង្ហ យុទ្ធយល់ចេស្តា
ប្រកឹងប្រកោះទៀណរង្គ ។

២២៤៨- ទូភីពាលីតីរអង្គ សឹងនឿយពុំគង់
កម្លាំងកម្លោះចេស្តា ។

២២៤៩- ព្រះពាលីស្តេចមកនា ខាស់ខិននូវមហា-
តិភពសំភានព្រះអង្គ ។

២២៥០- ស្តេចថ្កាំខ្ញុំឯងប្រើខ្ពង(3) ពលពានររង់
នាក្រៅកំពែងព្រះសីមា(4) ។

២២៥១- ប្រើដកបព៌តសិលា ថ្មជាជ័ជា
ជំពូកៗដោយងារ ។

២២៥២- ស្តេចឈ្មោងក្រាក្រាតិស្តារ បបួលទូភីពាល
ប្រយុទ្ធក្នុងស្ពានគោហា ។

២២៥៣- គឺបោះស្តេចថ្កាំខ្ញុំជា ទោះឈាមមហិង្ស
នោះក្រាលបីស្ទួចជាតិយង់ ។

២២៥៤- ឈាមថ្លានោះគឺឈាមអង្គ បងស្មោយទិញ-
ស្គតកាលដោយកម្មវេរា ។

២២៥៥- ធូរបាយកអស់បញ្ញា ថ្មបោះបិតនា
ទៃឡូរគោហារត្នស្ពាន ។

២២៥៦- ស្តេចថ្កាំខ្ញុំហើយបោះថ្កាន ទូភីហៅបាន
កំចួលប្រយុទ្ធលេងលង ។

(1) RIB : mun mān
(2) RIB : rāṅ rū ṛddhā
(3) RIB : proe khbaṅ'
(4) RIB : kaṃbaeṅ braḥ vehā(s)

២២៥៧- ក្លៀងព្រះគោបានោះហោង មានដូចបំណង
សម្ដេចព្រះបងមហិមា ។

២២៥៨- ស្ដេចផ្ដាច់ផ្ដួលរាជមហិង្ស មានដូចប្រាថ្នា
មហាពិសេសពិស្ដារ ។

២២៥៩- កាលនោះអស់ទេពសួគ៌ា ស្រែកថ្វាយសាធុការ
បង្គំនូវផ្កាគន្ធធារា ។

២២៦០- ហេតុនោះឈាមក្រុងមហិង្ស ជាលផ្លាវឹងជា
ខ្ញុំស្មានឈាមក្រុងពាលី ។

២២៦១- ទើបខ្ញុំនូវមុខមន្ត្រី នាំពលដំក្រុងបី
យកថ្មបោះបិតព្រះគោបា ។

២២៦២- ពាលីស្ដេចផ្ដួលមហិង្ស ស្រេចហើយក្រុងពា-
លីដាក់សិលាខ្វាត់ខ្វាយ ។

២២៦៣- ថ្មរាំងគោបាធ្លាក់ធ្លាយ ស្ដេចដាក់ទំលាយ
ត្រីវិព្រះខ័នជ័យស្រី ។

២២៦៤- ហោះមកខាស់ខិនជីបុរី ក្រេវក្រោធខ្ញូអគ្គី
ក៏ដេះទុភាភាជា ។

២២៦៥- ស្ដេចខឹងតិះដៀលដេរជា កណ្ដាលកោងសេនា
មន្ត្រីជំនុំពលផង ។

២២៦៦- ថាខ្ញុំនូវជំណើមរាជក្រុង ចង់ភរិយាផង
ខ្ញុំខ្មាសជំងៀលនិន្ទា ។

២២៦៧- ស្ដេចក្រោធក្រៅក្រឹត្យរាជា គាំមានពិធារណា
ល្បើយដល់បណ្ដោញខ្ញុំបង់ ។

២២៦៨- ខ្ញុំខ្មាសទល់ទុក្ខឯកអង្គ ទើបខ្ញុំត្រេចត្រង់
ក៏មកនៅស្ថាននេះណា ។

២២៦៩- ស្ដេចស្ដាប់សុគ្រីពរាជា ទូលថ្លែងអាត្មា
ដើមជាទុក្ខទល់ជូនក្រៃ ។

២២៧០- ទើបស្ដេចបើកឱដ្ឋាថ្លៃ បន្ទូលថាហៃ
សុគ្រីពទុក្ខអញសោកមាន ។

២២៧១- នេះតឡូវអញមកដល់ស្ថាន ព្រៃនេះអញបាន
ប្រសប់នូវព្រះស្ដែងជា ។

២២៧២- ទុក្ខទល់សោកសោយអនិច្ចា ព្រាត់សំបាកអាត្មា[1]
ប្រដូចអញឯងទូខ្ញុំ ។

២២៧៣- ថាហៃសុគ្រីពធិបតី នេះតឡូវកុំបី
ព្រះស្ដែងបារម្ភល្បើយណា ។

(1) MBN : prās sampād ātmā

២២៧៤- ងារអញបំពេញចិន្តា ព្រះស្តេងប្រាថ្នា
បីដោយចំណង់ជាឯង ។
២២៧៥- ផ្ទារមើលឫទ្ធិអញឯង នេះម្តងលងលេង
សំដែងនូវតេជឫទ្ធិ ។
២២៧៦- អញយកខាត់ខិនជ័យបុរី នូវតាភទេពី
នោះឲ្យព្រះស្តេងហោងណា ។
២២៧៧- សុគ្រីពស្តាប់សព្វមុទុតា ព្រះបន្ទូលករុណា
ពិសេសពិសាលសារទ ។
២២៧៨- ក្សិណានោះសុគ្រីពក្រោកអរ យកបាទជ័បវិរ
សម្តេចទុកលើសិរសា ។
២២៧៩- តាខ្លួនខ្ញុំឯងហោងណា ថ្វាយព្រះភជិា-
ជិភជិជាបរិពារ ។
២២៨០- ពោះបីមានសត្រូវពីងណា(1) ចូលចោមភូវនាថ
ប្រយោជន៍នូវបៀតជ័ព្រះអង្គ ។
២២៨១- ខ្ញុំនូវយកពលពានរពង្ស ដែងជាញញើណរង្គ
ទាំងជិតសិបអសង្ខេយ្យា ។
២២៨២- ផ្សំាងឯងកុំបីឲ្យដល់នា ពីរព្រះភជិា-
ជិភជិស្តេចព្រួយជ័ព្រះអង្គ ។
២២៨៣- មួយសោតនាអញខ្ញុំចង់ ទូលឲ្យជ្រាបត្រង់
នាកិច្ចមួយនោះឯងណា ។
២២៨៤- ក្សិណាហនុមានកី៖ព្រះភជិា សុគ្រីពព្រះមា
ពុំឲ្យទូលទៀតឡើយហោង ។
២២៨៥- ខ្លាចក្រែងអាក់អន់ក្តាំក្តង(2) ពុំបានដូចបំណង
ចំណង់នៃព្រះប្រាថ្នា ។
២២៨៦- សុគ្រីពហនុមានក្រាបណា ព្រះបាទភមា-
ជិភជិបរមបពិត្រ ។
២២៨៧- ចេញមកនៅក្រៅស្ថានស្ថិត ហនុមានគន់គិត
ក៏ដឹងគំនិតព្រះមា ។
២២៨៨- នាមានក្តីមួយនោះណា សុគ្រីពភជិា
ពុំទាន់ចរចាឆ្លាស់ឆ្លើយ ។
២២៨៩- ហនុមានចាបពិត្រអ្នកមាហើយ អញខ្ញុំដឹងហើយ
សម្តេចពុំជឿចេស្តា ។
២២៩០- ព្រះបាទសម្តេចភមា រីអ្នកនេះណា
គឺអង្គព្រះនាភយឯងហោង ។

(1) RIB : satrūv sāhas bāl
(2) RIB : gāk' gīoeṅ chgām̥ chgaṅ

២២៩១. ស្ដេចពុំជឿខ្ញុំនេះម្ដង សូមស្ដេចមើលលង
នាសងខាងព្រះអង្គ ។
២២៩២. មានលាយលក្ខណ៍រលស្លាស់ជា ចក្រសិងជីក្រព
មហិមាចេស្ដាបីក្រោកដ ។
២២៩៣. អ្នកនេះទិព្វទេពសន្តត នាភាយច្យុតដីក្រោកដ
មកកើតជាព្រះភរិយា ។
២២៩៤. ពោះយើងចង់ដឹងចេស្ដា ប្រមាណកម្លាំងពា-
លីលើសជ័រិងឫទ្ធិ ។
២២៩៥. យើងនាំព្រះបាទនរបតី ដើរក្រុងទូទី
វែងលតេជពាលីថ្កូលមារ ។
២២៩៦. មួយនឹងចង់ដឹងឫទ្ធិសរ សិល្បសក្តិព្រះភូធរ
នាភាយភរិយាពិស្ដារ ។
២២៩៧. យើងនាំទៅទតសប្តតាល ជុះលើនាគពាល
ដំណាលមហាប្រជតី ។
២២៩៨. ឲ្យស្ដេចថ្លែងលងឫទ្ធិ ដឹងតេជនរបតី
នាកាលនោះឯងហោងណា ។
២២៩៩. មានុមាននូវសុគ្រីពចរចា ស្រេចហើយវេលា
ទៅគាល់សម្ដេចនរបតី ។
២៣០០. ក្សិណានោះព្រះបាទនរបតី នាភាយចមចក្រី
ស្ដេចឈ្វេងព្រះញាណទិព្វថ្លៃ ។
២៣០១. ទើបស្ដេចបន្ទូលជាថៃ សុគ្រីពស្ពានណានៃ
ពាលីក៏ថ្កូលមហិង្គ ។
២៣០២. អញចង់យល់តេជក្រុងពា- លីថ្កូលនោះណា
នៅក្នុងគោហានោះហោង ។
២៣០៣. សុគ្រីពក្រាបបាទទូលស្នង អញ្ជើញស្ដេចហោង
តាមព្រះដំណោះប្រាថ្នា ។
២៣០៤. ព្រះអង្គតីរពង្សក្សត្រា ស្រេចស្ដេចវេលា
អនុជនូវរៀមរូបីដា ។
២៣០៥. ទៅលុះនាសពទូទី មហិង្គរូគិរី
រលើងរលំស្ពឹមមៃស្ក ។
២៣០៦. ស្ដេចពោះពោធិ៍ណាសរជ័យ សភាឫទ្ធិថៃក្រ
គឺអគ្គីរាសផ្កាញផ្កា ។
២៣០៧. ស្ដេចថ្លែងរូបភាពមហិង្គ ផេះដាប់មហិមា
ក៏សុះជាផេះធុយធង់ ។
២៣០៨. ហើយព្រះយកតិរុណរាសទ្រង់ ថ្លែងទៅលត់បង់
នាភ្លើងសរសក្តិផ្កាញផ្កា ។
២៣០៩. ទើបព្រះនាភាយភរិយា យកពាយុរាសនា

បំពង់ព្រះអង្គទ្រង់វិវាត ។

២៣១០- ថ្លែងទៅប្រមូលអស់ធាតុ ដោះទៅនាជាត
មហាសមុទ្រជលសា ។

២៣១១- ហនុមានទូវសុគ្រីពភាជា យល់ថ្លែងចេស្តា-
នុភាពព្រះអង្គលើសក្រៃ ។

២៣១២- លុតដង្ហែក្រាបបាទាំនៃ នាភាយរាមក្សត្រថ្លៃ
ប្រសើរពិសេសពិស្ដារ ។

២៣១៣- ទូលថាបពិត្រភូវនាថ មានព្រឹក្សសប្តតាល
កើតកាលដំណាលប្រជពី ។

២៣១៤- សូមព្រះពីរពង្សស្ដេចលី- ណាលឯនូវឫទ្ធិ
អំណាចនៃសរសក្តិថ្លា ។

២៣១៥- ស្ដេចស្ដាប់សុគ្រីពទូលថា ជាប់ដឹងចេស្ដា-
ធិការព្រះអង្គក្សត្រថ្លៃ ។

២៣១៦- ទើបស្ដេចបន្ទូលថាហៃ សុគ្រីពស្ថាននោះនៃ
តើនៅតំបន់ស្ថានណា ។

២៣១៧- ថ្វាព្រះស្ដេងនាំមាគ៌ា យើងពីរក្សត្រា
នូវទៅលឯតេជឫទ្ធិ ។

២៣១៨- ក្សិណនោះសុគ្រីពភាជក្របី លើកករអញ្ជលី
សម្ដេចព្រះស្រីសារពេជ្រ ។

២៣១៩- អញ្ជើញពីរព្រះអង្គស្ដេច លេណទៅតិច[1]
លេចព្រៃនេះទៅយល់ហោង ។

២៣២០- នោះព្រះអនុជទៀមឡូង ស្ដេចត្រេចដោយដង
ដល់ព្រៃព្រឹក្សពនាន្ត ។

២៣២១- លុះដល់ស្ថានមហាសប្តតាល ដុះលើនាគពាល
មិនដូចដក្របត្តភាយ ។

២៣២២- ក្សិណនោះនាភាយរាមឫទ្ធិឆាយ ប្រុះទ្រាថ្លាទ្រាយ
ប្រសើរនូវទិព្វញាណយល់ ។

២៣២៣- ដើមតាលដុះគឺដោយកល[2] ទើបព្រះសេពល
ស្ដេចឈ្វេងនូវព្រះទ្រាថ្លា ។

២៣២៤- ស្ដេចថាសប្តតាលព្រឹក្សា នេះសមដុះនា
លើខ្នងមហានាគរាជ ។

២៣២៥- ទើបស្ដេចសំដែងព្រះអំណាច ឲ្យទេពអស្សូរខ្លាច
នូវឫទ្ធិតេជព្រះករ ។

២៣២៦- ស្ដេចយាងព្រះបាទសុបវិរ ស្ពានជាន់ខ្ចាប់ឈរ

(1) RIB : dau ṭāc'
(2) RIB : ṭuḥ aṅgṭ kal'

សង្កត់កន្ទុយនាគា ។

២៣២៧- នាគផ្អើលភិតនឹងព្រះចេស្តា ណាលួនអាត្មា
តាំងរួចគោតស្ងប់ស្ងៀមនៅ ។

២៣២៨- ដើមតាលណាជាប្ដូរទៅ ទើបស្ដេចបីសំដៅ
ថ្លែងសរព្រហ្មាសមុតថ្លា[1] ។

២៣២៩- ត្រូវលេចសប្ដតាលជ័យមហា- ព្រឹក្សបាក់ស្អិតជា
កំណាត់ៗខ្ចាត់ខ្ចាយ ។

២៣៣០- ឮសព្ទឫទ្ធិសរសន្ធាភាយ ទាល់ព្រហ្មលោកនាយ
រូវសែនរន្ធះគណនា ។

២៣៣១- អស់ទេពយមព្រហ្មឥន្ទ្រា សឹងថ្វាយមាលា
ភ្ញីស្លឹកជាសាធុការ ។

២៣៣២- រីនាគភាជពិសពាល ទុកជ្រែកជាតាល
ទៅពួននាជ្ជិតសាគរ ។

២៣៣៣- ក្សិណានោះសុក្រីពភាជពានរ លុតលើកទសករ
បង្គំដាក់លើសិរសា ។

២៣៣៤- ទាវចូលទូលបទបាទ ស្រែចទូលព្រះករុណា
នាភាយនរិន្ទ្រឫទ្ធិក្រៃ ។

២៣៣៥- ទូលថាបពិត្រក្សត្រថ្លៃ ជាតស្នូរភពត្រៃ-
លោកលើសនូវឫទ្ធិចេស្តា ។

២៣៣៦- ខ្ញុំយល់ច្បាស់ស្ដែងនូវឫទ្ធា- នុភាពព្រះអង្គមហា-
ពន្លឹកពន្លឺជ័កន្លង ។

២៣៣៧- លើសវែងទេពអសូរដង អញ្ជើញស្ដេចយោង
ទៅនាខាស់ខិនបុរី ។

២៣៣៨- សូមស្ដេចថ្លែងផ្ដាញពាលី នូវសរនរបតី
ប្រសើរឫទ្ធីជាញជ័យ ។

២៣៣៩- ពោះពាលីចាញ់តេជវៃ លុះជន្មក្ស័យ
នូវសរសម្ដេចភាជា ។

២៣៤០- ខ្ញុំនូវថ្វាយអស់ពលព្រីន្ទស្វា ជិតសិបអសង្ខេយ្យា
មហាអក្ខោភិនី ។

២៣៤១- ស្នងគុណព្រះបាទនរបតី ស្ដេចមានមេត្រី
ក៏ច្រប់ព្រះភាជជុទូតា ។

២៣៤២- ពិសេសលើសក្សត្រនានា ពោធព្រះអង្គជា
អំបូរនាភាយពុទ្ធអង្គ ។

២៣៤៣- ជងនោះព្រះជ័ពីរពង្ស សម្ដេចស្ដេចត្រង់
បីលុះនៃខាស់ខិនយោង ។

(1) MBN : āriddhacand sar thlā

២៣៤៤. ព្រះប្រើសុគ្រីពទៅគ្គង　　ហៅពាលីបង
ទទៃទទូចឲ្យទឹង ។

២៣៤៥. វៃលងបានពាលីឫទ្ធិរឹង　　ចេញមកប្រយុទ្ធនឹង
សុគ្រីពកណ្ដាលទៀហា ។

២៣៤៦. បានព្រះនូវវៃស្លងសរផ្កា　　ធ្លុលផ្ដាច់ក្រុងពា-
លីល្មុះនូវសរព្រហ្មាស ។

២៣៤៧. សុគ្រីពថ្វាត់ថ្វាយអភិកាស　　បង្គំជំពិណាស
ក៏ណាសម្ដេចយាត្រា ។

២៣៤៨. បោះទៅចាស់ខិនមហា-　　នគរហៅក្រុងពា-
លីភាជជ័ជាព្រះទៀម ។

២៣៤៩. គីរព្រះហរិន្ទ្រភាជឈរស្មៀម　　កោះសរសំទៀម
សំរេចសំភាស់ព្រះចេស្ដា ។

២៣៥០. ស្ដេចតឿនសុគ្រីពភជា　　ឲ្យហៅក្រុងពា-
លីល្មុះកណ្ដាលរណារង្គ ។

២៣៥១. សុគ្រីពបាបរទើសទ្រង់　　កាន់ខ័នបីទ្រនង់
ឥន្ទ្រីបាទាបីលលាម ។

២៣៥២. ឲពាលីភាជជ័ព្រះទៀម　　សុខសោយរាជ្យស្មៀម
ឥឡូវអញមកហើយណា ។

២៣៥៣. គីងបរអញតតកោសា　　ស្ថិតនៅពនាផ្ទា
សំបាកនូវទុក្ខសត្វវៃថ្វ ។

២៣៥៤. គីងចេញមកយុទ្ធតវៃង　　វៃលងដឹងពិជ័យ
វិជ័យនៃយើងគីរហៅង ។

២៣៥៥. ពាលីស្ដាប់សព្ទ[1] ឃ្លង　　ក្រេវក្រោធកន្លង
រន្ធត់ទាំងខុភារត្ន ។

២៣៥៦. ករកាន់ព្រះខ័នជ័យថ្វាត់　　វិលវៃវបីផ្ទវាត់
សង្ហានូវ[2] ឫទ្ធិតេជះ ។

២៣៥៧. សត្វដំសត្វត្បូកសត្វទះ　　សត្វស្រែករូវន្ទុះ
ប្រទះនូវខ័នខាស់វែង ។

២៣៥៨. សត្វត្រេចត្រីភ្នំជាញវៃជង　　បោះបាជាជៃង
ក៏ជាយកណ្ដាលទៀហា ។

២៣៥៩. ក្របិន្ទុភាជគីរពានរ　　ករកាន់ត្រីក្បូ
គ្រវីគ្រវាសវាត់វាយ ។

២៣៦០. វៃត្រាត្រីក្បូបតំតផ្លាក់ផ្លាយ　　ឫទ្ធិរឹងវាត់វាយ
ប្រវាយនូវត្រីក្បូធ្លាក់បែក ។

(1) RIB : stāp' sabd dāruṇ
(2) RIB : paṅhār nūv

២៣៦១. សត្វត្រេចត្រីភ្នំស្រៀវស្រែក ខេវខឹងខាំហែក
ក្រួចកក្រឡោចាប់ចឹក ។

២៣៦២. បុកបែនបតាំតៃព្រៃត្រីក្បូ អីអឹងដ៏អធិក
នូវឫទ្ធីរឹងព្រះសំបា ។

២៣៦៣. ក្របិន្ទុរាជក្រោធខ្ញូរ ឫទ្ធិរឹងអស្ចារ្យ
សំបាសំបើមនូវគ្នា ។

២៣៦៤. ក្រុងពាលីពេញនូវពលា ដ៏ក្រៃវែងពា-
នរាអនុជទុរពល ។

២៣៦៥. ហាក់ហាហិចហោះហួសដល់ នាភាយភាមស្ដេចយល់
ក្របិន្ទុបងលើសនូវពលា ។

២៣៦៦. សុគ្រីពពាលីដ៏ខែង ឃហិឃាប្រឹងប្រែង
សំបាតាំនោលនូវគ្នា ។

២៣៦៧. រូបសីហាសោតសឹងមហិមា ឯណ្ដើមចេស្ដា
បីដូចប្រយុទ្ធយប់ហោង[1] ។

២៣៦៨. ប្រកឹងប្រកោះ ទុទារខ្លាំងក្លោះ
សោតសឹងទ្រើសឃ្នង ប្រទុះប្រទះ
ប្រយុទ្ធម្ដួយជង តាំនោលពាក្យសង
បីផ្លែងពៅរឹង ។

២៣៦៩. ព្រះរាមរមិល ពានរទាំងពីរ
រូរាជសីហាសិង្ហ ឯករូបបេះបិទ
ហិចហោះពៅរឹង ទើបព្រះរឹតឹង
តាំផ្លែងសរា ។

២៣៧០. សុគ្រីពបាញ់តេជដេរ្ណា រឹងលុតបាត
បង្គំសម្ដេចហរិវង្ស ។

២៣៧១. បពិត្រស្ដេចប្រើខ្ញុំត្រេចត្រង់ ខាត់ខិនបុរីវង់
ក៏ព្រះនូវផ្លែងព្រហ្មាស ។

២៣៧២. តម្បូវខ្ញុំហោះទេហាស ពៅដូចអភិកាស
សំដែងកណ្ដាលអម្ពរ ។

២៣៧៣. ម្ល៉េះព្រះអង្គតាំផ្លែងសរ តម្បូវខ្ញុំផ្លាស់មរ
ក៏មកបង្គំនរបតី ។

២៣៧៤. ស្ដេចស្ដាប់សត្វរាជក្របី បាញ់រាជពាលី
ក៏វិលសំណាក់អាត្មា ។

២៣៧៥. ស្ដេចបាតីរពានរា តីរអង្គដូចផ្កា
កុមុទដ៏ពេញពីរភ្លោះ ។

(1) RIB : prayuddh yuddh hoṅ

២៣៧៦- ដូចគងសារនូវគងស្មោះ ដូចបពិតស្មោះ
ទាំងពីរទន្ទឹមនូវគ្នា ។
២៣៧៧- ពុំនោះដូចព្រះសុរិយា ចាំងចែងវេហា
ទាំងពីរទន្ទឹមឥតសំគាល់ ។
២៣៧៨- ល្អល្អះស្រលះដ៏រចាល ពណាពលស្គល់ [1]
សំគាល់មិនដួយពុំបាន ។
២៣៧៩- ក្សត្រឲ្យព្រះលក្ខណ៍ដ៏ប្រធាន វាន់មាណបាន
សំគាល់នូវរៀមអនុជា ។
២៣៨០- បានអញនូវថ្លៃងសរថ្លា ព្រហ្មាសដ៏មហា-
វិជិតវិជ័យ ដ៏ឫទ្ធិ ។
២៣៨១- ជងនោះព្រះលក្សណ៍នរបតី ជាលដោះរួសខ្មី
ក៏វាន់មាណដ៏សុក្រីព ។
២៣៨២- ក្រាបថ្វាយបង្គំសូមពរជិត ស្រេចហើយសុក្រីព
ក៏បោះវឹងថ្កានពាលី ។
២៣៨៣- ស្រៀវស្រែកកំលុងភក្រ្តិ ជាឲ្យពាលី
បិទចេញប្រយុទ្ធសង្គ្រាម ។
២៣៨៤- ពាលីក្រេវក្រោធដ៏កំរាម នេត្រច្រាលភក្ត្រដាម
ក្រញេវក្រញ៉េញសោះសា ។
២៣៨៥- ចាប់ព្រះខ័នរត្នដ៏ក្រពា ឈរឈានប្រឹងពា-
ហួករទាំងពីរខាស់ខែង ។
២៣៨៦- រូបរុងរូពេជ្រដ៏កំពែង ពណាការស្ដែង [2]
អនេកអនន្តគណនា ។
២៣៨៧- ជងនោះទេពីតារា ធូលក្រាបអភិវាទ៍
បង្គំនៃក្រុងពានរ ។
២៣៨៨- បពិត្រកុំបីស្ដេចភ្លេចស្មារ វិសុក្រីពនេះបង្ក [3]
បណ្ដាលនូវក្រោធានល ។
២៣៨៩- លេះចាញ់ហើយហោងអស់កល ស្គំកអ៊ូបកដល់
ទទៃទទូចនូវប្រយុទ្ធ ។
២៣៩០- នេះយល់មនគឺកលហោង សមមានបើគ្នង
នៃអ្នកដ៏មានចេស្ដា ។
២៣៩១- សូមស្ដេចទ្រង់ព្រះតិជារណា កុំបីក្រេវក្រោធា
ដោយពាក្យអនុជនោះនៃ ។
២៣៩២- ឱមាដូចភ្លើងឆេះព្រៃ វិកណ្ដាប់ជងក្ស័យ

(1) RIB : bal skār
(2) MBN : balā kāy staeṅ
(3) RIB : pañ-ar

និមិត្តមរណាជិតទ្ទឹង ។

២៣៩៣. កុំបីស្តេចក្រេវក្រោធរឹង ក្រោធនោះយោងនឹង
រមែងតែងបានក្តីធ្ងន់ (1) ។

២៣៩៤. បង់សត្យបង់សីលបង់បុណ្យ ធ្វើសត្រុះទុរជន
និមិត្តបរក្រេវក្រោធា ។

២៣៩៥. សូមស្តេចកុំបីមានព្រះទយា ស្រើបស្រាលឡើយណា
នូវផុកអំពើពាំរដាន់ ។

២៣៩៦. ក្រុងពាលីស្មៀវស្រែកខាន់ ពាក្យនាងតារាស្ប្យាន់ (2)
កំត្បូកកណ្តាប់ដៃឯង ។

២៣៩៧. ជាព្រះអង្គអញតតក្រែង ពីកាលមុនគ្រោង
ពុំដែលកន្លងចេស្តា ។

២៣៩៨. តោះបីក្រុងភពដីឬញ្ញ ប្រាលប្រាបស្ទួគាំ
កក្រើកជាកោលាហល ។

២៣៩៩. ក្រុងនោះឫទ្ធិរឹងអស់កល មិតពុំអាចទល់
នូវទប់អំណាចអញបាន ។

២៤០០. មោះក្បូត្រៃក្រៃក្រៃងនូវប្រមាណ បីអាចល្មានពាន
ប្រវែងប្រឡងចេស្តា ។

២៤០១. ពាលីក្រោធក្រៃមហិមា ករកាន់ខ័នថ្លា
កំស្ទុះយោះចេញទៅខ្លាំង ។

២៤០២. ពះពានអនុជបីប្រណាំង ណោណោតនូវកស្លាំង
កំណោះដីពាំរដាញដល់ ។

២៤០៣. ភ្លោះខ្លាំងពាំរពេជ្រសារសល់ ឃាចយោះទេះវល់
ប្រដំប្រដេញវិលវៃ ។

២៤០៤. ធូលយុទ្ធប្រតិរពាដែងដឹយ យោះឃ្លាសជ្រួលថ្ងៃ
ប្រដាប់ប្រជីកនូវគ្នា ។

២៤០៥. ហៀវយោះដាដាយទេវហា កាងករដីក្រូធា
ក្រំខ្ទួសសន្ធាប់ស្មៀវស្រែក ។

២៤០៦. ភ្នំក្រោមក្រុតក្រោមដីសបែក បពិតថ្លាយបែក
រលើងរល្មុះជ្រោះជ្រៅ ។

២៤០៧. ជោកជាក់ដូចផ្លាក់ផ្លាយទៅ ខ្ចាត់ខ្ចាយជ្រុះក្រៅ
ពន្លឹកពន្លូកក្រុះភាយ ។

២៤០៨. កេសរសីហសិង្ហព្រាត់ព្រាយ កដសាររត់ខ្ចាយ
អម្រឹកពន្លឹកភិតភាំង ។

២៤០៩. គោកគោមបិង្សាខ្លាខ្លាំង ពាំងរមាសនូវរមាំង

(1) RIB : ravaeṅ nūv ktī nā dhṅan'
(2) RIB : tpān'

បំពាក់បំពួនរត់ខ្វាយ ។

២៤១០- បក្សីភ្ញើលហើរព្រាត់ព្រាយ សត្វសត្វសង្ហាយ
ពន្លូកក្នុងតេជដេស្ដ ។

២៤១១- មេឃមីអាប់សែងសុរិយា អសនិអម្ពរា
ផ្ទាត់នូវសែងឥន្ទធនូ ។

២៤១២- ស្រឡប់សព្ទស្នូគសំភូ[1] ឫស្សីព្រាតត្រើងនូវ
សឹងភ្លុំនូវសម្ពង្គថ្វាយពេទ ។

២៤១៣- អស្ចារ្យមុខរាំងជាហេតុ ក្រុមិន្ទភាជពិភេទ
ពិភិនពិភាល់ជងគ្នា ។

២៤១៤- ពាលើផ្លោះផ្លាក់អនុជា ស្នុះស្នុយបញ្ចា
តន្ត្រីឯតន្ត្រីករកាន់ ។

២៤១៥- សេលាជាសជាសល់ពាន់ ដោះបាឌសាឌស្បាន់[2]
ផ្ទាត់នូវភ្លើងឆ្លួលច្រាល ។

២៤១៦- ធ្លាក់ចុះលើប្រថពីតាល[3] ល្អិតត្រាំក្បួជាល
ក្រឡប់ត្រលោមនូវធូលី ។

២៤១៧- សុគ្រីពពៈពាពាលី ខាស់ខែបដ៏ក្រវី
សិខរ[4]ពន្លូកត្រាំក្បួ ។

២៤១៨- ដោះភ្នំប្រជុំត្រូវគ្នា ខ្ចាត់ខ្ចាយសិលា
រូបសព្វរន្ទះអសនី ។

២៤១៩- ភ្លឺច្រាលផ្សាលទាំងប្រថពី រូបភ្លើងឆេះសំឡី
ផ្ទាត់កណ្ដាលអម្ពរ ។

២៤២០- យុទ្ធយល់រូបជកេសរ សីហាសឹង[5]តីរណរ
កណ្ដាលដ៏ធរណីលា ។

២៤២១- ពាឡ្សូពីររូបពេញដ៏មហា- និពន្ធសោះសា
សន្ធាប់សំរៀរធូលដាប់ ។

២៤២២- ស្នូរស្រែកបីសព្ចោករូគ្គាប់ ប្រថពីដ៏ក្រឡាប់
ពន្លឺកពន្លូកមហិមា ។

២៤២៣- ប្រយុទ្ធប្រកឹងជេស្ដា រិលរៃរេហា
សឹងហោះសឹងហិច[6]រូបយន្ត ។

២៤២៤- លោលោតស្ទុះស្ទាន់ពេកពន់ ដោយតេជោមន្ត
អាកាសកក្រើនបិងសាំ ។

(1) RIB : sabd sarabhū
(2) RIB : tpān'
(3) MBN : prithabī bhā
RIB : prathabī kār
(4) RIB : siṅkhar
(5) Var. : siṅh
(6) RIB : saṅhār saṅhic

២៦២៥. ទេកខ្លួនខ្លាស់ខែងទឹងខាំ មាត់មុះបីលលំ
ក្រម្លេកក្រម្លោតនេត្រក្រឡាល ។

២៦២៦. អស្ចារ្យទូទីរដល់បាតាល កក្រើកសព្វស្អកឹមារ
ក្រពានូវខ័នធាប្លាយ ។

២៦២៧. ប្រជតីរន្ធត់បីសញ្ញាយ ព្រះសុមេរុរូត្រយ
លំពាស់ធុងទេ្ទៀភេលបក់ ។

២៦២៨. ព្រះសមុទ្រពុះពោរនូវរលក ហោមពានរូសណ្តក
ប្រល័យទាំងស្លឹកស្នប់ស្នែង ។

២៦២៩. មេឃមិនគ្គរលាន់គ្រឹកគ្រែង ស្រឡប់ព្រះសូរ្យសែង
ស្រទុំទាំងដែនចក្រវាល ។

២៦៣០. អាប់អស់ឬទាំងភពភារ ស្រឡប់ទាំងទេវា
សន្ធឹកសន្ធាប់សព្វស្នៀរ ។

២៦៣១. ទេពតាទសទិសបីសស្ដៀរ ហិចហោះជីសសៀរ
មមាខាងខែត្រចក្រពាល ។

២៦៣២. ទេពាឥកាមាជាល ឆ្ងាយសាធុការ
ស្ពូតីនូវសព្វឃោសនា ។

២៦៣៣. ស្តើលដល់សោឡសព្រហ្មា ភ្លាំងភ្លេចភាវនា
ដោយឫទ្ធីរាជជ័យក្របី ។

២៦៣៤. ព្រះមាទនារាយរាមចក្រី យល់ឫទ្ធិពាលី
នូវដង្ហាញអនុជនាប់ស្តែង ។

២៦៣៥. ក្បិណារាជពាលីស្អះស្អែង ជាប់សុគ្រីពខែង
ក៏កាន់នូវស្បូងជ័យគ្រវី ។

២៦៣៦. ម៉ោះម៉ោកភាត់រាយនូវឫទ្ធី ពាលីរាជជ័យក្របី
គ្រវីអនុជសៀរក្បឿយ ។

២៦៣៧. នោះពានរអនុជភិតភ័យ ស្រែកករកជេស្ឋជ័យ
សម្តេចនារាយរាមា ។

២៦៣៨. បពិត្រឥឡូវខ្ញុំឃាត់ណា សូមព្រះរាជា-
ធិរាជស្តេចថ្លែងសរសឹក ។

២៦៣៩. ស្តេចដ្ងាប់ក្រោមដើមពោធិព្រឹក្ស- ក្សាលាយនូវសន្ធឹក
អធិកនូវមេកសាខា (1) ។

២៦៤០. ស្តេចកោះកោទណ្ឌមហា- ព្រហ្មាសមុតខ្លា
ក៏ថ្លែងនូវក្រុងពានរ ។

២៦៤១. សព្វកោទណ្ឌាភាឥសកិ្តសរ រូអសនីខ្ទរ
កក្រើកអំពើកពសុធា ។

(1) RIB : nūv truoy sākhā

២៤៤២. ពាលីប្រះព្រះអនុជា ដក់ជាប់សរថ្លា
សម្តេចហរិន្ទ្រប្រត្យក្ស ។

២៤៤៣. ក្រុងពាលីជាប់បានសរសក្តិ ស្រែចស្រែកមោះអ្នក-
ណាមានតបះជេស្តា ។

២៤៤៤. សរឥន្ទ្រឬសរព្រហ្ម ឬសរអសុរា
ដ៏មានតបះកាយក្រៃ[1] ។

២៤៤៥. សរនេះក្រែងសរព្រះពៃ- ស្រពឬសរពៃន
សម្តេចនារាយភាមា ។

២៤៤៦. ឥតអ្នកនាយសរបីនូវជា ឡើយទើបក្រុងពា-
លីរមិលមើលមុខកាំ ។

២៤៤៧. យល់ណាយលក្ខណ៍អក្សរត្រា មានជាចំណាំ
មហាព្រហ្មាសភាមា ។

២៤៤៨. ពាលីជាប់ព្រហ្មាសថ្លា ទូលទុកសិរសា
ហើយក្រាបទូលថ្លែងជាស្នង ។

២៤៤៩. បពិត្រអង្គខ្ញុំឥតស្គង ឥតទោសមួយហោង
នូវព្រះនារាយធិបតី ។

២៤៥០. ជាប្រុសប្រាកដលោកីយ លេះដូចសាកញី
មកធ្វើនូវកលកិច្ចកាច ។

២៤៥១. នេះហៅប្រុសឥតអំណាច ជាប្រុសលេះខ្លាច
ចំបាំងកណ្តាលរណារង្គ ។

២៤៥២. ផ្សរចេញមកឲ្យយល់អង្គ បាននូវដឹងដើមពង្ស
អំបូរបុរាណជេស្តា ។

២៤៥៣. ពាលីត្រូវសរសក្តិថ្លា ជាប់សរភជា-
ធិរាជនូវដៃស្តាំទ្រង់ ។

២៤៥៤. ដៃឆ្វេងកាន់ខ័នជីទ្រនង់[2] រិះរកដាក់អង្គ
នាស្ពានមួយទើបបាបា ។

២៤៥៥. ពៃយាអ្នករឹងឫទ្ធិជេស្តា មោះមកពាជា
សង្ហា[3] នូវសរថ្លែងថ្លាញ ។

២៤៥៦. នាយើងពិពណ៌ដែងជាញ រណារង្គក្រុងក្រាញ
ប្រកិតប្រកួតខេរទឹង ។

២៤៥៧. លេះលបផ្កាប់ផ្ទៀរពួនពីង នូវឫទ្ធិរឹង
កំថ្លែងនូវសរព្រហ្មាស ។

២៤៥៨. រីឯកាលនោះព្រះបាទ ត្រៃត្រកូវនាង

(1) RIB : tapaḥ kāc krai
(2) RIB : kān' khăn tantraṅ
(3) RIB : sāhăs

បន្ទូលនូវព្រះភជា ។

២៤៥៩. ជាងៃហាពាលីភជិមហា ទ្រើសថ្ពុះអនុជា
សុគ្រីពជិភជ័ក្របី ។

២៤៦០. ពីងកាត់ពាក្យសត្យមេត្រី អាចយកទេពី
តារានាយោយចិត្តចង់ ។

២៤៦១. ហេតុនោះអញផ្លែងផ្លាញបង់ បទពីងពុំគង់
តាំរង់នូវពាក្យមេត្រី ។

២៤៦២. ប្រថមកាលកើតជំពារមហិធី តារាទេពី
នូវឲ្យសុគ្រីពអនុជា ។

២៤៦៣. ពីងបង់ពាក្យសត្យសត្យា មកយកតារា
ទេពីជាភរិយាឯង ។

២៤៦៤. ទើរានុពៀរពីព្រៃង មកផ្លិចផ្លាញពីង
ឲ្យលុះនូវសរព្រហ្មាស ។

២៤៦៥. ពាលីបង្គំអភិវាទ វរវន្ទាបាទ
សម្ដេចនារាយរាមា ។

២៤៦៦. បពិត្រខ្ញុំតតពោសា នឹងព្រះភជា
នរិន្ទ្រជិភជិនរបតី ។

២៤៦៧. ស្ដេចទ្រង់ទម្ងន់ភពត្រី ប្ដួសជាឬសី
ប្រព្រឹត្តនូវសីលចរិយា ។

២៤៦៨. ពាក់ផ្គាំរៀនសិល្បសាស្ត្រា គៀសពាក់ស្បែកខ្លា
ជំពាយនូវស្នូវភ្លាំងស្វែង[(1)] ។

២៤៦៩. ប្រតិទិនបូជាហោមស្ដែង ផ្ដុំសំង្វផ្គើងផ្គែង[(2)]
ពិធីនូវព្រតសាស្ត្រស្ងួត ។

២៤៧០. ស្ទើងស្មាធិជីងផ្លួសដ័សំលូត ដោយសាស្ត្រសៃយសូត
សង្វេគស្វាឡាយសព្វថ្ងៃ ។

២៤៧១. នេះតប្បូវបោះបង់ព្រះវិន័យ ទូរព្រះឃាប្ញទ័យ
ពុំមានមេត្តាករុណា ។

២៤៧២. យល់ក្រោធក្រៅឡាប់ជីបុភ ផ្លែងសរសក្តិផ្លា
បង្ហស់នូវជនជីពជាតិ ។

២៤៧៣. ជាព្រះតស្បូរភូវនាឌ មោះមកពិឃាត
អង្គអញឯងតតពោសា ។

២៤៧៤. ស្ដេចស្ដាប់សព្ទពាលីជា ស្ដេចលោកអា-
នុជនូវព្រះរៀមរូសីហា ។

២៤៧៥. ជាទើយហៃក្រុងពាលី ពោះពីងតប្បូវថ្មី

(1) RIB : jam̤bāy nūv phlām̤n svaet svaeṅ
(2) RIB : phgin phgaeṅ

នូវសូមជីវិតរស់រឹង ។

២៤៧៦- អញនូវយកព្រាហ្មណ៍រឹង នោះវិលមកវិង
ជីវិតតែងនោះពុំក្ស័យ ។

២៤៧៧- ពាលីស្តាប់ព្រះបន្ទូលវាថ្លៃ វៃដ៏ព្រានសរជ័យ
បំភ្លាងក៏ក្រាបទូលស្នង ។

២៤៧៨- បពិត្រស៊ូស្លាប់គួរយោង ត្រូវសរហើយយោង
ជាស្នាមពិភិនអាត្មា ។

២៤៧៩- មួយសោតក៏នូវឮរូទ្រា - កងកេរតិក្រុងពា -
លីលុះនូវអបរាជ័យ ។

២៤៨០- ក្រែងឮទូហិងភពត្រៃ ពាលីខ្លាចក្ស័យ
ក៏សូមជីវិតរស់រឹង ។

២៤៨១- សូវស្លាប់ទៅជាវែលងនឹង រស់នូវកំដឹង (1)
ពិភិនពិភេទអាត្មា ។

២៤៨២- បពិត្រខ្ញុំផ្ញើសុគ្រីពអនុជា នូវអង្គតណា
ព្រះបាទហិងពីរព្រះអង្គ ។

២៤៨៣- ទោះបីមានទុកទោសធ្ងន់ សូមព្រះបាទទ្រង់
បញ្ញើនៃខ្ញុំករុណា ។

២៤៨៤- ស្រេចពាក្យពាលីទូលជា ផ្ញើសុគ្រីពអនុជា
ជិភជនូវអង្គតនៃ ។

២៤៨៥- និងព្រះបាទជយាក្យត្រៃថ្លៃ ពាលីរួយវៃដ
រសាយកម្លាំងទុរពល ។

២៤៨៦- ព្រានសរព្រាហ្មណ៍តាំទល់ មុតព្រាណាលុះដល់
ក្រុបិន្ទុក៏លុះបាត់ជីវី ។

២៤៨៧- ព្រាហ្មណ៍រឹងឫទ្ធិឫទ្ធិ ឃ្លាលឃ្លាសអស់គិ -
សូភនូវគន្ធ្រិព្រហ្មស្តើង ។

២៤៨៨- ហើរហិចទេវហាសស្នូវ្យសែង ឆ្មុចទៅដល់កំពែង
សមុទ្រដ៏គម្ភិភ (2) ។

២៤៨៩- ណាងជ្រះសុទ្ធសព្វប្រការ វិលវិញដ៏ត្រអាល
ក៏ថ្កានសាភយភាសា ។

២៤៩០- ពាលីដួលដោយសរផ្លា ទេពីតាភ
ប្រះព្រាណាក៏រួញយំកង ។

២៤៩១- សោយសោកនូវស្រីង្គារតង រូតរត់ដោយដង
ដោយនូវគិរីត្រៃត្រាំក្ស ។

២៤៩២- ក្រាបវរបាទដ៏យំពន្លឺក ហារូទ័យដ៏សន្ធិក

(1) RIB : ras' nau kuṃ ṭiṅ
(2) RIB : samudr gambhīrabhāb

សង្វៃរន្ធត់អង្គា ។

២៤៩៣. ទ្រព្រះអង្គរាជជ័យមហា រឹងឫទ្ធិចេស្តា
ពាំងាស្តេចឡើយក្បែរណាក្បួយ ។

២៤៩៤. វិលវង់បង់ជន្មជាតិក្សត្រថ្លៃ ដួលដេកនាព្រៃ
មកស្សូន្យកណ្តាលពសុធា ។

២៤៩៥. នេះអញឃាត់ព្រះរាជា ជាសុក្រឹតនេះណា
ឋនោមានៈនិរភ័យ ។

២៤៩៦. សមមានអ្នកជាតិជំនៃ រឹងឫទ្ធិលើសក្រៃ
ពាំនឹងពាំនាក់អាត្មា ។

២៤៩៧. ស្តេចក្រេវក្រោធក្រៃសោះសា ជាអញសឹងជា
ឋកសមនឹងរាជជ័សត្រូវ ។

២៤៩៨. ឃាបតៀរព្រៀងព្រះតម្រូវ អស់ជន្មជាតិនៅ
កណ្តាលអម្ពុរគម ។

២៤៩៩. បង់អស់ស្រីស្រីង្គារស្មិ ភពរង្គរាជ្យរម្យ
មកស្សូន្យនាព្រៃព្រឹក្សស្ថាន ។

២៥០០. ដួលដេកឯកោប្រះប្រាណ ប្រាសប្រាសាទស្ថាន
មកនៅកណ្តាលពសុធា ។

២៥០១. លេះយកចន្ទ្រជាដ្វាលា យកព្រៃបព្វតា
ជាខ្នល់នូវខ្នើយកើយហោង ។

២៥០២. លេះយកប្រចពីកន្លង ជារៃនទិញ្ញរង
មណ្ឌលបន្ទុំទិញ្ញសេយ្យាសន៍ ។

២៥០៣. លេះយកវេហាអាកាស ជាតិតានជាស
រុងរឿងតារាស្វឹញ្ញស្វាយ ។

២៥០៤. លេះយកសូរសព្ទព្រះពាយ ជាតន្ត្រីយសាយ
ជ័ល្បែងបំរើសពណា ។

២៥០៥. ទុះទុរុងរូបសោភា ល្អៅល្អេញភក្ត្រា
រុងរឿងនូវដោមពាលពង្ស ។

២៥០៦. អាចផ្វាញ់សង្គ្រាមរឿណារង្គ អស់ទេពក៏ប-
ង្គុំផ្វាយនូវភ្ញីស្ទួតស្វាធ ។

២៥០៧. អាចជាប់ចងរាពនូវអំណាច ផ្វាញ់ផ្វាលឲ្យខ្លាច
ពន្លឹកអស្សូរសោះសា ។

២៥០៨. មានឫទ្ធិជ័យតេជចេស្តា អាចផ្វាញ់មហិង្ស
តបៈនូវតេះជាជ័យ ។

២៥០៩. លេះព្រះមកមរនៅព្រៃ បង់តាំងាវៃប -
ត្រីផុលីរត្នស្ទួនភ្វា ។

២៥១០. ជិងនោះទំនួញតារា ពិភពតន្ត្រា -
ជិរាជសញ្ញាយដ៏កក្រើក ។

២៥១១. ព្រះឥន្ទ្រនិន្ទ្រស្ដេចបើក ទិព្វចក្ខុលើលើក
កំបង់ធុលីស្ថិតិ ។
២៥១២. ទ្រង់សង្វែងនូវទឹកគន្ធី (1) បោះផ្កានពាលី
ស្រែចស្រួចនូវទឹកមេឃា ។
២៥១៣. ឲ្យពារបន្លុះក្រុងពា- លីលុះសួគ៌ា
មកកើតពិមានទិព្វស្ដែង ។
២៥១៤. ឫសីព្រឹទ្ធព្រតសីលស្ដែង ពិធីលេះលែង (2)
ប្រយោជន៍មកសំស្ការសោត ។
២៥១៥. ឲ្យលុះមោក្ខមោះពិរោធ ស្ថិតិឲ្យពោ-
ធិញាណពិភពសាស្ត្រវៃឈយ ។
២៥១៦. ស្រោចស្រប់គន្ធពិដោរវៃន ស្លូតសាស្ត្រពារជ័យ
ដោយទិព្វញាណរិទ្ធ ។
២៥១៧. ពាលីលុះអំណាចសត្រូវ ផ្ដាកផងស្ដែងនូវ
ពិមានពិភពសួគ៌ា ។
២៥១៨. សោយសព្វសុខបរិបូណ៌ព្រា- កងដាទេពតា-
ធិរាជលុះដោយបារមី ។

(1) MBN : draṅ' sīl dịk ap' bidhī
(2) RIB : ṛsī briddh brat sīl svaeṅ
bidhī luḥ laeṅ

# កណ្ឌ ទី១៤

២៥១៩- ស្រេចព្រះស្តេចផ្ដួលពាលី អភិសេកក្របី
សុគ្រីពឲ្យសោយរាជ្យស្នង ។

២៥២០- រក្សារាស្ត្រប្រជាស្នង ពានរពលផង
បីរួមរូបរាជបុរា ។

២៥២១- ព្រះតីរព្រះអង្គវេលា ត្រេចត្រៃព្រៃព្រឹក្សា
សឹំងសត្វអម្រឹគឃំកង ។

២៥២២- ឯងជារស្រះស្រប់ផ្ការង មើលមយូរហង្សផង
ក៏ឃំផ្លាស់ផ្ញើយកាន់គ្នា ។

២៥២៣- ព្រះដើរលេងផងម្រឹគា ម្រឹគេន្ទ្ររាជា
បីនាំបុប្ផាផលផ្កាយ ។

២៥២៤- បុប្ផាផលាលេចលាយ ផ្កាត់ផ្កាយព្រះនារាយ
ស្តេចគង់នៅព្រៃពនាផ្កា ។

២៥២៥- សុគ្រីពក្របិន្ទ្ររាជា ស្រេចសោយអស់អា-
ធិបតានូវដូចពាលី ។

២៥២៦- សោយសុខស្តេចគុណានរបតី គាំរព្រះចក្រី
ទន្ទឹងយល់សប់តោកហោង ។

២៥២៧- ព្រះប្រើព្រះអនុជទៅដ្គង ព្រះអនុជជរហោង
បីលុះខាស់ខិនធីបុរី ។

២៥២៨- ជាទើយសុគ្រីពជីក្របី ស្តេចគុណាព្រះចក្រី
ក៏ពុំវិតឹងឡើយណា ។

២៥២៩- ក្រែងមិនងជប់ផ្លូលផុតពា- លីឋានរាជា-
ធិរាជស្តេចដោយចិត្តពឹង ។

២៥៣០- ពឹងស្តេចគុណាពឹងពុំក្រែង រាជាស្តេចឯង

ក៏ដួលកណ្ដាលពនាន្ដរ ។

២៥៣១- សុគ្រីពស្ដាប់ព្រះអាជ្ញា ទូលសារវិងថា
បពិត្រសូមស្ដេចប្រណី ។

២៥៣២- នាខ្ញុំទើបសោយរាជ្យថ្មី ពានរមន្ដ្រី
មកសូមនៃព្រះពរហោង ។

២៥៣៣- ខ្ញុំនូវគ្រឿងត្រាពលផង ឲ្យគ្រប់ជាផ្លូង
ទៅថ្វាយព្រះបាទចក្រី ។

២៥៣៤- ស្វាខ្លះនៅស្ថានគិរី ខ្លះនៅដលធី
សមុទ្រពុំទាន់មកហោង ។

២៥៣៥- ខ្ញុំនូវប្រមូលពលផង សព្វគ្រប់ហើយហោង
ហើយនៃទើបខ្ញុំយាត្រា ។

២៥៣៦- នាំទៅថ្វាយព្រះនរបា- ធិបតីគីជ័ជា
ព្រះបាទតស្សូរខ្ញុំហោង ។

២៥៣៧- សូមព្រះករុណាខ្ញុំផង ទូលព្រះបាទបង
អម្ចាស់ពិសេសសាទរ ។

២៥៣៨- ឈប់ថ្ងៃមួយខ្ញុំចេញចរ នាំពលពានរ
ទៅថ្វាយព្រះបាទបពិត្រ ។

២៥៣៩- ព្រះលក្ស្សរំពឹងសុចរិត វិលទៅទូលពិត
ព្រះបាទសម្ដេចជេស្ឋា ។

២៥៤០- បពិត្រសុគ្រីពរាជា នូវថ្ងៃពលពា-
នរាបីមកថ្វាយក្សត្រ ។

២៥៤១- នាទៅដល់កទលីបព៌ត (1) ដ្បិតហនុមានគាត់
នូវពុំទាន់មូលមកហោង ។

២៥៤២- សូមស្ដេចប្រណីគាត់ផង កុំបីអាលស្ដេចចង
ព្រះទ័យទ្រង់ព្រះក្រោធា ។

២៥៤៣- នាក្រោយព្រះលក្ស្សអនុជា ស្រេចស្ដេចវេលា
ទៅហើយទើបរាជក្របី ។

២៥៤៤- ចេញវៃងខាងទិសបុរី ស្រេចហិចហោះខ្ពី
ទៅលុះសំនៅហនុមាន ។

២៥៤៥- នាកទលីពនព្រៃស្ថាន រូរាជឧទ្យាន
ពិមាននៃត្រៃត្រឹង្ស (2) ។

២៥៤៦- សុគ្រីពក្របិន្ទ្ររាជា ចូលទៅទៀបនា
បន្ទំនៃរាជហនុមាន ។

២៥៤៧- យល់ទិរសរាជប្រធាន ដេកលក់ពុំហ៊ាន

(1) RIB : kandalī parbat
(2) RIB : ṭă mān nau traitrinsā

នឹងចូលទៅងាស ឡើយហោង ។

២៥៤៨. ស្គុំសំឡេងស្គរញុគឹកកង    អស់ព្រឹកយប់ឃ្លង
សឹងខ្លាចពុំអាចមកញឹង ។

២៥៤៩. ហានុមានដោះឡើងបីងណ្ដឹង    មានប្រការខ្វឹង
បីមាឋកដល់ស្ពានអាយ ។

២៥៥០. សុគ្រីពថ្លែងដោយបរិយាយ    មនគី[1] ព្រះនារាយ
សីហានាទស្ដេចខ្ទួលពាលី ។

២៥៥១. ប្រើអញបរត្រឹន្តដ៏ក្របី    ទើបអញឥឡូវខ្ញី
មកលុះនៃស្ពានបាហោង ។

២៥៥២. អញសូមអញ្ជើញបាទៅផង    អញឥឡូវងាម្ដង
ទៅថ្វាយបង្គំនរបតី ។

២៥៥៣. ហានុមានស្រួចនូវឫទ្ធិ    ផ្ទារ[2] ស្មើអង្គុលី
សុគ្រីពក៏ដក់ទៅហោង ។

២៥៥៤. ថ្វាយពលចិតសិបអក្ខោផង    សឹងឫទ្ធិដ៏កន្លង
ដយានុភាពដ៏ទីទៃ ។

២៥៥៥. សុគ្រីពណាថ្នក់លូកដៃ    ស្ទួយហានុមាននៃ
មកដាក់ឯក្អែកអាត្មា ។

២៥៥៦. ទើបក្រាបទូលព្រះនរបា    បពិត្រនាស្វា
នេះដាក្មួយនៃខ្ញុំហោង ។

២៥៥៧. ខ្ញុំសូមថ្លៃព្រះអង្គផង    ទោះខុសឆ្គាំឆ្គង
សូមមានសម្ដេចករុណា ។

២៥៥៨. ព្រះអង្គពីរពង្សក្សត្រា    គង់លើព្រះពន្លា
ពិជ័យរត្នរូតមណី ។

២៥៥៩. ព្រះបើកព្រះនេត្របេមប្រិយ    ត្រេកត្រាស់រួសខ្ញី
បន្ទូលព្រះរាជអាជ្ញា ។

២៥៦០. ថាណៃហាសុគ្រីពរាជា    ហេតុអ្វីឡើយពា-
នរលោះតូចលើសលន់ ។

២៥៦១. ញាំងមានតេជតេជោមន្ត    ពលាគឺអនន្ត
អនេកនូវអាធិកលម្ដេច ។

២៥៦២. លុះស្រេចបន្ទូលសារពេញ    ត្រេកត្រាស់សំរេច
សមរសព្រះរាជសម្ភារ ។

២៥៦៣. សុគ្រីពស្ដាប់ព្រះឱង្ការ    ឱនក្រាបវន្ទា
បង្គំប្រណាម្យភក្តី ។

២៥៦៤. បពិត្រនារាយរាមដ៏ឫទ្ធិ    ព្រាតព្រះដ៏ឫសី

(1) RIB : mantrī
(2) RIB : tūc

ពិសេសពិស្ណុលោកា ។

២៥៦៥- នាតេជតេជោពូជពា – នរត្នជនេះណា
ខ្ញុំនូវទូលក្សត្រពុំបាន ។
២៥៦៦- ខ្លាចខ្ញុំភូតភរប័ស្នូមពាន ស្ដេចទ្រង់ព្រះក្សាន្ត
ចិញ្ចឹមបន្តិចមើលហោង ។
២៥៦៧- ព្រះបន្ទូលនូវសុគ្រីពទីងស្នង ឥឡូវយើងមកប៉ង
រំលោងរំលាយលង្កា ។
២៥៦៨- អញស្ងាញ់ថ្លៃងថ្លាញអសុរា ឲ្យឧទ្រើសមិទ្ធា –
ទិដ្ឋិគីរសមុខហោង ។
២៥៦៩- អញស្ងាញ់ស្វាលកាលនេះម្ដង ឲ្យអសុរនិង
ដឹងដើមព្រះនារាយត្រាស់ហើយ ។
២៥៧០- នេះឥឡូវពីងទូលពាស់ឆ្លើយ ប្រើនូវរក្សាហើយ
ទំពាហនុមានធំណា ។
២៥៧១- ខ្លាចក្រែងនូវមាននិន្ទា អស់ទាំងទេវតា
ក៏ថាសតិះដៀលនេះម្ដង ។
២៥៧២- ពុំចាំចិត្តគិតប៉ុនប៉ង នូវប្រទះបីប្រឡង
សឹកនោះពុំវែងឡើយណា ។
២៥៧៣- នេះឥឡូវគិតស្ដេចខ្វៃជា នៅរង់រក្សា
ចិញ្ចឹមហនុមានធំ ។
២៥៧៤- ហនុមានថ្វាត់ថ្វាយបង្គំ ទសករប្រណម្យ
ព្រះបាទសម្ដេចភមា ។
២៥៧៥- ស្ដាប់សារព្រះបន្ទូលភាជា ក្សិណាហនុមានហា
មាត់ភ្ញើជាស្វាបឡើងនៃ ។
២៥៧៦- យល់ស្រីសុរិយោទ័យ ពីរជំណាប់ប្រពៃ
ប្រដូចនូវកែវសូរ្យកាន្ត ។
២៥៧៧- លេចចេញពីមាត់ហនុមាន ភ្លឺយល់សព្វស្ថាន
ពិមាននៃសុខសួគ៌ា ។
២៥៧៨- ភ្លឺទាល់ភវគ្គព្រហ្ម ខាងទាល់ចក្រវាល
ក្រោមដល់ទុកបរិយន្ត ។
២៥៧៩- ស្រេចស្ដេចក្រោកអរពេកពន់ យល់ហនុមានមន(1)
សំដែងថ្វាយឫទ្ធិដេស្ដា ។
២៥៨០- ស្ដេចត្រាស់នូវព្រះអនុជា ឱហាលក្សត្វាបា
បាមើលឫទ្ធីហនុមាន ។
២៥៨១- រីលង្កាភ្ជួងភាជស្ថាន យើងចាប់បែនបាន(2)

(1) RIB : mant
(2) MBN : yoeṅ cāp' pīen pān

ទាំងឯងាយពុំត្រូវល្បើយហោង ។

២៥៨២. នេះតម្រូវឫទ្ធិរបាទៅក្នុង ត្រូតត្រាពលដង
ដីដោយចំពូកភ្លេងស្គាំ ។

២៥៨៣. ឲ្យសុគ្រីពជាខុនពលនាំ ពលត្រៀមនុងធូលចាំ
ប្រយុទ្ធប្រយ័ត្នជេស្ដា ។

២៥៨៤. ក្សណានោះព្រះលក្ស្មណ៍ក្រាបលា វរបាទដេស្ដា
ដំនុំបញ្ជាន់ស៊ីវស្ពាន ។

២៥៨៥. ហៅហៃសុគ្រីពរាជប្រជាន ព្រះអង្គស្ដេចមាន
ព្រះបន្ទូលលើសិរសា ។

២៥៨៦. ប្រើអញ្ចមកក្ដុំក្ដួពា- នរត្រីនុយោធា
នូវព្រះស្ដៃងស្ដេចពានរ ។

២៥៨៧. ក្សណាភាសិសុគ្រីពក្រោកអរ សូមសិទ្ធិព្រះពរ[1]
ទទួលព្រះរាជអាជ្ញា ។

២៥៨៨. ស្រែចខ្វាយខ្វល់ក្ដុំក្ដួពា- នរត្រីនុយោធា
បងាចតុរង្គយុទ្ធ ។

២៥៨៩. ស្រួចស្រាលពហានមុះមុត លើកឲ្យអង្គុះ
ជាខុនពលប្លួងឯងណា ។

២៥៩០. វិរិយាននុមានមហិមា លើសវៃឯជាពា-
នរានរន្ទុមន្ត្រី ។

២៥៩១. ឲ្យនៅនៃបព្រះចក្រី ពីរព្រះនរបតី
ស្រដីអស់ទាំងទ័ពប្លួង ។

២៥៩២. វិសុគ្រីពរាជនាថទាំងពួង ពលត្រៀមនុតាមប្លួង
ជាទ័ពតាមស្ដេចឯងហោង ។

២៥៩៣. ស្រាប់ស្រែចព្រះលក្ស្មណ៍ធូលក្នុង ទូលព្រះបាទបង
ព្រះរាជព្រះទៀមដឹបតិត្រ ។

២៥៩៤. នាបើកព្រះឱស្ឋឧក្រិដ្ឋ[2] តិសេសព្រះគំនិត
គឺស្ដេចនូវចរលេណា ។

២៥៩៥. ព្រះបន្ទូលដម្ពូពានហោភ ក្បូរឫក្សទេលា
មហាចំហុតនាទី ។

២៥៩៦. លុះបានឫក្សពារតិត្តី ឧត្តមយោគយាយី[3]
ក្រោកដឹនូវព្រះទេណា ។

២៥៩៧. ស្ដេចឲ្យគោះគងជ័យជា ទុតិយាតតិយា
មហាមហាភផ្គឹងរៃក្រ ។

(1) RIB : sūm ṛddhī braḥ bar
(2) RIB : nā poe braḥ poek braḥ osṭh krit
(3) MBN et RIB : uttam yug yāyī

២៥៩៨. ទើបស្តេចលើកទ័ពពិជ័យ ចេញដោយវិស័យ
នាផ្សាំងព្រះរាជសង្គ្រាម ។
២៥៩៩. អស់ពានររត់វៃហាតាម កំណត់ប្រុងប្រាម
បីដោយសង្កាត់សេនា ។
២៦០០. មើលយល់ដូចរលកជលសា ជំជោរគ្រឹមគ្នា
ទាំងបួនពាន់លោកសាគរ ។
២៦០១. ស្រេចស្តេចដល់គន្ធមាទប- ព៌តពិតជ័បវរ
ប្រសើរពិសេសមានជ័យ ។
២៦០២. ស្តេចបោះទ័ពនៅនាឡូ ស្ថាននោះជីប្រពៃ
ប្រកបនូវជលាមាន ។
២៦០៣. រសផ្អែមពិសាសាយសាន្ត ច្រើនគ្រប់គ្រាន់មាន
ពានររឹងរឹងសឹងអាស្រ័យ ។
២៦០៤. ស្រេចស្តេចសង់ព្រះពន្លាជ័យ វិញទៀបឆ្នេរនៃ
សមុទ្រឆ្ពោះត្រង់លង្កា ។
២៦០៥. ពីរអង្គពង្សពីរក្សត្រា គង់លើព្រះពន្លា
អធិកនូវជេស្តាការ ។
២៦០៦. អស់មុខមន្ត្រីបរិពារ ពានរដាសដា
ក៏គាល់សម្តេចក្សត្រា ។
២៦០៧. រលកកគ្រឹកជលសា វៃបកក្តាត្រែងត្រា
ក៏មកបង្គំនរបតី ។
២៦០៨. ឯងនោះព្រះបាទភូមី ថ្លែងស្តេចនូវឫទ្ធី
បន្ទូលព្រះរាជឱង្ការ ។
២៦០៩. ថាហៃហាសុគ្រីពជ័ឧទារ ពឹងជានាយនា
គង្សូរអស់ពានរហោង ។
២៦១០. ចូរពីងស្រាលពានរឯង អញនូវទៅក្លង
ឲ្យសួរលំនៅសីតា ។
២៦១១. គាប្បីអញប្រើអ្នកឯណា អាចទៅលង្កា
វិលមកតប្យូវថ្វាត់បាន ។
២៦១២. សុគ្រីពក្រាបទូលសូមទាន បពិត្រអញខ្ញុំមាន
តែខុនជីពាក្យរឯងណា ។
២៦១៣. សូមព្រះត្រាស់ប្រើអាត្មា ទុកលើសិរសា
គាត់នាំព្រះសំនួរហោង ។
២៦១៤. ខុនជីពាក្យទូលវិងស្នង បពិត្រខ្ញុំលោះឆ្លង
សមុទ្រនេះទៅបានណា ។
២៦១៥. លោះនូវវិលមកដូចព្រះអាត្មា ព្រះបាទក្សត្រា
ថ្ងៃមួយពុំបានមកហោង ។
២៦១៦. ខ្ញុំទូលបាក់ដូចគ្គំគ្គង បទបាត់ហើយហោង

កម្លាំងក៏ថយហើយណា ។

២៣១៧- រីខុននន្ទនៃមហិមា គាត់អាចធាធា
អាស្នាព្រះបាទភូធរ ។

២៣១៨- ខុននន្ទក្រួញក្រាបកាយករ អញ្ជលីថ្វាយពរ
បង្គំប្រណម្យទូលថា ។

២៣១៩- បពិត្រខ្ញុំពោះឆ្លងសា - គរទៅលង្កា
វិលមកតឡូវថ្វាត់បាន ។

២៣២០- គឺពោះខ្ញុំនូវនិរមិតប្រាណ ដូចរាជហនុមាន
ពុំបានដូចចិត្តចិន្ដា ។

២៣២១- បទ្ទូវនោះទៅលង្កា មានប្អូនភពណា
មួយឈ្មោះនាងវិកតាសី ។

២៣២២- ជាឆ្មាំចាំរាជបុរី លង្កាភូមិ
ដណ្ដាលនៃទសមុខមារ ។

២៣២៣- នាងនោះហាមាត់ទៅហួរ មាត់ឯណើងាសងា
ក៏ពាសអាកាសនភី ។

២៣២៤- រីជង្កាក្រោមពាសមហាប្រថពី សព្វសត្វបក្សី
នូវហើរវំលងពុំបាន ។

២៣២៥- បទវិកតាសីដ៏សាហាវ ចាំមាគ៌ាស្ពាន
ដោយដានដំណើរនេះណា ។

២៣២៦- ពោះយក្សកន្ទូងអសុរា ផ្ដោះទៅលង្កា
សិរដូលក្នុងមាត់នាងនោះ ។

២៣២៧- វិញ្ញែងវិលវិល់សូន្យសោះ ស្លាប់បាត់ក្នុងពោះ
ពុំដែលនូវរួចយាត្រា ។

២៣២៨- បពិត្រពីមុនមកណា ផ្លូវទៅលង្កា
ពុំដែលកម្រដល់ម្ល៉េះ ។

២៣២៩- ពីផ្លូវភពបានទៅទីនេះ ភពរិងរួតរិះ
ប្រយ័ត្នសព្វមាគ៌ាស្ពាន ។

២៣៣០- មានតែឫទ្ធិរាជហនុមាន ហនុមាននៃបាន
គាត់នាំព្រះរាមអាស្នា ។

២៣៣១- ស្ដេចស្ដាប់ខុននន្ទទូលថា ផ្លូវទៅលង្កា
នោះត្រូវអ្នកមួយទៅបាន ។

២៣៣២- ទើបព្រះបន្ទូលវិងក្ដាន ចៅហៃហនុមាន
កម្លាំងឫទ្ធិមហិមា ។

២៣៣៣- បាទៅសួររាជសីតា វិររាជជាយា
មហាមហេសីស្ងួត ។

២៣៣៤- ព្រះបើកព្រះខ្សួរអាក់អួល ហឫទ័យខ្សឹកខ្សួល
បារម្ភព្រះរាជទេពី ។

២៦៣៥. ព្រះនេត្រស្រឡូតស្រាបតាំងអ្វី ភ្លុសភាជក្របី
ក៏ជាត់ពុំទាន់ឲ្យយល់ ។

២៦៣៦. ខំប្រឹងព្រះភក្ត្រនិម៌ល ដូចចន្ទ្រពេញបូណ៌
ស្រឡះពពកថ្លាថ្លៃ ។

២៦៣៧. ហនុមានវៃអស្សាស្រ័យ ដឹងដើមដាប្ទ័យ
ថាម្ចាស់ព្រះរាជទេវី ។

២៦៣៨. ក្រែងពុំគង់ក្រិត្យក្រមស្រី អារមកយាយី
ប្រលួងប្រលោមកាមករ ។

២៦៣៩. ហនុមានក្រាបបាទភូធរ សូមឫទ្ធិព្រះពារ
ទទួលព្រះរាជអាជ្ញា ។

២៦៤០. បពិត្រខ្ញុំទៅលង្កា ក្រែងព្រះពនិតា
ពុំជឿនៃអញខ្ញុំគូរ ។

២៦៤១. ខ្ញុំនាំពតិមានព្រះភូ- ធរទៅតម្កូវ
គិតអ្វីមួយជាបន្ទាល់ ។

២៦៤២. ឲ្យសម្ដេចព្រះទេវីស្គាល់ សោះទេវីខ្វល់
ជាក្រោងព្រះរាជអាជ្ញា ។

២៦៤៣. មកល[1] ក្រែងក្រុងភពណា ប្រែប្រាណជាស្វា
មកលួងសម្ដេចក្សត្រី ។

២៦៤៤. ស្ដេចស្ដាប់ហនុមានទូលពី- រោះសារសេចក្ដី
គំនាប់ដោយធម៌សុចរិត ។

២៦៤៥. ស្ដេចបូតព្រះទំរង់រត្ន ស្បូងពិទូរ្យឥត
តម្លៃពីព្រះហស្ដហោង ។

២៦៤៦. ឲ្យហនុមាននាំទៅក្ដង ថ្លែងសារសព្ទផង
ទេពីប្រសើរសួរសារ ។

២៦៤៧. ថាទៅគាល់ទសមុខមារ មើលសព្វប្រការ
នូវអស់អំពើកិច្ចកល ។

២៦៤៨. លែងបាបរិបូណ៌បានយល់ សព្វស្ថានដណ្ដាល
មន្ទាគិរីភពណា ។

២៦៤៩. ថាមើលអស់ពលយោធា មើលអស់អសុរា
ឯណានៅចាំទេពី ។

២៦៥០. ថាចូលដល់ស្ថានមហេសី ឲ្យបានស្រដី
សំណោះសំណាលថ្លែងថា ។

២៦៥១. ថាថ្វាយអង្គុលីយមួយណា មណីនេះជាយា
ប្រាកដក៏ស្គាល់ជាក់ហោង ។

(1) RIB : mar kal' (pas.)

២៦៥២- ហនុមានក្រួញក្រាបភបរង ទំរង់រត្នកន្លង
ដឹកល់មណ្ឌលសិរសា ។

២៦៥៣- ស្រេចស្អប់ស្អាញខ្ពង់បញ្ចូតា គន្ធមាទមហិមា
កម្លាំងនៃហនុមានច្រិត ។

២៦៥៤- ស្ទុះនោះឡើងលើបពិត ផ្លិតចុះច្រាកង
ភបង្គុចព្រះធរណីយោង ។

២៦៥៥- នោះឃ្លុយឃ្លាសទេវតាផ្សង ពានរផ្ទារផង(1)
ក៏ជិតដោយកងាក្របី ។

២៦៥៦- លុះកណ្តាលប្រិវាលជលធី ជលធាធិបតី
រលករំពែងខ្ទរខ្ទាយ ។

២៦៥៧. ដើលនាគនូវមករទៀងកាយ ស្វាឆ្មារកាំងឡាយ
មហាភយាភិតភ័យ ។

២៦៥៨- ហនុមាននាំទៅទុកនៃត្រា ហើយនោះគ្រៀវនៃត្រ
ប្រុះលើសិង្ហអសុរ ។

២៦៥៩- ភាតាឲ្យចរចាំរក្សា នៅឆ្មេរគង្គា
ត្រង់ត្រើយលប្ដាបណ្ដាល ។

២៦៦០- សិង្ហាសួរសោតយក្សយល់(2) ហនុមាននោះដល់
ក៏តាស់ប្រយុទ្ធដ៏ទេវា ។

២៦៦១- ហនុមានប្រយុទ្ធសោះសា ដួលសិង្ហអសុរ-
សុរេន្ទ្រក៏លុះមរណោង ។

២៦៦២- ទៅយល់សបូតាលនាគផង ទាស់តុំឲ្យឆ្លង
ក៏លើកតាពារបីកំស្ទួល ។

២៦៦៣- ហនុមានបាចនោះឆក់ឆ្នួល ផាប់សិរសាមួល
ទំលាក់ទៅក្នុងជលសា ។

២៦៦៤- ហើយនោះរំលងលង្កា វិញ្ញៀងមាគ៌ា
ទៅដួនលើស្ពានអាស្រម ។

២៦៦៥- យល់ទេពឫសីដ៏ឧត្ដម សាងសីលក្រៀបក្រម
ក៏ចូលបង្គំភក្តី ។

២៦៦៦- ទូលថាបពិត្រព្រះមុនី ទេពវិញ្ញូឫសី
ពិសេសពិសុទ្ធសីលា ។

២៦៦៧- សូមទានទ្រង់ព្រះករុណា ផ្លូវទៅលង្កា
ត្រង់ណាបង្ហាញខ្ញុំផង ។

២៦៦៨- ឫសីសិទ្ធិឆ្លើយស្នង ថាមានោះឆ្លង
រំលងលង្កាហើយណា ។

(1) RIB : bānar nāṃ phaṅ
(2) RIB : siṅh suor tesāy yaks yal'

២៦៦៩- ហោណាន[1] ក្រែងប្លន់ផ្កាយផ្កា ផ្កាមកភោគ្គា
អាហារជំអែតតង្គ្រៃ ។
២៦៧០- ក្បែរណានោះព្រះឫសីមុនី អ្នកតួតផ្កាយបី
តំនូតក៏ហុចហនុមាន ។
២៦៧១- ហនុមានទទួលផ្កាយបាន បរិភោគដោយប្លាន
ក៏ឆ្អានពុំគ្រាន់ឡើយណា ។
២៦៧២- ក្បែរណាសើចអំភ្លាងភោគ្គា ស្លូតនឹងនិន្ទា
ព្រះមហាឫសីនិមុនី ។
២៦៧៣- ដោយតេជតេជះព្រះឥសី បរិភោគផ្កាយបី
តំនូតពុំអស់ឡើយណា ។
២៦៧៤- ហនុមានអស់អៀនខ្មាសមហា- ឫសីក្រាបណា
បៀមផ្កាយអំភ្លាងបោះទៅ ។
២៦៧៥- ស្រេចដល់វិកតាសីនៅ ចាំផ្ទូរជិតក្រៅ
កំពែងបុរីលង្កា ។
២៦៧៦- ហនុមានគិតស្ស្រួងស្រួងថា បើអញឲ្យវា
ដឹងខ្លួនវាឃ្លាំងនឹងអញ ។
២៦៧៧- ពីថ្ងៃនេះលុះព្រឹកវិញ នោះនៃវាចាញ់
ដៃអញពិឃាតបង់បាន ។
២៦៧៨- គឺបោះព្រះអាស្នាព្រើប្រាណ ស្ដេចក៏ខុសខាន
ពុំបានទៅដល់វាំងថ្ងាត់ ។
២៦៧៩- ដួយសោតអញនូវដើរក្នុងមាត់ ក្រែងព្រះទំរង់រត្ន
អង្គៈអសោចពុំស្អាត[2] ។
២៦៨០- មកលយល់យក្សរូបជាតិ សាមាន្យប្រមាទ
បានបៀមចិញ្ចៀនព្រះទំរង់ ។
២៦៨១- ហនុមានរិះពុំស្ស្រួងស្ស្រួង ក្បែរណាបោះព្រះទំរង់
រំលងឯអាកាសថ្ងាត់ ។
២៦៨២- និម្មិតអង្គឯងគ្នារក្តាត់ ចរចូលក្នុងមាត់
ក៏លេចទៅដោយកាមា ។
២៦៨៣- ហើយហិចបោះឃ្មួសទេវហា ស្លឹកស្លោះសោះសា
ទទួលព្រះទំរង់រត្ន ។
២៦៨៤- ទូលទុកលើសិរសាថ្ងាត់ ហិចបោះឆាប់ក្តាត់
ស្រេចដល់កំពែងលង្កា ។
២៦៨៥- នូវចូលដល់ផ្ទូរបូព៌ា យល់យក្សអសុរា
កម្រនឹងចូលពុំបាន ។

(1) MBN et RIB : lān̄
(2) RIB : krai braḥ damraṅ' rát(n)
aṅg āsoc bum̩ s-āt

២៦៨៦- ខៀលទិលទៅទិសឦសាន ស្មៀងមើលសព្វស្ថាន
រំពៃរំពឹងនូវលង្វែក ។

២៦៨៧- ក្សិណនោះហនុមានយល់មែក ជ្រៃមួយជ្រៀតជ្រែក
រហែងកំពែងសិលា ។

២៦៨៨- ហនុមានតឹងតានសាខា ស្ទៀរស្ទូរសោះសា
លុះទៅលេចកំពែងដែកធូល ។

២៦៨៩- ទៅយល់ក្ស័យភពណាសួរ អសុរីបុត្របូរ
គឺនាងយោភកាមពាលី ។

២៦៩០- ចេញពោងទៀបមុខមន្ត្រី[1] សក្តិសែងនូវស្រី
សុភក្ត្រខុនណាងបីប្រពៃ ។

២៦៩១- កុំយល់រត្នសីតាថ្លៃ ពុំលេចធូលៃ
កំពែងសិរីតរិះរក ។

២៦៩២- យល់ឯអតិកាយចេញមក ទៀបពោងយក្សយក
នូវសារពើយុទ្ធបីសំពៀង ។

២៦៩៣- ហនុមានពេះពានកំពែង បន្ទាយទន់វែង
ក៏ដួលទៅយល់មហាកាយ ។

២៦៩៤- កំពស់ដួយយោជយល់ឆ្ងាយ ចេញពោងទៀបកាយ
នូវអស់អាវុធអសុភា ។

២៦៩៥- កុំយល់រត្នភជសីតា ហនុមានវេលា
លុះលេចកំពែងបញ្ចាលោហ[2] ។

២៦៩៦- យល់មន្ត្រីពលយក្សនោ ទសមុខមានោ
ឲ្យចាំអស់ស្រីស្នំគាំ ។

២៦៩៧- សុង្ហសឹងទេពីទេពតា ទិព្វទេពកញ្ញា
គឺភពណាល្អជយោង ។

២៦៩៨- កុំយល់សីតាស្ថិតផង ហនុមានវិលវង់
លេចដល់កំពែងពេជរា[2] ។

២៦៩៩- ទៅទូរឧត្តរទិសា យល់កូនភពណា
គឺឥន្ទ្រជិតជ័យឧទារ ។

២៧០០- ចេញពោងរស្មីក្រាស់ក្រាល ព្រោងព្រាយបីស្វាល
តន្លឹកតន្លឺសោមសាយ ។

២៧០១- ទៀបពោងគិតការអធិប្បាយ បរិវារពលនាយ
យោធាតាហានយក្សា ។

២៧០២- កុំយល់រត្នភជសីតា ហនុមានវេលា

(1) RIB : roṅ rīem mukhamantrī
(2) MBN et RIB : pañcalo(r)
(3) MBN : bejj ṭār
RIB : bejratā

២៦៦៩. ហោណាន[1] ក្រែងឃ្លានបាយបា   បាមកភោក្តា
អាហារជំអែតឥតត្រើយ ។

២៦៧០. ក្បិណានោះព្រះឫសីមុនី   អ្នកពុតបាយបី
តំនូតក៏ហុចហនុមាន ។

២៦៧១. ហនុមានទទួលបាយបាន   បរិភោគដោយឃ្លាន
ក៏ឆ្អានពុំគ្រាន់ឡើយណា ។

២៦៧២. ក្បិណាសើចអំភ្លាងភោក្តា   ស្ងួចនឹងនិន្ទា
ព្រះមហាឫសីដ៏មុនី ។

២៦៧៣. ដោយតេជតេជះព្រះតសី   បរិភោគបាយបី
តំនូតពុំអស់ឡើយណា ។

២៦៧៤. ហនុមានអស់អៀនខ្មាសមហា-   ឫសីក្រាបណា
បៀមបាយអំភ្លាងពោះទៅ ។

២៦៧៥. ស្រេចដល់វិកតាសីនៅ   ចាំផ្លូវជិតក្រៅ
កំពែងបុរីលង្កា ។

២៦៧៦. ហនុមានគិតស្ទើរស្ទើងជា   បើអញឲ្យវា
ដឹងខ្លួនវាច្បាំងនឹងអញ ។

២៦៧៧. ពីថ្ងៃនេះលុះព្រឹកវិញ   នោះនៃវាចាញ់
ឲ្យអញពិឃាតបង់បាន ។

២៦៧៨. គឺមោះព្រះអាត្មាជ្រើជ្រាណា   ស្តេចក៏ខុសខាន
ពុំបានទៅដល់វឹងជាត់ ។

២៦៧៩. ម្ហូយសោតអញនូវដើរក្នុងមាត់   ក្រែងព្រះទំរង់រត្ន
អង្គះអសោចពុំស្អាត[2] ។

២៦៨០. មកលយល់យក្សរូបជាតិ   សាមាន្យប្រមាទ
បានបៀមជិតញៀនព្រះទំរង់ ។

២៦៨១. ហនុមានវិះពុំស្ទើរស្ទើង   ក្បិណាពោះព្រះទំរង់
រំលងឯអាកាសផ្ទាត់ ។

២៦៨២. និម្មិតអង្គឯងត្រារក្តាត់   ជរជូលក្នុងមាត់
ក៏លេចទៅដោយកាមា ។

២៦៨៣. ហើយហិចពោះឃ្លាសវេហា   ផ្លែកផ្លោះសោះសា
ទទួលព្រះទំរង់រត្ន ។

២៦៨៤. ទូលទុកលើសិរសាផ្ទាត់   ហិចពោះដាប់ក្តាត់
ស្រេចដល់កំពែងលង្កា ។

២៦៨៥. នូវជូលដល់ផ្លូវបូព៌ា   យល់យក្សអសុរា
កម្រនឹងចូលពុំបាន ។

(1) MBN et RIB : lān̄

(2) RIB : krai braḥ damraṅ' răt(n)
aṅg āsoc buṃ s-āt

២៦៨៦. ទៀលវិលទៅទិសឦសាន ផ្ទៀងមើលសព្វស្ថាន
រំពៃរំពឹងនូវលង្វែក ។

២៦៨៧. ក្បួនណានោះហនុមានយល់រមែក ធ្វើជួយជៀតជ្រែក
រហែងកំពែងសិលា ។

២៦៨៨. ហនុមានតឹងតានសាខា សៀរស្លួរសោះសា
លុះទៅលេចកំពែងដែកធួល ។

២៦៨៩. ទៅយល់ក្បួយភពណាសូរ អសុរីបុត្របូរ
គឺនាមយោកាមពាលី ។

២៦៩០. ចេញរោងរៀបមុខមន្ត្រី[1] សក្តិសែងនូវស្រី
សុភក្ត្រខុនណាងបីប្រពៃ ។

២៦៩១. កុំយល់រត្នសីតាថ្លៃ ព្វលេចធួលនៃ
កំពែងសិរិតរិះរក ។

២៦៩២. យល់ឯអតិកាយចេញមក រៀបរោងយក្សយក
នូវសារពើយុទ្ធបីសំពៀង ។

២៦៩៣. ហនុមានពះពានកំពែង បន្ទាយទ្រង់ដែង
កំធួលទៅយល់មហាកាយ ។

២៦៩៤. កំពស់ដួលយោងយល់ឆ្ងាយ ចេញរោងរៀបរាយ
នូវអស់អាវុធអសុរា ។

២៦៩៥. កុំយល់រត្នភងសីតា ហនុមានលេណា
លុះលេចកំពែងបញ្ចលោហ[2] ។

២៦៩៦. យល់មន្ត្រីពលយក្សនោ ទសមុខមានោ
ឲ្យចាំអស់ស្រីសួគ៌ា ។

២៦៩៧. សុទ្ធសឹងទេពីទេពតា ទិព្វទេពកញ្ញា
គឺភពណាល្អជហោង ។

២៦៩៨. កុំយល់សីតាស្ថិតដង ហនុមានរំលង
លេចដល់កំពែងពេជរា[2] ។

២៦៩៩. ទៅព្វរឧត្តរទិសា យល់កូនភពណា
គឺឥន្ទ្រជិតជ័ខុមារ ។

២៧០០. ចេញរោងរស្មីប្រាស់ប្រាល ព្រោងព្រាយបីស្វាល
ពន្លឺកពន្លឺរោមសាយ ។

២៧០១. រៀបរោងគិតការអធិប្បាយ បរិវារពលនាយ
យោធាទាហានយក្សា ។

២៧០២. កុំយល់រត្នភងសីតា ហនុមានលេណា

(1) RIB : roṅ rīem mukhamantrī
(2) MBN et RIB : pañcalo(r)
(3) MBN : bejj ṭār
RIB : bejratā

ទៅត្បូងឯងបួតទិសទី ។

២៧០៣- យល់ព្រះលោកាធិបតី ក្សួរគ្រោះស្រុកស្រី -
សង្កានូវលង្កេស្សូរ ។

២៧០៤- ហានុមានកម្រើបនឹងធ្វល ជរជៀសពីបួត
ទៅទិសទក្សិណសោះសា ។

២៧០៥- ហានុមានយល់ព្រះកុម្ភការ អស្សូរភាដា
នូវយក្សយោធាបរិពារ ។

២៧០៦- ហានុមានទៅបស្ចិមទ្វារ យល់សហស្សកុមារ
រក្សាអសោកឯលិច ។

២៧០៧- គន់មើលបណ្ដើរទៅតិច យល់មានបន្តិច
ជន្លោះមួយខាងព្រះទ្វារ ។

២៧០៨- ហានុមាននិម្មិតខ្លួនឆ្មារ ជ្រែកជ្រៀតទៅទាល់
មណ្ឌលទ្វទសកោសា ។

២៧០៩- ឃ្លាំងជ័យជនធានរត៌នា ពុំយល់សីតា
កន្លងកំពែងមាសទៅ ។

២៧១០- យល់ប្រាសាទកែវបីសន្ធៅ ឆ្លូករត្នឆ្លុះនៅ
សុវណ្ណវៃរោចរចនា ។

២៧១១- មែនទិព្វទសមុខមហិមា សុទ្ធសឹងកញ្ញា
នូវអសុរិន្ទ្របរិពារ ។

២៧១២- អកយាយសាវៃជស្រីការ ស្រីស្រស់ស្រីស្ការ
សុភក្តិខុនណាងក៏ក្រាស់ ។

២៧១៣- ប្រទីបភ្លើងណាច្រើនក្រាស់ ភ្លើងភ្លឺយល់ច្បាស់
ក៏ហានុមានមើលយល់ ។

២៧១៤- ទសមុខដុំផ្ទុំមសុខស្កល់ រួមឯកមណ្ឌល
មន្ទោគិរីភពណា ។

២៧១៥- ហានុមានគិតស្មានសីតា លបល្បួចខ័នថ្លា
ពីក្រោមព្រះកេសកើយលោង ។

២៧១៦- ហួតហើយលើកឡើងដីសំពង លលើស្សុរង
នៃក្រុងមហាទសមុខ ។

២៧១៧- ហានុមានពួសពុជឹងជក់ (1) ដាក់ដារទុះមុក
ទើបគិតគន់មើលនរលក្ខណ៍ ។

២៧១៨- យល់នាងមន្ទោគិរីដាក់ ដាភរិយាយក្ស
នូវប្រាសនិភាសវែងបី ។

២៧១៩- ហើយនៅជាមេម៉ាយអប្រិយ ពុំជួ(2)លក្ខណ៍ស្រី

(1) RIB : sabd pī cacuk
(2) RIB : bum̤ juo

សីតារូបរត្នដ៏ពិសេស ។

២៧២០. ហនុមានឯបមន្តឧបទេស(1) ក្បិណាក្បួចព្រះកេស
មង្កុគិរីភពណា ។

២៧២១. ហនុមានសរសេរថ្លាំថា ទិញមន្តមាយា
កម្ររសាយកេសី ។

២៧២២. ប្រើយកនៃឯភ្លេងឯស្រី ទះទោសិរសី
នៃទសមុខបានបីឯង ។

២៧២៣. នោះទើបរសាយជំណាង ពុំធ្វើដូច្នោះហោង
ជំពាក់លុះស្លាប់ឯងគ្នា ។

២៧២៤. ស្រេចហើយហនុមានយាត្រា ចេញចរយល់នា
ឯស្រោកកំពែងមាស ហោង ។

២៧២៥. យល់នាងទាំងភៃមួយ(2) ហោង ចរចាស្នេហាស្នង
សំណោះសំណាលនូវគ្នា ។

២៧២៦. ជាឱទសមុខមហិមា តស្នូរសង្កា
សម្បត្តិសំបូណ៌បរិពារ ។

២៧២៧. សឹងស្រីស្នំស្រស់ស្រីប្ការ សេពសមក្រមការ(3)
អនេកអស្សូរដ៏កញ្ញា ។

២៧២៨. ក្សួរឆ្ងិញស្គាល់ស្កប់ម្លោះភ៉ា ម្តេចឡើយមោហា
ពុំត្រានូវចេះថ្លែងតដ្ឋន់ ។

២៧២៩. ភ្លៀតល្អជសីតារត្នតន់ មោហោលន់ពាន់
ពុំគិតដំនៀលនិន្ទា ។

២៧៣០. ពុំប្រណីព្រះភមា មានភាងសីតា
តែមួយបំរើសព្វថ្ងៃ ។

២៧៣១. ក្សួរគិតបារម្ភឯថៃ – ក្រោមក្រែងក្រក្រៃ
ប្រល័យប្រលង់លង្កា ។

២៧៣២. ក្បិណានោះនាងមួយឆ្លើយថា រីភាងសីតា
ណោកជាប្រសើររស់ស្រី ។

២៧៣៣. អញពុំដែលយល់កលអ្វី ក្រុងយក្សល្អជពី
នោះតើមកទុកស្ថានណា ។

២៧៣៤. នាងមួយណោតឆ្លើយវឹងថា ណោកទុកនៅនា
អសោកឧទ្យានដ៏ឧត្តរ ។

២៧៣៥. ក្បិណានោះក្រុងពស្ញូពានរ ឮសព្ទអប្សរ
ក៏អរក្នុងចិត្តចិន្តា ។

(1) RIB : appades (pas.)
(2) RIB : nāṅ dāṃṅ mbhai muoy
(3) RIB : sāc' sam kramakār

២៧៣៦. នាក្នុងរាត្រីនោះណា នាងនាងនិទ្រា
ទ្រង់ព្រះសុបិនសួស្តី ។

២៧៣៧. យល់ដូចព្រះបាទជ័យក្រី កាប់ឈើដំរី
មហាសុមេរជ័យសមាន [1] ។

២៧៣៨. ស្ដេចទ្រង់ព្រះពស្ត្រសែតពណ៌ បរិពារភ្នំផ្ទារ
ក៏គាល់សម្ដេចដេសា ។

២៧៣៩. ហើយយល់ដូចស្ដេចវេលា គប់គដេទ្រា
ប្រសើរសជំស្អុកមៃស្ត ។

២៧៤០. សីហានាទបីតគាតជើងក្រៃ មមូរ [2] ជើងដៃ
បំរេចកំពែងលង្កា ។

២៧៤១. បែកបាក់ផ្លាយផ្លាក់សោះសា ដេញយក្សយោធា
ពន្លឹកពន្លូកខ្ចាយខ្ចាត់ ។

២៧៤២. ក្សិណនោះទេពីស្រីរត្ន តើនឡើងគប់ផ្ទាត់
ក៏ប្រាប់នៃស្រីសុជាតា ។

២៧៤៣. ជាទេពីព្រះពិភេក្ស្យ ទាយឡើងទូលថា
នាព្រះសុបិនបរិបូណ៌ ។

២៧៤៤. អ្នកនឹងបានពពិមានបន្ទូល សារសព្វមធុរ
ពីស្បូវសម្ដេចភាសា ។

២៧៤៥. ស្រែចស្រីស្នូតិសុជាតា ទាយឡើងទូលថា
នាក្នុងរាត្រីកាលស្ងាត់ ។

២៧៤៦. ក្សិណនោះបានមានពោះផ្ទាត់ ស្រេចដល់រួតរត្ន
ប្រាសាទពិមានឧទ្យាន ។

២៧៤៧. នូវផ្សួលដោយទូរពុំបាន ក្រៃក្រហោតុមាន
អស្សូវកញ្ញាច្រើនគាល់ ។

២៧៤៨. បានមាននិម្មិតខ្លួនផ្កា សៀវស្សូរទៅពាល់
កំពូលប្រាសាទឯលើ ។

២៧៤៩. ក្សិណបេះបួតបានស្លឹកឈើ ប្រាយភាយរុះលើ
ក្រណាបន្ទំក្សត្រី ។

២៧៥០. ក្សិណនោះវរភាជក្សត្រី ភ្ញាក់ឡើងដើលទី
លរំងួករំភាយពិតាន ។

២៧៥១. នាងគិតក្នុងចិត្តស្មោះស្មាន ក្រុងភពព្រៃប្រាណ
កាណាជាស្វាមកដល់ ។

២៧៥២. ដង្ហឹងអះអង្គឹកល ពុំដែលលេចខ្យល់
មណ្ឌលប្រាសាទសោភា ។

(1) MBN : mahāsūr ṭe sāmār
(2) RIB : mukh mūr

២៧៥៣- ស្វានេះធូលធុះត្រង់ណា ក្រែងក្រុងយក្សា
កាណាមកល្បងកិច្ចកល ។

២៧៥៤- ហនុមានស្រេចស្រូតធុះដល់ ទេពីនិមិល
មហាក្របីក្រាបក្រួញ ។

២៧៥៥- ថ្វាត់ថ្វាយករកាយបីកក្តួញ លុះលុតជង្ឃង្គញ
ប្រណម្យបង្គំទូលថា ។

២៧៥៦- បពិត្រវរភាជជាយា ខ្ញុំឯងជាតិជា
អមាត្យជំនិតភក្តី ។

២៧៥៧- ខ្ញុំឈ្មោះហនុមានមកតី វរបាទចក្រី
សម្តេចនាភាយភាមា ។

២៧៥៨- ឲ្យសួរព្រះម្លូនថ្លៃថ្លា ព្រះទៀមរិះបា -
រម្ភភាជាទេពីក្តាត់ ។

២៧៥៩- ក្បិណានោះទើបទេពីរត្ន បន្ទូលវីងថ្វាត់
ភនិតសន្ធិះសង្កា ។

២៧៦០- ពាក្យពានរនេះមុសា អញពុំជឿបា
កុំបាស្រដីកិច្ចកល ។

២៧៦១- នាកាលព្រះបាទទសពល ចេញចាកមណ្ឌល
នគរក៏ស្តេចយាត្រា ។

២៧៦២- អញឯងបាទបរិចាកា(1) នូវព្រះលក្ស្មអនុជា
ស្តេចត្រេចព្រះព្រៃពនចរ ។

២៧៦៣- ពុំយល់ឯងអង្គពានរ តាមព្រះភូធរ
គឺជាអមាត្យស្នេហាស្និទ្ធ ។

២៧៦៤- ហនុមានទូលថាបពិត្រ មហេសីសុចរិត
ក្សត្រីត្រកូលពន្លក ។

២៧៦៥- នាកាលទសមុខលួចយក ព្រះអង្គឯងមក
ក៏ស្តេចត្រេចរកពុំយល់ ។

២៧៦៦- ព្រះទៀមព្រះអនុជសោកសល់ សោកសោះទុក្ខទល់
អំពល់អំពើក្សត្រស្តាយ ។

២៧៦៧- ពីរពង្សព្រះអង្គដើរដោយ ដងព្រៃបីដណ្តាយ
ហោរកន្ទូវសោកានល ។

២៧៦៨- ហនុមានទូលអស់កិច្ចកល ពុំឲ្យមានខ្ចល់
ហាឫទ័យសម្តេចទេពី ។

២៧៦៩- ទូលថ្លែងអស់អាជ៌សេចក្តី សុត្រីពាលី
ជាភេទប្រយុទ្ធជង់គ្នា ។

(1) RIB : añ eṅ paricārikā

២៧៧០- សុគ្រីពតីងព្រះជេស្ឋា សម្ដេចភរិយា
ស្ដេចថ្វាញ់ពាលីលុះមរ ។

២៧៧១- សុគ្រីពគ្រប់គ្រងពានរ ខាស់ខិននគរ
ចិតសិបអក្ខោភិនី ។

២៧៧២- មកថ្វាយព្រះបាទចក្រី ហនុមានថ្លែងពី-
រោះសួរមធុរគួរឈ្មោង ។

២៧៧៣- សុគ្រីពនោះមាខ្ញុំឯង ព្រះរៀមគតក្រែង
ជាស្ដេចគស្នូរសិរសី ។

២៧៧៤- ម្ដាយខ្ញុំឈ្មោះអញ្ជនទេពី អាពុកខ្ញុំគឺ
ព្រះពាយោនាយនរនាថ(1) ។

២៧៧៥- ខ្ញុំពុំពោលមុសាវាទ ក្រាបទូលព្រះបាទ
ពុំប្លាតនូវពាក្យសត្យស្មោះ ។

២៧៧៦- ក្សត្រីស្ដែងស្ដាប់ពាក្យនោះ យល់ពិតពិរោះ
តាមដោយគន្លងសេចក្ដី ។

២៧៧៧- ព្រួយព្រះបារម្ភ័យទេពី ក្រោកក្រាស់ស្រដី
សំណោះសំណាលថ្លែងថា ។

២៧៧៨- ហៃហនុមានអញជឿជា មោះមានសង្កា
ឲ្យជាសន្និះពិភាល់ ។

២៧៧៩- បាបានអ្វីជាបន្ទាល់ មកឲ្យអញស្គាល់
ជាពិព្រះបាទពង្សក្សត្រ ។

២៧៨០- ក្សិណនោះហនុមានស្រេចថ្វាត់ យកព្រះទំរង់រត្ន
អំពីលវៀកសិរសី ។

២៧៨១- ថ្កុមថ្វាយវររាជទេពី សីតាក្សត្រី
ទទួលចិញ្ចៀនព្រះទំរង់ ។

២៧៨២- នាងស្គាល់ជាក់ពីព្រះអង្គ រំដួលព្រះបាស្ដូទ្រង់
គិតបានសន្និះខ្វល់ឡើយ ។

២៧៨៣- ទូលទុកលើសិរសាហើយ ដលនេត្រគតស្បើយ
សស្រាក់លើព្រះឱភ(2) ។

២៧៨៤- នាងទ្រង់ព្រះកន្សែងសោកា ទូញព្រះរាជា
ពិលាបព្រលន់ពន់ក្ដាត់ ។

២៧៨៥- ក្សិណាស្រីសុជាតាទូលឃាត់ ក្នុងរាត្រីស្ងាត់
នោះខ្លាចអសូរផងភ្ញាក់ ។

២៧៨៦- ក្រែងព្រួដល់ទសមុខយក្ស ដឹងដើមមានអ្នក
មកជួលក្នុងប្រាសាទស្លត់ ។

(1) RIB : braḥ bāyo chāy naranāth
(2) MBN : loe braḥ bhaktrā

២៧៨៧- ទេពីចំទប់អាក់អួល យំស្តាយខ្សឹកខ្សួល
បន្ទូលបន្ទោសហនុមាន ។
២៧៨៨- ថាឱហាហនុមានហៅហាន អញបានពត៌មាន
សំនួរព្រះអង្គមកដល់ ។
២៧៨៩- ព្រះឱស្ឋទិព្វថ្លៃមង្គល គឺមោះអញផ្ទាល់
មកលបាស្ដាយសេចក្ដី ។
២៧៩០- ពីបាទើបមកដល់ថ្មី មិញតើបទអ្វី
ក៏បានមិនថ្វាយព្រះទំរង់ ។
២៧៩១- បាមកភ្លេសភ្លើស្បួរស្បួង សសោះអន្ទង
ហើយនៃទើបថ្វាយឯក្រោយ ។
២៧៩២- ហនុមានបង្គំទូលដោយ បពិត្រខ្ញុំស្ដាយ
ឲ្យព្រួយព្រះរាជហឫទ័យ ។
២៧៩៣- គឺមោះអាជ្ញាក្សត្រថ្លៃ ពីព្រះឱស្ឋនៃ
ព្រះបាទម្អកជាអម្ចាស់ ។
២៧៩៤- ព្រះទំរង់នេះពីព្រះហស្ត វីព្រះតម្រាស់
ហួរពីព្រះឱស្ឋក្សត្រថ្លៃ ។
២៧៩៥- ព្រះទំរង់នេះមានតម្លៃ ព្រះឱស្ឋទិព្វថ្លៃ
នឹងកាត់តម្លៃពុំបាន ។
២៧៩៦- ហេតុនោះខ្ញុំថ្វាយពត៌មាន មុនហើយទើបបាន
ថ្វាយព្រះទំរង់ឯក្រោយ ។
២៧៩៧- មកលថ្វាយអំពីដើមដោយ ព្រះបន្ទូលស្ដាយ
ពុំក្រែងបារម្ភសេចក្ដី ។
២៧៩៨- ស្គាល់ជាក់ពីព្រះចក្រី ហើយព្រះមហេសី
នូវសោកពិលាបប្រះប្រាណ ។
២៧៩៩- ទំរាំស្បើយព្រះសោកស្រាន ហើយនៃទើបបាន
ព្រះមានសំនួរសារសព្ទ ។
២៨០០- ខ្ញុំមកនេះជាការស្ងាត់ វិលវិញទៅថ្វាត់
ដល់ដូចព្រះរាជអាជ្ញា ។
២៨០១- ខ្ញុំធ្វើឲ្យមានសញ្ញា ឈ្មោះទើបបានជា
ក្រាបទូលសព្វសេចក្ដីគ្រប់ ។
២៨០២- ឥឡូវមិញ[1] យល់ខ្ញុំទប់ ព្រះបន្ទូលទាំងថប់
អាក់អួលខ្សឹកខ្សួលក្សត្រី ។
២៨០៣- ទោះថ្វាយព្រះកន្សែងក្រោយក្ដី មានកំដឹង[2]អ្វី
លែងបានពត៌មានដឹងដាច់ ។

(1) RIB : iḷūv mitr
(2) RIB : kuṃ ṭiṅ

២៨០៤- ក្សិណានោះទេពីស្ដេចស្ដាប់ ពាក្យពិរោះគាប់
សរសើរហនុមានក្រាដ្ឋក្រាយ ។
២៨០៥- ហនុមានក្រូញក្រាបថ្វាត់ថ្វាយ អញ្ជលីករកាយ
ប្រណម្យបង្គំទូលថា ។
២៨០៦- បពិត្រវរភជជាយា ភស្តុអ្វីមួយជា
ជំនឿពីព្រះអង្គឯង ។
២៨០៧- ទៅថ្វាយព្រះរៀមស្ដេចឈ្មោង សោះសង្កាក្រែង
ថាខ្ញុំពុំដល់ព្រះអង្គ ។
២៨០៨- ក្សិណានោះទេពីវរវង្ស ស្ដេចបូតព្រះទំរង់
សុវណ្ណពិរោចរង្សី ។
២៨០៩- ពីក្បូនព្រះហស្តក្សត្រី ហុចហនុមានពី-
ណាបលប់បន្ទូលផ្ដាំថា ។
២៨១០- ឲ្យហនុមានហើយយាត្រា ទៅទូលព្រះមហា-
ឥស្សូរពន្លកជ័សំឡាញ់ ។
២៨១១- បើព្រះអង្គអាសូរអញ ដូចដើមនោះមិញ
ឥឡូវសូមព្រះករុណា ។
២៨១២- ស្ដេចមានព្រះរាជចិន្ដា ទ្រង់ព្រះករុណា
ស្នេហាដូចដើមនាយហោង ។
២៨១៣- កុំគិតអង្គអញមានហ្មង[1] នូវយក្សយ័ឃ្លង
គឺជាបន្ទិលអាត្មា ។
២៨១៤- អញទន្ទឹងព្រះរាជា ទាល់ទសមាសា[2]
ពុំយល់ព្រះភក្ត្រស្ដេចឡើយ ។
២៨១៥- នោះដឹងដើមអញដល់ត្រើយ ព្រះជ្រីត្បូវហើយ
សោះសូន្យលើលង្កាហោង ។
២៨១៦- ក្រុងពង្សពានរក្រែកក្រែង ព្រះបណ្ដាំគ្រប់គ្រែង
វតីងរំពៃយាត្រា ។
២៨១៧- ជិងនោះហនុមានក្រាបលា វរភជជាយា
សំដែងនូវតេជបីពន្លឹក ។
២៨១៨- ចេញចាប់ចុងអសោកព្រឹក្ស សាខានូវសន្លឹក
អជិកនូវត្រួយផ្លែផ្កា ។
២៨១៩- លុះលែងអសោកពនិតា[3] ដកដើមដូចស្លា
ប្រវាជណ្ដើមអម្រឹតផល ។
២៨២០- ផលផងច្រើនពណ៌ច្រើនកល ទាំងបរិមណ្ឌល

(1) RIB : kuṃ git aṅg m̈atth hmaṅ
(2) MBN : dāl dasavāssār
(3) RIB : laḥ laeṅ asok banatā

ទំលាក់ទំលាយរុះរោយ ។

២៨២១- ផ្លែឈើបេះបានខាងឆ្ងាយ　　ដើយឯរព្រៃក្រោយ
ក្រមៀកក្រឡាស់ទៅវិញ ។

២៨២២- ឯកអង្គមហិមាព្រៃព្រឹង　　ព្រៃព្រាណខេរវិង
លលោលលំលោតឯល់ ។

២៨២៣- កាច់កំពែងមាសជំមណ្ឌល　　កើតកោលាហល
រវល់ទាំងយក្ខកុម្ភណ្ឌ ។

២៨២៤- ជ្រោមព្រៃជ្រែងបីសំពែងឯករកាន់　　គ្រឿងគ្រប់ខែលវ័ន
ធ្នូស្នានូវដំបងតោមរ ។

២៨២៥- ខ្លះកាន់កៅទណ្ឌកោះសរ　　នាយយក្សប្អូនឈរ
កណ្ដាលនៃយក្សរូសភាន់ (1) ។

២៨២៦- អស់យក្សាសូរប្អូនកាន់　　ជ្រោមព្រៃជ្រែងឯករកាន់
កន្ទុយទីទៃទង់ទាញ ។

២៨២៧- មានុមានធ្វើជាក្រួញក្រាញ　　ហើយលោតាក់ផ្លាញ
អសូរវិនាសនាភា ។

២៨២៨- ដូចគ្រុឌងាបផ្លូវនាគា　　ដូចរាជសីហា
សហ័សក៏ចាប់គជសារ ។

២៨២៩- អសូរសហ័សអន្ទពាល　　មិនមកជាសជា
រនាបរនេលលើគ្នា ។

២៨៣០- លុះត្រូដល់រាជសីតា　　ភិតភ័យមហិមា
ក៏ស្រែកឃាត់មានុមានឯង ។

២៨៣១- ជាចៃមាមានុមានឥតក្រែង　　ស្ដេចបាតុំឈ្មង
បានាំបណ្ដាំមហាក្សត្រ ។

២៨៣២- ប៉ាមកនេះទំនងជាស្លាត់　　វិលវិញទៅថ្វាត់
ដល់ដូចអាស្លាស្ដេចប្រើ ។

២៨៣៣- ស្ដេចស្បើយប៉ាមកផ្ញើសធ្វើ　　ដោយ្បោធ្នះតើ
ជាកាប់ឯណាសោតឃោង ។

២៨៣៤- មានុមានពុំស្ដាប់ស្បើយឃោង　　លាទេតីស្ទូង
ក៏ចាប់អសូរអសនិ ។

២៨៣៥- ឆក់ផ្លូវឈ្មួរជ័ប្រដពី　　ព្រះសិង្ហព្រះសីហា
ក៏ព្រះអម្រឹតព្រាត់ព្រាយ ។

២៨៣៦- ឯកដើមដូងស្លាវាត់វាយ　　អសូរខ្វាក់ខ្វាយ
ពុំអាចនៅចាំទេតី ។

២៨៣៧- យក្សជាសេនាបតី　　តៀបតៀបសេនី
រូបានរលកសាគរ ។

(1) RIB : kaṇtāl nai yaks rukkhachand

២៨៣៨. យក្សរោមជួលជោមពានរ ពានរប្រឹងឈរ
រំលាងឧទ្យានសោះសា ។
២៨៣៩. ហនុមានទ្រើសទ្រង់ពេជ្រថ្លា ដោះត្រូវយោធា
ពាហានអសុរស្លាប់ស្លុត ។
២៨៤០. កាច់កកាត់កបីកំបុត ធ្លាយពោះបីរពាត់
រពាយរពូនលើគ្នា ។
២៨៤១. ដេញពលដេញខុនយក្សា ដេញវាយយោធា
ទៅតល់សហាសកុមារ ។
២៨៤២. គប់លើភជរថទុមារ ទឹមសិង្ហដ៏ប្រហារ
រន្ទះសំឡេងស្រែកខ្លាំង ។
២៨៤៣. ឆ្កឹងឆ្កែងតន្ត្រៃយត្រែសង្ខ ឆត្រនាយាកាង(1)
រំយោលក្លឹងក្លស់ហាសមាន ។
២៨៤៤. មុះបរគជសារហៅហាន(2) ប្រះប្រឹងប្រែប្រាណ
មមួមមាមមហិមា ។
២៨៤៥. នាយសិង្ហជិះសិង្ហសោះសា នាយសិង្ហនាយមហា
តន្លឹកសឹងប៉ីសំរេក ។
២៨៤៦. រៀបពលរាយពលចេះចែក ចរចេញក្រោយផ្នែក
ទូវទសជ័យោធាពល ។
២៨៤៧. សឹងដាញដងជិះដោយកល សឹងមុះមុតដល់
ប្រកួតប្រកាប់នូវកំលាំង ។
២៨៤៨. ជិះសិង្ហជិះសីហាដ៏ប្រណាំង ជិះកញ្ជារខ្លាំង
ក៏ជិះឧសភនាគនា ។
២៨៤៩. ជិះសៀងភាដាបីប្រហារ ច្បូប្រែតន្ត្រីពាល
ក៏ជិះមហិង្សាឆ្កើង ។
២៨៥០. ជិះគោជិះគោរមាសភ្លើង ហាសល្បួសលោះឡើង
ក៏ត្រាលត្រូវាត់ទេហា ។
២៨៥១. វាយរៀបពលពោរមហិមា រូហានគង្គា
ក៏ជោរជំនោរមួយដង ។
២៨៥២. មារមុះលលើកបីដឹបង ជៃជកដោមបីសិពាង
កញ្ជនសន្ធាប់ជ័ក្របី ។
២៨៥៣. ហនុមានជក់ពេជ្រជ័ត្រី ដោះត្រូវសេនី
រនាបរនៀលពសុធា ។
២៨៥៤. ឈាមហូរដូចស្ទឹងយមុនា ជោរជលជ័នារា
រលករដុំជ័រវៃជិង ។

(1) MBN : kamṇ
RIB : kāmṅ
(2) RIB : poḥ par gajasār hāv hān

២៨៥៥- អស់ពលអសុរទំខែង　　　　ហនុមានដាញដែង
ដ៏ធាប់ត្រឡប់រថក្តួល ។
២៨៥៦- ដៃមួយកាប់រថយ៉ះយ៉ូរ　　　　ដៃមួយចក់ឆ្លូរ
នៃអង្គសហាសកុមារ ។
២៨៥៧- វាយសិង្ហវាយគជអស្សពាហា　　　　ពោះពោកពលមារ
រនាបរនៀលធារា ។
២៨៥៨- វាយតោវាយគោមហិង្ស　　　　រមាសខ្លាទៀងភា
ស្វវិសេះសារថីបីដ៏ស្លាប់ ។
២៨៥៩- ធូលចាប់ឥន្ទ្រីឆុរនាប់　　　　ឆ្មូរឥន្ទ្រីខ្ទាប់
សម្លាប់ឥន្ទ្រីមរណា ។
២៨៦០- គជសីហារាជសីហដីមហា　　　　ចាប់ប្រះដីធារា
ប្រឡាក់ស្វវិឈាមហូរឆ្លង់ ។
២៨៦១- កាច់រថបង់រថពះអង្គ　　　　សហាសកុមារទ្រង់
ក៏ចាប់ច្របាច់មរណា ។
២៨៦២- ទាំងពលក្រុំសេនសោះសា　　　　សេនាយោធា
និងយានជំនិះសឹងក្ស័យ ។
២៨៦៣- សល់តែអសុរតិរនៃ　　　　រស់រួចវៃឯភ័យ
គឺរត់ទៅទូលរាពណា ។
២៨៦៤- រាពស្តាប់ទំនូលអសុរា　　　　ធាដើមមានតា-
នរេន្ទ្រមួយមកភារី ។
២៨៦៥- ខ្លាញរថខ្លាញរាជពាជី　　　　ខ្លាញយក្សសេនី
ក៏ខ្លាញទាំងទសយោធា ។
២៨៦៦- ខ្លាញទាំងអសុរបុត្រភ្លា　　　　សហាសកុមារមរណា
មហាទសមុខក្រោធក្រៃ ។
២៨៦៧- ព្រួមដើមព្រះរាជបុត្រក្ស័យ　　　　រាពក្តៅជាឫទ័យ
ស្វវិសោកានលពេកពោរង ។
២៨៦៨- ពោលឥន្ទ្រជិតបុត្រថ្លៃង　　　　តេជវៃងកន្លង
កំណោះកំណាំងមហិមា ។
២៨៦៩- ឲ្យឥន្ទ្រជិតធុរធា　　　　ស្តាប់ពតិមានណា
ដំណើរនៃរាជដ៏ក្របី ។
២៨៧០- ធុរធានាំពលដ៏សេនី　　　　ខ្លាញស្វាធាបី
ក៏មករំលាងខ្សាន ។
២៨៧១- ឥន្ទ្រជិតទូលឆ្លើយទីងដ្ឋាន　　　　នាខ្ញុំយកបាន
ដោះស្វាណាមាន្យត្រៃសម្លង ។
២៨៧២- ខ្ញុំជាព្រះរាជបុត្រថ្លៃង　　　　តេជវៃងដ៏កន្លង
ច្បាកជបង្កើតកេរតិថ្លាស់ ។
២៨៧៣- ក្រែងដូចអាជានេយ្យធាស់　　　　និងឋឋកធាស់

ក៏មកប៉ះប៉ុននូវគ្នា ។

២៨៧៤- សូមទានព្រះរាជអាជ្ញា ត្រាលយកយោធា
វង្សានូវស្មើពានរ ។

២៨៧៥- ខ្ញុំទូលបាក់ខ្ញុំពុំអរ អាសាព្រះភូធរ
ពុំចេរនូវព្រះករុណា ។

២៨៧៦- ក្រុងរាពបន្ទូលវៃយាថា ទោះបីថាផ្កាញញ្ញា
នេះមួយឲ្យដឹងតេដដែង ។

២៨៧៧- នូវដឹងដើមថាមានជ័យ ជ័យថាជ័យត្រៃ
ពិជ័យសម្តេចរាមា ។

២៨៧៨- ដងនោះឥន្ទ្រជិតក្រាបលា នាំយក្សយោធា
ចាបាននូវពលពាណោ ។

២៨៧៩- សឹងហៅបានក្លាជ័យនោ ទាំងប្រាំអក្ខោ-
ភិនិពិនិត្យសិល្បសាយ ។

២៨៨០- ទៃតងតាំងខុនពលពន្រាយ គឺអង្គអតិកាយ
មហាប្ញណាជ័សេនី ។

២៨៨១- ទៀបរថទឹមទៀមពាជី សេះសោតរស្មី
រូបានមហាមរកត ។

២៨៨២- ឥន្ទ្រជិតឡើងលើរាជរថ រស្មីបីជំហុត
ប្រដូចនូវសុរិយោទយា ។

២៨៨៣- រស្មីផ្លុះអង្គអស្សពាហា មើលម្តងដូចកាល
នៃតន្ទុជនូបីជំរាស់ ។

២៨៨៤- យក្សយ៉ង់ឯកអង្គវែងខាស់ នាមហៅប្រហាស្ត (1)
ជំនិះជំនាញសារថី ។

២៨៨៥- មានមហាយក្សត្រីទ្វី នាមហៅព្រះជី (2)
ក៏ស្ថិតកន្សៃរថផង ។

២៨៨៦- តូរ្យតន្ត្រីយនូវសំឡូតង ដើរដេរដោយផង
កក្រើកអំពើកពសុធា ។

២៨៨៧- ដូចទាយពន្លូកត្រីក្ស ញាប់ញ័រក្រណា
មហាពសុធាខ្វាយខ្វរ ។

២៨៨៨- អាប់អស់ទូរសុរិយាករ ងងិតអន្ធរ
ស្រឡប់ទាំងសូរ្យរង្សី ។

២៨៨៩- ខ្លះកាន់វែលខ័នដ៏គ្រវី ទៀបពលពាជី
ប្រកិតអាវុធស្នងស្តាំ ។

២៩៩០- ខ្លះកាន់នាគាវេរភិ ខេវខឹងយាត់ខាំ

(1) RIB : braḥ hăst
(2) RIB : nām hau bājī

សំញ៉ែញសំញ៉ែងកាណ ។

២៨៩១- លុះលើកទ័ពទៀបព្រឹក្សា ភបទៀបយោធា
នូវបោយនៃភជជ័ក្របី ។

២៨៩២- ដងនោះក្របិក្ខិនាភយដិបតី យល់យក្សអសូរនៃ[1]
សំបើមសំបាក្រោធក្រៃ ។

២៨៩៣- នោះក្រុងពានរនិរភ័យ និរភិតដាញដឹយ
ដយានុភាពឫទ្ធិខែង ។

២៨៩៤- ពៃនពាន់នគ្គាផ្គាបីសំដែង ជិតដាកំពែង
កីពេជ្រកំពាត់ផ្កល់ជ្រើង ។

២៨៩៥- ទៃងទាន់ជ្រើនដាន់ខ្ពង់ល្បើង អង្គអាត្មាផ្តើង
ជ័លើសអសោកសាខា ។

២៨៩៦- ឈររណោងបេះបានផលា បៀមបរិភោគ្គា
អង្គាងកំនិរភ័យក្តីក ។

២៨៩៧- ដូចរាជសីហាជ័អដិក បាប់គជជ័អព្រឹត
ភោក្តាអំព្លាងនិរភ័យ ។

២៨៩៨- និរភិតអព្រឹតជ័ទីវៃ និរាសសង្ស័យ
ភយានុភ័យដូចដិល់ ។

២៨៩៩- ដងនោះបានុងានមើលយល់ តន្ត្រិជិតនិម៉ល
កំស្ថិតលើរជអស្សូពាហា ។

២៩០០- រុងរឿងរស្មីប្រាសប្រាល ដូចសុរិយបាល[2]
បីប្រាលជំរាស់បូពាំ ។

២៩០១- ក្រុងពង្សូពានរគិតថា នេះអង្គរាពណា
ឬ[3]អង្គអសូរទៀតដៃ ។

២៩០២- យោធាយក្សាក្រាស់ក្រៃ ពោមពានរនៃ
អសោកពន្លឹកសព្វសាយ ។

២៩០៣- ទៅទៀបពានរពន្រាយ យល់អង្គអតិកាយ
កំស្រែកដណ្តឹងពុំខ្លាច ។

២៩០៤- ជាទើយវាយក្សបីកំណាច អ្នកឯណាឯងអាច
កំស្ថិតលើរជអស្សូពាហា ។

២៩០៥- នោះជាអង្គអសូរមារ ភពាឯងអន្តពាល
ឬ[4]អង្គអសូរទៀតដៃ ។

២៩០៦- ដងនោះអតិកាយក្រោធក្រៃ មហាជានិរភ័យ
កំពោលនូវពាក្យប្រាយប្រាប់ ។

(1) RIB : yal' yaks asanī
(2) RIB : ṭūc suriyā bāl
(3) RIB : ṙī
(4) RIB : rī

២៩០៧. ហើយវានរព្រះស្តែងស្តាប់ ពីឯតុំដឹងសព្វ
នូវតេជតបះឫទ្ធិក្រៃ ។
២៩០៨. អ្នកនេះឯងមានថ្វីដៃ ធ្វើសឹកមានជ័យ
ពិជ័យសង្គ្រាមច្រើនគ្រា ។
២៩០៩. ជរជាប់តាំងទេពសួគ៌ា តាំងព្រះឥន្ទ្រា
លះនូវអំណាចបីក្រោកដេ ។
២៩១០. ហេតុនោះឥន្ទ្រាទេវបុត្រ ទើបលោកសន្មត
ព្រះនាមករពរហោង ។
២៩១១. ហៅឥន្ទ្រជិតដីកន្លង ជាភាជបុត្រច្បង
ព្រះបាទឥស្សូរលង្កា ។
២៩១២. ស្តេចទុកស្មើបណ្តូលថ្លើមថ្លា ស្មើព្រះនេត្រា
ពន្លកពន្លឺពន្រាយ ។
២៩១៣. រីអញឯងឈ្មោះអតិកាយ មុខប្រែរូបកាយ[1]
កាណានូវកលអតិរេក ។
២៩១៤. ជុំជាតិស្មើងស្លាជិងឯងឯក ទើយវរវិវេក
វិសេសវិសុទ្ធសាស្ត្រា ។
២៩១៥. ជិងនោះបានមានបរិយា សើចសងនិន្ទា
ចំអកចំអន់តុំកោត ។
២៩១៦. ហើយវាយក្បួនតិរិច្ឆានតោត ស្តេចដឹងមិនកោត
ប្រកួតប្រម្លងជេស្តា ។
២៩១៧. ដំបងតិះជៀលពលប្លូណា ដឹងកងបរិយា
សឹងស្លានអញត្រីប្លែញអង្គ ។
២៩១៨. អញមើលមុខដឹងបីលម្ពង់ ដូចមុសនូវមមង់
មកកោមនៃជើងកជិសារ ។
២៩១៩. ហើរហោងផ្កាណាប្លែតក្រាស់ក្រាល ខំខាំកងសារ
សម្លាប់ជីបាននេះតិម្បូវ ។
២៩២០. ស្រើបស្រុះមោហាមុះមកត្រូវ តែខ្យល់ខាងបូវ
ក៏មរវិនាសអន្តរាយ ។
២៩២១. ខ្លះត្រូវសង្ហានិកាយ - វដ្ឋាសុទ្ធសាយ[2]
បីខ្ចាយជលាស្លាប់ស្លុត[3] ។
២៩២២. ដំបងមិនដឹងបានមានបុត្រ អស់រូបភេមសុទ្ធ
សឹងពេជ្រមហាពេជ្រជ្លា ។
២៩២៣. តោះដឹងមកនឹងពាធា ស្មើយកអាត្មា

(1) MBN : mut prae rūp kāy
(2) MBN : vatthā suddhāy
RIB : vudha suddhāy
(3) RIB : pī khcāy jalā slāp' slut

មកមករកណ្ដាលឧទ្យាន ។

២៩២៤- មីងដូចខ្មោចខ្មួយសាមាន្យ តាំងមកពះពាន
ប្រកួតប្រឡងចេស្ដា ។

២៩២៥- ឯងនោះអតិកាយមហិមា ក្រេវក្រោធសោះសា
នូវពាក្យនៃពានរពោល ។

២៩២៦- ខេវខិងប្រាណប្រឹងឈរឈោរ រូបរុងបីត្រសោល
ទីយោមឃាកាណា ។

២៩២៧- កំពាស់ពីយោជិតណានា អតិកាយកាណា
នូវរូបស្ទឹមនៃស្កុបីសំបើម ។

២៩២៨- ប្រាណប្រឹងបះពាហុដើម(1) នេត្រឆងនូវផិតញើម
ក្រញិវក្រញើញញបីកង្កួន ។

២៩២៩- គំរាមគ្រើមគ្រាមបីក្រខ្លួន ភ្នែកប្រាលជំជួន
ក្រមៀកក្រម្យោតនេត្រា ។

២៩៣០- មានុមានមើលយល់យក្ខា អតិកាយកាណា
នូវរូបដ៏រុងបីពន្លឹក ។

២៩៣១- ណោណោតពីអសោកព្រឹក្ស ដោយគេឯបីអធិក
អំណាចនៃរាជពានរ ។

២៩៣២- ស្ទុះទៅធាក់ទាំងដំហារ យក្សរដួលដ្ងាស់មរ
កីថ្វារកណ្ដាលប្រឹថពី ។

២៩៣៣- ឮសព្ទដូចសព្ទអសនី ឬតព្រោះប្រឹថពី
កក្រើករន្ធត់ស្ទៃស្ទប់ ។

២៩៣៤- អតិកាយញ័រខ្លួនពីជំប្រប់ ប្រឹងប្រាណសួន្យសព្ទ
សន្លប់ត្រឡប់នេត្រា ។

២៩៣៥- ខាស់ទំស្ដាញស្ដុប់ផ្ទឹមផ្ទា ឈរឈោងបីប្រភា
បំពេនបំពាត់រូតរត់ ។

២៩៣៦- ធាក់ព្រៃព្រឹក្សាបពិត ឃាដាត់បំផុត
ខ្ទាំខ្ទេចខ្ទើងខ្ទិល ។

២៩៣៧- ផ្ដើលនោកឯកោលាហល អតិកាយរត់ដល់
នៃឥន្ទ្រជិតជាញជ័យ ។

២៩៣៨- ថ្លែងប្រាប់ដោយដំណើរនៃ ឥន្ទ្រជិតក្រោធក្រៃ
រវិទ្ធះប្រហាស្ដសារថី ។

២៩៣៩- ឥន្ទ្រជិតគង់លើរថពាជី ក្រោធដូចអគ្គី
កំដេះកំលុងនិភា ។

២៩៤០- ឯងនោះប្រហាស្ដទូលថា សូមព្រះករុណា
អាស្សូវនៃខ្ញុំស្មើសត្វ ។

(1) RIB : prāṇ priṅ baḥ bāhu ṭoem

២៩៤១. ខ្ញុំទូលបាក់ដូចខ្ញុំឃាត់ ហោះសូមប្រយ័ត្ន
ប្រយុទ្ធនៃពានរនេះ ។
២៩៤២. តតភ្លឹកការសឹកសោកផេះ អង្គតតរបេះ
របឹងរបាញទ្រើសទ្រង់ ។
២៩៤៣. ទោះនូវស្ទឹមពណារឹងរុង ក៏ជីវិតព្រះអង្គ
ព្រះបាទអម្ចាស់ឯងឯនៃ ។
២៩៤៤. ទោះព្រះអង្គទីងទំឲ្យក្បួយ ពានរនេះក្រៃ
ថ្លាឯនឹងប្រទះទាស់បាន ។
២៩៤៥. ឯងនោះតន្ត្រីជិតឆ្លើយផ្កាន អរប្រិយាស្តមាន
កំនិតកំនាប់ក្បួរយក ។
២៩៤៦. នាកាលយើងនូវណាស្ដេចមក ប្រយោជន៍បីនូវរក
ប្រទុស្តប្រទះរឿងណារង្គ ។
២៩៤៧. កុំថាពានរឯកអង្គ មហិមាទ្រើសទ្រង់
ពណ៌ទ្រនង់ជ័ពិភោជ ។
២៩៤៨. ទោះពានរនេះវិសេសកោជិ ពុំគួរបីនូវកោត
កំលាំងក្របីសោះសា ។
២៩៤៩. កាលមកយើងក្រាបទូលថា ទោះបីអ្នកឯណា
ជីមានតបះការក្រៃ ។
២៩៥០. យើងផ្សាឯឲ្យអស់គេឯងឯង លុះជីវិតក្បួយ
ទីនៃពុំវៃឯងឡើយណា ។
២៩៥១. ទោះជយឲ្យអាប់អាជ្ញា អាប់ព្រះចេស្ដា
នឹងជាជំនៀលនេះឥឡូវ ។
២៩៥២. យល់យើងខ្លៅខ្លាថជ័សត្រូវ(1) ស្លាដួយមកកូវ
រលះរលាំងរត់ឃោង ។
២៩៥៣. ឮដល់ព្រះបាទទ្រើសឃ្លង ស្ដេចក្រេវក្រោធឯង
ចំណោរនូវរស់បានសោត ។
២៩៥៤. ឯងនោះតន្ត្រីជិតក្រេវក្រោធ ភារភ័យបីពិភោជ
រន្ទះវាយបានឃ្លូរថ្ងូល ។
២៩៥៥. បានុមានយល់យក្សាស្គរ រត់ចូលបីរម្ងរ
កន្ត្រើយក្រអៃសណើយឯរ ។
២៩៥៦. ឯងនោះក្រុងភាជជ័ពានរ ក្របិន្ទ្រជ័បវរ
ពន្លឹកពន្លឹកបីប្រតិហារ(2) ។
២៩៥៧. ពានរទះទរពលមារ ដរជាគេក្រាល

(1) RIB : khlau khlā ṭa̋ satrūv
(2) RIB : krapindr rapin pavar
banlük banliḳ prātihāry

កណ្តាលមហាប្រថពី ។

២៩៥៨. ណោណោតផូលផាប់សិង្ហសីហ   សេះសារដំរី
ក្រឡេកក្រឡាស់ក្រៃក្រោយ ។

២៩៥៩. ឈោកឈាក់ភាន់រន់ខ្វាដម្តោយ   ដើយដែរប្រែក្រោយ
លលោលលាំងងែរងា ។

២៩៦០. ហោតឡើងផាប់ផុងព្រឹក្សា   អសោកសាខា
បំពេនទូវនគ្គ្រដ្ឋជ្វាត់ ។

២៩៦១. ដូចកលនាគបាសពេនពាត់   ឆ្វាយច្រើនពាន់ភ្លាត់
ដឹកល់ដំកើងអាត្មា ។

២៩៦២. យក្សបាញ់បាចសរសោះសា   ដូចភ្លៀងពេញមហា
មហាវេហាសខ្វាយខ្វូរ ។

២៩៦៣. ពុំព្រើប្រួញអង្គពានរ   ឯកដោតអស់សរ
នោះដាបន្ទាយជុំជិត ។

២៩៦៤. មើលទៅអស់ពលហើយគិត   អាតន្ត្រជិត
ក៏ដកប្រឫងចេស្តា ។

២៩៦៥. នោះបីអញខឹងខំពាធា   ភ្លាញអស់យក្សា
ក៏លុះមរវិនាសនៃ ។

២៩៦៦. ភាប់ពៃតន្ត្រជិតពុំក្ស័យ   ពុំលុះតេជនៃ
ៃនអញពិឃាតពុំបាន ។

២៩៦៧. អញទូវឆ្វ៉ាងក្រែងយូរពាតិមាន   ពុំងាប់វិជ្ជាន
ព្រះបាទនារាយពង្សក្សត្រ ។

២៩៦៨. នេះតម្រូវស្តេចទសគ្រីវក្តាត់   សួរអញទៅថ្វាត់
ថ្វាត់ដូចព្រះរាជអាជ្ញា ។

២៩៦៩. ឯងនោះក្រុងត្រីទូយក្សា   នាំព្រះជីដា
ជុំនិតនៃតន្ត្រជិតឯង ។

២៩៧០. មទជាចាស់ទុំត្រឹទូព្រេង   បារម្ភក្រក្រែង
ប្រយោជន៍ប្រយ័ត្នកេរតិឆ្ងាយ ។

២៩៧១. ឆ្វន់ឆ្វររស់អាជិអតិក្រាយ   អញ្ញាស្រីយស្រាយ
ពាហុលពហោស្រែងស្រាប់ ។

២៩៧២. ថ្លែងជាសូមព្រះអង្គស្តាប់   អញ្ញុំទូវក្រាប់
ដំណើរដំណាលជុំជាតិ ។

២៩៧៣. ដើមឡើយព្រះពាយោនាថ   សិទ្ធិសក្តិសល់ខ្វាត
ទូវកេរ្តិ៍សមះបារមី ។

២៩៧៤. មានភរិយានាមនាងស្រី   អញ្ជនទេវី
ពិសេសសពិសុទ្ធកល្យាណា ។

២៩៧៥. បង្កើតជាអង្គហនុមាន   មហិមាមោហការ
ក្រោកនិស្រុកបលក្ខណា ។

២៩៧៦. មានរន្ធកណ្ដាលកំពា　　　មានព្រះសុរិយា
ទាំងពីរដណ្ដប់មណ្ឌល ។

២៩៧៧. ក្នុងមាត់បានមានមង្គល　　　បើបបាទៀងយល់
ព្រះសុរ្យត្រាចះចន្ទ្រចែង ។

២៩៧៨. ដូទាំងទិសានុទិសស្ដែង[1]　　　តេជោជ័យរែង
កំបែងកំបឹងបានមាន ។

២៩៧៩. បើព្រះអង្គពិឃាតបាន　　　ព្រះអាទិត្យស្ថិតស្ថាន
ទាំងពីរដណ្ដប់នោះនៃ[2] ។

២៩៨០. ទើបព្រះអង្គអាចឲ្យភ័យ　　　បានមាននោះក្ស័យ
នូវតេជអំណាចព្រះបាទ ។

២៩៨១. គាត់បុត្រព្រះពាយោនាថ　　　ពុំដែលពិឃាត
ព្រះពាយនូវពលល្មុះមរ ។

២៩៨២. ព្រះអង្គឯងអាចឲ្យបរ　　　រាជរថមកឈរ
ក៏មរវិនាសពលយក្ស ។

២៩៨៣. បោកបោះរាជរថបែកបាក់　　　ខាងក្ដោយខ្លាយខ្លាក់
ទាំងគ្រឿងអាវុធខ្ចាត់ខ្ចាយ ។

២៩៨៤. ស្លុះនាក់ទាំងអង្គអតិកាយ　　　ដួលថ្កាស់អន្តរាយ
សន្លប់ជំប្រប់ជ្រុលជ្រក ។

២៩៨៥. ទាំងសបាសកុមារបុះមក　　　រាជបុត្រជ័ពន្លក
គាត់ដាប់ច្រដាច់អន្តរាយ ។

២៩៨៦. ស្ងួមទានកុំព្រះអង្គគិតឆ្ងាយ　　　ទុំខ្លៅវិះថ្វាយ
ពុំជេរនូវព្រះជិន្ទា ។

២៩៨៧. ឯងនោះឥន្ទ្រជិតឆ្លើយថា　　　អរព្រះដ៏ជា
កំនិតគំនាប់គួរគិត ។

២៩៨៨. នេះឥឡូវមោះយើងតាំងចិត្ត　　　ស្លាប់រស់ពុំគិត
កំណាំងក្របីឬទ្ធិសាយ ។

២៩៨៩. ឥន្ទ្រជិតជាតិជាអសូរកាយ[3]　　　យក្សាសម្គាយ
ក៏ក្រៀវបិ៍ក្រោធសោះសា ។

២៩៩០. ដូចភ្លើងបាក់កល្បមហិមា　　　ដេះក្ដួងទុំភ
ទ្រះទុះខ្ទុនថៃ ។

២៩៩១. ខុនបរិពាររពលក្រាស់ក្រៃ　　　ដើមកពេញញូ
កណ្ដាលដីរង្គពសុធា ។

២៩៩២. ឥន្ទ្រជិតកោះសរសក្តិថ្លា　　　ថ្លែងជានានា

(1) MBN : dāṃṅ dvār dissādis staeṅ
(2) RIB : dāṃṅ sām sip bīr noḥ nai
(3) RIB : isūrakāy

អនន្តអនេកវិតរូត ។

២៩៩៣- ហនុមានអស់ឲ្យស្មៀមស្ងួត ប្រួញឲ្យយក្សព្រួត
នាគាអនេកច្រើនជាន់ ។

២៩៩៤- ពលយក្សាសុរបួនពាន់ ជ្រោមជ្រែងចូលកាន់
ក៏ជាប់ប្រទាញរង់ទៅ ។

២៩៩៥- ហនុមានក្លាញក្រាបនិត្យនៅ ណោណោតផាក់ភ្លៅ
អសុរក៏ដួលបីរនាប ។

២៩៩៦- យក្សប្រែប្រាណរឹងបីក្រឡាប់ ដាលដោះល្មើងផាប់
ក៏ជាប់ប្រទាញរង់ទៀត ។

២៩៩៧- ក្ឈាន់ស្គរសត្វជីតក្រាត រឹងទំសង្កៀត [1]
សន្ធុងសិរសាទើបបាន ។

២៩៩៨- ទៅដល់មណ្ឌលរាជស្ថាន ថ្វាយភាពប្រធាន
សំដែងនូវតេជចេស្ដា ។

២៩៩៩- ទសមុខមារអារមហិមា សរសើរដ៏ឫទ្ធា
នៃតន្ត្រដិតជាញជ័យ ។

៣០០០- ក្រុងភាពត្រេកអរពេកក្រៃ បន្ទូលជាវៃហា
ម្ហាលអស់យក្សាយោធា ។

៣០០១- ចូរគ្នាយើងយកនូវស្វា ជាប្រែនេះណា
ចេញទៅសម្លាប់ឲ្យដាច់ ។

៣០០២- ខ្លះសោតយកដឹងគ្លរស្ដាប់ ខ្លះសោតព្រួតចាប់
ឲ្យខ្ជាប់ហើយខ្លះពុះច្រូង ។

៣០០៣- ខ្លះដំក្បាលនឹងអន្លូង ខ្លះច្រាសច្រំផ្លូង
ខ្លះយកអង្រែស្លាប់ដែក ។

៣០០៤- មកបុកក្បាលនោះឲ្យបែក ផ្លាយខួរបីសញ្ជែក
ហើយហែកដៃញែកភោក្តា ។

៣០០៥- ក្សិរណានោះពេជ្ឈឃាតអសុរា ទាំងចតុសហស្សា [2]
ក្រហាក្រតើនខ្ញុំខ្ញាន់ ។

៣០០៦- ទាញរង់ទៅទាំងបួនពាន់ ជ្រោមជ្រែងចូលកាន់
ក្រញឹកកន្ត្រាក់ហនុមាន ។

៣០០៧- រង់ទៅទាល់ក្រៅរាជស្ថាន យក្សខ្លះគោះគាន
សំពងដំបងដែកដំ ។

៣០០៨- ផ្ដេកផ្ដាក់ខ្លះដាក់ខ្លះច្រំ ខ្លះគ្រងដឹងដំ
ត្រូវឯងក៏ពុះសិរសា ។

៣០០៩- ពុំព្រឺហនុមានមហិមា ប្រឹងប្រាណសោះសា

(1) MBN et RIB : saṅghīet
(2) RIB : dāṃṅ dasasahassā

ក្រឡាប់ក្រឡាស់វិលវៃ ។

៣០១០- ដក់ដំបងដែកពីដៃ ដាលដេញនិរភ័យ
ក្រមូសក្រវីវាយយក្ស ។

៣០១១- ខ្លះដួះស្លាយត្បូងខ្លះបាក់ ភ្លៅភ្លាត់នូវសន្លាក់
រង្កាប់រង្គើគ្រប់គ្នា ។

៣០១២- ខ្លះស្លាប់រស់រងវេទនា ហនុមានធ្វើជា
សំងំសំងួតស្ងៀមនៅ ។

៣០១៣- យក្សស្រោមរោមពោមពួលទៅ សោកាន់នឹងនៅ[1]
ក៏យកអង្រែត្បាល់បុក ។

៣០១៤- ហនុមានតតភ័យតតុក សើចលេងបីស្រណុក
ស្រដីនឹងពាក្យពាណោ ។

៣០១៥- ជាវៃហអស់យក្សមុខ្មៅ មឹងមករោមពោ
វិវល់រចល់តតការ ។

៣០១៦- ស្អូវជាតិខ្លួនខ្មៅអន្ធពាល ស្អូស៊ើអាគមមារ
មឹងយកឯដែកដាល់ពេជ្រ ។

៣០១៧- កំហាល់តុំដឹងកលកិច្ច កំនិតមឹងតិច
កន្លៀលស្លូវតតត្រើយ ។

៣០១៨- វាខ្ចិលព្រួយចិត្តអញហើយ អញ់លាក់អ្វីឡើយ
តិហាកកម្រស្លាប់ឆាប់ ។

៣០១៩- បើមឹងជប់ឲ្យអញស្លាប់ មឹងទៅទូលប្រាប់
អសូរតសូរលង្កា ។

៣០២០- ឲ្យយកកាសាយមណា[2] ខៀនព្រៃជាៗ
ប្រលក់នូវប្រេងព្រួតរុំ ។

៣០២១- ដុយសែនសហាស្សដាក់ដុំ ខ្លួនហើយមឹងឆ្លុំ
អគ្គីមកដុតឆុររេះ ។

៣០២២- នោះនែអញស្លាប់ឯងអេះ ហារមឹងមិនដេះ
លលាក់លលើហោហោ ។

៣០២៣- មឹងព្រួតម្ដេចដោយតេដោ ដើយជាញឯកោ
ជយានុភាពដ៏កម្លាំង ។

៣០២៤- ក្បិណនោះហនុមានតើចឆាំង ត្បាល់ដែកខ្មែខ្ញុំង
ក៏ខ្ចប់ទំលាក់បែកបាក់ ។

៣០២៥- ឆាប់អង្រែដែកដេញវាយយក្ស ពលយក្សបែកបាក់
ពន្លឺកពន្លឹកព្រាត់ព្រាយ ។

(1) RIB : sar bǎndh niṅ nau
(2) MBN : oy yak kāsā yammanār
RIB : oy yak kāsāvǎy munā

៣០២៦- អស់យក្សាសូរសម្លាយ គក់ទ្រូងបីប្រញាយ
រន្ធត់ហឫទ័យបីជំប្រេប់ ។

៣០២៧- ផ្អកផ្អោបក្រួញក្រោបបីសញ្ជប់ ភិតភ័យស្លែងស្ងប់
ក៏រត់ទៅទូលទសកណ្ឋ ។

៣០២៨- អស់យើងខ្ញុំទាំងប្អូនពាន់ ជ្រើមភេមធុលកាន់
អង្រែងដែកបុកពានរ ។

៣០២៩- ពានរឈរប្រឹងកាដករ ហែក្រោយងាងរ
បរិវគឺកេសរសីហា ។

៣០៣០- សីហានាទរូបរុងនូវឫទ្ធិ ស៊ើចស្រួលបីស្រដី
តិភោះនូវស្មូរសារសព្ទ ។

៣០៣១- ពានរព្រៃរឹងបីបង្គាប់ បើជប់ឲ្យស្លាប់
សម្លាប់នូវទេជអគ្គី ។

៣០៣២- ប្រើយកសំពត់តន់ផ្លី ជ្រើលក់នូវព្រៃងៃ
មករុំជុំអគ្គហនុមាន ។

៣០៣៣- រុំរួចអស់អគ្គាប្រាណ ច្រើនពាន់កុំបីមាន
ចន្លោះទំនេរនូវសំពត់ ។

៣០៣៤- ស្រេចហើយឲ្យផ្ដុំភ្លើងដុត ឆេះឆាប់ក្រោកង
រលត់រលាយអាត្មា ។

៣០៣៥- ភាពស្ដាប់ទំនួលយោធា ត្រេកសោមនស្សា
ក្បួរមកក្សាន្តព្រះរាជហឫទ័យ ។

៣០៣៦- ហោតុខ្លាំងហោហាក្រាស់ក្រៃ ពុំដឹងនូវប្រល័យ
ប្រលប់ពិភពលង្កា ។

៣០៣៧- ដាតាប់ដូចពាក្យវាចា ត្រាស់ប្រើអសុរា
អមាត្យប្រសាចរត់ច្នាត់ ។

៣០៣៨- ដញ្ជូនសំពត់ច្រើនក្ដាត់ ពីឃ្លាំងសែនស្ដុក
សហស្សមករុំអគ្គា ។

៣០៣៩- ហនុមានព្រៃព្រាណកាណ រូបរូបពង្ហា
នូវមាយាទិព្វបីបំបាំង ។

៣០៤០- សំពត់ទាំងទូទសឃ្លាំង ពុំគ្រាន់ឡើយទាំង
ព្រះស្មុំមួយមុឺនហុកពាន់ ។

៣០៤១- យកសំពត់គ្រប់ករការ មកជួយពុំគ្រាន់
ដោយតេជទិព្វមន្តមាយា ។

៣០៤២- រឹងប្រួតរឹងរុំរួមា ច្រើនពាន់មហិមា
យល់ជាពុំគ្រាន់ផងសោត ។

៣០៤៣- ហនុមានថាទ្វើយយក្សសោត[1] មិនទុកខ្ចីសោត

(1) MBN : thā ţoy yakkh chot
RIB : thā tāy yaks chot

សំពត់មន្ទាគិរី ។

៣០៤៤- ទាំងស្បៃឲ្យដៃនៃទេវី នោះតើទុកថ្វី
មិនយកមកឲ្យពេញ ។

៣០៤៥- អមាត្យរត់ទៅទូលវិញ នាងមន្ទាគិរីមិញ
ពុំអាចនឹងទាស់ឡើយហោង ។

៣០៤៦- ហេតុនាងឈឺបុត្រកន្លង ឲ្យទៅបរចង់ (1)
សម្លាប់ពានរឲ្យក្ស័យ ។

៣០៤៧- អមាត្យបានសំពត់ស្បៃ រួតរត់ឆាប់ក្រៃ
កម្លាំងនៃអមាត្យមារ ។

៣០៤៨- ស្រេចរុំភ្លុំភ្លើងដុតដាល ឆេះទៅច្រាស់ច្រាល
រន្ទាលរន្ទះលេចឡើង ។

៣០៤៩- ហនុមានបរិយាវរឹងជើង នេរភិទាំងភ្លើង
លោតឡើងកណ្ដាលវេហា ។

៣០៥០- ស្រែកគ្រាមហើយក្រុងភពណា ប្រយ័ត្នលង្កា
នឹងមានបង្អើលភ្លើងភ្លាត់ ។

៣០៥១- ក្បួនណាលោះលើប្រាសាទចាត់ រុងរឿងរូរត្ន
សុវណ្ណពិចិត្រស្រោងស្រួច ។

៣០៥២- ឆេះតុរបីគ្រឿងរ (2) ដាលជួច ដាលដោយជ័ត្រជួច
ក្រលួចគគីកបីត្រឡប់ ។

៣០៥៣- ខ្ទៅខ្ទួលដង្កូលជ្រែងជ្រួញ អោរអាវឡើងឡប់
គគ្រឹកគគ្រែងផ្លាក់ផ្លាយ ។

៣០៥៤- ផ្ទុះផ្ទាត់បែកខ្ទាត់ខ្ទូរខ្ទាយ ផ្កាភ្លើងព្រាត់ព្រាយ
ក៏ច្រាលច្រវាត់វេហា ។

៣០៥៥- ជួចដាលភាលភលមហិមា គ្រប់គ្រឹះយក្សា
រំជួលហាហាវនូវចំហាយ ។

៣០៥៦- អគ្គីភ្លើងភ្លឺឡើងព្រោលផ្ទាយ ទៅទាល់ស្នូកនាយ
ត្រជួចត្រជះបីសន្ធៅ ។

៣០៥៧- ដាលដល់មណ្ឌលសំនៅ ភពណាសូរក្តៅ
ក៏លោតរត់ចេញភិតភ័យ ។

៣០៥៨- ឆេះទាំងមែនមែកវិចិត្រថ្លៃ ឆេះគ្រណាបន្ទំនៃ
មណ្ឌលមន្ទាគិរី ។

៣០៥៩- តក់ស្លុតស្លាំងការផ្សារស្រី ភិតតតស្នារតី
រវល់រជល់ច្រាស់ច្រាល ។

៣០៦០- គគ្រាំខ្ទុះខ្ទាំបីញញ័រ រួតរត់ជំបដា

(1) RIB : oy dau putr caṅ
(2) RIB : traṭūr

បញ្ជាបបើបពោរពូន ។

៣០៦១. ខ្លះរត់រកទ្រព្យបីដណ្តួន ខ្លះតៀងតាកូន
រវើយកររយាយផ្លាក់ស្បៃ ។

៣០៦២. លុះណាញមណ្ឌលទីទៃ អស់ទ្រព្យឥតនៃ
ប្រល័យវិនាសអន្តរាយ ។

៣០៦៣. អស់ព្រះស្មុំស្និទ្ធសម្លាយ កក់ករទ្រូងស្ដាយ[1]
ទ្រំបោកទ្រហឹងបីធំប្រប់ ។

៣០៦៤. ទាំងទុសមុខងាររស្អុល់ស្អប់ អៀនឯងបីសញ្ជាប់
ដញ្ជីងតុំចេញជរជា ។

៣០៦៥. យានុមានឯកអង្គមហិមា រិងផ្កានភាជា
សំដែងនូវប្រាជ្ញាពល ។

៣០៦៦. ដោយពោះមាយាផ្ញើកល ភាតាខ្លៅតុំយល់
អំពើនូវកិច្ចអន្តរាយ ។

៣០៦៧. ទៀបទូលអស់អាជីអភិប្រាយ ព្រះបាទព្រះនារាយ
ស្ដេចស្ដាប់ទំនូលយានុមាន ។

៣០៦៨. ត្រាស់ត្រេចធ្វើសទ្រង់ព្រះក្សាន្ត ជាបៃយាយានុមាន
កំនិតកំនាប់អញអរ ។

៣០៦៩. អញឲ្យមកុដកែវកងករ ផ្ទិមតាស្ត្រាភរណ៍
រង្វាន់នៃរាជដ៏ក្រៃបី ។

៣០៧០. យានុមានទិនអង្គសិរសី បង្គំនរបតី
ទទួលរង្វាន់រាជា ។

៣០៧១. អស់មន្ត្រីនូវយោធា គាល់ព្រះរាជា
បង្គំប្រណាម្យអភិវាទ ។

(1) RIB : gak' gar druṅ vāy

# កណ្ឌ ទី១៥

៣០៧២- ឯងនោះព្រះនារាយនរនាថ ស្តេចគង់គន្ធមាទ
ដ៏ថ្កើងលើព្រះពន្លាជ័យ ។

៣០៧៣- ព្រះរាមព្រះអនុជក្សត្រត្រៃ ពីរពង្សឫទ្ធិក្រៃ
ដ៏នាំក្របិន្ទ្រយោធា ។

៣០៧៤- ប៉ុនប៉ងបីបំណាងនូវយា- ត្រាត្រេតលង្កា
ពិភេក្ខរក្ខសនាយនៃ (1) ។

៣០៧៥- នេះតិឬ្យវយើងនូវលើកទ័ពជ័យ ដាក់ដល់ឆ្នេរឡ
សាគរគឺគង្គីរោ ។

៣០៧៦- មានទៃអស់ពលពាលិយា ជិតសិបអក្ខោ-
ភិនីនូវព្រុងដ៏ប្រមាណ (2) ។

៣០៧៧- យើងនូវចងថ្នល់ផ្លូវរួចបាន លុះលង្កាស្ពាន
បីប្រាបពិឃាតយក្ខា ។

៣០៧៨- សមស្តេចពលគិតគណនា ម្រាងរិះពន្ធា
សេលានូវផ្លូវជលធី (3) ។

៣០៧៩- ចាវហាសុគ្រីពរាជដ៏ក្របី ជាឯងជាតិ
ត្រកូលក្របិន្ទ្រសិទ្ធិពរ ។

៣០៨០- ញាំងបាដឹងដើមនាមករ ក្សត្រពង្សពានរ
នគរដៃទ្រង់ឫទ្ធិ ។

៣០៨១- យើងនូវឲ្យនាំសាររសុជរិត ស្នេហាស្អាលផ្តេកផ្តិត

(1) RIB : bidakkh rakkhā nāy nai
(2) RIB : pruṅ ṭa bramān
(3) MBN : mrāṅ riḥ bhasadhā
selā nūv dhuon jaladhī

ជាមិត្រមេត្រីស្នេហា ។

៣០៨២. យើងឲ្យនូវអញ្ជើញក្សត្រា ឲ្យមកតាំងការ
សេនីមុខមន្ត្រីពល ។

៣០៨៣. រួសរិះគន់គិតជងថ្កល់ រិះប្រការកល
ប្រយោជន៍ប្រយ័ត្នសឹកសារ ។

៣០៨៤. សុគ្រីពស្ដាប់ព្រះឱង្ការ ព្រះបាទភូវនាថ
នាភាយភាមាធិបតី ។

៣០៨៥. សុគ្រីពឱនអង្គអញ្ជលី ក្រញូងក្រាបសិរសី
បង្គំប្រណម្យទើបទូល ។

៣០៨៦. បពិត្រព្រះបាទតស្មូរ មានភជិត្រកូល
អំបូរក្សត្រពង្សពានរ ។

៣០៨៧. ឯកអង្គទ្រៃសទ្រង់នាមករ ជំទើនឫទ្ធីពារ
មហាជម្ពូភជា ។

៣០៨៨. កបកាយសោមសាយសោភា រូបរាងអង្គា
ពណាពន្លឺករឹងឫទ្ធិ ។

៣០៨៩. រោមស្មារវៃលមកុះស្និទ្ធ ក្រាស់ក្រៃជុំជិត
រលើបរលង់ក្រាស់ក្រាល ។

៣០៩០. រុងរឿងរស្មីបវិត្រកាល ដូចសូរ្យដែងដាល
សាយាក៏សាយយល់មក ។

៣០៩១. ដូចនៃសងសូរ្យដៃងចាំងពពក ដាលជិតដោយត្របក
ស្រពាប់មេឃមិឃ្លិនស្មៅ ។

៣០៩២. ជក្ខុរូបានទតទៅ ពោះនូវក្រោធបីក្រឡៅ
ក្រឡេកក៏ផេះបាត់បង់ ។

៣០៩៣. ពោះនូវដុំមពណ៌ពលពង្ស ពានរភជស្មើអង្គ
នៃក្រុងពាលីមហិមា ។

៣០៩៤. ដុំមកាលសប្តតាលនាគា ឆ្លួយមានឫទ្ធា
កំស្លួលនូវពិសដ៏ពិរោជ ។

៣០៩៥. នៅក្នុងសមុទ្រសាយសោត មែនមានដើមត្នោត
ប្រាំពីរក៏ជះលើខ្នង ។

៣០៩៦. ពោះនាគពេននៅសព្វជង់ ដើមតាលសោតហោង
ក៏វិលជង្គុំជុំនៅ ។

៣០៩៧. ពោះបីនាគនោះនឹងឃិចវែលទៅ ត្នោតតាំនឹងនៅ
ឡើយណាជាជួរទៀងភាយ ។

៣០៩៨. ដោយប្រវែងនាគវែងបីគប្លាយ ជំទឹកខួរខ្វាយ
ជញ្ជូយនៃដើមសប្តតាល (1) ។

(1) RIB : trajuor nai ṭoem saptatāl

៣០៩៩- ពាលីបោះទៅចាប់ក្បាល  នាគណើកពពារ
កំស្លួលនូវពិសបីប្រាកដ ។

៣១០០- ពាលីចាប់សិរនគ្គ  ស្វាយបត់បីបំពាត់
បំពេនជាភ្លែននាគឃ្មាន ។

៣១០១- ទោះបីនាគនោះនិត្យនៅស្ថាន  ពាលីបោះស្បាន
កំចាប់សង្កិនវង់ដេញ ។

៣១០២: ដើមតាលវាយជារួមវិញ  នាគនោះចាលចាញ់
រអានឹងពាលីលេង ។

៣១០៣- ពាលីកាត់យកជាខ្សែង  ស៊ើចស្រួលអរឯង
ពាំក្រែងពាំកោតប៉ុនសួង ។

៣១០៤- វិមហាជម្ពូរាជថ្ងើសឃ្លង់  បោះទៅលេងលង
និងសព្ទតាលនាគា ។

៣១០៥- សឹងបានដូចតេជក្រុងពា-  លីលេងបីលណា
លលេញដោយអស់អំពើ ។

៣១០៦- ក្សត្រតីរពាលពង្សស្ថានស្មើ  យកគ្នាជាភ្លើ
សម្លួតសំឡាញ់តតហ្លួង ។

៣១០៧- វិមហាជម្ពូរាជសោតហោង  មានមន្ត្រីច្បង
ពាហុឆ្វេងស្តាំអតិរេក ។

៣១០៨- អង្គអគ្គនាហ៊ឺនឯងឯក  ក្រុងពលបីអនេក
រក្សាពិភពមណ្ឌល ។

៣១០៩- ដួយឈ្មោះខុននីលអាស្ចរ្យ[1]  ដួយឈ្មោះខុននល
និមិលមានៈសីហនាទ ។

៣១១០- នៃបនិត្យជិតនឹងព្រះបាទ  ពុំដែលឃ្លាឃ្លាត
នឹងមហាជម្ពូរាជា ។

៣១១១- វិភាជមណ្ឌលក្សត្រា  តសូរសក្កា-
ដិការអធិកថ្កើងថ្កាន ។

៣១១២- នៅខាងខែត្រខែមហេមពាន  សោយរាជក្សេមក្សាន្ត
សម្បត្តិសំបូណ៌បរិពារ ។

៣១១៣- បន្ទាយពេជ្រពាត់ពិស្ដារ  មណ្ឌបដោយតួរ
កំពែងប្រាំពីរជាន់ជិត ។

៣១១៤- តួរគោកថ្នាក់ថ្នល់ពិពិធ  សឹងពេជ្រពិចិត្រ
រថីវិថីសោតស្ដែង ។

៣១១៥- ផ្កាធូលផ្កាជងខ្វាត់ខ្វែង  ផ្កាពាត់ផ្កាពែង[2]

(1) RIB : ascal. (Il s'agit en fait de : ascāry)
(2) RIB : dhlā sūr dhlā jaṅ khvāt' khvaeṅ
dhlā bar sakkh saeṅ

កំពែងកំពស់ព្រះនគរ ។

៣១១៦- រុងរឿងក្បូនក្បឿងសត្តប - វិភណ្ឌាសីនន្ទរ
កំពាត់(1)សុមេរុភាជ ។

៣១១៧- ប្រាសាទប្រាំប្រាការ(2)ស្ពាន ព្រោងព្រាយបីជញ្ជាង
ជជែងជ្រុងវង្គតសត្តខណ្ឌ ។

៣១១៨- កែវកែមកញ្ចក់នូវកញ្ចន់ ដីភាយរត្នតន់
សុវណ្ណវិភោជរង្សី ។

៣១១៩- ស្តូបកាន្តកាម្ពុមុក្តាមណី បុស្សបូរជាតិ
ពិទាយពិទូរ្យទឹកវិល ។

៣១២០- បទុមភាគរត្នមហានិល ទទឹមស្រស់ស្រិល
មហាមរកតកែមមាស ។

៣១២១- ភ្លឺរន្ធកររូលោហិតដាលជាស មិស្សា(3)អភិភាស
ពពាលនពរត្នជំរេខា ។

៣១២២- គាប់ឆ្ងាយដើតឆាយឆាយា បទុមមាសមាលា
ត្រដឹបត្រដួចដោមដប ។

៣១២៣- ទ្វែនទិព្វពិមានមាសដ្ឋប់ ទ្វែត្រត្រុឌទូទ្រង់
ពិចិត្រនូវរូបយក្សយស ។

៣១២៤- ជម្ពាជម្ពូមបីប្រកាស់ ទាញទល់ខ្វែងខាស់
រូបមានវិញ្ញាណប្រឹងប្រែង ។

៣១២៥- ភ្ញីវល្លិពេនពាត់ស្ពាត់ផ្ទៃជី បុះបិតមាសទែង
ត្របកបទុមភាយភាល់ ។

៣១២៦- លាស់លេចក្នុងពេជ្រពិពណ៌ ស្ពាស់ស្ពះពព្រាល
ពព្រាយពពោងបីសន្ធៅ ។

៣១២៧- លលាមពព្លាមពព្លៅ(4) រុងរឿងផ្លុះផ្លៅ
រលមរលប់ស្មើរស្រក់ ។

៣១២៨- ទែនកែវកោមលទែនទុក(5) ប្រាង្គប្រាសាទសុខ
មន្ទីរមណ្ឌលផ្លៅផ្លាក់ ។

៣១២៩- ផ្លិតផែសែងខាងខាត់សាក់ ខ្ពស់ខ្ពើយជ្រែងជ្រាក់
កំព្រាល់នៃក្រោមពិតាន ។

៣១៣០- ពួកព្រែព្រាំព្រុយមាសមាន សក្តិសមភាពស្ពាន
រូបមានទិព្វទេពបីបន្ទំ ។

៣១៣១- ត្បូងត្រដៀយត្រែស័ង្ខសម ស្មរសត្វបីរងំ

(1) RIB : kă sbāt
(2) MBN et RIB : prakār
(3) MBN et RIB : maṅsā
(4) RIB : balhau
(5) RIB : rịṅ thkoeṅ thkal' kos daen duk

ប្រគំបំរេរភរិយា ។

៣១៣២.　ព្រៀងព្រួចក្រ ល្អចនោះណា　　ស្បូរនោតសមគ្នា
　　ត្រសាក់ព្រះពាយបីរំភើយ ។

៣១៣៣.　ព្រឹះព្រិចកាញ្យកិច្ចផ្លាស់ផ្ដើយ　　ញូវេចល្វេងល្វើយ
　　ស្រងាត់មធូរសូរសារ ។

៣១៣៤.　ប្រាសាទមីមួយមានគូរ　　ប្រាំពីរជាន់វែងកងា
　　កុំព្យេសោសព្វសត្តខណ្ឌ [1] ។

៣១៣៥.　ស្រីស្រីរប្ដារគាល់ណាណាន់　　មុខមន្ត្រីតាន់
　　កំណាន់កំណាត់គប់គាល់ ។

៣១៣៦.　ពលពានរនូវចោមចារ　　បរិវារទ្វារ
　　អនេកអនន្តគណនា ។

៣១៣៧.　រីមហាជម្ពូរាជឫទ្ធា　　ឆ្មុំស្ដើក្រលា-
　　បន្ទំទិញរត្នឯកអង្គ ។

៣១៣៨.　ស្ដេចស្ដាប់សុក្រីពវិរវង្ស　　ទទួលសរសើរក្រុង
　　មហាជម្ពូមហិមា ។

៣១៣៩.　ទើបស្ដេចទ្រង់ព្រះចិន្តា　　បន្ទូលត្រាស់ថា
　　អ្នកណានូវនាំរាជសារ ។

៣១៤០.　ក្សួរប្រើបានុមានជំនួតារ　　ថ្លើសទ្រង់ពណា
　　កម្ឡោះកម្លាំងនិរភ័យ ។

៣១៤១.　ខ្ជូនខ្ជួរមានអក្សារស្រីយ　　មោះចិត្តខ្លាំងពៃក្រ
　　ប្រុងប្រយុសតុំអត់ ។

៣១៤២.　ពៃក្រងគេឡើឲ្យខុសចិត្ត　　បានុមានរិងឫទ្ធិ
　　តុំគិតអំពើខ្ជូនស្រាល ។

៣១៤៣.　ចម្លងតាអ្នកនាំរាជសារ　　ពាក្យពេជន៍ខ្ជូនស្រាល
　　អត់ទិនយោយចមិសុចរិត ។

៣១៤៤.　នឹងយោងយកគេជាមិត្រ　　ល្អើកគេឲ្យខុសចិត្ត
　　កុំឲ្យបានុមានអត់យោង ។

៣១៤៥.　ក្សួរឲ្យអង្គទទៅជង　　មោះមោសក្ដាំគ្គង
　　គំនិតកំនាប់ខ្ជាប់ខ្លួន ។

៣១៤៦.　គាត់ចេះក្ដីក្ដាំសក្ដិស្លួន　　សក្តិវែងស្មើខ្លួន
　　នៃអង្គបានុមានស្នេហាស្និទ្ធ ។

៣១៤៧.　មោះបីអង្គតគាត់គិត　　បានុមានថូលចិត្ត
　　គំនិតនៃអង្គទគាប់ ។

៣១៤៨.　ស្រេចស្ដេចបន្ទូលសារសព្វ　　អស់ជំនុំស្ដែងស្ដាប់
　　ក៏ក្រាបព្រះរាជឱង្ការ ។

(1) RIB : sattaṭṭhān

៣១៤៩. ប្រើពីរពង្សពានរនាថ៍ នាំនៃរាជសារ
ត្រួចត្រង់ព្រះនៃព្រហោមពាន ។
៣១៥០. ជរចូលទៅគាល់ទៀបស្ពាន ជម្ពូរាជជ័យពិមាន
ប្រាសាទប្រសើររង្គើងក្រៃ ។
៣១៥១. ពីរពង្សពានរនិរភ័យ ចូលជូនទៅនៃ
អង្គអគ្គមហាសេនា ។
៣១៥២. ដណ្ដឹងថាវៃហាក្រុងពា- នរអ្នកយាត្រា
ពីណាមកដល់ទិញស្ពាន ។
៣១៥៣. ក្បីណានោះអង្គហនុមាន ឆ្លាវឆ្លងរឹងប្រាន
ថាវៃហាមហាមន្ត្រី ។
៣១៥៤. យើងនាំរាជសារសវនីយ សារសព្ទមេត្រី
មកពីព្រះបាទភរា ។
៣១៥៥. ចុះអ្នកនាំយើងយាត្រា ដោយព្រះអាជ្ញា
ដល់មហាជម្ពូរាជនាប់ ។
៣១៥៦. ជង់នោះមន្ត្រីស្ដែងស្ដាប់ ស្រេចនាំសារសព្ទ
ទៅទូលក្របិន្ទ្ររាជា ។
៣១៥៧. ស្ដេចព្យាសារសព្ទវាចា ស្ដេចប្រាប់ប្រើថា
នូវអស់កំណាន់ភ្នាក់ងារ ។
៣១៥៨. ប្រដាប់ទៀមព្រៃព្រះក្រាល វិសីយរាជសារ
និងឡើងទៅថ្វាយបង្គំ ។
៣១៥៩. រៀបរោងមុខមន្ត្រីជុំ តូរ្យតន្ត្រីយជុំ
សំរាប់សំរៀបភ្លេងសា ។
៣១៦០. ស្រេចទើបទទួលសារនាំ ឡើងគាល់ដោយចំណាំ
នៃរាជសារសព្វជង ។
៣១៦១. អង្គហនុមានក្រើសឈ្មោង តតភ្លឹកប៉ុនស្នង
ដំណើរវេលាប៉ិគគាត ។
៣១៦២. ប្រះប្រុងស្មារតីសីហនាទ ឡើងលើប្រាសាទ
សីមានៃអង្គអាត់ទូ ។
៣១៦៣. ក្រុងមហាជម្ពូពង្សក្សត្រ បើកបង្គួចរត្ន
ទង់ដៃងនូវតូរ្យតន្ត្រីយ ។
៣១៦៤. ស្ដេចត្រាស់ថាវៃហាជ័ក្របី នាំសារមកពី
បុរីនគរស្ថានណា ។
៣១៦៥. អង្គហនុមានទូលថា យើងឯងអាជ្ញា
ព្រះរាជសារបីសុន្ទរ ។
៣១៦៦. ពីព្រះរាមទេពជ័បវរ ត្រាស់ប្រើយើងចរ
មកយកព្រះអង្គនេះតន្លូវ ។
៣១៦៧. ឃ្លៀតស្ដេចចេញនាំពលព្យូហ ទៅស្លាញសត្រូវ

យក្សាលស្ការមណ្ឌល ។

៣១៦៨- ស្ដេចវិរៈរួសរាន់ចងថ្នល់ អញ្ជើញអស់ពល
ចិតសិបអក្ខោភិនី ។

៣១៦៩- ក្រែងតុំផ្លូននឹងដលដី ទើបព្រះនរបតី
ត្រាស់ប្រើយើងមកនេះតម្រូវ ។

៣១៧០- ស្ដេចស្ដាំមកមហាជម្ពូ ឲ្យនាំពលព្យូហា
ទៅជួយនៃសង្គ្រាមជ័យ ។

៣១៧១- ដល់យប់ទៅទាំងយប់នៃ ដល់ថ្ងៃទៅថ្ងៃ
ឆ្វាត់ៗដូចព្រះអាទិត្យ ។

៣១៧២- អង្គទហនុមានសោះសា ពាំគោតភាជា
មហាជម្ពូក្រោធក្រៃ ។

៣១៧៣- ទុំទាំងព្រះភក្ត្រក្សត្រថ្លៃ ពុះពោរហឫទ័យ
វិជ្ជលកំសួលក្ដៅក្ដាត់ ។

៣១៧៤- ក្ដៅក្នុងដើមទ្រូងប្រែមាត់ ដូចអគ្គីរួបហាត់
រូបហានក៏ផ្ទុះឆេះឆាប់ ។

៣១៧៥- ព្រះនេត្រច្រាលក្ដៅក្រាបក្រាប់ ព្ធសារពុំគាប់
ពាំគួរនូវសេចក្ដីសម ។

៣១៧៦- ដូចអ្នកយកអន្លង់ដែកដំ កន្លួយនាគដីធំ
មហាពន្លឹកយោរខ្លាំង ។

៣១៧៧- ពះគ្រោះយើងចាប់ស្វាខ្លាំង ទៅផ្ញើទោសទាំង
មហាទោសាសត្តដាន់(1) ។

៣១៧៨- ក្បួនណានោះពេជ្ឈឃាតខ្ទើខ្ទាន់ ផ្សូលចាប់ករកាន់
កន្ត្រាក់អង្គទហនុមាន ។

៣១៧៩- ទប់ទៅដល់ក្រៅរាជស្ថាន អង្គទហនុមាន
ពុំអាចរង្កៀកខាស់ខែង ។

៣១៨០- អត់ឲ្យពេជ្ឈឃាតបីសញ្ញែង ច្រកច្រូលណាងណែង
ផ្គាំពាំរៗដាន់ដាប់ ។

៣១៨១- ច្រុងដែកបង្គោនផ្ទាល់ផ្ទាប់ ឃ្លាងក្ដារដែកខ្ជាប់
នូវច្រូលផ្គាំពាំរដាន់ជិត ។

៣១៨២- ភាំងរុកសោសព្ធបុះបិត ដែកដាបប៉ប្រកិត
អាវុធពានរជោបជាំ ។

៣១៨៣- អង្គទហនុមានកាលកម្ម វិបាកឯងឯនាំ
មកត្រូវទីណាងជួយថ្ងៃ ។

៣១៨៤- អង្គទគិតខ្លួនដល់ភ័យ ស្រក់ទឹកនេត្រនៃ
ចៅហនុមានគិតភា ។

(1) RIB : sattaṭṭhān

៣១៨៥. យើងនាំរាជសារអាជ្ញា    ពីរអង្គរាជា
មកយកនៃមហាជម្ពូ ។
៣១៨៦. កុំបានគេទៅនេះឥឡូវ    ស្ដេចឡើយមកត្រូវ
នូវរាជទណ្ឌាធ្ងន់ក្ដាត់ ។
៣១៨៧. ឲ្យអាប់អាជ្ញាមហាក្សត្រ    យល់យើងមកបំបាត់
ព្រះយសព្រះកេរតិក្សត្រថ្លៃ ។
៣១៨៨. យើងបានដឹងព្រះហឫទ័យ    អស្ចារ្យស្រ័យវៃ
គំនិតគំនូរធ្ងន់ធ្ងរ ។
៣១៨៩. មកយកអាសាព្រះភូធរ    ស្ដេចឡើយមកមរ
ដំនៀលអាស្រូវអសារ(1) ។
៣១៩០. គួរខ្មាសក្ដីពីរប្រការ    មួយយល់យើងស្រាល
គំនិតឆោតតុកបង់សរិល ។
៣១៩១. មួយយល់យើងកាច់ព្រះកេរតិ    មហាក្សត្រទាំងពីរ
បន្ថោកបន្ថយព្រះអាជ្ញា ។
៣១៩២. ឥតលុះដល់បានគេក៏    ពុំរួចអាត្មា
ក្រិប្រាប់វិលទៅទូលបាន ។
៣១៩៣. ស្ដេចឡើយលោណាបង់ប្រាណ    ឯងឲ្យខុសខាន
ពាតិមានពុំបានដឹងដល់ ។
៣១៩៤. ឯងនោះមានុមានមើលយល់    អង្គទគិតសល់
សង្វៀតនូវទុក្ខទោសធំ ។
៣១៩៥. ចាថៃហាព្រះអង្គទកុំ    គិតប្រាណបារម្ភ
រិះខ្លាចពុំរួចឡើយណា ។
៣១៩៦. ឯារអញឯងយកក្រុងមហា –    ជម្ពូរាជនោះណា
ទៅថ្វាយព្រះបាទចក្រី ។
៣១៩៧. មានុមានប្រុងប្រាណស្មារតី    រិះរង់រាត្រី
គឺបង់និទ្រាស្ងាត់ស្ងៀម ។
៣១៩៨. ពលពានរនៅជុំរាយរៀប    ដេកស្ងួចនូវរបៀប
នៃករលីផលា(2) ។
៣១៩៩. ជបមន្តទិព្វមន្តគាថា    រំងាប់អស់ពលស្វា
ចិខ្ជាប់រនាបពុំភ្ញាក់ ។
៣២០០. មានុមានកាច់ផ្ដួលនូវផ្ទៃភាក់    ឃ្លាំងក្ដារបែកបាក់
កន្ត្រាក់ទាំងសោខ្វាត់ខ្វាយ ។
៣២០១. ដាច់វែកបង្ហោនអន្តរាយ    វែកជាធ្លាក់ធ្លាយ
ទំលាយលំអិតវិនាស ។

(1) RIB : ṭaṃnīel āsrūv āsā
(2) MBN : nai sandharalīphalā

